


# កម្រងឯកសារស្ដីពី
# ប្រពៃណី
# និង
# ទំនៀមទម្លាប់ខ្មែរ

មៀច ប៊ុណ្ណ



បញ្ហា **ជាតិពន្ធុវិទ្យា** និង **នរវិទ្យា**

ជំនួយដល់ការស្រាវជ្រាវ

ការផ្សាយរបស់អ្នកនិពន្ធ

ព.ស ២៥៥២ - **ភាគ ៣** - គ.ស ២០០៨

កម្រងឯកសារស្តីពី

# ប្រពៃណី និង ទំនៀមទម្លាប់ខ្មែរ

## ភាគទី ៣

បញ្ហា ជាតិពន្ធុវិទ្យា និង នរវិទ្យា






និពន្ធ
ចងក្រង និង រៀបរៀងដោយ
សាស្ត្រាចារ្យ **មៀច ប៉ុណ្ណ** មន្ត្រីនៅក្រុមជំនុំទំនៀមទម្លាប់ខ្មែរ
នៃ **ពុទ្ធសាសនបណ្ឌិត្យ**

ជំនួយដល់ការស្រាវជ្រាវ

**ការផ្សាយរបស់អ្នកនិពន្ធ**



ចាត់ចែងបោះពុម្ពផ្សាយ ដោយ
គ្រឹះស្ថានបោះពុម្ពផ្សាយ **អង្គរ**
Editions Angkor
២០០៨



កម្រងឯកសារស្តីពី

# ប្រពៃណី និង ទំនៀមទម្លាប់ខ្មែរ ភាគទី ៣


រៀបរៀង និងចងក្រងដោយសាស្ត្រាចារ្យ

**មៀច ប៉ុណ្ណ**



ទូរស័ព្ទ : ៨៥៥ ២៣ ៧២៤ ៧៣៥

ទូរសារ : ៨៥៥ ២៣ ២២៣ ៥២០

លសរខ - ១៣ : ៩៧៨-៩៩៩៥០-២-០២០-០

ISBN – 13 : 978-99950-2-020-0

# មាតិកាអត្ថបទ

ទំព័រ

# អារម្ភកថា

ទម្រាំមានឱកាសបានចេញផ្សាយ ភាគទី III នេះ ត្រូវស៊ីពេលវេលាជាច្រើនខែ។ ការយឺតយ៉ាវនេះ បណ្តាលមកពីកង្វះលទ្ធភាព ក្នុងការបោះពុម្ពផ្សាយតែប៉ុណ្ណោះ។ ខ្ញុំរំពឹងគិតថា អស់លោកបានរង់ចាំសៀវភៅ "កម្រងឯកសារ ស្តីពី ប្រពៃណី និងទំនៀមទម្លាប់ខ្មែរ" ភាគទី III នេះ យ៉ាងអន្ទះសា។ ដោយនៅតែស្មោះត្រង់នឹងការសន្យារបស់ខ្ញុំ ទើបខ្ញុំខិតខំបំពេញបំណងរបស់អស់លោកឱ្យទាល់តែបាន។ ដោយខ្មែរយើងជាប្រជាជាតិមានចំណាស់ជាងគេនៅភូមិភាគអាស៊ីអគ្នេយ៍នេះ ដូច្នេះហើយបានជាយើងសម្បូរស្នាមលម្អានខាងប្រពៃណីវប្បធម៌ មិនចាញ់អារ្យប្រទេសនានា លើសកលលោកឡើយ។

នៅក្នុងភាគទី III នេះ អស់លោកអ្នកអានបាននិទស្សន៍ឃើញអំពីទំនៀមទម្លាប់ របៀបរបបនៃជីវភាពរស់នៅ របស់បុព្វបុរសយើង នៅសម័យមុន ដែលពិតជាមានការខុសប្លែកច្រើនពីពេលបច្ចុប្បន្ន អាស្រ័យដោយការលូតលាស់រីកចម្រើនខាងបញ្ញាញាណ ចំណេះវិទ្យាសាស្ត្រ និងបច្ចេកទេស។ តើការសិក្សាស្រាវជ្រាវ អំពីវប្បធម៌ប្រពៃណី ទំនៀមទម្លាប់របស់ជាតិយើង មានប្រយោជន៍ប៉ុនណា ហើយមានសារៈសំខាន់កម្រិតណានោះ អស់លោកប្រាកដជាបានជ្រាប។

អតីតកាល គឺជាការចាប់ផ្តើម ដែលមានជួបឧបសគ្គជាច្រើន។ ជាមួយការចាប់ផ្តើម រមែងមានការវិវឌ្ឍន៍រីកចម្រើនជាជំហានៗ ដើម្បីមកតភ្ជាប់ជាមួយបច្ចុប្បន្ន។ ហើយរបៀបរបបនៃជីវភាពប្រជាជាតិយើង ចេះតែសុក្រិត

បន្តិចម្តងៗ ជាមួយនឹងចំណេះវិទ្យាសាស្ត្រ បច្ចេកវិទ្យា ដែលកាន់តែទំនើបទៅៗ ។

ខ្ញុំសង្ឃឹមថា អស់លោកពិតជាពេញចិត្ត រីករាយ និងស្គាល់ យល់ដឹងអំពីអតីតកាលរបស់សង្គមជាតិយើង ។

សង្ឃឹមថា អស់លោកពិតជាយោគយល់ ដល់ការខុសឆ្គងឯណានីមួយដោយអចេតនា ។

ថ្ងៃនេះ ខ្ញុំមានមោទនភាពណាស់ ដោយអាចបោះពុម្ពផ្សព្វផ្សាយជូនអស់លោកអ្នកអាននូវសៀវភៅ **"កម្រងឯកសារស្តីពី ប្រពៃណី ទំនៀមទម្លាប់ខ្មែរ"** ភាគ III បន្ទាប់ពីភាគ I (បោះពុម្ពលើកទី៣) និង ភាគ II ។

មោទនភាពនេះ កើតឡើងជាបឋមដោយសារខ្ញុំអាចបំពេញបាននូវពាក្យសន្យារបស់ខ្ញុំ ហើយបន្ទាប់មកទៀតព្រោះខ្ញុំដឹងថា អស់លោកឋិតក្នុងអារម្មណ៍រង់ចាំ ដូចទូរទស្សនិកជន ដែលទស្សនារឿង **"ភាគ"** ដូច្នេះដែរ ។ ប្រសិនបើ, ភាគ II និងភាគ III បានជាទីគាប់ចិត្តគាប់អារម្មណ៍របស់លោកអ្នកនោះ ភាគ IV ហើយនិងភាគក្រោយៗ អាចនឹងចេញជាបន្តបន្ទាប់ដរាបទាល់តែខ្ញុំក្រោកពីកន្ទេលពុំរួច និងម្រាមដៃខ្ញុំកាន់ប៊ិចលែងជាប់ ។ អាចមានមតិខ្លះសួរថា ហេតុអ្វីក៏ខ្ញុំដែលជាអ្នកនិពន្ធវ័យចំណាស់ម្នាក់ (អាយុ ៧៦, នាឆ្នាំ ២០០៧) ខំប្រឹងជំរុញខាងវិស័យនេះអីក៏ខ្លាំងម្ល៉េះ ? មូលហេតុ គឺ **មាន...** ។ សូមអស់លោកដែលមានស្មារតីស្នេហាជាតិ មាតុភូមិក្រឡេកមើលប្រទេសជិតខាងខ្លះ ដែលគេបម្រុងនឹងប្រលោមព័ទ្ធស៊ុតបាក់យើង គឺដំបូងគេបំបាត់វប្បធម៌ប្រពៃណី ទំនៀមទម្លាប់ សាសនា សិល្បៈ ...ជាមុនសិន រួចទើបគេបន្ត

ជម្រុលលេបយើងទាំងទឹក ទាំងដីទាំងមូលតែម្តងនៅពេលខាងមុខ។ ដូចខ្ញុំធ្លាប់ជម្រាបជាញឹកញាប់ តាមរយៈបទសម្ភាសន៍ តាមទូរទស្សន៍ វិទ្យុ កាសែតទស្សនាវដ្តីនានា នោះហើយថា គ្រប់ជាតិសាសន៍ សុទ្ធតែមានអត្តសញ្ញាណប្លែកៗពីគ្នា។ គ្រាន់តែក្រឡេកឃើញអត្តសញ្ញាណភ្លាម គេអាចដឹងជាមុនថាមនុស្សណាជាសាសន៍អីបាត់ទៅហើយ។ ជនជាតិខ្មែរយើងមានស្នាមលម្អានច្រើនណាស់ខាងវប្បធម៌ប្រពៃណី ទំនៀមទម្លាប់។ ដូច្នេះ សញ្ញាអស់ទាំងនេះហើយសម្រាប់ចាត់ទុកជាគ្រឿងសម្គាល់អត្តសញ្ញាណជា **"ខ្មែរ"**។ ចូរយើងកុំធុញទ្រាន់ក្នុងការអានប្រពៃណី ទំនៀមទម្លាប់ខ្មែរយើង ដើម្បីដឹងហើយកត់សម្គាល់ទុក ព្រមទាំងនិយាយប្រាប់ជាតិសាសន៍ដទៃឱ្យគេដឹងនោះ ជាការប្រសើរ។ នៅអែបនឹងស្ថានទូតនៃប្រទេសនីមួយ គេមិនភ្លេចតែងតាំងទីប្រឹក្សាខាងវប្បធម៌ប្រពៃណីទំនៀមទម្លាប់ និងវិស័យដទៃៗទៀត មានដូចជា ភារធារីខាងយោធា តំណាងពាណិជ្ជកម្ម ។ល។ ភាសានិយាយ ឬកពា សម្លៀកបំពាក់អក្សរសាស្ត្រ... នេះសុទ្ធតែជាផ្នែកដោយឡែកៗ នៃអត្តសញ្ញាណជាតិ។ ពិតមែនតែរបៀបរបបជីវភាព,សម្ភារៈប្រើប្រាស់ ចេះតែវិវឌ្ឍប្រែប្រួលពីបុរាណមកទំនើបក៏ពិតមែន ក៏យើងត្រូវតែខំ ស្វែងយល់អំពីប្រវត្តិប្រភព និងអតីត-កាលឱ្យបានដឹងច្បាស់ មុននឹងយល់ដឹងអំពីបច្ចុប្បន្ន និងអនាគត។

គួរយើងពិនិត្យតាមដានការវិវឌ្ឍន៍ប្រែប្រួលខាងសម្ភារៈ ឧទាហរណ៍ :

+ កាលពីមុនយើងប្រើ រទេះ កង់ឈើ, ឥឡូវរទេះកង់ឡាន

+ កាលពីមុនយើងប្រើ បំពង់ទឹកត្នោតធ្វើពីដើមឫស្សី, ឥឡូវធ្វើពីឡៅកៅស៊ូ ឬបំពង់ដែក,

+ កាលពីមុន យើងប្រើភ្លៀង នង្គ័លធ្វើពីឈើខ្លឹមបិទអំបែងខ្ទះ, ឥឡូវ ភ្លៀងធ្វើពីលោហសុទ្ធ ហើយការវិវឌ្ឍន៍នេះ ចេះតែបន្តទៅ កែប្រែឱ្យកាន់តែប្លែកទៅៗ ។

ខ្ញុំមិនដែលបានគិតថា មានជាតិសាសន៍ណាមានប្រព័ន្ធវប្បធម៌ ប្រពៃណីទំនៀមទម្លាប់ ច្រើនជាងខ្មែរយើងឡើយ ។ ហើយខ្ញុំគិតទៀតថា រហូតមកទល់ពេលនេះ អ្នកស្រាវជ្រាវសរសេរចងក្រងអំពីវប្បធម៌ ប្រពៃណីទំនៀមទម្លាប់ខ្មែរ សរសេរមិនទាន់អស់សព្វគ្រប់នៅឡើយទេ ព្រោះថាវិស័យនេះ តែងតែមានរបៀបរបប បែបផែនប្លែកៗគ្នាទៅតាមជនបទខេត្តខ័ណ្ឌ។ មិនមែនថានៅទីណាក៏ពិធីតែមួយធ្វើដូចគ្នា ដូចចាក់ពុម្ពនោះឡើយ ។

ក្នុងនាមអ្នកស្នេហាវប្បធម៌ខ្មែរ ខ្ញុំសូមអំពាវនាវឱ្យអស់លោកអ្នកអានមេត្តាជួយលើកកម្ពស់វិស័យនេះ ដោយជួយសរសេរឬជួយអភិរក្សនិងអភិវឌ្ឍន៍ទៅតាមមាគ៌ាវិជ្ជមានតាមការគួរ ។

អ្នកនិពន្ធ

**មៀច ប៉ុណ្ណ**

# សំនាំដើម

បណ្តាមាតិកាអត្ថបទ នៃសៀវភៅប្រពៃណីទំនៀមទម្លាប់ ភាគ III សុទ្ធតែពាក់ព័ន្ធទៅលើពិធីផ្សេងក្នុងជំនឿខ្មែរយើង ដែលត្រូវបានអនុវត្តឡើងក្នុងអំឡុងជាងកន្លះសតវត្សមុននេះ។ ប្រសិនបើមនុស្សដែលមានវ័យពី៦៥ឆ្នាំឡើងទៅ នោះ នៅតាមតំបន់នានានៃជនបទស្រុកខ្មែរ គេពិតជាបានជួបប្រទះនូវពិធីឬសកម្មភាពផ្សេងៗប្រព្រឹត្តិទៅក្នុងគ្រួសារខ្មែរ។ ទាល់តែពិនិត្យតាមដានចូលជ្រៅទៅក្នុងសហគមន៍ខ្មែរ នៅតាមជនបទឆ្ងាយៗពីមជ្ឈដ្ឋានអារ្យធមិនោះទើបយើងបានឃើញស្នាមលម្អានប្រពៃណីខ្មែរ ដែលតែងតែមានបន្សល់ទុកខ្លះៗនៅឡើយ។ ដំណែលទាំងនេះ ខ្លះគង់វង្សនៅ.ខ្លះទៀតបាត់រូបភាពទៅហើយ ព្រោះវាលែងសមស្របនិងកាលសម័យ។ ផ្នែកដែលបន្តអត្ថិភាពនៅ មានដូចជា ពិធីបុណ្យភ្ជុំបិណ្ឌ បុណ្យអុំទូក អកអំបុកសំពះព្រះខែ លយប្រទីប ពិធីបង្ហោះខ្លែង ច្រត់ព្រះនង្គ័ល...។ល។ តើអស់លោកមានដែលត្រិះរិះពិចារណាឬទេ ថាហេតុអ្វីបានជាពិធីទាំងប៉ុន្មាន វានៅគង់វង្ស?

នៅក្នុងភាគ III នេះផងដែរ ខ្ញុំបាន បញ្ចូលឯកសារពីរពាក់ព័ន្ធនឹងប្រពៃណីជនជាតិភាគតិច ដែលត្រូវបញ្ចូលជាជនជាតិខ្មែរផងដែរដើម្បីអស់លោកអ្នក អានស្វែងយល់អំពីវប្បធមិចាស់បុរាណសេសសល់មកពីសម័យ **"នគរភ្នំ"**។ ក្រៅពីនេះប្រពៃណីដ៏បរមបុរាណ នៃឫសគល់អារ្យធមិខ្មែរយើងតាំងពីសម័យក្រុង វ្យាធបុរៈ ដែលគេលើកតម្លៃខ្ពស់នូវវីរៈបុរសមានស្នាដៃឆ្នើមខាងការទាក់ដំរី។

ជាពិសេស ព្រឹត្តិការណ៍មួយដែលមានចំណាស់ជាងកន្លះសតវត្សន៍ដែល ឋិតនៅជាអាថ៌កំបាំងនៅឡើយ សម្រាប់មនុស្សខ្មែរ អាយុក្រោម ៧០ ឆ្នាំ។ នៅភាគខាងដើមឯកសារនេះ មានភាគព័ត៌មានទាក់ទងនិងរបៀបរបប សិក្សា នៅបឋមសិក្សា មធ្យមសិក្សាបឋមភូមិ និងទុតិយភូមិ ភ្ជាប់ជាមួយនឹង ចលនាកូដកម្មដ៏កងរំពងរបស់សិស្ស និស្សិត ក្នុងដើមទសវត្សទី ៥០។ ព្រឹត្តិ-ការណ៍ដ៏ចម្លែកៗទាំងនោះ ពិតជាបានជាទីគាប់ចិត្ត គាប់អារម្មណ៍របស់លោក អ្នកអានមិនតិចប៉ុន្មានឡើយ។ ខ្ញុំគិតតែម្នាក់ឯងថា កុំថាឡើយដល់ទៅមាន គំនិតសរសេរទុកជាកម្រងអនុស្សាវរីយ៍ នៃជីវិតសិក្សារបស់សិស្សមធ្យមសិក្សា ម្នាក់ដែលកំពុងមានវ័យ ៧៦ ឆ្នាំ អស់លោករួមជំនាន់ឯទៀតៗ ប៉ុន្មាននាក់ ដែលជាសហកាលិក (Contemporain) ក៏មិនទាំងរវល់និយាយរៀបរាប់ ប្រាប់សិស្ស និស្សិត ក្មេងៗសម័យនេះ ឱ្យបានដឹងតែបន្តិចក៏គ្មានផង។ ហេតុអ្វី ? ថាគេមិនខ្វល់ មិនចង់រវល់ក៏បាន ឬថា ទុកអតីតកាលឱ្យវាកប់បាត់ចោលទៅជា មួយនឹងពេលវេលាចុះក៏អាចថាបាន។

ឯខ្ញុំវិញ ខ្ញុំគិតឃើញថា អតីតកាលពោរពេញដោយចលនារីករវនៃ ព្រឹត្តិការណ៍ទាំងនោះ អាចជាកញ្ចក់ឆ្លុះមើលដំណើរវិវឌ្ឍន៍របស់សង្គមសិស្សនា សម័យមួយ ហើយអាចនឹងមានប្រយោជន៍ខ្លះៗចំពោះមនុស្សសម័យនេះ ក្នុង ការយល់ដឹងអំពីសភាពការណ៍ ជីវិតសិក្សារួមជាមួយនឹងព្រឹត្តិការណ៍នយោបាយ នាចុងសម័យអាណានិគមបារាំង។

សូមបញ្ចប់បុព្វកថានេះ ជាមួយនឹងសេចក្ដីថ្លែងអំណរគុណចំពោះអស់ លោកអ្នកអានដែលគាំទ្រស្នាដៃខ្ញុំ តាំងពីភាគទី I រហូតដល់ភាគទី III នេះ។

បើអស់លោកមិនយល់ទាស់ទេ ភាគទី IV និងភាគបន្តបន្ទាប់ នឹងចេញផ្សាយជាលំដាប់លំដោយរហូតជ្រុះប៊ិចពីដៃ។

សូមប្រសិទ្ធីពរ សិរីសួស្តី វិបុលសុខ ចូរកើតមានដល់អស់លោកអ្នកស្នេហាអក្សរសាស្ត្រជានិច្ចនិរន្តន៍។

**មៀច ប៉ុណ្ណ**

# ពិធីបុណ្យសុំទឹកភ្លៀង និងបុណ្យបូជាព្រះភូមិ សុំសេចក្តីសុខសប្បាយ នៅភូមិត្រប់

*ក.ក.ន. ទោះបីមកដល់ខែមថមសាធនេះហើយក៏ដោយ ក៏នៅតំបន់ជាច្រើនក្នុងព្រះរាជាណាចក្រកម្ពុជា មិនទាន់មានទឹកភ្លៀងធ្លាក់នៅឡើយ ជាហេតុធ្វើឱ្យមានការរាំងស្ទះដល់ការងារបង្កបង្កើនផលកសិកម្ម ។ ការរាំងរីសប្លែកពីធម្មតាដូច្នេះ ជាសេចក្តីទុក្ខកង្វល់របស់កសិករ ។ ស្ទើរតែនៅគ្រប់ជនបទនៃប្រទេសកម្ពុជា ប្រជាកសិករតែងតែមានជំនឿទៅលើវត្ថុសក្តិសិទ្ធិនានា ដែលគេសង្ឃឹមថា អាចបណ្តាលឱ្យមានភ្លៀងធ្លាក់ កាលបើគេធ្វើពិធីបន់ស្រន់ បែបណាមួយទៅនោះ ។ ព្រោះហេតុនេះហើយ បានជាកាលពីថ្ងៃទី ១៨ ខែមិថុនា ឆ្នាំ ២០០២ ក្រុមស្រាវជ្រាវនៃក្រុមជំនុំទំនៀមទម្លាប់ខ្មែរ របស់ពុទ្ធសាសនបណ្ឌិត្យ ដឹកនាំដោយសាស្ត្រាចារ្យ **មៀច ប៉ុណ្ណ** និងសហការដោយលោក **ម៉ម ឈុំ** លោក **សោម ចណ្ណៈ** បានចុះទៅធ្វើប្រតិបត្តិការស្រាវជ្រាវនៅភូមិត្រប់ (ហៅភូមិខ្លាខាំ) ឃុំសណ្តែក ស្រុកបាធាយ ខេត្តកំពង់ចាម ហើយមាន ឱកាសបានចូលរួមជាមួយប្រជាជននៅតំបន់នោះ ដែលបានមកប្រជុំគ្នា ធ្វើបុណ្យសុំទឹកភ្លៀង និងបូជាព្រះភូមិ ជាម្ចាស់ទឹកម្ចាស់ដី ដើម្បីបួងសួង បន់ស្រន់សុំទឹកភ្លៀងផង និងសុំសេចក្តីសុខសប្បាយផង នៅលើទីទួលមួយ ឈ្មោះ ទួលប្រាសាទ ដែលឋិតនៅចម្ងាយប្រមាណជា ១០០ ម៉ែត្រ នៅខាងលិចភូមិត្រប់ ។ ទីទួលនោះ លាតសន្ធឹងពីកើតទៅលិច មានបណ្តោយប្រហែល ៨០ ម៉ែត្រ ទទឹង ៥០ ម៉ែត្រ ។ នៅចុងខាងកើតទួល ក៏មានដើមពោធិ៍មួយដើមទៀត បែកមែក*

*សាខា ចោលម្លប់ត្រសុំត្រសាយ ផ្តល់ជម្រកដ៏ត្រជាក់ក្សេមក្សាន្ត ដល់អ្នកចូលរួមក្នុងពិធីបុណ្យ ។ នៅខាងត្បូង ឆៀងខាងលិច ដើមពោធិ៍នេះ មានប្រាសាទបុរាណមួយ បាក់បែកផ្តែកកំពូលអស់ទាំងស្រុង នៅសល់តែត្រឹមថ្ពៃខ្លោងទ្វារមកក្រោម ។ តួប្រាង្គបានសាងសង់លើពំនូកដី កម្ពស់ប្រហែល ២ ម៉ែត្រ ។ គឺជាប្រាសាទខ្នាតតូច រាងបួនជ្រុងស្មើ មួយជ្រុង១ ប្រវែង ២ ម៉ែត្រ ស្ថាបនាអំពីថ្មបាយក្រៀម ដោយមានក្បាច់ចម្លាក់លើថ្មភក់ ។ នៅចំកណ្តាលទួល មានអាគារចាស់ មួយគ្រឿងសង់អំពីឈើប្រក់ក្បឿង ទទឹងប្រវែងប្រមាណ ៨ ម៉ែត្របណ្តោយប្រហែល ១២ ម៉ែត្រ ជាទីសម្រាប់ជួបជុំគ្នា ធ្វើពិធីបុណ្យប្រភេទនេះជារៀងរាល់ឆ្នាំ ។ នៅថ្ងៃនេះ ប្រជាជន ឧបាសក ឧបាសិកា យ៉ាងច្រើនកុះករបានមកប្រជុំគ្នាធ្វើបុណ្យ នៅលើទីទួលប្រាសាទនេះ ។*

## I- ការរៀបចំ ត្រៀមលក្ខណៈសម្បត្តិសម្រាប់ពិធីបុណ្យ

តាមការសម្ភាសន៍ ជាមួយលោកតា **ភាន់ ពែក** អាយុ ៨២ ឆ្នាំ នៅភូមិចាន់គង់ ឃុំត្រប់ បានឱ្យដឹងថា : មានមូលហេតុពីរយ៉ាង ដែលនាំឱ្យប្រជាជននៅជុំវិញទួលប្រាសាទធ្វើពិធីបុណ្យនេះ :

ក- ជាបុណ្យប្រពៃណី ធ្លាប់ធ្វើមកហូរហែជាច្រើនតំណមកហើយ ដើម្បីបួងសួងបន់ស្រន់ សុំសេចក្តីសុខ ។

ខ- កាលណារាំងភ្លៀងនៅដើមរដូវវស្សា ដែលប្រជាកសិករពុំអាចធ្វើស្រែ ចម្ការ ដំណាំដាំដុះគ្រប់ប្រភេទបាន ។

ពិធីបុណ្យនេះ ពុំមានកំណត់កាលបរិច្ឆេទច្បាស់លាស់ទេ ប៉ុន្តែ ជាទូទៅ

គេច្រើនធ្វើនៅថ្ងៃពេញបូណ៌មី ខែជេស្ឋ ឬថ្ងៃសីលណាមួយ ក្នុងខែដដែល។ ក្រោយពីចាស់ទុំក្នុងបណ្តាភូមិ ដែលនៅជិតខាងទួលប្រាសាទ បានឯកភាពដាក់ថ្ងៃធ្វើបុណ្យ និងប្រកាសផ្សព្វផ្សាយឱ្យអ្នកស្រុកគ្រប់ភូមិបានដឹងឮ ជ្រួតជ្រាបហើយនោះ គ្រួសារនីមួយៗ បានត្រៀមអង្ករ បន្លែ ត្រីសាច់ លុយកាក់ សម្រាប់ធ្វើអាហារចំណី នំនែក ចង្ហាន់ព្រះសង្ឃ និងគ្រឿងរណ្តាប់សំណែនផ្សេងៗ។ តាមទម្លាប់តាំងពីដើមរៀងមក បុណ្យនេះ តែងប្រព្រឹត្តទៅក្នុងរយៈពេលបីថ្ងៃ និងពីរយប់ គឺ :

- ថ្ងៃចូលរោង
- ថ្ងៃទីពីរ
- ថ្ងៃបង្ហើយ (ថ្ងៃឆ្លង)

## II- ការរៀបចំពលីការព្រះភូមិគ្រួងពាលី និងព្រះពិស្ណុការ

នៅថ្ងៃចូលរោង តាំងពីព្រឹកព្រលឹម ឧបាសក ឧបាសិកា ចាស់ៗ បានមកជួបជុំគ្នានៅសាលាបុណ្យ ដើម្បីតុបតែងលម្អរោង ដោយមានផ្កាភ្ញីជារំយោល ឬធ្វើក្បាច់ស្លឹកដូងរំលេចតាមសសររោងបុណ្យ។ អ្នកខ្លះ ចងទង់ព្រះបត់នៅតាមជញ្ជាំង និងតាមទីធ្លាខាងមុខសាលាបុណ្យ។ វត្ថុដែលគេយកចិត្តទុកដាក់ ផ្តោតអារម្មណ៍ តាក់តែងលម្អដោយ រំភាយរំយោលក្បាច់ក្បូរ ប៉ាក់ឱ្យយ៉ាងប្រណីតជាងគេ គឺបុស្សបុកទាំងពីរ គឺមួយសម្រាប់ចៅអធិការគង់ និងមួយទៀត សម្រាប់ដាក់ព្រះពុទ្ធរូប គ្រឿងសក្ការៈបូជា និងគម្ពីរសម្រាប់អានទេសនា។ នៅខាងកើត និងមុខសាលាបុណ្យ គេបានរៀបចំសង់រោង អាសនៈ

ទេព្តា ៨ ទិស ដែលមានគ្រឿងសក្ការៈបូជា ដូចជា ស្លាធមិ ស្លាម្លូ ទៀនធូប ផ្កាភ្ញីចម្រុះពណ៌។ រីឯអាសនៈមួយទៀត ត្រូវបានគេសង់នៅចំកណ្ដាលទីទួលភូមិចាស់នេះ សម្រាប់បូជាក្រុងពាលី។ នៅលើរោងក្រុងពាលី គេបានរៀបចំគ្រឿងពលីកាផ្សេងៗ ដូចជា ស្លាធមិដោតស្លឹកម្លូ ២០ សន្លឹក បាយសី ៥ ថ្នាក់ ១ គូ ស្លាធមិដូងមួយ លាជ ១០០ ច្រនួច ស្លា ១០០ ម្លូ ១០០ ទឹកអប់ ២ ផ្តិល ដាក់អមខាងឆ្វេង និងខាងស្ដាំ។ ប្រដាប់ព្រះពិស្ណុការ ដែលមានពែ ៨ ជ្រុង ១ ព្រមទាំងរៀបសំពត់ ហូលផាមួង និងខោអាវក្រមា ឬក្រណាត់សំពត់សូត្រមានខ្នើយមួយដាក់នៅក្បាលកន្ទេល និងដាក់ទៀន ១ គូ ធូប ២ ខ្សុក ផ្កាឈូក ១ គូ ពីលើខ្នើយនេះទៀតផង។ នៅពីមុខគ្រឿងតង្វាយទាំងនេះ គេរៀបចំសំណែន គ្រឿងចង្អាប ១ ស្លក និងគ្រឿងបង្អែម ១ ស្លក។ នៅជិតនោះមានពែ ៤ ជ្រុង ដែលដាក់ចំណីចម្អាបបន្តិច និងបង្អែមបន្តិច ជាគ្រឿងសំណែន ចំពោះម្ចាស់ទឹកម្ចាស់ដី។ ពិធីសែនព្រេនបូជាតង្វាយនេះ សឹងកំដរទៅដោយសំឡេងតន្ត្រី ភ្លេងប្រពៃណី ប្រគំបទកន្សែងក្រហម ផាត់ជាយ នគររាជ។ កាលណាភ្លេងលេងបានមួយបទ គេធ្វើពិធីសែនព្រេនម្ដង ដោយពោលពាក្យបន់ស្រន់បួងសួង សុំទឹកភ្លៀងឱ្យបានបរិបូណ៌ និងសុំឱ្យផលស្រែចម្ការលូតលាស់ល្អ ព្រមទាំងឱ្យអ្នកស្រុកទាំងអស់ និងសត្វពាហនៈ បានសុខសប្បាយ កុំឱ្យមានជំងឺដំកាត់អ្វីមកយាយី បៀតបៀនបានឱ្យសោះ។ ចាស់ទុំបាននាំធ្វើពិធីសែនក្រុងពាលី និងសែនបូជាព្រះភូមិ ជាម្ចាស់ទឹកម្ចាស់ដី អាណាព្យាបាលលើទឹកដីតំបន់នេះ ជាគម្រប់ ៣ ដង ទើបចប់ពិធី ។

## III- ពិធីដង្ហែក្បួនប្រទក្សិណទួលប្រាសាទ

នៅវេលាព្រឹកប្រហែលម៉ោងប្រាំបី ព្រះសង្ឃបានឆាន់បបរ រួចឱ្យសីល និង សូត្រមន្តចម្រើនពុទ្ធជ័យមង្គល។ នៅវេលាម៉ោង១០ ក្បួនដង្ហែចាប់ផ្តើមហែប្រទក្សិណ ទីទួលប្រាសាទពាជុំ ដែលមានអ្នកភ្លេង ក្រុមឆៃយ៉ាំវាយស្គរនិងច្រៀងយ៉ាងពិរោះ ព្រមទាំងលោតចាក់ក្បាច់ កំប្លែងក្រមាច់ក្រមើម គួរឱ្យចង់ទស្សនាកម្សាន្ត។ លោកអាចារ្យ និងពុទ្ធបរិស័ទយ៉ាងច្រើនកុះករបាននាំគ្នាកាន់ផ្កាទៀនធូប ហែហាមគគ្រឹកគគ្រេង។ ក្រៅពីនោះ យុជន៤នាក់ ស្លៀកសំពត់ចងក្បិនពណ៌ក្រហម បាំងខ្លួសបួនដើរដង្ហែក្នុងចំណោមមហាជនប្រុសស្រីក្មេងចាស់ផងដែរ។ សំឡេងតន្ត្រីពិណពាទ្យបានបន្លឺស្នូរពិរោះរងំ ញ៉ាំងឱ្យក្បួនហែប្រពឹត្តទៅក្នុងបរិយាកាសឧឡារិក អធិកអធម ក្រៃលែង។

## IV- ពិធីទេសនា គម្ពីរ ច័ន្ទសុគីរសូត្រ

លុះព្រះសង្ឃឆាន់ពេលថ្ងៃត្រង់រួចហើយ លោកអាចារ្យបានចាត់ចែងនិមន្តព្រះអង្គធម្មកថិក សម្តែងធម៌ទេសនា។ តាមទំនៀមទម្លាប់អ្នកស្រុកនៅតំបន់នោះ ព្រះសង្ឃតែងតែទេសនា ដោយអានគម្ពីរច័ន្ទសុគីរសូត្រ។ គម្ពីរនេះមានតែមួយកណ្ឌប៉ុណ្ណោះ។ តាំងពីដើមដល់ត្រឹមពាក់កណ្តាល ខ្លឹមសារនៃគម្ពីរនោះសរសេរជាភាសាបាលីនិយាយពី ទសបារមីរបស់ព្រះពុទ្ធបរមគ្រូ និង ទេវានុភាពនៃអស់វត្ថុសក្តិសិទ្ធទាំងឡាយ។ នៅផ្នែកខាងចុងមានបកប្រែជាភាសាខ្មែរ នូវគាថាជាភាសាបាលី។

## V- ចម្រៀងឧទ្ទិសចំពោះព្រះភូមិ

បន្ទាប់ពីព្រះធម្មកថិកទេសនាគម្ពីរច័ន្ទសុគីរីសូត្រចប់ហើយ លោកអាចារ្យក៏បានសូត្រសេចក្ដីប្រកាសចំពោះព្រះភូមិ និង អារក្សអ្នកតាម្ចាស់ទឹកម្ចាស់ដីនាតំបន់នេះឱ្យជួយបង្អុរទឹកភ្លៀង ឱ្យបានច្រើនសម្រាប់មនុស្សលោកប្រកបរបរដំណាំដាំដុះ និង សុំសេចក្ដីសុខសប្បាយដល់មនុស្សសត្វនៅបណ្ដាភូមិទាំងប៉ុន្មានដែលនៅទីជិតខាងទួលប្រាសាទ ។ ចប់ពិធីបន់ស្រន់បួងសួងនេះហើយគេបានអញ្ជើញលោកយាយចាស់ៗចំនួន ១១នាក់ ឱ្យមកច្រៀងចម្រៀង ៣ បទគឺ :

ក- បទជើងព្រៃ

ខ- បទអុំទូកបេះល័ខ

គ- បទសារិកាកែវ

នេះជាទំនៀមទម្លាប់ដ៏ចម្លែក មួយរបស់បណ្ដាជននៅតំបន់ជុំវិញទួលប្រាសាទនេះ។ ទោះបីលោកយាយទាំងប៉ុន្មាននេះ មានអាយុជាង ៦០ទៅជាង ៧០ឆ្នាំ ហើយក្ដី ក៏ទឹកដមសំឡេងរបស់គាត់នៅតែពិរោះក្រអៅមិនចាញ់ក្មេងៗអាយុជាង ២០ ឆ្នាំ ប៉ុន្មានឡើយ។ បទចម្រៀងនេះ មានលំនាំជាបទប្រពៃណីបន្ទិច ជាបទចម្រៀងឈ្នួលបែបអ្នកខេត្តកំពង់ធំបន្តិច។ បទចម្រៀងទាំងនេះត្រូវបានថតក្នុងខ្សែអាត់រក្សាទុកជាឯកសារតទៅ។

## VI- សន្និដ្ឋាន

តាមការកត់សម្គាល់ និង សង្កេតជាទូទៅ ប្រជាជនខ្មែរធ្លាប់មានជំនឿ

ទៅលើ អនុភាពធម្មជាតិ ទៅលើអារុក្ខ អារក្សអ្នកតា ទៅលើព្រលឹងបុព្វបុរស ថាអាចនឹងជួយធ្វើឱ្យបំណន់ ឬ សំណូមពររបស់ខ្លួនបានសម្រេចដូចបំណង។ គេជឿថា រាល់ការបន់ស្រន់បួងសួង អំពាវនាវ អង្វរករដែលមានតង្វាយ សំណែនផ្សេងៗគួបផ្សំជាមួយផងនោះ នឹងត្រូវបានអនុភាពអ្វីមួយជួយបញ្ជូនទៅដល់ទេវៈ ឬព្រលឹងបុព្វបុរស ដើម្បីជួយឱ្យបំណងរបស់គេបានសម្រេច។ របៀបបន់ស្រន់ បួងសួង អំពាវនាវ នេះមានច្រើនរូបភាពណាស់ ហើយប្លែកៗទៀតផង ទៅតាមតំបន់ខេត្តខ័ណ្ឌនានា។ នៅស្រុកគីរីវង្សខេត្តតាកែវ គេធ្វើបុណ្យបួងសួងសុំទឹកភ្លៀងនៅទួលអ្នកតា គេលេងភ្លេងលៀងអារក្ស បញ្ជាន់រូបស្វារួចយកស្វាទៅជ្រមុជទឹក ៣ដង សួរថា "ភ្លៀង ឬ មិនភ្លៀង"។ នៅភូមិបឹងធំស្រុកអង្គស្នួលខេត្តកណ្តាល មានធ្វើពិធីបណ្តេញខ្មោចជំទាវហិនហោច សុំទឹកភ្លៀង។ នៅភូមិរកា ឃុំស្រយូវ ស្រុកកំពង់ស្វាយ គេធ្វើបុណ្យនៅទួលអ្នកតាបឹងផ្ទាំងរួមកំដរដោយពិធីប្រណាំងសេះ ថ្វាយលោកតាដើម្បីសុំទឹកភ្លៀង។ នៅទួលប្រាសាទ កាលពីមុនរបបខ្មែរក្រហម នៅថ្ងៃឆ្លងបុណ្យ គេក៏ធ្លាប់ធ្វើពិធីប្រណាំងសេះ ថ្វាយព្រះភូមិ ដើម្បីបួងសួងសុំទឹកភ្លៀងដែរ។ នៅភូមិរកា ឃុំស្រយូវខេត្តកំពង់ធំ គេបញ្ចូលខ្មោចជំទាវច័ន្ទស្រោតសុំទឹកភ្លៀង ។

## VII- លទ្ធផលនៃពិធីបួងសួងបន់ស្រន់

ព្រលឹងបុព្វបុរសក្តី អារុក្ខអារក្សអ្នកតាក្តី ទេវៈ ផ្សេងៗក្តី តែងស្នាក់អាស្រ័យនៅលើភ្នំ លើដើមឈើ នៅក្នុងព្រៃដែលមានដើមឈើណែនណាន់ក្រាស់ឃ្មឹក បង្កើតបានជារនាំងបរិដ្ឋានធម្មជាតិ ខៀវស្រងាត់នៅជិតខាងភូមិ

ឋានមនុស្សលោក។ ក្រោយពីមនុស្សលោកបានកាប់បំផ្លាញជម្រក លំនៅរបស់អារុក្ខ អារក្ស អ្នកតា ទេវៈ និង ព្រលឹងបុព្វបុរសឱ្យវិនាសហិនហោចអស់ទៅ ភាវៈទាំងនេះត្រូវវិនាសប្រាសឆ្ងាយពីមនុស្សលោក ម៉្លោះហើយការបែបន់ពុំសូវទទួលបានលទ្ធផលវិជ្ជមានឡើយ ពោលគឺៈ បន់ក៏បន់ វាំងក៏វាំង។ ប្រសិនបើគេនៅតែមិនទទួលបាន លទ្ធផលល្អពីការបន់ស្រន់បួងសួងនេះទេនោះ ដល់យូរៗទៅគេនឹងនឿយណាយ ឈប់ធ្វើហើយ គេច្បាស់ជាត្រូវពឹងពាក់លើមធ្យោបាយផ្សេងៗទៀត ដូចជាលើកទំនប់ទប់ទឹកទុក ឬប្រព័ន្ធប្រឡាយ ទាញទឹកពីទំនប់ពីអាងស្តុកទឹកមកស្រោចស្រប់ស្រែ... គេប្រើម៉ាស៊ីនបូមទឹក...បញ្ចូលស្រែ...ដល់ពេលនោះ ប្រហែលលែងមានពិធីបន់ស្រន់សុំទឹកភ្លៀងពីទេវៈ ពីអារុក្ខអារក្សអ្នកតា ពីព្រលឹងបុព្វបុរសទៀតហើយ... ព្រោះមធ្យោបាយប្រកបដោយបច្ចេកទេសវិទ្យាសាស្ត្រទំនើប តម្រូវបានតាមសេចក្តីត្រូវការ និង មានប្រសិទ្ធិភាពទៀតផង... ដល់ពេលនោះ វាលស្រែខ្មែរនឹងខៀវស្រងាត់ទាំងប្រាំងទាំងវស្សា... ហើយជីវភាពប្រជាជន ក៏ត្រូវបានលើកស្ទួយផងដែរ។

# មូលហេតុដែលនាំឱ្យមានខ្ទមអ្នកតានៅក្នុងវត្ត

## I- សេចក្ដីផ្ដើម

### - មូលបញ្ហា

នៅក្នុងពេលបច្ចុប្បន្ននេះ យើងអាចនិយាយបានថា ជាសកលភាវូបនីយកម្មពិភពលោកដែរ ក្នុងនោះយើងសង្កេតឃើញថា មានឥទ្ធិពលយ៉ាងច្រើនទាំងបច្ចេកទេស ទាំងវប្បធម៌ បានជ្រាបចូលពីប្រទេសមួយទៅប្រទេសមួយទៀត។ ចរន្តនៃការហូរចូលនេះហើយ ដែលនាំឱ្យមានទស្សនៈនិងព្រឹត្តិការណ៍ថ្មីៗកើតឡើង។ ទន្ទឹមនឹងមានបច្ចេកវិទ្យាថ្មីកើតឡើងច្រើនក៏ដោយ ក៏យើងសង្កេតឃើញថា ប្រជាជននៅតាមប្រទេសជាច្រើន នៅមិនទាន់បានបោះបង់ចោលនូវទស្សនៈជំនឿពីអតីតកាលរបស់ខ្លួននោះនៅឡើយទេ គឺពួកគេនៅតែបន្តគោរពជំនឿនេះ តាំងពីដូនតារហូតមកដល់ពេលឥឡូវ។

ជាក់ស្តែងប្រទេសកម្ពុជា ក៏ជាប្រទេសមួយដែលស្ថិតនៅក្នុងចំណោមប្រទេសខាងលើនេះដែរ។ ប្រជាជនភាគច្រើនក្នុងប្រទេសនេះ នៅតែរក្សាអបិយជំនឿមួយដែលយើងហៅថា **ជំនឿអ្នកតា** នៅស្ទើរគ្រប់ទីកន្លែងក្នុងផ្ទៃប្រទេស។ ទោះបីជាប្រទេសនេះបានផ្លាស់ប្តូរមកកាន់ពុទ្ធសាសនាហើយក្តី ក៏ជំនឿលើអ្នកតានៅតែបន្តដដែល។ អ្នកតាមិនត្រឹមតែឃើញមាននៅតាមផ្លូវតាមភូមិ តាមផ្ទះប៉ុណ្ណោះទេ តែលើសពីនេះទៅទៀត ជាពិសេស យើងឃើញមានការសាងសង់ខ្ទមអ្នកតានៅតាមវត្តអារាមពុទ្ធសាសនា បែបថេរវាទទៀតផង។

តាមពិតទៅ ព្រះពុទ្ធអង្គលោកបានសម្តែងថា សូមកុំជឿនូវរាល់ជំនឿទាំងឡាយណា ដែលមិនសមហេតុផល ។ ចុះជំនឿអ្នកតាវិញជាជំនឿសមហេតុផលឬអត់ ទើបបានជាប្រជាជនខ្មែរបែរជាយកជំនឿនេះមកដាក់រួមជាមួយវត្តពុទ្ធសាសនាទៅវិញ ?

## - គោលបំណង

ត្រង់ចំណុចនេះហើយដែលស្មេរខ្ញុំលើកយកបញ្ហានេះមកស្រាវជ្រាវ ដោយស្វែងរកចំណុចខ្លះ ដើម្បីបង្ហាញថា តើចំណុចទាំងអស់នោះឬ ដែលនាំឱ្យជំនឿទាំងពីរនេះអាចរស់នៅជាមួយគ្នាបាន ។ ព្រោះបើតាមទ្រឹស្តីទស្សនវិជ្ជាគេនិយាយថា" មនុស្សពីរនាក់ឬច្រើននាក់ អាចរស់នៅជាមួយគ្នាបាន លុះណាតែមានទស្សនៈស្របគ្នា" ។

ដូច្នេះខាងក្រោមនេះ គឺជាការបកស្រាយទៅតាមការសិក្សាស្រាវជ្រាវរបស់ខ្ញុំ ដោយខិតខំព្យាយាមពន្យល់ឱ្យអស់ចម្ងល់នេះ ដោយលើកយកចំណុចដែលដូចគ្នាខ្លះមកបកស្រាយ ។

## - វិធីសាស្ត្រក្នុងការស្រាវជ្រាវ

នៅក្នុងការងារសិក្សាស្រាវជ្រាវ ខ្ញុំបានជ្រើសរើសយកវិធីសាស្ត្រមួយ គឺធ្វើការប្រមូលនូវរាល់ឯកសារទាំងឡាយណា ដែលពាក់ព័ន្ធនឹងប្រធានបទនេះយកមកធ្វើការបកស្រាយ ។ នៅក្នុងនោះខ្ញុំបានប្រើប្រាស់បណ្ណាល័យជាមូលដ្ឋានគ្រឹះក្នុងការសិក្សាស្រាវជ្រាវ ។

រាល់ឯកសាទាំងឡាយដែលខ្ញុំបានប្រមូលចងក្រងមកហើយនេះ គឺខ្ញុំបានបែងចែកទៅតាមចំណាត់ថ្នាក់របស់វា ហើយធ្វើការវិភាគទៅតាមអត្ថន័យ

និងខ្លឹមសាររបស់អត្ថបទនោះ។

ដើម្បីឱ្យមានទម្ងន់ក្នុងការសិក្សាស្រាវជ្រាវនេះ ខ្ញុំបាទក៏បានធ្វើបទសម្ភាសន៍ខ្លះជាមួយលោកអ៊ុំ **មៀច ប៉ុណ្ណ** ដែលជាទីប្រឹក្សានៅក្នុងជំនុំទំនៀមទម្លាប់ខ្មែរ នៃវិទ្យាស្ថានពុទ្ធសាសនបណ្ឌិត្យផងដែរ។

## II- ការបកស្រាយ

### ១. ជំនឿទូទៅ

មុននឹងចូលដល់ការបកស្រាយខ្លឹមសារទាំងមូលតែម្តងខ្ញុំសូមណែនាំឱ្យស្គាល់ពាក្យ **អ្នកតា** ជាមុនសិន។ បើតាមសៀវភៅវចនានុក្រមរបស់សម្តេចសង្ឃ **ជួន ណាត** ត្រង់ទំព័រទី ១៨៥៥ បានសរសេរថា **អ្នកតា** គឺជាពាក្យហៅភូតបិសាចប្រុស ឬទេពារក្សប្រុស ដែលមានខ្ទមឬរោងអាស្រមជាលំនៅ ឬឥតលំនៅក៏មាន។ ទន្ទឹមនឹងនោះយើងក៏សង្កេតឃើញមានពាក្យ *អ្នកដូន* ផងដែរ គឺមានន័យថា ជាពាក្យសម្រាប់ហៅភូតបិសាច ឬទេវព្រឹក្សស្រី យាយទេពដែលមានខ្ទម ឬរោងជាអាស្រម ជាគូនឹងអ្នកតា។ ពាក្យនេះគេច្រើនហៅត១គ្នាថា *អ្នកតា អ្នកដូន*។ បើទោះបីជាអ្នកតាក្តី អ្នកដូនក្តី ឈ្មោះទាំងពីរនេះមានលក្ខណៈពិសេសមួយសម្រាប់ជាការគោរពពីប្រជាជន ហើយដែលត្រូវបានរក្សាទុកនៅក្នុងរោងខ្ទម ឬហៅថាអាស្រមជាទីលំនៅ ដែលយើងសង្កេតឃើញមានជាច្រើននាពេលសព្វថ្ងៃនេះ។

ពាក្យអ្នកតានេះ ត្រូវបានប្រជាពលរដ្ឋខ្មែរយកមកប្រើ ក្លាយទៅជាជំនឿមួយសម្រាប់ពឹងពាក់ ដែលជាកម្លាំងក្រៅខ្លួន នៅពេលពួកគេជួបប្រទះនូវ

អាសន្នអន់ក្រម្តង១។ ត្រង់ចំណុចនេះ គួរយើងជាមនុស្សសម័យថ្មី បែបវិទ្យាសាស្ត្រនិយម កុំទាន់អាលថាពួកគាត់ធ្វើបែបនេះខុស ឬត្រូវឡើយ រឿងដែលសំខាន់នោះ គឺយើងជាអ្នកសិក្សាត្រូវតែស្វែងយល់ឱ្យបានច្បាស់ថាតើរឿងនេះកើតឡើងដោយសារអ្វី ហើយវាមានដំណើរយ៉ាងដូចម្តេច? ហើយលក្ខណៈដូចគ្នា ឬស្រដៀងគ្នា មានមូលហេតុយ៉ាងដូចម្តេចខ្លះ បានជាមានជំនឿបែបនេះមករស់នៅជាមួយព្រះពុទ្ធសាសនាបាន ?

មកដល់ត្រង់ចំណុចនេះ ខ្ញុំសូមនាំអ្នកអានទៅរកសម័យដើមបន្តិចសិន ដើម្បីឱ្យដឹងថា តើអ្នកតាកើតឡើងយ៉ាងដូម្តេច មុននឹងចូលមកដល់ភាពស្រដៀងគ្នា រវាងអ្នកតា និងពុទ្ធសាសនាវិញនោះ។

## ២. ជំនឿរបស់មនុស្សខ្មែរជំនាន់ដើម និងមូលហេតុដែលនាំឱ្យមានអ្នកតា

នៅក្នុងកុលសម្ព័ន្ធ នីមួយ១គេតែងជួយគ្នាទៅវិញទៅមក អ្នកមានបញ្ញាជួយអ្នកគ្មានបញ្ញា អ្នកខ្លាំងជួយអ្នកខ្សោយ។ និយាយរួមទៅ គេមានការស្មោះត្រង់នឹងគ្នាទៅវិញទៅមក គេធ្វើអ្វីស្មោះនឹងគ្នា។ គេបានជ្រើសរើសមេដឹកនាំមួយរូបដែលមានសមត្ថភាពគ្រប់គ្រាន់ ក្លាហាន វាងវៃ ចេះតស៊ូ ចេះជួយកូនចៅ។ ពួកគេនិយមប្រតិបត្តិទៅតាមមេកន្ទ្រាញរបស់ខ្លួន គេគោរពទាំងពេលនៅរស់រហូតដល់ពេលមេនោះស្លាប់ទៅហើយក្តី ក៏គេនៅតែគោរពព្រលឹងរបស់គាត់ដែរ ព្រោះគេយល់ថា កាលពីមេរបស់គេនៅរស់គឺគាត់ជាអ្នកថែរក្សាមើលខុសត្រូវលើពួកគេ ដល់ពេលគាត់ស្លាប់ទៅ ព្រលឹងនេះនៅតែតាមថែរក្សាពួកគេគ្រប់១គ្នាដដែល នេះជាចំណុចមួយដែលជារឿងអរូបិយ ហើយដែល

បានបង្កប់នៅក្នុងផ្នត់គំនិតខ្មែរតាំងពីពេលនោះមក រហូតដល់ជំនឿបែបនេះ មានវត្តមាននៅតាមវត្តពុទ្ធសាសនាមួយចំនួន នាពេលបច្ចុប្បន្ននេះ ថែមទៀតផង ។

ការគោរព ការដឹងគុណចំពោះមនុស្សដែលជាអ្នកដឹកនាំ ជាមេកន្ទ្រាញ ជាអ្នកពូកែ ជាអ្នកមានគុណធម៌ ចេះជួយគ្នានេះ សបញ្ជាក់ឱ្យឃើញថា វាបានបង្កើតជាធម្មជាតិអរូបិយមួយស្ថិតនៅក្នុងផ្នត់គំនិតរបស់ពួកគេ ។ រហូតដល់មនុស្សស្លាប់ទៅហើយក្តី ក៏គេនៅតែគោរពព្រលឹងវិញ្ញាណរបស់គាត់ដែរ ក្នុងនោះមានបងប្អូន ឪពុក ម្តាយ ជីដូន ជីតា មនុស្សចាស់ទុំនៅក្នុងក្រុម ក៏គេគោរពផងដែរ ។ លុះដល់ស្លាប់ទៅ ក៏គេគោរពព្រលឹងអ្នកនោះទៀត ។ នេះហៅថាការ គោរពវិញ្ញាណក្ខន្ធ ឬហៅម្យ៉ាងទៀតថា **គោរពព្រលឹង** តែម្តង ។

ទន្ទឹមនឹងនោះ យើងក៏ឃើញមានផងដែរនូវការគោរពវិញ្ញាណក្ខន្ធសត្វ ។ បើសត្វណាដែលគេស្រឡាញ់ ឬសត្វដែលគេយល់ថាមានឥទ្ធិពលដល់ជីវិតនៅរបស់ពួកគេ គេក៏នាំគ្នាគោរពស្រឡាញ់គ្រប់ៗគ្នាដែរ លុះដល់វាស្លាប់ទៅហើយក្តី ក៏គេបង្កើតជារូបតំណាងអ្វីមួយឡើងដើម្បីគោរព និងដឹងគុណដល់វាទៀត ។

ម្យ៉ាង បើនិយាយពីករណីមួយទៀត គឺការគោរពធម្មជាតិវិញ ក៏មានស្តែងឱ្យឃើញផងដែរ ។ រុក្ខជាតិណាមួយដែលគេយល់ថាវាមានរូបរាងចម្លែកៗ ឬជារុក្ខជាតិដែលមានប្រយោជន៍ មានអំណោយផលដល់ជីវិតពួកគេនោះ គេតែងតែនាំគ្នាគោរព ដោយយកសំណែនផ្សេងៗទៅថ្វាយដល់រុក្ខជាតិនោះ ។

តាមរយៈការបកស្រាយ ស្តីអំពីការរស់នៅរបស់កុលសម្ព័ន្ធខ្មែរដើម

ទាំងជីវភាពរស់នៅ និងទាំងជំនឿរបស់គេបានស្តែងឱ្យឃើញថា ការគោរពព្រលឹងដែលជាភារៈអាថិកំបាំងមួយ គឺគោរពតាមបែបជីវចល* (Animism ឬ Animisme) ។ ការគោរពបែបនេះ ក្រោយមកក៏បានជាតំណាងផ្សេងៗ ដូចជារូបសំណាកធ្វើពីដី ពីថ្ម ពីឈើ ពីដំបូក ដើមឈើ ឬសឈើដែលមានរូបរាងប្លែកជាដើម សម្រាប់ជាការបង្ហាញនូវលក្ខណៈសម្គាល់មួយក្នុងការគោរពបូជារបស់គេ ។

ការស្តែងចេញជាសិប្បនិមិត្តរូបដែលជាការគោរពនូវតំណាងនេះហើយយូរៗទៅក្លាយជាអ្នកតានេះឯង ។ ការគោរពចំពោះអ្នកតាដូចបានរៀបរាប់ខាងលើបែបនេះ គឺមានរូបរាងច្រើនប្រភេទដូចជា ដំបូក ថ្ម ឈើ ស្លឹកឈើជាដើម ។ ការគោរពអ្នកតា ឬព្រលឹងដូនតានេះបានស្ថិតនៅក្នុងផ្នត់គំនិតរបស់គេជារៀងរហូតមក ។ អ្នកតាជានិមិត្តរូបមួយដ៏សំខាន់ ដោយបានស្តែងចេញពីផ្នត់គំនិតរបស់មនុស្សខ្មែរ ដែលចេះធ្វើឱ្យរបស់សំខាន់សម្រាប់ខ្លួនមកជានិមិត្តរូបមួយសម្រាប់បូជា ដោយគេយល់ថា ការរស់នៅរបស់គេត្រូវពឹងផ្អែកទៅលើដីសម្រាប់ធ្វើការដាំដុះជាដើម ។ ដូច្នេះដើម្បីជាការតបស្នងសងគុណវិញ ពួកគេក៏បានបង្កើតនិមិត្តជាដី ឬជារបស់ផ្សេងៗឡើង សម្រាប់បូជា និងដឹងគុណដល់ដីនោះ ។ ម្យ៉ាងទៀតបុគ្គលដែលមានឧបការគុណចំពោះគេ ដូចជាជីដូនជីតាចាស់ទុំ ក្នុងស្រុក មេកន្ទ្រាញជាដើម កាលពួកគេស្លាប់ទៅ មនុស្សទាំងអស់នៅក្នុងស្រុកក៏នាំគ្នាគោរពបូជាដល់ព្រលឹងរបស់បុគ្គលនោះទៀត ។ ទាំងនេះអាច

---

* លោក មៀច ប៉ុណ្ណ និយមប្រើពាក្យ "លទ្ធិព្រលឹងនិយម" ជំនួស ជីវចល ។

បញ្ជាក់បានថា អ្នកតាកើតចេញពីដីផង ពីមនុស្សផង ដូចលោកសាស្ត្រចារ្យ **អាំង ជូលាន** បានសរសេរនៅក្នុង សៀវភៅ **"មនុស្សនិងដី"** នៅក្នុងទំព័រទីពីររបស់គាត់ដែរ ។

នេះជាគំនិតដ៏ឈ្លាសវៃរបស់មនុស្សខ្មែរ ដែលចេះបង្រួមពិភពលោកទាំងអស់ឱ្យមកនៅត្រឹមដីមួយដុំ ឬខ្ទមតូចមួយដើម្បីគោរពបូជា និងដើម្បីងាយមើលឱ្យឃើញច្បាស់ពីពិភពលោកទាំងមូលទៀតផង ។ គឺប្រព័ន្ធគំនិតនេះហើយដែលអ្នកប្រាជ្ញឱ្យឈ្មោះថា Cosmo (ពិភពលោក) ដែលស្របទៅនិងអ្វីដែលលោកសាស្ត្រាចារ្យ **អាំង ជូលាន** ដោយប្រើពាក្យ មួយឃ្លាថា Cosmos en Réduction (ការបង្រួមពិភពលោក ឬពិភពលោក ខ្នាតតូច) ។

## ក_ ក្នុងជីវភាព

**ក- ១ កសិកម្ម :** ការអនុវត្តនូវការគោរពចំពោះអ្នកតានេះ គឺជាជំនួយមួយដ៏មានប្រយោជន៍ ។ តួយ៉ាងដូចជានៅក្នុងវិស័យកសិកម្ម គេបានគោរពបូជាដល់អ្នកតា ព្រោះគេយល់ថា អ្នកតាអាចជួយទំនុកបម្រុង និងអាចនាំឱ្យចម្រុងចម្រើនដល់ពួកគេ ដូចជាការជួយថែរក្សាដំណាំដាំដុះ ដើម្បីឱ្យបានដុះលូតលាស់ល្អ ការពារកុំឱ្យសត្វផ្សេងៗមកបៀតបៀនដល់ដំណាំ ជួយឱ្យមានទឹកភ្លៀងគ្រប់គ្រាន់សម្រាប់ដំណាំ ជួយកុំឱ្យមានទឹកឡើងលិចដំណាំ កុំឱ្យមានភាពរាំងស្ងួតជាដើម ។

**ក- ២ វិធីសាស្ត្រដោះស្រាយទំនាស់ :** ចំណែកការរស់នៅប្រចាំថ្ងៃ ឬការដោះស្រាយបញ្ហាជីវិតវិញ អ្នកតាក៏ត្រូវបានប្រើប្រាស់ក្នុងមធ្យោបាយនេះផងដែរ ។ ការរស់នៅប្រចាំថ្ងៃរបស់ពួកគេក៏ត្រូវពឹងផ្អែកលើ

អ្នកតាដោយមួយផ្នែក ដោយសារតែមានជំនឿលើអ្នកតានេះហើយ ដែលនាំឱ្យអ្នកដឹកនាំពួកគេ ខ្លាចមិនហ៊ានធ្វើអ្វីផ្តេសផ្តាស និងជួយឱ្យក្រុមរបស់គេចេះស្រឡាញ់គ្នា រាប់អានគ្នា ចេះជួយគ្នា ចេះសាមគ្គីគ្នា ដើម្បីជួយឱ្យក្រុមនេះរស់នៅដោយសុខសប្បាយ ។ ចំណែកឯការរស់នៅប្រចាំថ្ងៃនេះទៀតសោត ក៏បានជួបប្រទះនូវបញ្ហាផ្សេងៗ ដែលជាការទាស់ទែងខ្វែងគំនិតគ្នា ឬការឈ្លោះគ្នាមានការប្តឹងផ្តល់ ក្តីក្តាំគ្នាជាដើម ។ កាលណាគូបដិបក្សសម្រុះសម្រួលគ្នាឯងមិនបាន គេនឹងទៅស្បថមុខអ្នកតា ឬចំពោះមុខព្រលឹងជីដូនជីតា ។ នេះបញ្ជាក់ថា អ្នកតា បានដើរតួនាទីយ៉ាងសំខាន់នៅក្នុងការដោះស្រាយបញ្ហា ព្រោះគេយល់ថា រាល់ទង្វើរបស់គេមិនអាចគេចផុតពីភ្នែករបស់អ្នកតាឡើយ ។ ដូច្នេះពួកគេម្នាក់ៗ មិនគួរធ្វើអ្វីដែលជាការភូតភរកុហក ឬទង្វើមិនគប្បីបាន នោះឡើយ ។

**ក- ៣ សុខាភិបាល :** កាលណាគេមានជំងឺតម្កាត់ ឬឈឺរ៉ាំរ៉ៃយូរហើយព្យាបាលមិនជា គេក៏យកអ្នកជំងឺនោះទៅបន់អ្នកតា ដើម្បីឱ្យអ្នកតាជួយគាត់ឱ្យបានធូរស្រាល ឬឱ្យជាសះស្បើយឡើងវិញ ដោយគេនិយមប្រើពាក្យ ដើម្បីទំនាក់ទំនងជាមួយអ្នកតាថា **"មិនអីទេ ចាំតាជួយ"** ព្រមទាំងមានធ្វើពិធីមួយចំនួនទៀត ដើម្បីធ្វើឱ្យបរិយាកាសនេះកាន់តែប្លែកឡើង ។ ពាក្យពេចន៍ និងពិធីនេះហើយដែលជាជំនួយមួយយ៉ាងសំខាន់ខាងផ្លូវចិត្តរបស់អ្នកជំងឺ នាំឱ្យមានការធូរស្រាលចិត្ត ពុំមានការតប់ប្រមល់ក្នុងអារម្មណ៍ ដែលស្របទៅនិងអ្នកចិត្តសាស្ត្របានមានប្រសាសន៍ថា កាលណាផ្លូវចិត្តរបស់យើងទទួលនូវការរីករាយសប្បាយរាងកាយរបស់យើងក៏ភ្លឺថ្លា វានឹងអាចជួយដល់យើង ឱ្យយកឈ្នះលើជំងឺបានមួយចំនួនបានទៀតផង ។






## ខ~ ក្នុងសង្គម

**ខ- ១ លក្ខណៈជាបុគ្គល** : ជាធម្មតាបុគ្គលខ្លះ ពេលធ្វើដំណើរទៅណាឆ្លងកាត់ ទឹកដីមួយទៅទឹកដីមួយទៀត ពីកន្លែងមួយទៅកន្លែងមួយទៀត បុគ្គលនោះ តែងតែមានជំនឿនៅក្នុងផ្នត់គំនិតរបស់គេថា ទីណាក៏មានម្ចាស់របស់គេ គ្រប់គ្រងដែរ **"ម្ចាស់ទឹក ម្ចាស់ដី"** ដែលរក្សានៅទីនោះ។ ដូច្នេះកាលយើងទៅដល់កន្លែងគេហើយ ត្រូវតែគោរព ឱនសំពះ សួរសុខទុក្ខ ឬមានរបស់របរតិចតួចសម្រាប់ថ្វាយ ដើម្បីសុំសេចក្តីសុខ។ តែបើកាលណាមិនគោរពហើយធ្វើឬកព្រហើន ច្រឡឹសបឹសនៅមុខអ្នកតា ម្ចាស់ទឹក ម្ចាស់ដីនោះគេនឹងត្រូវអ្នកតាធ្វើឱ្យឈឺពោះ រុះរាកឬបង្កើតជាហេតុភេទផ្សេងៗ។ ដោយសារការខ្លាចញញើតបែបនេះហើយ ទើបនាំឱ្យបុគ្គលម្នាក់ៗកាន់ចរិតត្រឹមត្រូវស្លូតបូត សុភាពរាបសារ។

**ខ- ២ មន្ត្រីដែលមានតំណែងថ្មី** : គេមានជំនឿថា គ្រប់អ្នកដឹកនាំ (មេកន្ទ្រាញ) របស់ពួកគេ តែងតែមានអំណាចមួយដែលមានអាថ៌-កំបាំងនៅពីក្រោយបុគ្គលនោះ ហើយម្យ៉ាងទៀតអ្នកដឹកនាំតែងតែគិតថា ខ្លួនឯងប្រាកដ ជាមានអំណាចពិសេសណាមួយកំពុងតែចាំឃ្លាំមើលរាល់ទង្វើរបស់ខ្លួន ដែលបានប្រព្រឹត្ត ដូច្នោះហើយទើបអ្នកដឹកនាំទាំងនោះធ្វើសកម្មភាពល្អ មានទឹកចិត្ត ល្អ និងមានភាពយុត្តិធម៌ចំពោះមនុស្សនៅក្នុងក្រុមរបស់ខ្លួន។

នៅក្នុងប្រវត្តិសាស្ត្រខ្មែរយើង គេសង្កេតឃើញមានពួកមន្ត្រីខ្លះដែលមានយសសក្តិខ្ពស់ ឬមានមុខងារក្នុងរាជការ កាលណាគេបានទទួលតំណែងថ្មីនៅក្នុងជួររដ្ឋាភិបាល គេតែងតែទៅបន់ស្រន់សុំពរពីអ្នកតា សូមឱ្យបានសេចក្តីសុខសប្បាយ គ្មានសង្គ្រាម សុំទឹកភ្លៀងដើម្បីឱ្យដំណាំលូតលាស់ល្អ ជាពិសេស



សុំឱ្យអ្នកតាជួយថែរក្សា តំណែងរបស់ខ្លួនឱ្យបានគង់វង្សទៀតផង ។ តួយ៉ាង មានដូចជាអ្នកតា **"ឃ្លាំងមឿង"** ជាដើម ដែលមានចៅហ្វាយស្រុក ចៅហ្វាយខេត្តមួយចំនួន ទៅធ្វើពិធីយ៉ាងអធិកអធមនៅចំពោះមុខអ្នកតាឃ្លាំងមឿងនេះ ដែលស្ថិតនៅចម្ងាយប្រមាណ ប្រហែលជា ២ គីឡូម៉ែត្រ ខាងលិចទៅទីរួមខេត្តពោធិ៍សាត់ ។

តែបើនិយាយអំពីទំហំនយោបាយ ឬទំហំប្រវត្តិសាស្ត្រវិញ អ្នកតាឃ្លាំងមឿងជាអ្នកតាមួយដែលបង្ហាញពីប្រវត្តិសាស្ត្រខ្មែរយ៉ាងច្បាស់ នៅក្នុងរាជ្យ របស់ព្រះបាទអង្គច័ន្ទរាជា នៅគ្រឹស្តករាជ ១៥១៦ ស្តេចកន បានដេញតាមទ័ពព្រះច័ន្ទរាជា ហើយទៅឡោមព័ទនៅបន្ទាយពោធិ៍សាត់ អស់រយៈពេល ១២ ខែ តែវាយចូលពុំបាន ។ ពេលនោះ តាពេជ (**ឃ្លាំងមឿង**) បានធ្វើពលិកម្មបូជាជីវិត ទៅកែនទ័ពបិសាច ដោយលោតចូលរណ្តៅដែលពោរពេញទៅដោយ អាវុធស្រួចៗដោតនៅទីនោះ ( ត្រឹងងា : ១៩៧៣) ។

កាសែតនៅកម្ពុជាចេញនៅឆ្នាំ១៩៦២បានសរសេរថា នៅឆ្នាំ១៩៦២ នេះ មានពិធីមួយយ៉ាងអធិកអធម គគ្រឹកគគ្រេង ដែលប្រារព្ធធ្វើឡើងពីសំណាក់ប្រជាពលរដ្ឋខ្មែរទូទាំងប្រទេស ដើម្បីសរសើរដល់គុណបំណាច់របស់អ្នកតា ឃ្លាំងមឿង ហើយក៏ដើម្បីសុំសេចក្តីសុខសប្បាយផងដែរ ។

## ៣~ លក្ខណៈរួមរវាងជំនឿដើម (អ្នកតា) និងពុទ្ធសាសនា

### ក- ទ្រឹស្តី (បរិស្ថាន)

តាមរយៈការបកស្រាយខាងលើ បានបង្ហាញឱ្យយើងដឹងពីមូលហេតុដែលនាំឱ្យមានអ្នកតានៅក្នុងសង្គមខ្មែរយើងនេះ ។ ឥឡូវយើងសង្កេតមើលទៅ

លើទ្រឹស្តីបែបនេះ ដែលប្រជាជនខ្មែរមានជំនឿថា កាលណាយើងកាប់ដើមឈើធំណាមួយ ដើមឈើនោះមុខជាមានព្រាយឬអ្នកតានៅថែរក្សា ដូច្នេះប្រាកដជាធ្វើឱ្យយើងឈឺថ្កាត់មិនខានឡើយ ។ ប៉ុន្តែមានករណីខ្លះយើងអាចកាប់ទៅប្រើប្រាស់បាន លុះណាតែយើងធ្វើរណ្តាប់ ឬសំណែនផ្សេងៗសម្រាប់សែនព្រេនដល់អ្នកដែលនៅចាំថែរក្សាដើមឈើនោះ ។ ត្រង់នេះវាស្របទៅនឹងសិក្ខាបទ របស់ភិក្ខុសង្ឃដែលបានធ្វើឱ្យដើមឈើ ស្មៅ ឬវល្លិ៍ជាដើម ឱ្យវិនាសទៅ គឺកាត់ និងរំលាយជាដើមនោះគឺ ត្រូវអាបត្តិបាចិត្តិយ[១] (ព្រះវិន័យវណ្ណនា : ១៩៦២) ។ សិក្ខាបទនេះក៏មាននៅក្នុងវិន័យបិដកលេខ០៣ ទំព័រទី ៣៤៨-៣៥២ ដែលនិទានថា : គ្រានោះមានភិក្ខុមួយពួកធ្វើនវកម្ម[២] ក៏ទៅកាប់ដើមឈើដោយខ្លួនឯងខ្លះ ដោយប្រើគេខ្លះ ។ លោកនិមន្តទៅក្នុងព្រៃ ហើយកាប់ដើមឈើមួយដើមដែលមានរុក្ខទេវតានៅលើដើមឈើនោះ ។ រុក្ខទេវតានិយាយនឹងភិក្ខុនោះថា លោកចង់ធ្វើលំនៅខ្លួនឯង មិនគួរនិងបំផ្លាញលំនៅអ្នកដទៃនោះទេ ។ បើទោះជាយ៉ាងណាក៏ដោយ ក៏ភិក្ខុអង្គនោះនៅតែកាប់ដដែល លុះពេលកាប់ទៅត្រូវចំដៃកូនរុក្ខទេវតា ។ រុក្ខទេវតាខឹងខ្លាំងណាស់បម្រុងនឹងសម្លាប់ភិក្ខុនោះ តែលុះគិតៗទៅយល់ថា ធ្វើបែបនេះមិនសមទេក៏សម្រេចទៅទូលព្រះសាស្តា ។ ព្រះសាស្តាក៏ចាត់ចែងឱ្យរុក្ខទេវតា នោះទៅនៅកន្លែងថ្មីមួយទៀត ។ ដោយសាររឿងនេះ ហើយនាំឱ្យមនុស្សទាំងឡាយពោល

---

(១) អាបត្តិបាចិត្តិយ: អាបត្តិញ៉ាំងកុសលធមិឱ្យធ្លាក់ចុះ គឺមានន័យថាមិនឱ្យកុសលធមិកើតមាន បន្តទៀត ។

(២) ធ្វើកុដ សាលាថ្មីជាដើម ។

តិះដៀលដល់ភិក្ខុសង្ឃនោះៗ។ ព្រះសាស្តាបានដឹង រឿងនេះហើយក៏ហៅភិក្ខុទាំងនោះមកប្រាប់ថា អ្នកទាំងឡាយមិនគួរកាប់ដើមឈើ ដោយខ្លួនឯងឬប្រើអ្នកដ៏ទៃទៃនោះឡើយ ព្រោះពួកមនុស្សសម្គាល់ថា ដើមឈើមានជីវិតដូច្នេះនាំឱ្យពួកមនុស្សមិនជ្រះថ្លានឹងយើង។ រួចព្រះសាស្តា ក៏បានហាមប្រាមមិនឱ្យភិក្ខុធ្វើបែបនេះទៀត និងបានត្រាស់ថា ម្នាលភិក្ខុទាំងឡាយ អ្នកទាំងឡាយត្រូវសម្តែងឡើងនូវសិក្ខាបទនេះ យ៉ាងនេះថា *ភិក្ខុ ធ្វើ ភូតគាម*[៣] មានដើមឈើ និងស្មៅជាដើម ឱ្យវិនាស ត្រូវអាបត្តិបាចិត្តិយ។ សិក្ខាបទនេះក៏ត្រូវបានបញ្ញត្តិឡើង និងអនុវត្តចាប់ពីពេលនោះមក។ ដូច្នេះ សម្រាប់រឿងខាងលើនោះ ទាំងជំនឿអ្នកតាក្តី ទាំងពុទ្ធសាសនាក្តី ត្រង់នេះ បានបង្កើតជាទ្រឹស្តីមួយ ដែលស្របនឹងទ្រឹស្តីបរិដ្ឋានដែរ។ បើបរិដ្ឋានធម្មជាតិ រស់ ជីវិតក៏ស្រស់បំព្រងផងដែរ។

## ខ. បុគ្គលិកលក្ខណៈ

ដោយយោងទៅតាម ការបកស្រាយខាងលើខ្លះៗរួចមកហើយនេះ អាចធ្វើឱ្យយើងទាញចេញពីលក្ខណៈនៃការគោរពនេះគឺជាការប្រតិបត្តិ ដឹងគុណមួយបែប ទៅរកបុគ្គលណាដែលមានមុខមាត់នៅក្នុងក្រុម ក្នុងសង្គម អ្នកដែលមានគុណធមិចេះជួយទុកធុរៈគ្នា ដូចជាមេកន្ទ្រាញ ចាស់ទុំ ឬព្រឹទ្ធាចារ្យជាដើម។ ការគោរពរាប់អានបែបនេះ បើទោះជាគេស្លាប់ទៅហើយក្តីក៏ពួកគេនៅតែគោរពស្រឡាញ់ ដឹងគុណដដែល។ លក្ខណៈរបស់បុគ្គលបែបនេះហើយដែលធ្វើឱ្យគេគោរពស្រឡាញ់ជារៀងរហូត ដែលកេរ្តិ៍ឈ្មោះរបស់បុគ្គលនេះមិនចេះសាបសូន្យឡើយ។ ជារឿងជាក់ស្តែងដែលមានឧទាហរណ៍យ៉ាងច្បាស់នៅក្នុង

---

៣ អដ្ឋកថា សំដៅយកស្មៅនិងដើមឈើស្រស់ដែលមានពូជដុសទៅទៀតបាន ជាដើម។

ប្រវត្តិសាស្ត្រខ្មែរយើង ហើយជារឿងរ៉ាវល្បីរន្ទឺទូទាំងប្រទេសពីអតីតកាលរហូតដល់បច្ចុប្បន្ន។ នេះក៏ដោយសារទង្វើដ៏អស្ចារ្យរបស់បុគ្គលម្នាក់ ដែលគាត់ប្រព្រឹត្តតាំងពីគាត់នៅរស់ ធ្វើជាមេទ័ពនៅឡើយ គាត់ស្រឡាញ់ប្រទេសជាតិ ការពារទឹកដី រហូតដល់គាត់ដឹងថា ការច្បាំងនេះមិនអាចយកឈ្នះលើសត្រូវក៏ដោយ ក៏គាត់សុខចិត្តសម្លាប់ខ្លួនដើម្បីទៅកែនទ័ពខ្មោចមកជួយ រហូតធ្វើឱ្យសត្រូវបរាជ័យ។ នៅគ្រឹស្តសករាជ ១៥១៦ ទ័ពរបស់ស្តេចព្រះអង្គច័ន្ទរាជាច្បាំងជាមួយសត្រូវ កាលណោះបានមេទ័ពឈ្មោះ មឿង នេះបានបូជាជីវិតទៅកែនទ័ពខ្មោច ព្រាយបិសាច ឱ្យមកជួយច្បាំង លុះណាតែកងទ័ពរបស់ទ្រង់បានជ័យជម្នះលើសត្រូវ។

ឥឡូវនេះយើងងាកមកសង្កេតតាមដានខាងពុទ្ធសាសនាវិញម្តង តើមានបុគ្គលិកលក្ខណៈយ៉ាងដូចម្តេចខ្លះ? ។

យើងសង្កេតចាប់ពីព្រះអង្គទ្រង់ប្រសូត គ្រាន់តែប្រសូត្រភ្លាមព្រះអង្គមានលក្ខណៈពិសេសនៅត្រង់ព្រះបាទ ដែលធ្វើឱ្យមនុស្សជាច្រើនស្រឡាញ់ចូលចិត្តគោរពយ៉ាងខ្លាំងដោយរួមទាំងព្រះអង្គជាត្រកូលក្សត្រផងនោះ។ លុះដល់ចម្រើនវ័យ ពេញជំទង់ហើយ ព្រះអង្គរៀនសូត្រពូកែយ៉ាងខ្លាំងលើសសិស្សដ៏ទៃ និងរហូតធ្វើឱ្យគ្រូទាល់តម្រិះទៀតផង។ រហូតដល់ពេញវ័យព្រះអង្គបានចេះចាំចំណេះដឹងជាច្រើន ដែលនៅថ្ងៃមួយព្រះអង្គប្រឡងឈ្នះគេគ្រប់គ្នា ទាំងការចោលដំបង បាញ់ធ្នូ ប្រណាំងសេះ និងអក្សរសាស្ត្រ ជាដើម។ ហើយជាពិសេសទៅទៀតនោះ គឺនៅក្នុងដួងព្រះហឫទ័យរបស់ព្រះអង្គពោរពេញដោយព្រហ្មវិហារធម៌តាំងពីតូចមកម្ល៉េះ។ ពេលព្រះអង្គបានត្រាស់ដឹងហើយ ព្រះអង្គបាន

ធ្វើនូវគុណធមិជាច្រើនដ៏លើសលុប ដើម្បីជួយឱ្យមនុស្សជាច្រើនយល់ពីរស នៃធមិ ជួយឱ្យមនុស្សជាច្រើនរួចពីទុក្ខ ជាពិសេសគឺឱ្យចេះស្រឡាញ់គ្រប់សត្វទាំងអស់ឱ្យបានស្មើៗគ្នា។

ជារួម ទាំងជំនឿអ្នកតា ទាំងពុទ្ធសាសនាត្រង់ចំណុចនេះក៏មានលក្ខណៈស្រដៀងគ្នាដែរ ដោយមានការគោរពដល់បុគ្គលិកលក្ខណៈរបស់បុគ្គលធម្មតាម្នាក់ (មនុស្ស) ដែលមានអ្វីមួយប្លែក ធ្វើអ្វីមួយអស្ចារ្យ មានគុណធមិល្អជាមេគេ ជាអ្នកដឹកនាំ មានលក្ខណៈវៃឆ្លាត និងមានសមត្ថភាពលើសគេ។ នេះជាលក្ខណៈរួមមួយដែលយើងសង្កេតឃើញមាននៅក្នុងជំនឿទាំងពីរនេះ។

**គ~ រូបសំណាក**

ឥឡូវនេះយើងក្រឡេកមកមើលចំណុចមួយទៀត ដែលទាក់ទិននឹងការគោរពរបស់ខ្មែរយើង ដោយបានរក្សាទុកនូវជំនឿដើមតាមរយៈការកំណត់ ឬធ្វើជាតំណាងផ្សេងៗ ដូចជាគល់ឈើ ដំបូក ខ្ទម ដុំដី ដុំថ្ម រហូតដល់មានការធ្វើរូបតំណាងផ្សេងៗទៀតផង។ ការគោរពបែបនេះគឺមានតាំងពីរបស់មួយសត្វមួយ ឬមនុស្សនៅមានជីវិតក្តី ស្លាប់បាត់បង់ទៅហើយក្តី ដើម្បីបន្តការគោរពស្រឡាញ់ទៀត គេក៏ផ្តើមបង្កើតនូវរូបតំណាងឬរូបសំណាកផ្សេងៗ។

សូមមើលពីដំណើរជីវិតរបស់ព្រះពុទ្ធវិញម្តង តាំងពីព្រះអង្គនៅជាព្រះអង្គម្ចាស់ សិទ្ធត្ថ មកម្ល៉េះ មានគេស្រឡាញ់ចូលចិត្តទាំងក្មេងទាំងចាស់ជាច្រើន រហូតដល់ព្រះអង្គបានត្រាស់ដឹងនូវសច្ចៈធមិ ក៏មានសាវ័ករបស់ព្រះអង្គប្រតិបត្តិតាមទៀត។ លុះព្រះអង្គចូលនិព្វានទៅហើយក្តី ក៏មានការច្នៃជារូបពុទ្ធបដិមាឡើង ដើម្បីទុកជាការគោរពស្រឡាញ់ដ៏ជ្រាលជ្រៅចំពោះបុគ្គលដ៏

អស្ចារ្យនេះ ។

បញ្ជាក់សាងរូបសំណាកនេះទៀតសោត បើយើងសង្កេតទៅវាមិនមានត្រឹមតែអ្នកតា ឬព្រះពុទ្ធរូបប៉ុណ្ណោះទេ គឺថែមទាំងមានការកសាងរូបសំណាកបុព្វបុរសល្បីៗមួយចំនួនទៀតផង មានដូចជា រូបសំណាកព្រះបាទជ័យវរ្ម័នទី៧ ព្រះនាងឥន្ទ្រទេវី ឡេលីន ហូជីមិញ ។ល ។( ទូច ផារ៉ា.២០០១: ៣៩) ។

នៅក្នុងជំនឿទាំងពីរនេះ យើងឃើញមានលក្ខណៈរួមមួយគឺ ការធ្វើជារូបតំណាងឬបដិមាសម្រាប់គោរពប្រតិបត្តិដូចគ្នា ជាក់ស្តែងគឺមានរូបអ្នកតានៅក្នុងខ្ទម នឹងមានរូបពុទ្ធបដិមានៅក្នុងវិហារ ។

## ឃ. ទីតាំង និងទ្រឹស្តីបរិដ្ឋាន

ការបកស្រាយខាងលើស្តែងឱ្យឃើញថា អ្នកតាផ្តើមចេញពីការគោរពអ្វីមួយ ដែលគេមានជំនឿហើយបង្កើតជារូបតំណាងផ្សេងៗ ។ រូបតំណាងទាំងអស់នោះ ភាគច្រើនមានទំនាក់ទំនងទៅនឹងរុក្ខជាតិទៀតផង ។ គេដាក់រូបសំណាកនៅលើខ្ទមតូចមួយ ហើយធ្វើខ្ទមនៅក្រោមដើមឈើណាមួយដែលមានម្លប់ត្រឈឹងត្រឈៃល្អ ឬដើមឈើណាមួយដែលប្លែកពីគេ ។ ត្រង់នេះបញ្ជាក់ថា សូម្បីតែការដាក់ទីតាំងអ្នកតាក៏មានទំនោរទៅរករុក្ខជាតិ ដើម្បីគោរពរក្សារុក្ខជាតិនោះផង វាក៏ស្របទៅនឹងទ្រឹស្តីការពារបរិដ្ឋានផងដែរ (Martine Batchelor and Kerry Brown. 1992)

កាលព្រះអង្គនៅជាព្រះអង្គម្ចាស់តូច ព្រះអង្គរើសយកដើមព្រីងដើម្បីធ្វើសមាធិរហូតដល់សម្រេចសោតា នៅពេលដែលគេគ្រប់គ្នាកំពុងតែជក់ចិត្តនឹងពិធីច្រត់ព្រះនង្គ័ល ។ ព្រះអង្គត្រាស់ដឹងក្តី ព្រះអង្គចូលបរិនិព្វានក្តី រួមជា

មួយនឹងសកម្មភាពមួយចំនួនទៀតសុទ្ធតែទាក់ទងនឹងរុក្ខជាតិ ដែលជាទីតាំងមួយបង្ហាញពីទំនាក់ទំនងនឹងទ្រឹស្តីបរិដ្ឋាន ដែលនាំឱ្យចេះស្រឡាញ់រុក្ខជាតិ យកដើមឈើមកជាចំណុចសំខាន់ជាមួយនឹងជីវិតរស់នៅរបស់មនុស្សប្រចាំថ្ងៃ។

ម្យ៉ាង រាល់សកម្មភាពរបស់ព្រះអង្គខាងលើនេះ ភាគច្រើនទាក់ទងទៅនឹងដើមពោធិព្រឹក្ស ដែលជាដើមឈើមួយដើមមានម្លប់ត្រឈឹងត្រឈៃ ដែលប្រជាជនយល់ថាជាដើមឈើស័ក្តសិទ្ធ និងជាទីគោរពបូជាសម្រាប់ពុទ្ធសាសនិកជន។ ដោយឡែកយើងសង្កេតឃើញមានខ្ទមអ្នកតាដាក់នៅក្រោមដើមពោធិ៍នេះទៀតផង។ ត្រង់នេះយើងបានដឹងរឹតតែច្បាស់ទៀតហើយថា គ្រាន់តែដើមឈើមួយដើមក៏អាចមានជំនឿពីរ ឬអាចច្រើនជាងនេះ ពីសំណាក់អ្នកដែលមានជំនឿចំពោះដើមឈើនោះសម្រាប់ជាការគោរពរបស់ពួកគាត់ផងដែរ។

មួយវិញទៀតអ្នកតាត្រូវបានគេសាងខ្ទមឱ្យ ដោយរើសរកកន្លែងល្អៗទីទួលខ្ពស់ និងមានដើមឈើម្លប់ត្រឈឹងត្រឈៃ ត្រជាក់ល្អ។ ចំណែកឯការកសាងវិហារក៏មិនខុសគ្នាឆ្ងាយប៉ុន្មានដែរ គឺគេសង់នៅលើទីទួលខ្ពស់ស្រឡះល្អ ដែលមានការគន់គូរមើលយ៉ាងល្អិតល្អន់ទៀតផងមុននឹងសាងសង់។

ដូច្នេះនៅក្នុងជំនឿទាំងពីរ បើនិយាយពីទីតាំងវិញ ភាគច្រើនមានទំនាក់ទំនងនឹងធម្មជាតិ ដើមឈើដែលមានទំនាក់ទំនងជាសំខាន់ទៅនឹងជីវិត គឺទ្រឹស្តីបរិដ្ឋាន ព្រោះថា ជីវិតទាំងឡាយមិនអាចកាត់ចេញពីបរិដ្ឋានបានឡើយ។

## ខ. ទិស

អ្នកតា ឬរូបសំណាកមួយចំនួន ត្រូវបានគេរៀបចំទុកដាក់នៅតាមទិសមួយ ដែលគេយល់ថាជាទិសល្អដើម្បីទុកជាទីគោរពបូជា។ របស់ដែលគេគោរព

បែបនេះគេមិនអាចយកទៅដាក់នៅទិសមិនល្អបានឡើយ។ ទិសឦសាន ទិសបូព៌ា ទិសអាគ្នេយ៍ត្រូវបានគេជ្រើសរើសយកមកដាក់តាំងរូបសំណាក។ យើងសង្កេតឃើញមានភាគច្រើន គេយកទិសឦសាននិងទិសអាគ្នេយ៍។ បើនៅកន្លែងមួយ ឧទាហរណ៍ នៅក្នុងវត្តណាមួយមានដាក់ខ្មមអ្នកតាពីរ គឺគេដាក់នៅតាមទិសទាំងពីរខាងលើនេះ។ តែបើមានតែមួយទេ គេដាក់ទៅទិសឦសាន។ មូលហេតុដែលគេជ្រើសរើសយកទិសឦសាននេះ ដោយសារពួកគេយល់ថាទិសនេះល្អ ជាទិសថ្ងៃរះ ជាទិសកើត ជាទិសមានរយៈពេលថ្ងៃវែង ជាទិសចំពេលការគន់គូរថាល្អមានភាពរុងរឿង។ ហើយបើតាមប្រសាសន៍របស់លោកសាស្ត្រាចារ្យ អាំង ជូលានវិញ លោកថា បើតាមក្បួនហោរាសាស្ត្ររបស់ប្រជាជនខ្មែរ ទិសឦសានគឺជាទិសមួយដែលមានអំណោយផលល្អ (គឺជាការរាប់តាមក្បួនហោរាមួយបែបដែលជាដំណើរដ៏ល្អរវាង ព្រះអាទិត្យនិងព្រះច័ន្ទ ហើយគឺជាពេលដែលមានរយៈពេលវែងដែរនៅពេលថ្ងៃ)។ ដោយការគន់គូររកឃើញបែបនេះ ហើយទើបគេរើសយកទិសនេះ។

ព្រះពុទ្ធអង្គ នៅពេលដែលទ្រង់ត្រាស់ដឹង ក៏ព្រះអង្គគង់បែរព្រះភក្ត្រទៅ ទិសខាងកើតឬទិសបូព៌ាផងដែរ ព្រោះទិសនេះជាទិសថ្ងៃរះ ជាទិសមានរស្មីដូច្នេះការត្រាស់ដឹងរបស់ព្រះអង្គក៏មានរស្មីយ៉ាងនោះដែរ។

ម្យ៉ាង យើងសង្កេតឃើញថា ជំនឿនៃការសាងសង់វិហារពុទ្ធសាសនាខ្មែរ ក៏ត្រូវបែរមុខទៅទិសបូព៌ាឱ្យចំដែរ នេះជាជំនឿមួយរបស់ខ្មែរដែលមិនអាចកាត់ផ្តាច់បាន ព្រោះគេយល់ថាជាទិសមួយល្អសម្រាប់គេ។

ជាងនេះទៅទៀត ពុទ្ធបដិមានៅក្នុងវិហារក៏ដាក់បែរមុខទៅទិសបូព៌ា

ដែរ នេះជាការបង្ហាញនូវពន្លឺរស្មីនៃការត្រាស់ដឹងរបស់ព្រះអង្គដល់ពុទ្ធបរិស័ទឱ្យជ្រះថ្លានិងមានពន្លឺដូចព្រះអាទិត្យរះអញ្ចឹងដែរ។

ដូច្នេះ ទិសនេះជារឿងមួយសំខាន់ចំពោះជំនឿទាំងពីររបស់ប្រជាជនខ្មែរ។ ទាំងការសង់ខ្ទមអ្នកតា ទាំងការសាងសង់វិហារ និងទាំងការតម្កល់ពុទ្ធបដិមាក្តី គេតែងតែធ្វើដោយហ្មត់ចត់ គិតគូររកទិសល្អទើបធ្វើ។ ម្យ៉ាងគេខ្លាចធ្វើទៅមិនសមរម្យដល់ការប្រតិបត្តិរបស់គេ ពិសេសអាប់ឱនដល់ជំនឿនេះតែម្តង។

## ៤~ ពិធីមួយចំនួន

### ក- បុណ្យខ្មោច

នៅក្នុងការរៀបចំពិធីបុណ្យខ្មោចនេះ យើងសង្កេតឃើញថាមានកម្មវិធីជាច្រើន មានលក្ខណៈជាជំនឿដើម(អ្នកតាឬព្រលឹងដូនតា)ផង ជាពុទ្ធសាសនាផង បានលាយឡំចូលគ្នា។ យើងឃើញមានពិធីរៀបចំសែនព្រេនដើម្បីសុំម្ចាស់ទឹកម្ចាស់ដី។ ការធ្វើពិធីបង្សុកូល មានការនិមន្តព្រះសង្ឃមកសូត្រដើម្បីរំលឹកដល់វិញ្ញាណក្ខន្ធបុគ្គលដែលស្លាប់។

### ខ- ពិធីរៀបអាពាហ៍ពិពាហ៍

ពិធីនេះ ចំពោះខ្ញុំសូមលើកយកចំណុចមួយមកបង្ហាញ គឺនៅមុនថ្ងៃការមួយថ្ងៃ នាពេលល្ងាច យើងសង្កេតឃើញមានការនិមន្តព្រះសង្ឃមកសូត្រដើម្បីចម្រើនព្រះបរិត្ត។ ចំណែកឯនៅថ្ងៃរៀបការវិញ គឺនៅចំពេលរៀបពិធីសែនចងដៃ ឃើញមានការរៀបចំបាយ សម្ល នំ ចំណី ដើម្បីឱ្យកូនកំលោះកូនក្រមុំសំពះសែនព្រេនដល់ជីដូនជីតា ដែលហៅម្យ៉ាងទៀតថា ព្រេនដូនតា

(ប្រសាសន៍របស់អ៊ុំ មៀច ប៉ុណ្ណ)។ ដូច្នេះយើងឃើញថាជំនឿទាំងពីរនេះនៅលាយឡំជាមួយគ្នាក្នុងពិធីនេះ។

## គ. ភ្ជុំបិណ្ឌ

យើងសង្កេតឃើញមានកម្មវិធីមួយដែលត្រូវបានគេប្រារព្ធធ្វើឡើងនៅក្នុងពិធីបុណ្យភ្ជុំបិណ្ឌនេះ។ ការរៀបចំបាយសម្ល នំចំណីដាក់លើកន្ទោងឬស្រទបចេកយកទៅបណ្ដែតតាមទឹក ដោយមានដុតទៀន ធូបបំភ្លឺទៀតផងនោះជាសក្ខីភាពមួយដែលបង្ហាញថាជំនឿដើមនៅតែមានក្នុងពិធីមួយនេះ។ តែផ្ទុយទៅវិញគេក៏ត្រូវការអ្នកដែលមានសីល ដូចជាព្រះសង្ឃជាដើមដើម្បីជួយក្នុងរឿងនេះផងដែរ។ នៅក្នុងពិធីនោះគេក៏បានយកបាយសម្លទៅវត្តដើម្បីប្រគេនព្រះសង្ឃដែលជាអ្នកមានសីលឱ្យសូត្រធម៌ ឧទ្ទិសដល់វិញ្ញាណក្ខន្ធបុព្វការីជនមានជីដូន ជីតាជាដើម ដែលបានស្លាប់ទៅកើតក្នុងទីណា១ក្ដី ឱ្យមកសេពសោយអាហារនេះឱ្យបានបរិបូណ៌កុំឱ្យខ្វះខាតឡើយ។

បុណ្យនេះបើយើងសង្កេតទៅឃើញថា មានលក្ខណៈជាការគោរពវិញ្ញាណក្ខន្ធរបស់បុព្វបុរស ជីដូន ជីតា ញាតិសន្ដានជាដើម។

បើតាមសំនេររបស់លោក ម៉ែនប្រាង និងលោកអាំ ឆនវិញ គាត់បានសរសេរប្រាប់ពីប្រភពមួយចំនួនដែលនាំឱ្យកើតមានពិធីបុណ្យនេះឡើង ហើយមានទាក់ទងទៅនិងគម្ពីរពុទ្ធសាសនាទៀតផង ដូចជានៅក្នុងគម្ពីរធម្មបទដ្ឋកថាដែលដំណាលពីបុត្រពអង្គរបស់ស្ដេចមហិន្ទរាជចង់យកទ្រព្យធ្វើទាន តែបិតាអនុញ្ញាតិឱ្យទ្រព្យបន្តិចបន្តួចតែប៉ុណ្ណោះ។ ពេលធ្វើចង្ហាន់ប្រគេនព្រះសង្ឃ ពួកអ្នកបម្រើប្រតិបត្តិមិនល្អនាំឱ្យកើតទៅជាប្រេត។ គម្ពីរបេតវត្ថុនិយាយថា មាន

ព្រានម្នាក់នៅក្រុងពារាណសី ជាអ្នកបរបាញ់សត្វធ្វើជាអាហារ លុះគាត់ស្លាប់ទៅ ក៏ទៅកើតជាប្រេត។ សាស្ត្រាអានិសង្សបិណ្ឌដែលសរសេរពីការសម្ដែងរបស់ព្រះពុទ្ធអង្គ សម្ដែងពីញាតិសន្តានរបស់សេដ្ឋីអនាថបិណ្ឌិកដែលបានស្លាប់ទៅ។ សាស្ត្រាវិជ្ជាធរនិយាយពីព្រះមហាថេរ ១ ព្រះអង្គ ព្រះនាម ឧបគុត្តត្ថេរ បានហោះទៅស្ថាននរក ហើយបានទេសនាប្រោសពួកប្រេតដែលធ្វើឱ្យពួកប្រេតបានធូរស្បើយពីទុក្ខ រួចពួកប្រេតក៏ផ្ដាំនឹងព្រះមហាថេរឱ្យញាតិរបស់ខ្លួនធ្វើបុណ្យ ដើម្បីឧទ្ទិសឱ្យពួកគេ (សូមមើលអត្ថបទពិស្ដារ នៅក្នុងកម្ពុជ សុរិយា ឆ្នាំទី ៤៨ លេខ ២ ឆ្នាំ ១៩៩៤)។

### ឃ. ចូលឆ្នាំ

រឿងចូលឆ្នាំនេះវាទាក់ទងទៅនឹងរឿងមួយ ដែលពណ៌នាពីការភ្នាល់គ្នារវាងមហាកបិលព្រហ្មនិងបុរសម្នាក់ឈ្មោះ ធម្មបាល។ ដោយចាញ់ធម្មបាលទើបត្រូវកាត់ព្រះសិរឱ្យកូនស្រីទាំង៧អង្គដង្ហែជុំវិញភ្នំព្រះសុមេរុ។

- *ស្រង់ព្រះ* : ត្រង់អត្ថន័យនៃការស្រង់ព្រះនេះ យើងសង្កេតឃើញថាមានជំនឿពីរបង្កប់នៅទីនេះតែម្ដង។ នោះគឺវេលានៃការស្រង់ព្រះមកដល់ គេបានយកទឹកក្រអូប (លាយផ្កា) ឬលាយទឹកអប់ មកលាងសម្អាតរូបពុទ្ធបដិមាក្នុងន័យសុំសេចក្ដីសុខចម្រើន រកស៊ីមានបាន។ គឺមានរូបភាពជាពុទ្ធសាសនា តែមានជំនឿបួងសួងបែបអរូបិយឬជំនឿដើមលាយដែរ។ ត្រង់ចំនុចនេះយើងឃើញមានទាក់ទងនឹងគម្ពីរសុត្តន្តជាតក ជាមគធភាសាថា ថ្ងៃសង្ក្រាន្តឆ្នាំថ្មីជិតចូលមកដល់ ព្រះបាទបសេនទិកោសលបានរៀបចំបាយ ទឹកហើយនិមន្តព្រះសង្ឃទៅឆ្នេរស្ទឹងដើម្បីស្រង់ទឹក ហើយសមាទានសីល។ នៅក្នុងគម្ពីរបញ្ញាស

ជាតក ត្រង់ជាតកទី ៣១ ក៏មាននិយាយពីអានិសង្សនៃការស្រង់ទឹកព្រះសង្ឃនេះផងដែរ ។

ចំណែកនៅក្នុងរជ្ជកាលព្រះបាទជ័យវរ្ម័នទី ៧ ក៏មានការដង្ហែរព្រះពុទ្ធរូប ២៥ អង្គ ដើម្បីយកទៅស្រង់ទឹកនៅប្រាសាទជ័យស្រី( ប្រាសាទព្រះខ័ន) ( កម្ពុជសុរិយា លេខ១ ១៩៩៤) ។

- ***ពូនភ្នំខ្សាច់*** **:** ការពូនភ្នំខ្សាច់ត្រូវបានប្រជាជនខ្មែរអនុវត្តជារៀងរាល់ឆ្នាំនៅក្នុងពិធីចូលឆ្នាំថ្មី ។ ការពូនភ្នំខ្សាច់ គឺធ្វើឡើងតាមទម្លាប់ប្រភពរឿងវាលុកចេតិយ ។ យកវាលុកចេតិយ ដើម្បីឧទ្ទិសចំពោះព្រះរតនត្រ័យ ។ ចំណែកឯរឿងមួយទៀតដែលទាក់ទងទៅនឹងជំនឿដើមវិញនោះ គឺរឿងព្រានសម្លាប់សត្វ ដែលមាននៅក្នុងគម្ពីរអានិសង្សវាលុកចេតិយបាននិយាយជាសង្ខេបថា ព្រានដែលបានសម្លាប់សត្វនោះ ពេលស្លាប់ទៅបានកើតជាប្រេត តែប្រពន្ធបានឱ្យយមរាជរាប់គ្រាប់ខ្សាច់ ដោយរាប់មិនអស់ ប្ដីនាងក៏រួចខ្លួន ។ នេះគឺជាជំនឿតាមបែបប្រពៃណី ផ្ទុយគ្នាស្រឡះពីទស្សនៈកម្មផលនិយម ដែលកំណត់ថា "គេមិនអាចយកវត្ថុអ្វីទៅកាត់កង ដូរដោះជាមួយកម្មបានឡើយ" មានន័យថា កុសលកម្មនាំឱ្យមនុស្សល្អ អកុសលកម្មនាំឱ្យមនុស្សអាក្រក់( ប្រសាសន៍របស់អ៊ុំ មៀច ប៉ុណ្ណ) ។ នៅក្នុគម្ពីរនេះដែរមានរឿងមួយទៀត ដែលនិយាយពីពួកពាណិជ្ជបានពូនភ្នំខ្សាច់ ដើម្បីឧទ្ទិសដល់ព្រះចូឡាមណីចេតិយដែលតម្កល់ព្រះចង្កូមកែវរបស់ព្រះពុទ្ធ ។ មានរឿងមួយទៀតនៅក្នុងគម្ពីរនេះដែរ និទានពីក្មេងប្រុសម្នាក់ចេះតែពូនពំនូកខ្សាច់លេង ហើយចេះតែដេកនឿលលេងនៅទីនោះ( កម្ពុជសុរិយា លេខ១ ឆ្នាំ១៩៩៤) ។

នៅក្នុងពិធីចូលឆ្នាំនេះ ក៏មានការយកបាយសម្លទៅវត្តដើម្បីនិមន្តព្រះសង្ឃឱ្យសូត្របង្សុកូលនៅមុខចេតិយផងដែរ។ ទាំងនេះសុទ្ធតែមានលក្ខណៈរួម។

– ***ពូនភ្នំស្រូវ*** **:** ការពូនភ្នំស្រូវនេះគឺគេធ្វើដូចគ្នាទៅនឹងការពូនភ្នំខ្សាច់ដែរ ក្នុងន័យជាការសុំឱ្យមានភាពចម្រើនរុងរឿង និងឱ្យស្រូវមានផលច្រើន។ បើតាមមតិរបស់អាចារ្យខ្លះថា គេពូនភ្នំស្រូវ ដើម្បីឱ្យចម្រើនដល់វត្តអារាម (បណ្ឌិត ឈឹម ទូច, ១៩៩៨ : ១៣៣)។

### ខ_ ពិធីឡើងផ្ទះ

ប្រជាពលរដ្ឋខ្មែរតែងតែធ្វើពិធីនេះមិនដែលអាក់ខានឡើយ នៅពេលដែលពួកគាត់សាងសង់ផ្ទះថ្មីរួច។ គឺមុននឹងចូលទៅនៅផ្ទះថ្មីនោះ គេត្រូវតែរៀបចំធ្វើពិធីឡើងផ្ទះនេះជាមុន ដើម្បីសុំសេចក្ដីសុខបន្ទាប់ពីពួកគាត់ឡើងទៅរស់នៅលើផ្ទះនោះ។ ពិធីនេះហើយដែលមានការគោរពរួមគ្នារវាងជំនឿពីរ គឺគេបាននិមន្តព្រះសង្ឃមកសូត្រសុំសេចក្ដីសុខចម្រើនហើយនឹងមានពិធីរៀបចំបាយ សម្លសែនព្រេនម្ចាស់ទឹកម្ចាស់ដីផងដែរ។

## III- សន្និដ្ឋាន

ជារួមទៅយើងសង្កេតឃើញថា តាំងពីដើមរៀងមក ជំនឿទាំងពីរនេះបានចាក់គ្រឹះជាមួយគ្នា ដោយមានសេចក្ដីសុខសាន្តរមនានឹងគ្នាជារៀងរហូតមក។ ការដែលអាចរួមរស់ជាមួយគ្នាបាននេះក៏ដោយសារតែប្រជាជនខ្មែរយើងបានរក្សាជំនឿទាំងពីរនេះឱ្យស្ថិតនៅក្នុងលក្ខណៈស្រដៀងគ្នាជាច្រើន។ ដូចអ្វីដែលខ្ញុំបានបកស្រាយនៅខាងលើស្រាប់ យើងឃើញថាលក្ខណៈស្រដៀងទាំងអស់មាននៅក្នុងទស្សនៈ និងពិធីជាច្រើនដូចជា: ទ្រឹស្ដីបរិដ្ឋាន ដែលនិយាយពីការណែនាំឱ្យចេះស្រឡាញ់សម្បត្តិធម្មជាតិមានដូចជាព្រៃឈើ និងសត្វជាដើម

ដែលទ្រឹស្តីនេះយើងឃើញមានទាំងនៅក្នុងការប្រតិបត្តិខាងពុទ្ធសាសនា ដែលហាមប្រាមមិនឱ្យភិក្ខុសង្ឃប៉ះពាល់ជីវិតរុក្ខជាតិ ឬសត្វឡើយ ហើយទស្សនៈនេះក៏ឃើញមាននៅខាងជំនឿអ្នកតាផងដែរ គឺថាបើដើមឈើណាដែលមានអ្នកតាស្នាក់នៅហើយ តែមនុស្សណាទៅកាប់និងមានគ្រោះថ្នាក់ដល់ជីវិត។

មួយវិញទៀតយើងសង្កេតមើលចំណុចបុគ្គលិកលក្ខណៈម្តង ការប្រតិបត្តិទាំងខាងពុទ្ធសាសនា និងអ្នកតាក៏មានគោរពស្រឡាញ់លើបុគ្គលដែលមានលក្ខណៈអស្ចារ្យ ប្លែក មានគុណធម៌ និងចេះជួយគ្នាជាដើម។

ម្យ៉ាងទៀត រូបសំណាកត្រូវបានប្រជាជនកសាងឡើង ក្នុងគោលបំណងសម្រាប់គោរពបូជាដល់បុគ្គលណាមួយ ដែលមានគុណធម៌ខ្ពស់ ដែលគេយល់ថាគួរគោរព នេះឃើញមានទាំងរូបសំណាកបែបព្រះពុទ្ធសាសនា ពុទ្ធ-បដិមា និងទាំងរូបសំណាកអ្នកតា។ ចំណែកឯទីតាំងវិញ ក៏ត្រូវបានគេដាក់ក្នុងទីខ្ពស់ សមរម្យ ដើម្បីតម្កល់ទុកជាការគោរពបូជា ឬជាសក្ការៈ។ ហើយទិសក៏ដូច្នោះដែរ ត្រូវបានគេជ្រើសរើសយ៉ាងល្អ ពោលគឺទិសបូព៌នេះឯង។ បើនិយាយពីបុណ្យខ្មោច ពិធីអាពាហ៍ពិពាហ៍ និងពិធីឡើងផ្ទះវិញ ក៏មានបង្កប់លក្ខណៈដែលជាពុទ្ធសាសនាដោយនិមន្តព្រះសង្ឃមកសូត្រ ហើយការរៀបចំសែនព្រេនក៏មិនចោលដែរ។ បន្ថែមមកលើនេះទៀត បុណ្យភ្ជុំបិណ្ឌ ជាពិធីមួយដែលមានការសែនព្រេននិងមានការបណ្តែត កន្ទោងបាយ សម្លឧទ្ទិសដល់ព្រលឹង វិញ្ញាណក្ខន្ធអ្នកដែលបានស្លាប់ទៅកើតក្នុងអបាយភូមិប៉ុន្តែនៅតែត្រូវការព្រះសង្ឃសូត្រឧទ្ទិសដដែល។ ដោយឡែកបុណ្យចូលឆ្នាំ ក៏បង្ហាញពីលក្ខណៈរួមផងដែរ ជាពិសេសនៅពេលធ្វើពិធីស្រង់ព្រះ



តែម្តង ។

ប្រជាជនខ្មែរយើងបានរក្សាប្រពៃណីកេរដំណែលនេះ តាំងពីយូយារណាស់មកហើយ ការគោរពបែបនេះត្រូវបានបន្តពីជំនាន់មួយទៅជំនាន់មួយរហូតដល់បច្ចុប្បន្ន ។ បើទោះបីរូបភាពខាងក្រៅមានភាពផ្សេងគ្នាខ្លះក៏ដោយ ក៏ការគោរព និងការអនុវត្តរបស់ខ្មែរយើងបានច្របាច់ចញ្ចូលគ្នា ហើយស្តែងចេញជាលក្ខណៈរួមជាច្រើន ដូចបានបក-ស្រាយខ្លះៗមកហើយនេះ ។

ដោយសារតែមានលក្ខណៈនៃការគោរពបែបនេះហើយ ទើបយើងសង្កេតឃើញ សូម្បីតែក្នុងវត្តខ្លះ ក៏មានខ្ទមអ្នកតាសាងសង់ឡើងនៅទីនោះដែរ ជាពិសេសនៅទិសអាគ្នេយ៍តែម្តង ។

ទោះបីជាយ៉ាងណាក៏ដោយ ក៏ជំនឿទាំងអស់នេះមានចំណុចល្អៗជាច្រើនផងដែរ ដែលអាចជាជំនួយ និងជាគំរូមួយសម្រាប់យកមកអនុវត្ត ដើម្បីឱ្យជីវិតរបស់យើងកាន់តែប្រសើរឡើង បើយកទៅប្រើក្នុងផ្លូវល្អ ។ គឺមានន័យថា ការគោរពជំនឿនេះ ហាក់បីដូចជាមានអ្វីមួយដែលតាមដានមើលយើងគ្រប់ពេលវេលា គ្រប់ទីកន្លែង ដើម្បីពញ្ញាក់អារម្មណ៍របស់យើងកុំឱ្យប្រព្រឹត្តអ្វីខុសឆ្គង ដែលជាការគ្រោះថ្នាក់ដល់ខ្លួន គ្រួសារ និងសង្គមជាតិ ។ ដូច្នេះសូមកូនខ្មែរជួយថែរក្សាវប្បធម៌បែបនេះឱ្យបានគង់វង្សផង ។

***វប្បធម៌រលត់ ជាតិរលាយ វប្បធម៌ពណ្ណរាយ ជាតិថ្កើងថ្កាន ។ វប្បធម៌ក៏អាច ឆ្លុះបញ្ចាំងពីសង្គមមនុស្សបានផងដែរ ។***

ដោយលោក **សុខ រ៉ា**



# ឯកសារយោង

*ភាសាខ្មែរ*

**ត្រឹង ងា**, ១៩៧៥, អរិយធម៌ខ្មែរ, ការផ្សាយរបស់អ្នកនិពន្ធ។

**ត្រឹង ងា**, ១៩៧៣, ប្រវត្តិសាស្ត្រខ្មែរ, ភាគ១ និង ភាគ ២, ភ្នំពេញ។

**ឈុន អៀម**, ១៩៩៤, អំពីអ្នកតា, ទស្សនាវដ្ដីកម្ពុសុរិយា, ប្រែពីលោកស្រី Elèvine Porée Masspero, ពុទ្ធសាសនបណ្ឌិត្យ, ភ្នំពេញ, ខែមេសា - ឧសភា - មិថុនា, ឆ្នាំទី ៤៨ លេខ ២។

**ឈុន អៀម**, ១៩៩៤, និមិត្តរូបនៃប្រាសាទឥណ្ឌូ និងប្រាសាទខ្មែរ, ទស្សនាវដ្ដីកម្ពុជសុរិយា, ប្រែពីលោក Henri Marchel, ពុទ្ធសាសនបណ្ឌិត្យ, ភ្នំពេញ, ខែតុលា - វិច្ឆិការ - ធ្នូ, ឆ្នាំទី ៤៨ លេខ ៤។

**យិន គីមវ៉ាន**, ២០០៣, ព្រលឹងវប្បធម៌ជាតិ, វិទ្យាស្ថានពុទ្ធសាសនបណ្ឌិត្យ, ភ្នំពេញ។

**ម៉ែន ប្រាង និង អាំ ឆន**, ១៩៩៥, ការសូត្រមន្តរំដោះគ្រោះ, នៅក្នុងទស្សនាវដ្ដីកម្ពុជសុរិយា, ពុទ្ធសាសនបណ្ឌិត្យ, ភ្នំពេញ, ឆ្នាំទី ៤៩ លេខ ១ ខែមករា - កុម្ភៈ- មិនា។

**ម៉ែន ប្រាង និង អាំ ឆន**, ១៩៩៤, បុណ្យចូលឆ្នាំខ្មែរ, នៅក្នុងទស្សនាវដ្ដីកម្ពុជ-សុរិយា, ពុទ្ធសាសនបណ្ឌិត្យ, ភ្នំពេញ, ឆ្នាំទី ៤៨ លេខ ១ ខែមករា - កុម្ភៈ - មិនា។

**ជាវ ហ៊ាន**, ២០០២, ការបរបាញ់សត្វ, នៅក្នុងទស្សនាវដ្ដីកម្ពុជសុរិយា,

ពុទ្ធសាសនបណ្ឌិត្យ, ភ្នំពេញ, ឆ្នាំទី ៥៦ លេខ ២ ខែ មេសា - ឧសភា - មិថុនា។

**ម៉ៅ សោភ័ណ**, ២០០២, ដាអារ៉ៃ ឬដាព្រះនាងឱរ៉ៃ, នៅក្នុងទស្សនាវដ្ដីកម្ពុជសុរិយា, ពុទ្ធសាសនបណ្ឌិត្យ, ភ្នំពេញ, ឆ្នាំទី ៥៦ លេខ ១ ខែមករា-កុម្ភៈ - មីនា។

**ទូច ផារ៉ា**, ២០០១, អ្នកតានៅក្នុងសង្គមខ្មែរ, នៅក្នុងទស្សនាវដ្ដីអក្សរសាស្ត្រ មនុស្សសាស្ត្រ, រោងពុម្ពបាយ័ន, ត្រីមាសទី ១។

**ទូច ផារ៉ា**, ២០០១, អ្នកតានៅក្នុងសង្គមខ្មែរ, នៅក្នុងទស្សនាវដ្ដីអក្សរសាស្ត្រ មនុស្សសាស្ត្រ, រោងពុម្ពបាយ័ន, ត្រីមាសទី ២។

**ទូច ផារ៉ា**, ២០០១, អ្នកតានៅក្នុងសង្គមខ្មែរ, នៅក្នុងទស្សនាវដ្ដីអក្សរសាស្ត្រ មនុស្សសាស្ត្រ, រោងពុម្ពបាយ័ន, ត្រីមាសទី៣។

**ទូច ផារ៉ា**, ២០០១, អ្នកតានៅក្នុងសង្គមខ្មែរ, នៅក្នុងទស្សនាវដ្ដីអក្សរសាស្ត្រ មនុស្សសាស្ត្រ, រោងពុម្ពបាយ័ន, ត្រីមាសទី៤។

**អុក ចួន**, ២០០១, ឥទ្ធិពលអរិយធម៌ឥណ្ឌាមកលើអរិយធម៌ខ្មែរ, ក្នុងទស្សនាវដ្ដីអក្សរសាស្ត្រ មនុស្សសាស្ត្រ, សាកលវិទ្យាល័យភូមិន្ទភ្នំពេញ, លេខ ត្រីមាសទី ៣។

បណ្ឌិត **ឈឹម ទូច**, ១៩៩៨, គហិបដិបត្តិពិស្ដារ, ផ្សារអូប្ញស្សី, ភ្នំពេញ។

**មៀច ប៉ុណ្ណ**, ២០០១, កម្រងឯកសារស្ដីពីប្រពៃណី និងទំនៀមទម្លាប់ខ្មែរ, ពុទ្ធសាសនបណ្ឌិត្យ, ភ្នំពេញ។

**ជួន ណាត**, ១៩៦៧, វចនានុក្រមខ្មែរ ភាគ ១ និង ២, វិជ្ជាស្ថានពុទ្ធសាសនបណ្ឌិត្យ, ភ្នំពេញ។

## គន្ថនិទ្ទេស

Ang Choulean, 1986, Les êtres surnaturels dans la religion populaire Khmère. The Center for Khmer Civvilisation Documentation

Ang Choulean, 1990, Une Illustration du Syncrétisme Religieux Actuel]

France Asiatique, 1955, Civilisation Khmère, En France Asie Revue mensuelle de culture et de synthèse.

Poree-Maspero. 1985. Cérémonies privées des Cambodgiens. Cedoreck. Phnom Penh.

Steinberg. 1959, 304, David et al.1959, Cambodia, its people, its society, its culture. Survey of world culture series. Haven, Homan Relations Area Files Press.

U.M.I. 1987. Dissertation Information Service. xerographic process on acid free pape.

Martine Batchelor & Kerry Broown, 1992, Buddhism and Ecology. word wide Fund for Nation.

## សម្ភាសន៍

សម្ភាសជាមួយលោកអ៊ុំ **មៀច ប៊ុណ្ណ** នៅថ្ងៃ ១៩ ខែកក្កដា ឆ្នាំ ២០០៥

# សារគល្បងពិចារណាអំពីសីលធម៌ដូនតាខ្មែរ

ឆ្លងតាមការសិក្សាស្រាវជ្រាវ អំពីប្រពៃណី និងទំនៀមទម្លាប់ខ្មែរ និងតាមការនិទានប្រាប់របស់ចាស់ព្រឹទ្ធាចារ្យ ដែលមានអាយុលើសពី ៨០ ឆ្នាំឡើងទៅ យើងអាចលើកយកសកម្មភាពខ្លះៗរបស់ដូនតាយើងមកឆ្លុះបញ្ចាំង និងត្រិះរិះ ពិចារណាទៅលើចំណុចមួយចំនួនដូចមានតទៅនេះ :

**១/ អំពីការសាមគ្គី :** នៅតាមជនបទស្រែចម្ការជាពិសេស ហើយនៅលើក្របខ័ណ្ឌទូទាំងប្រទេស យើងតែងសង្កេតឃើញថា បុព្វបុរសខ្មែរយើងចេះស្រឡាញ់រាប់អានគ្នា ដោយស្មោះអស់ពីចិត្តពីថ្លើម។ គេជួយទុក្ខធុរៈគ្នាដោយឥតគិតផលប្រយោជន៍ ឥតគិតផលកម្រៃឬកាត់ថ្លៃយកឈ្នួលជាប្រាក់កាសនោះឡើយ។ កាលណាគ្រួសារមួយ មានគម្រោងរៀបចំពិធីអាពាហ៍-ពិពាហ៍កូនចៅ ធ្វើបុណ្យ ឬលើកផ្ទះ អ្នកស្រុកភូមិផងរបងជាមួយ បានស្ម័គ្រស្មាស្រវាស្រទេញ ជួយតាំងពីកាប់ឈើធ្វើផ្ទះ ជួយសង់ផ្ទះទាល់តែរួចស្រេចជាស្ថាពរ ដោយទទួលយកមកវិញត្រឹមតែបាយមួយចម្អែតប៉ុណ្ណោះ។ នៅប៉ុន្មានថ្ងៃនឹង ជិតចូលដល់ពិធីមង្គលការ បងប្អូនជិតខាងបានជួយដឹកឧសសម្រាប់ត្រៀមទុកដុតចម្អិន ម្ហូបអាហារជូនភ្ញៀវពិសា។ នៅរវាងកន្លះខែមុនថ្ងៃរៀបពិធីមង្គលការ ពេលយប់ជាពិសេស គេនៅបានឆ្លៀតមកជួយបុកអង្ករអស់រយៈពេលជាច្រើនយប់ ដើម្បីបានអង្ករត្រៀមទុកពី ៥ ទៅ ៦ ការ៉ុង។ ការបុកអង្ករនេះ តែងតែធ្វើឡើងជាទ្រង់ទ្រាយធំ ដោយប្រមូលផ្តុំបានមនុស្សពី ២០

ទៅ ៣០ នាក់។ គេប្រើត្បាល់ក្តឿង(៤) និងអង្រែមេ្យាងមានសណ្ឋានដូចញញួរមួយយ៉ាងធំសម្រាប់បុក។ ដើម្បីបន្លប់ការនឿយហត់ ចាស់ៗបានបង្កើតជាទស្សនីយភាពល្បាយសិល្បៈផង និងសង្វាក់ភ្លេងដ៏ពិរោះផង កាលណាកសិករទាំងប្រុសទាំងស្រី ចេះរបៀបបុកអង្ករបំភ្លែចេញជាសាច់ភ្លេង។ ក្នុងត្បាល់នីមួយៗ មានអ្នកបុកពី ៤ ទៅ ៥នាក់ លាយចម្រុះប្រុសស្រី ។ អ្នកទី ១ យកផ្លែអង្រែទៅបុកជ្រៃលើអង្ករសំរូបនៅក្នុងប្រហោងត្បាល់ រួចដកអង្រែមកគោះបំភ្លៃ ២ ឬ ៣ ប៉ុកទៅលើមាត់ត្បាល់ អ្នកទី ២ និងអ្នកបន្តបន្ទាប់ ក៏ធ្វើតាមរបៀបនេះដូចគ្នាតាមលេខរៀងតៗគ្នា ពោលគឺបុកហើយ គោះមាត់ត្បាល់បំភ្លែឆ្លើយឆ្លងគ្នា បង្កើតបានជាចង្វាក់តន្ត្រីមួយយ៉ាងពិរោះ។ ការបុកអង្ករនេះជួនកាលអូសបន្លាយពេលរហូតដល់ម៉ោង ១២ អធ្រាត ទើបឈប់ ហើយធ្វើរហូតទាល់តែបានអង្ករល្មមនិងប្រើប្រាស់ដាំបាយបម្រើការ ហូបចុកក្នុងរយៈពេល ៣ ថ្ងៃនៃពិធីអាពាហ៍ពិពាហ៍។ នៅថ្ងៃចូលពិធី គេបែងចែកជាមុខសញ្ញាទៅតាមការចាំបាច់ គឺអ្នកខ្លះជួយរែកទឹក ពុះឧស ចិតបន្លែ ដាំបាយ ស្លបម្រើភ្ញៀវរហូតដល់ជួយលេងភ្លេង ធ្វើកូនកំដរ និងកិច្ចការរាយរងបន្ទាប់ បន្សំដ៏ទៃទៀត។ ចប់ពីធីធុរៈអាសន្ននេះ អ្នកជួយទាំងឡាយបានទទួលអំណោយជាមិត្តភាពពីសាមីដើមការវិញ នូវនំគម នំអន្សម នំប៉ាវត្រឹមតែ ២ ឬ ៣ ក្នុងម្នាក់ៗ ព្រមទាំងខ្សែអំបោះ ដែលគេចងដៃទុកតម្កល់ជាសេចក្តីថ្លែងអំណរគុណយ៉ាងកក់ក្តៅ

---

(៤) ជាប្រភេទត្បាល់ធំ ដោយយកគល់ចំបក់មានវិជ្ឈមាត្រ ប្រមាណ៧តឹកកន្លះទៅ ៨ តឹក មកចាំងជា គូប រួចដាប់ចោះប្រហោងនៅចំកណ្តាលប៉ុនមាត់កញ្ជើសម្រាប់ដាក់ស្រូវដែលត្រូវបុក។ ឯអង្រែសម្រាប់បុកមានសណ្ឋាន ប្រហែលនឹងញញួរធំ ហើយក៏ធ្វើពីឈើ ទាំងដងទាំងផ្លែដែរ។

ពីអ្នកម្ចាស់ដើមការ ។

កាលណាមានគ្រួសារណាមួយមានមនុស្សឈឺ ក៏តែងតែមានអ្នកស្ម័គ្រចិត្ត ជូនធ្វើដំណើរទៅទីជិតឆ្ងាយរកគ្រូហ្មមកមើលជំងឺ ឬជូនទៅចូលព្រៃ ឡើងភ្នំ រកថ្នាំសំបកឈើ ឫសឈើ មកផ្សំធ្វើជាឱសថព្យាបាល ។ ជូនកាលបើគ្រូហ្មទស្សន៍ទាយថា ត្រូវលៀងអារក្ស នោះអ្នកចេះភ្លេងក៏ស្ម័គ្រចិត្តមកជួយប្រគំភ្លេង ជួយដាំស្ល ជួយធ្វើជមចារកាច់បាយសី ពុះឧសរែកទឹក ។ អ្នកមានធុរៈសងគុណអ្នកមកជួយវិញតែបាយសម្លមួយចម្អែតនិងបន្ថែម ដោយពាក្យថ្លែងអំណរគុណដ៏ស្មោះតែប៉ុណ្ណោះ ។

សព្វថ្ងៃនេះ ជាទូទៅសីលធម៌ បែបទំនើបមួយបានរុញច្រានសង្គមខ្មែរឱ្យឃ្លាតកាន់តែឆ្ងាយពីសីលធម៌បែបប្រពៃណីនិយមរបស់ខ្មែរសម័យមុន ។ ទំនាក់ទំនងស្នេហារត់ដេញតាមសិទ្ធិ បុរសនារី តាមរយៈនំមានសិទ្ធិស្មើឬធំជាងនាឡិ តាមស្នេហាឈរលើការព្រមព្រៀងរវាងគូស្នេហ៍ទាំងពីរ ។ ប្រការដែលបើកទូលាយនូវសិទ្ធិខាងស្នេហានេះ មិនមែនគ្មានផលវិបាកទេ មិនមែនគ្មានការច្របូកច្របល់ខ្លះៗ ក្នុងគ្រួសារនិងក្នុងសង្គមទេ ប៉ុន្តែ មើលទៅ ប្រហែលគេមិនបកក្រោយទេ...។ នេះនិយាយចំពោះតែសង្គមជឿនលឿននៅទីក្រុងធំៗប៉ុណ្ណោះ ។ រីឯនៅជនបទស្រែចម្ការវិញ ការប្រកាន់សីលធម៌បែបប្រពៃណីនិយមនោះ ពិតមែនតែមិនបានខ្លាំងក្លាដូចពីមុន ក៏នៅតែបន្តនិរន្តរភាពរបស់ខ្លួន ។ មតិទូទៅតែងមានការចាប់អារម្មណ៍ថាៈ របៀបស្នេហា "**ចាប់ដាក់**" ឬស្នេហា "**អកម្ម**" (passif) នៅជនបទស្រុកស្រែ ដែលគូស្នេហ៍ពុំមានទំនាក់-ទំនង ស្គាល់ចិត្តគ្នា និងស្ម័គ្រចិត្តពីភាគីទាំងពីររៀងៗខ្លួននោះ ពុំសូវកើតមាន

បាតុភូតលែងលះគ្នា ឬក៏ស្ទើរតែគ្មានសោះតែម្តង។ អ្នកចិត្តវិទូនិងសង្គមវិទូជាច្រើនតែងតែ ជឿឹងឆ្ងល់ខ្លាំងណាស់អំពីបញ្ហានេះ។ ទស្សនៈរបស់បុព្វបុរសយើងក្នុងការរៀបចំទុកដាក់កូនចៅ ច្រើនតែផ្អែកទៅលើ :

១- ពិនិត្យមើលពូជពង្សវង្សត្រកូលខាងដន្លង ស្រមតាមពាក្យទំនៀម "ធ្វើស្រែឱ្យមើលស្មៅ ទុកដាក់កូនចៅឱ្យមើលផៅសន្តាន" ឬ "ផ្លែឈើមិនដែលជ្រុះឆ្ងាយពីគល់.

២- យក ថ្ងៃ - ខែ - ឆ្នាំ នៃគូទាំងពីរមកមើលផ្សំនិស្ស័យជាមួយគ្នា ដោយមើលសម្ពង្សមើលផ្សំធាតុ តាមក្បួនហោរាសាស្ត្រដែលមានមកជាកេរមតិកតាំងពីយូរណាស់មកហើយ.

៣- ជាអ្នកមានកិរិតវប្បធម៌បានបួសបានរៀនជាភិក្ខុ សាមណេរ

៤- ជាអ្នកឧស្សាហ៍ព្យាយាម ចេះខន្តីអត់ធន់ សន្តោស យោគយល់ និងមានអាធ្យាស្រ័យល្អ។

៥- ជឿជាក់ទៅលើស្នេហារួមរក្ស ដែលនឹងបណ្តុះបង្កើតឡើងជាខាងក្រោយ នូវស្នេហាមនោសញ្ចេតនា ឬស្នេហាខាងផ្លូវចិត្ត ពោលគឺកាលណាបានរួមរ័ក្សបានខ្លួនបានប្រាណហើយនោះ នឹងដុះដាលឡើងនូវការអាណិតស្រឡាញ់គ្នាភ្ជាប់និស្ស័យ ផ្សារសាច់ផ្សារឈាម វេញខ្សែជីវិតបញ្ចូលគ្នាជារៀងរហូតដល់ស្លាប់។ ប្រការខាងក្រោយនេះ ជាគន្លឹះសំខាន់ចម្បងសម្រាប់យកមកធ្វើជាមូលដ្ឋានបង្អែករបស់បុព្វបុរសដូនតាយើង។ គួរឱ្យត្រិះរិះពិចារណាដែរ ទស្សនៈយុទ្ធសាស្ត្រប្រាំចំណុចប៉ុណ្ណឹងសោះ ប៉ុន្តែគូស្វាមីភរិយាច្រើនជំនាន់នឹងច្រើនលានគូ បានរួមរស់នៅជាមួយគ្នា រួមសុខរួមទុក្ខ បង្កើតកូនចៅត។ គ្នារាប់ជំនាន់។

សូមអនុញ្ញាតវិលបកមករកចរន្តប្រព័ន្ធសាមគ្គីធម៌ របស់ខ្មែរសម័យមុនវិញ។ មានប្រភេទជួយគ្នា សាមគ្គីគ្នាមួយបែបទៀតដែលកាន់តែចម្លែកខ្លាំងណាស់នោះ គឺ **"យំសាមគ្គី"**។ ការផ្សព្វផ្សាយដំណឹងមរណភាពនៅតំបន់ជនបទ តែងតែធ្វើឡើងតាមសំឡេងគងឬសំឡេងភ្លេងស្គរធំ (ស្រុកខ្លះហៅភ្លេងទាំមីង ខ្លះទៀតហៅភ្លេងកន្ទ្រាំមួង)។ ញាតិមិត្តព្រៀងលាន កាលបើបានដំណឹងតាមស្នូរស្គរធំនេះហើយ ក៏មិត្តម្នានាំគ្នានាំយក ទៀនធូប អង្ករ បន្លែ ដែលម្នាក់ៗបានយកទៅជួយបុណ្យ។ ជួនកាលគេច្រើនពោលថា **"បុណ្យខ្មោច"**។ បន្ទាប់ពីចូលបុណ្យហើយ ភ្ញៀវមិត្តម្នាទៅសួរប្រពន្ធកូនចៅរបស់សព អំពីអាការៈជំងឺដែលនាំឱ្យធ្ងន់ធ្ងររហូតដល់ស្លាប់។ ប្រពន្ធឬកូនចៅរបស់សព យំនិយាយរៀបរាប់ប្រាប់ភ្ញៀវសព្វគ្រប់អំពីរអាការៈជំងឺ អំពីវិធានការផ្សេងៗក្នុងការព្យាបាលដើម្បីជួយសង្គ្រោះអាយុជីវិតបុគ្គលអភ័ព្វ។ ក្រុមគ្រួសារនិយាយប្រប្ញូរប្របក ទាំងទួញសោកអាឡោះអាល័យ។ ឯភ្ញៀវដែលទៅសាកសួរនោះក៏នាំគ្នាជួយយំរៀបរាប់អំពីមនោសញ្ចេតនាសោកស្តាយអស់មួយសន្ទុះ ក៏សម្រួលអារម្មណ៍ឱ្យបានស្ងប់ឡើងវិញ រួចក៏ចាត់ចែងកិច្ចការផ្សេងៗមានដាំបាយ ចិតបន្លែ ហាន់សាច់ធ្វើត្រី... សម្រាប់ធ្វើអាហារទទួលភ្ញៀវដែលទៅចូលរួម។

សញ្ញាមួយទៀត បញ្ជាក់អំពីសន្តានចិត្តអាណិតប្រណី ជួយទុកធុរៈគ្នានោះគឺ នៅតាមស្រុកភូមិនៅជនបទនានា គេតែងសង្កេតឃើញមានពាងទឹកមានគម្របត្រឹមត្រូវការពារធូលី និងមានត្រឡោក ឬផ្តិលមួយដាក់ពីលើគម្របពាង។ រាល់អ្នកដំណើរគោចរផ្លូវឆ្ងាយ រមែងបានធូរស្រាលក្នុងអារម្មណ៍ដោយមានទឹកផឹក នៅពេលដែលគេស្រេក។ ពាងទឹកនេះគឺជាការដាក់ទានម្យ៉ាងដែល

បកស្រាយផ្លូវបញ្ចាំង អំពីមនោសញ្ចេតនាស្រឡាញ់រាប់អានគ្នាដោយស្មោះអស់ពីដួងចិត្ត និងចេះជួយសម្រាលទុក្ខធុរៈគ្នា ក្នុងគ្រាលំបាក។ មិនតែប៉ុណ្ណោះ ប្រសិនបើអ្នកដំណើរ ស្អុនការពុំអាចបន្តដំណើរបានព្រោះត្រូវស្នាក់អាស្រ័យនៅពេលយប់នោះ គេអាចមើលឃើញការជួយសម្រួលដោះទុក្ខធុរៈ ពីរបែបគឺៈ

១/ អាចសុំផ្ទះណាមួយក្នុងភូមិដើម្បីដេកសម្រាកមួយយប់ ដើម្បីបន្តដំណើរទៅមុខទៀតនៅថ្ងៃបន្ទាប់។ ការជួយផ្គត់ផ្គង់បាយទឹកមួយរយៈពេលយប់នោះ តែងតែផ្សារភ្ជាប់ជាមួយនឹងការអនុញ្ញាតិឱ្យដេកសម្រាក នាពេលយប់នោះទៀតផង ដោយវាចាទន់ភ្លន់ រាក់ទាក់បើកបេះដូងយ៉ាងទូលាយ ក្នុងទឹកមុខញញឹមរីករាយរាក់ទាក់។ ជួនកាលអ្នកដំណើរអាចមានភ័ព្វវាសនា មានសាលាសម្នាក់មួយ សម្រាប់ដេកស្នាក់នៅពេលយប់ដែលខកដំណើរ។ ជាធម្មតានៅជិតសាលាសម្នាក់ តែងតែមានស្រះឈូកប្រកបដោយទឹកថ្លាយង់ត្រជាក់ក្សេមក្សាន្ត។ អ្នកដំណើរមានផ្ទះសម្នាក់ដេកស្រួល មានស្រះសម្រាប់ងូតលុបលាងខ្លួនឱ្យមាន កម្លាំងនឹងបន្តដំណើរទៅមុខទៀត។

បូកសរុបមកវិញ រូបភាពសាមគ្គីរបស់ខ្មែរបុរាណឃើញថា រាក់ទាក់កក់ក្ដៅនិងប្រកបដោយសុទ្ធចិត្តណាស់។ គឺអាស្រ័យដោយធមិសាមគ្គី អាស្រ័យដោយមនោសញ្ចេតនាចេះជួយទុកធុរៈគ្នាយ៉ាងនេះហើយ បានជាប្រទេសយើងពីអតីតកាល មានវិសាលភាពទូលំទូលាយដូចប្រអប់បេះដូងខ្មែរសម័យមុន។ គឺអាស្រ័យដោយធមិសាមគ្គីដ៏ជិតស្និទ្ធ ស្និតរមួតនេះហើយ ដែលអត្តភាពប្រទេសយើងរឹងមាំ ខ្លាំងពូកែធ្វើឱ្យនគរជិតខាងគោរពខ្លបខ្លាច...។

ចុះនាពេលសម័យបច្ចុប្បន្ននេះវិញ តើទម្រង់សាមគ្គីធមិដ៏ជិតស្និទ្ធ ការ

យោគយល់គ្នា ការចេះជួយឈឺឆ្អាលទុក្ខធុរៈគ្នានោះ វាទៅឯណាបាត់អស់ទៅ? បច្ចុប្បន្ន ការជួយគ្នា ការសាមគ្គីតាមទម្រង់ដើម គឺនៅមានសេសសល់តិចតួចណាស់។ យើងបាត់បង់អស់មួយចំនួនធំទៅហើយ។ សព្វថ្ងៃនេះ ការជួយគ្នាច្រើនតែទូទាត់ទៅជាសាច់ប្រាក់ ឧទាហរណ៍: អ្នកភ្លេងអារក្សដែលពីមុនជួយគ្នាដោយឥតគិតថ្លៃ ដូរយកតែបាយមួយចម្អែត... អ្នកភ្លេងក្នុងពិធីអាពាហ៍ពិពាហ៍ អ្នកដាំស្ល អ្នករែកទឹក អ្នកដាំតែ... សុទ្ធតែមានឈ្នួលទាំងអស់។ រឿងដែលកម្សត់មែនទែន គឺសូម្បីតែការជួយលក់ដី លក់គោ លក់ជ្រូក លក់ផ្ទះ លក់ទំនិញផ្សេងៗទៀត ក៏សុទ្ធតែមាន "កម្រៃជើងសារ" ឬកុំមីស្យុង (commission) ទាំងអស់។ មនោសញ្ចេតនាជួយគ្នាដោយសុទ្ធចិត្ត ត្រូវជំនួសមកវិញដោយ "កុំមីស្យុង"។ នេះជាសញ្ញាបកស្រាយប្រាប់ឱ្យយើងរាល់គ្នាថា **"ធម៌សាមគ្គីខ្មែរកំពុងរង្គោះរង្គើខ្លាំងណាស់ហើយ"** អាចនឹងឈានទៅរលុបរលាយអស់ទាំងស្រុង។ ខ្ញុំមិនបាននិយាយថា ជាមួយនឹងការរលុបរលាយនៃធម៌សាមគ្គីខ្មែរនេះ "តើមានអ្វីខ្លះដែលត្រូវដួលរលំជាមួយនឹងការរលុបរលាយនៃសាមគ្គីខ្មែរ" នេះឡើយ។ សូមខ្មែរទាំងអស់គ្នា សន្និដ្ឋានតាមការយល់ឃើញរៀងៗខ្លួនផងចុះ។

# ពិធីតាមបែបព្រហ្មញ្ញនិយមនៅលើទឹកដី
# អតីត នគរភ្នំ (ស.វ ទី ១ ដល់ទី ៧)

នៅខេត្តតាកែវដែលជាប្រភពដើមនៃផែនដីអាណាចក្រភ្នំ (Founan) យើងសង្កេតឃើញរាជធានីបុរាណបំផុត មានទីតាំងនៅភ្នំអង្គរបុរីបច្ចុប្បន្ន។ នៅទីនោះ អ្នកផងអាចទស្សនាប្រាសាទដែលតាបសឬសីធ្វើចង្រ្កមចម្រើនមេត្តា ភាវនាតាមបែបព្រហ្មញ្ញសាសនា ប្រាសាទភ្នំដា និងបុរីរមណីយដ្ឋានបុរាណជាច្រើន ព្រមទាំងសំណល់ឧបករណ៍ប្រើប្រាស់របស់បុព្វបុរសយើង កាលពីជំនាន់នោះ មានដូចជា ក្អមពួច ខួច ប្រាក់កាក់ កងដៃ កងជើង អង្កាំ..... ជាដើម ចំណែក នៅប៉ែកខាងត្បូងចម្ងាយប្រមាណ ៤០ គីឡូម៉ែត្រ ពីអង្គរបុរី គេមើលឃើញពី ចម្ងាយនូវប្រាសាទមួយតាមរចនាបទនា ស.វទី ៧ សង់នៅលើកំពូលភ្នំយ៉ាងខ្ពស់ តាំងនៅឃុំព្រះបាទជាន់ជុំ (ជើងកញ្ចុំ) ក្នុងស្រុកគីរីវង្ស។ ប្រាសាទដែល មានឈ្មោះថា "បាយ៉ង្កោ ឬបាយ៉ង់នេះ" ទំនងជាសង់ឡើងនៅក្នុងរជ្ជកាលព្រះបាទ ឦសានវរ្ម័ន (គ.ស ៦២៦)។ ប្រជាកសិករដែលរស់នៅតំបន់ប្រវត្តិសាស្រ្ត សម័យបុរាណនោះ ទោះបីមកដល់បច្ចុប្បន្នហើយក្តីក៏នៅរក្សាព្រពៃណីពីបរមបុរាណខ្លះៗនៅឡើយ។ ទាំងការនិយាយស្តីសោត ក៏នៅរក្សាសព្ទសំនៀងដើម តាមពាក្យពេចន៍ ក្នុងសិលាចារឹកខ្លះៗនៅឡើយ ដូចយ៉ាងពាក្យដែលសរសេរនឹង អក្សរ ស តម្រួតជើង ន ( ្ន ) ជើង ( ្ង ) ជើង ទ ( ្ទ ) ។ល។ គេហៅថា ស្នែង (ជំនួសស្នែង) ស្ទឹង (ជំនួសស្ទឹង) ស្ទៅ (ជំនួយសស្ទៅ).... រីឯប្រពៃណី ខាងការព្យាបាលជំងឺ មានជាអាទិ៍ ជំងឺ

ប្រមាត់ត្បូវ[៥] (ម្រិត្បូវ) ក៏គេនៅ រក្សាតាមទម្រង់ដើមនៅឡើយ ដូចជាពិធីកាប់ប្រមាត់ត្បូវ ពិធីបញ្ចៀសគ្រោះកាច ឬពិធីចម្លងកាឡទ័យ[៦] ពិធីល្បៀងអារក្ស ពិធីឡើងរោង ពិធីហៅព្រលឹង ។ល។ ដែលសុទ្ធជាស្នាមដំណែលតំណាតមកពីជំនឿបែបព្រលឹងនិយមទាំងអស់។ ក្នុងពេលនេះ ខ្ញុំសូមលើកយកពិធីពីរបែបដែលមិនសូវដែលបានប្រទះឃើញ នៅតំបន់ខេត្តខ័ណ្ឌដទៃឯទៀតនោះគឺ :

## I~ ពិធីបញ្ចុះអដ្ឋិធាតុតាមបុរាណ តំណពីប្រពៃណីនគរភ្នំ

កាលពីសម័យបុរាណ នៅព្រះរាជអាណាចក្រភ្នំ របៀបទុកដាក់ខ្មោចមានវិធីប្លែកគ្នា ដូចជា

**ក**/ នៅតំបន់ព្រៃភ្នំ គេយកខ្មោចទៅចោលនៅក្នុងព្រៃស្មសានដ្ឋានស្ងាត់ ឱ្យសត្វ ចចក ខ្លា សិង្ហ ក្អែកត្មាត ស៊ីជាចំណី.

**ខ**/ បើនៅតំបន់បឹងបួវាលទំនាប គេយកខ្មោចរុំក្រណាត់រួចយកក្រាសឬស្បឺ អបពីក្រៅមួយជាន់ទៀត រួចយកទៅដាក់បន្ទើរនៅលើមែកឈើឱ្យស្អុយរលួយទៅតាមធម្មជាតិ.

**គ**/ យកខ្មោចទៅកប់ក្នុងដីជម្រៅប្រមាណ ៣ហត្ថរួចលុបដីពូនជាផ្នូរជួនមានដំបូលប្រក់ ជួនយកមែកឈើឬបន្លាស្រោស់ពីលើ.

**ឃ**/ យកខ្មោចទៅកាច់ជើងកាច់ដៃ ដាក់ឱ្យអង្គុយចោងហោង រួចយកក្រណាត់ ឬអំបោះរុំយ៉ាងតឹងណែន ទើបយកទៅក្នុងពាងដីដុតហើយយក

---

(៥) សៀវភៅកម្រងឯកសារស្តីពីប្រពៃណីទំនៀមទម្លាប់ខ្មែរ ទំព័រ... ។

(៧) សៀវភៅកម្រងឯកសារស្តីពីប្រពៃណីទំនៀមទម្លាប់ខ្មែរ ទំព័រ... ។

ទៅកប់.

**ង**/ យកសពទៅបូជាក្នុងភ្លើង ហើយរើសសំណល់ឆ្អឹងដែលសល់ពីភ្លើងឆេះ យកទៅបាចចោលក្នុងដងទន្លេបឹងស្ទឹង សមុទ្រក៏មាន ឬក៏យកទៅបញ្ចុះនៅតាមជើងភ្នំ ឬ ចង្កេះភ្នំ។

មកដល់ចំណុចនេះ សូមអនុញ្ញាតលើកយកពិធី និងរបៀបបញ្ចុះសពតាមបែបប្រពៃណី នៅភូមិនានា នៃឃុំព្រៃអំពក តាអូរ សោម ព្រះបាទជាន់ជុំ និងឃុំផ្សេងៗទៀត ក្នុងស្រុកគិរីវង្ស ខេត្តតាកែវ។ អ្នកដែលនិយមយកអដ្ឋិធាតុទៅបញ្ចុះ ត្រូវបំពេញកិច្ចការមួយចំនួនដូចតទៅ :

- ត្រូវនាំគ្នាយក ចប កាំបិត ទៅឆ្ការព្រៃ ចូកសម្រួលដីនៅជើងភ្នំ ឬជនីរភ្នំ តាមបណ្តាំរបស់សាមីបុគ្គល កាលគាត់នៅរស់។ ទីតាំងភូមិសាស្ត្រដែលសមស្របនឹងការបញ្ចុះអដ្ឋិធាតុនោះ គឺ :

- ត្រូវឱ្យមានម្លប់ត្រជាក់ទ្រឈឹងទ្រឈៃ បង្កើតឡើងដោយម្លប់ឈើធំៗ នៅទីនោះ។

- ត្រូវឋិតនៅជិតប្រភពទឹក ដូចជា អូរ ជ្រោះ ជប់...។

- ត្រូវជីករណ្តៅជម្រៅជាមធ្យម ៣ ទៅ ៤ តឹក សម្រាប់កប់អដ្ឋិធាតុដែលគេវេចខ្ចប់ក្នុងបង្វេចក្រណាត់ ស.

- និមន្តព្រះសង្ឃសូត្រធម៌បង្សុកូល ក្នុងពេលដែលយកអដ្ឋិធាតុទៅបញ្ចុះក្នុងរណ្តៅ។

- យកផ្ទាំងចំណិតថ្មដា ទំហំល្មមទៅដាក់ពីលើកន្លែងដែលកប់អដ្ឋិធាតុនោះ ទុកជាគោលចំណាំឱ្យដឹងថាអដ្ឋិធាតុបុគ្គលណា នៅត្រង់ណា មានចំណិតថ្ម

រាងដូចម្ដេច ហើយនៅខាងឆ្វេងឬខាងស្ដាំ អដ្ឋិធាតុបុគ្គលណា ? មិនតែប៉ុណ្ណោះ គ្រួសារជំនាន់នីមួយៗ តែងតែបង្ហាញផ្ដាំប្រាប់សមាជិកគ្រួសារ ជាកូនជាក្មួយ ជាចៅ ឱ្យដឹងថាឱ្យចំណាំតៗគ្នា កុំឱ្យភ្លេចព្រោះ នៅរាល់ពេលធ្វើបុណ្យអណ្ដូងទរ ដែលជា បុណ្យរំលឹកដល់គុណ មាតាបិតា ជីដូនជីតា ញាតិសាលោហិតនោះ អ្នកស្នងត្រកូលពីជំនាន់មួយទៅជំនាន់មួយ តែងតែនាំគ្នាទៅបោសសម្អាត និមន្តព្រះសង្ឃបង្សុកូលបញ្ជូនកុសលទៅបុព្វការីជនពុំដែលខាន។

វិធីបញ្ចុះអដ្ឋិធាតុ ជាប្រពៃណីតំណមកពីខ្មែរបុរាណនេះ ធ្វើឱ្យយើងនឹកឃើញដល់ (Menhirs)(៧) "មែនហៀរ" មានច្រើននៅខេត្ត ប្រឺតាញ (បារាំង)។ គឺជាដុំថ្មធំៗមានកម្ពស់រហូតដល់ ២០ម៉ែត្រ តម្រៀបគ្នាជាជួរក៏មាន ជារង្វង់មូលក៏មាន។ បុរាណវិទូខ្លះ កាត់ស្មានថាជាទីបញ្ចុះសពនៃមនុស្សបុរាណ ខ្លះទៀតពុំទាន់ហ៊ានសន្និដ្ឋានថាយ៉ាងណាៗនៅឡើយ។

គួរឱ្យឆ្ងល់ដែរថា ហេតុអ្វីបានជាខ្មែរសម័យមុនៗ តែងតែផ្ដែផ្ដាំកូនចៅឱ្យយកអដ្ឋិធាតុរបស់គាត់ ទៅបញ្ចុះនៅតំបន់ព្រៃភ្នំដូច្នេះ? សូមបកស្រាយថា :

១- នេះជាការបន្តប្រពៃណីពីជំនាន់មុនៗរាប់សតវត្សមកហើយ.

២- បណ្ដាជននៅតំបន់នេះ ស្រឡាញ់ព្រៃភ្នំក្រមថ្ម ស្មើនឹងជីវិតរបស់គេ។ គេយល់ថា ព្រៃភ្នំ ជាប្រភពនៃជីវិតរបស់គេ។ នៅព្រៃភ្នំមានចំណីអាហារសព្វបែបយ៉ាងដូចជា :

**ក/ សាច់ :** បានមកពីម្រឹគីម្រឹគាគ្រប់ប្រភេទ មានឈ្លូស ប្រើស រមាំង ក្ដាន់ ទន្សោង ខ្ទីង គោព្រៃ សំពោច ។

---

(៧) វចនានុក្រមបារាំង ទំព័រ ៦៥៦។

**ខ/ សាច់ :** បានមកពីបក្សាបក្សី មានក្ងោក មាន់ព្រៃ ប៉ោល តោក តាវ៉ៅ លលក សារិកា ទទា...។

**គ/ សាច់ :** បានមកពីឧរង្គសត្វ ដូចជា ពស់ ពស់ថ្លាន់ ពង្រួល អណ្តើក ជាស ត្រកួត ។ល។

**ឃ/** បន្លែ មើមឈើ ផ្លែឈើជាចំណីមាន ប្រិច ស្ពៅ ច្រេស ប្រង់ ទំពាំង ដំឡូងស្រំ ដំឡូងជ្រូក ដំឡូងទៀន ដំឡូងត្រែង ក្តួច...និងផ្លែសាវម៉ាវ ទ្រៀល សិរមាន់ ខ្នុរព្រៃ ផ្ទៀវ បង្គោ វាយ ដកពាយ ម័កប្រេង ម័កប្រាង...។

**ង/** ផ្តល់នូវអនុផលដូចជា ជ័រ វល្លិ ផ្តៅ ស្លឹកសោម ឈើសង់ផ្ទះ ។ល។ និង ។ល។

ដោយហេតុថា ព្រៃជាប្រភពជីវិត ផ្តល់នូវចំណីអាហារ សម្ភារៈប្រើប្រាស់ចាំបាច់ប្រចាំថ្ងៃនេះហើយ បានជាបុព្វបុរសយើងតែងតែផ្សារភ្ជាប់ជីវិតទៅនឹងព្រៃ តាំងពីខ្លួននៅរស់ រហូតដល់ស្លាប់ទៅ ក៏នៅផ្តែផ្តាំកូនចៅឱ្យយកអដ្ឋិធាតុខ្លួន ទៅបញ្ចុះនៅព្រៃភ្នំ ដើម្បីដួងព្រលឹងរបស់គាត់ បានផ្សារភ្ជាប់តាំងនៅជាមួយព្រៃភ្នំ ជាឋានសួគ៌ ឋានសុខរបស់គាត់ជារៀងរហូត ។

## II- បុណ្យអណ្តូងទរ (៨)

តាមពិតបុណ្យនេះ ប្រារព្ធធ្វើឡើងដើម្បីរំលឹកគុណព្រលឹងជីដូនជីតា មាតាបិតា ញាតិកាទាំង ៧ សន្តាន ដែលមានអដ្ឋិធាតុបញ្ចុះតាមចង្កេះភ្នំ ក្រោម

---

(៨) មែនទែនទៅ អណ្តូងទរ គឺជាឈ្មោះទីតាំងភូមិសាស្ត្រ ដែលគេតែងប្រារព្ធធ្វើបុណ្យរំលឹកគុណ ឧទ្ទិសកុសលចំពោះវិញ្ញាណក្ខន្ធបុព្វការីជន មានជីដូនជីតា ម៉ែឪ ញាតិសន្តាន ..... ប៉ុណ្ណោះ ។

រូបភាពជាពិធីមួយយ៉ាងអធិកអធម ដោយប្រមូលផ្តុំកូនចៅ ពុទ្ធបរិស័ទចំនួនច្រើនភូមិ ដែលមានទីតាំងនៅទីជិតខាងភ្នំ (រវៀង[៩]) នោះ។

**កាលបរិច្ឆេទ និងការសាងសង់រោងបុណ្យ :**

តាំងពីបុរមបុរាណមក អ្នកស្រុកនៅតំបន់នោះធ្លាប់កំណត់យកថ្ងៃពេញបូណ៌មី និងថ្ងៃ ១ រោច ខែពិសាខ។ ការកំណត់កាលបរិច្ឆេទនេះ សំដៅយកថ្ងៃសំខាន់ ពាក់ព័ន្ធនឹងថ្ងៃពិសាខបូជា គឺរំលឹកដល់ថ្ងៃដែលព្រះពុទ្ធបរមគ្រូប្រសូត ទ្រង់បានត្រាស់ និងយាងចូលបរិនិព្វានផង និងរំលឹកវិញ្ញាណក្ខន្ធបុព្វការីជនរបស់គេរៀងៗខ្លួនផង។

រោងបុណ្យត្រូវបានសង់ឡើង ដោយយកកូនឈើត្រង់ៗ ប៉ុនកជើងប្រហែលប្រមាណបីម៉ែត្រ ធ្វើជាសសរ ហើយយកឫសីត្រង់ៗ វែងៗ បំពាក់ធ្វើជាធ្នឹម និងកម្រាលដំបូល។ លុះកើតបានជារាង ទំហំប្រមាណ ៨ ម. x ១០ ម. ហើយ គេក៏យកស្លឹកដូងទាំងធាងៗ មកគ្របធ្វើជាដំបូល សម្រាប់ធ្វើជាម្លប់ការពារកំដៅថ្ងៃ និងសន្សើម។

ការតុបតែងលម្អរោង តម្រូវឱ្យយកស្លឹកឈើបៃតងស្រស់មកចងផ្គោបតាមសសរ និងរំលេចក្បាច់ក្បូរផ្សេងៗ ដោយយកធាងដូងមកបំបែកជាពីរផ្នែក កាប់ស្លឹកដូងឱ្យនៅខ្លីៗ ចងខ្មែងលម្អជារាងខ្លោងទ្វារគ្រប់ល្វែង។ ដើម្បីបន្ថែមសោភណភាព គេយកផ្កាចម្រុះពណ៌មកក្រងជារំយោលខ្លះ នៅតាមសសររោង ជាពិសេស ការរចនាតុបតែងលម្អដែលគេយកចិត្តទុកដាក់ជាងគេនោះគឺនៅ ទីពុទ្ធាសនៈ ដែលមានតាំងពុទ្ធរូប ជាកញ្ចក់ជាព្រះបត់។

---

(៩) គឺនៅជម្រាលភ្នំរវៀងនេះហើយ ដែលអ្នកស្រុកតែងយកធាតុបុព្វការីជនទៅបញ្ចុះ។

ក្រៅពីរៀបចំកសាងតុបតែងរោងបុណ្យនេះ គេបានធ្វើរោងតូចមួយនៅជិតរោងបុណ្យនេះដែរ ដែលជាទីសម្រាប់សម្ដែងសិល្បៈជនបទ។

ចាប់តាំងពីពេលព្រឹក ពុទ្ធសាសនិកជននៅបណ្ដាភូមិទាំងប៉ុន្មាន ដែលចំណុះនឹងពិធីនេះបាន នាំគ្នាបររទេះដឹកកូនចៅ ដឹកគ្រឿងឧបភោគ បរិភោគ ដើម្បីយកមកចាត់ចែងក្នុងពិធីបុណ្យនេះ។ នៅវេលាប្រមាណជាម៉ោង ៥ ល្ងាច ព្រះសង្ឃពី ៨ ទៅ ១០ អង្គ ក៏បាននិមន្តមកដល់រោងបុណ្យ។ លោកអាចារ្យ និងពុទ្ធបរិស័ទ ចាត់ចែងភេសជ្ជៈ តែ ស្ករ ទឹកក្រូច ប្រគេនព្រះសង្ឃ។ រួចហើយ ពិធីនមស្ការថ្វាយបង្គំព្រះ ពិធីចម្រើនព្រះបរិត្ត និងពិធីសម្ដែងធម៌ទេសនា ក៏បានប្រព្រឹត្តទៅជាបន្តបន្ទាប់ ស៊ីរយៈពេលប្រមាណជា ៣ ម៉ោង។ តំណពីនេះទៅ មានកម្មវិធី ស្មូតធម៌នានាធម្មសង្វេគ ដែលយុវនារី ដែលមានសំឡេងពីរោះ ឆ្នើមៗ មកពីតំបន់ទូកមាសខ្លះ និងយុវនារីនៅមូលដ្ឋានជិតខាង ដែលចំណុះវត្តព្រះធាតុខ្លះ បានបន្លឺសំឡេងក្រាងក្រអៅ ពីរោះលន្លង់លន្លោច គួរឱ្យស្រណោះ។ ធម៌បទទាំងនេះ ច្រើនដៅចំពោះពុទ្ធប្រវត្តិ នាពេលព្រអង្គលាចាកនគរ លាព្រះនាងពិម្ពា និង រាហុលកុមារ ដើម្បីចេញសាងផ្នួសប្រោសសត្វ, ការយាងចូលបរិនិព្វាន របស់ព្រះពុទ្ធបរមគ្រូ សំណោកព្រះពុទ្ធមាតា ពេលព្រះអង្គធ្វើទុក្ករកិរិយា, និងធម៌ស្មូតទាក់ទងនឹង វេស្សន្តរជាតក ដូចជា សំណោកមទ្រី ទំនួញក្រិស្នា និងជាលី ពេលតាជូជក វាយធ្វើបាបបង្អត់អាហារ ..... ។ល។

ចាប់តាំងពីម៉ោង ១១ អធ្រាត រហូតដល់ភ្លឺ សិល្បៈយីកេ ក្លាយល្ខោនបាសាក់ បានបម្រើអារម្មណ៍ពុទ្ធសាសនិកជន និងបងប្អូនពុទ្ធបរិស័ទ ទាំងស្រីប្រុស ក្មេងចាស់ ដែលបានអញ្ជើញទៅចូលរួមក្នុងពិធីបុណ្យអណ្ដូងទរនេះ បាន

ទស្សនាកំសាន្ត ដោយភ្លេចគិតពីការងុយងោក ពីការហេវហត់អស់កម្លាំង។ គេ ជក់ចិត្តជិតអារម្មណ៍ យ៉ុងចិត្តអាណិតព្រះនាងព្រាហ្មណ៍កេសរ ដែលត្រូវនាង យីស៊ុន ជាមហេសីចុងរបស់ព្រះលក្សិណវង្ស ធ្វើទុក្ខបុកម្នេញគ្រប់យ៉ាង។

និយាយរួម ពិធីបុណ្យអណ្តូងទរនេះ គឺជាប្រពៃណីដ៏យូរលង់របស់ជន ជាតិខ្មែរ នាតំបន់នោះ ដែលជាប់សាច់ឈាម ពូជពង្សពីខ្មែរសម័យអង្គរបូរី និង សម័យព្រះបាទ បាយ៉ង់កោរ ដរាបមក។

នៅពេលព្រឹក ពុទ្ធបរិស័ទបានប្រគេនយាគូ ចំពោះព្រះសង្ឃ។ រួច ហើយមានគ្រួសារខ្លះ បាននិមន្តព្រះសង្ឃទៅសូត្រធម៌បង្សុកូល ចំពោះអដ្ឋិធាតុ ជីដូនជីតា មាតាបិតា ញាតិកា ដែលបញ្ចុះទៅតាមជនីរភ្នំ ឬតាមទីទំនាប ផ្សេងៗ សមស្របទៅតាមប្រពៃណីព្រះពុទ្ធសាសនា។ លុះដល់ម៉ោង ១១ ថ្ងៃ ត្រង់ ក៏មានកម្មវិធីប្រគេនចង្ហាន់ចំពោះព្រះសង្ឃ។ បន្ទាប់ពីនេះ ពុទ្ធបរិស័ទណា ដែលមិនទាន់បានធ្វើពិធីបង្សុកូល កាលពីព្រឹកមិញនោះ ក៏បន្តនិមន្តព្រះសង្ឃ ២ ឬ ៣ អង្គ ទៅធ្វើពិធីបង្សុកូល ទាល់តែគ្រប់ៗគ្រួសារ ទើបវិលមកកាន់រោង បុណ្យ ហើយរៀបចំជញ្ជូនឥវ៉ាន់រៀងៗខ្លួន មកកាន់ផ្ទះសម្បែងវិញ។

សូមអនុញ្ញាតជម្រាបថា មកទល់បច្ចុប្បន្ន (២០០៧) ពិធីបុណ្យឧទ្ទិស កុសលចំពោះបុព្វការីជន ដែលប្រព្រឹត្តទៅនៅមូលដ្ឋាន **"អណ្តូងទរ"** ជាប្រវត្តិ-សាស្ត្រនេះ នៅតែប្រព្រឹត្តទៅទៀងទាត់ តាមកាលបរិច្ឆេទ ដែលជាទម្លាប់ជាប់ តំណតាំងពីព្រេងនាយមក។

តើយើងសម្គាល់ឃើញអត្ថន័យអ្វីខ្លះ ពីបុណ្យ **"អណ្តូងទរ"** របស់អ្នក ស្រុកដែលរស់នៅភូមិនានា នៅជិតខាងតំបន់នេះនោះ ?

១- សកម្មភាពនេះ សរបញ្ជាក់អំពីមនោសញ្ចេតនាផ្សារភ្ជាប់ពីកូនចៅជំនាន់ក្រោយៗជាបន្តបន្ទាប់ ចំពោះគុណូបការដ៏ធ្ងន់ធ្ងររបស់ជីដូនជីតា មាតាបិតា ញាតិកាទាំង ៧ សន្តាន ទោះបីអស់លោកចែកឋានទៅកាន់បរលោក ដ៏យូរលង់ហើយក្តី ក៏កូនចៅជំនាន់ក្រោយៗ នៅតែនឹករលឹកគុណនោះ ពុំមានពេលណាបំភ្លេចបាន។ ហើយជាកិច្ចតបស្នង និងជាកិច្ចដឹងគុណ ដែលកូនចៅជំនាន់ក្រោយ បានធ្វើបុណ្យឧទ្ទិសកុសល ឆ្ពោះទៅវិញ្ញាណក្ខន្ធ បុព្វការីជនទាំងអស់នោះ សូមបានទៅកើតក្នុងឋានបរមសុខ សោយទិព្វសម្បត្តិក្នុងសួគ៌វិមានជារៀងរហូតទៅ។

២- ក្រៅពីពិធីតបគុណតាមបែបពុទ្ធសាសនា ពិធីនេះ ក៏អាចចាត់ទុកថាជាប្រពៃណី ទំនៀមទម្លាប់ ជាប់ជាប្រវត្តិសាស្ត្រ អាចឱ្យជំនាន់ក្រោយស្វែងយល់បានអំពីជំនឿ អំពីពិធីផ្សេងៗ ដែលជាប់ជាតំណ ជាលម្អាន តាំងពីព្រេងនាយមក។

## ○ ការប្រែប្រួលនៃប្រពៃណី ទំនៀមទម្លាប់បញ្ចុះសព

ការបញ្ចុះសពដូចបានពណ៌នាជម្រាបពីខាងលើនេះ បានធ្លាប់ប្រព្រឹត្តធ្វើតាំងពី បរមបុរាណរហូតមកទល់នឹងដើមទសវត្សទី ៥០។ គិតចាប់ពីនោះមក របៀបបញ្ចុះសព បានប្តូរទម្រង់ចែកចេញជាពីរបែបគឺ:

១- បូជាសព រួចហើយរើសឆ្អឹង (អដ្ឋិធាតុ) ដាក់ក្នុងកោដ្ឋ (ល្អ ឬសាមញ្ញទៅតាមធនធានរបស់គ្រួសារ) ។ដាក់អ្នកមានជីវភាពខ្វះខាតយកកោដ្ឋអដ្ឋិធាតុទៅផ្ញើនៅតាមវត្តអារាម ដើម្បីផ្សារភ្ជាប់វិញ្ញាណក្ខន្ធជាមួយព្រះពុទ្ធ

ព្រះធម៌ ព្រះសង្ឃ។ ចំណែកគ្រួសារអ្នកមានធនធាន គេសាងសង់ចេតិយ សម្រាប់តម្កល់កោដ្ឋអដ្ឋិធាតុ មាតាបិតា ជីដូនជីតា ញាតិសន្តាន...។

២-គេយកសពទាំងមូល ទៅដាក់ក្នុងចេតិយ ដែលគេច្នៃធ្វើជាឡូត សម្រាប់ដាក់មឈូសសព រួចបិទផ្សាគម្របស៊ីម៉ង់ពីលើ តម្កល់សពទុកជារៀង រហូតទៅ។ ចេតិយខ្លះធ្វើឡូតមួយ ខ្លះឡូតពីរ ខ្លះឡូតបីតាមគម្រោងក្នុង គ្រួសារ។ ការកសាងចេតិយតម្កល់សពនេះ ខ្លះក៏ធ្វើក្នុងបរិវេណវត្ត ដែល គ្រួសារខ្លួនធ្លាប់ធ្វើបុណ្យ ធ្វើទានតាំងពីបរមបុរាណមក។ គេផ្ដែផ្ដាំកូនចៅឱ្យ យកសពទៅតម្កល់នៅចេតិយក្នុងវត្ត ដើម្បីឱ្យវិញ្ញាណក្ខន្ធបានភ្ជាប់និស្ស័យជា មួយព្រះពុទ្ធ ព្រះធម៌ ព្រះសង្ឃ។ ចំណែកមនុស្សខ្លះទៀតគេសាងចេតិយ តម្កល់សព ឬអដ្ឋិធាតុឪពុក ម្ដាយ ដូនតាគេ នៅមុខផ្ទះក្នុងបរិវេណដីភូមិ នៅទីទួលកេរគ្រួសារ..... ដោយគិតថាចង់ឱ្យព្រលឹងបុព្វការីជននៅជិតៗកូនចៅ គ្រាន់បានគោរពបូជាតៗគ្នា ពីជំនាន់មួយទៅជំនាន់មួយ រហូតអវសាន។

# អាគ្រក់ ឬអារក្សភ្នំ

អាគ្រក់ ឬអារក្សភ្នំ ជាខ្មោចបិសាចមួយប្រភេទ ដែលអាចចាត់ចូលក្នុងពពួក **ប្រេត** ភូត អមនុស្ស, អសុរកាយ ។

## ១. រូបរាងអាគ្រក់ :

តាមការនិយាយត១គ្នាមក បិសាចពួកនេះ ច្រើនមានមាឌធំខ្ពស់ជាងដើមឈើទាំងឡាយ មានកាយអាក្រក់ មិនគួរឱ្យចង់មើល គ្មានសម្លៀកបំពាក់បិទបាំងរាងកាយទេ ។ ពួកវានិយាយខ្លាំង១ ដូចសំឡេងឧគ្ឃោសនៈស័ព្ទ ។

## ២. ទីលំនៅរបស់អាគ្រក់ :

តាមធម្មតា អាគ្រក់ តែងរស់នៅក្នុងព្រៃភ្នំ ដែលមានដើមឈើធំ១ខ្ពស់១ មានជ្រោះជ្រលងដងអូរ ជាទីសមសាន្តឋានស្ងាត់ ។ វាកម្រនឹងបញ្ចេញរូបឱ្យមនុស្សឃើញណាស់ លើកលែងតែក្នុងករណីពិសេសប៉ុណ្ណោះ ។

## ៣. រឿងពិតទាក់ទងនឹងអារក្សភ្នំ :

បងប្រុសខ្ញុំឈ្មោះ **មៀច អ៊ុល** (បងធំ) និង **មៀច អន** (បងតូច) បាននិយាយប្រាប់ក្នុងរវាង គ.ស. ១៩៣៤ ។ កាលណោះ ប្រជាកសិករនៅភូមិនានា នៃឃុំព្រៃអំពក ព្រៃរំដេង ឃុំសោម ឃុំតាអូរ ដែលមានភូមិឋាននៅជិតភ្នំ ព័ទ្ធវង់ជាប់គ្នារដឹក ។ ពួកគាត់ធ្វើស្រែនៅតាមដីទំនាប នៅចន្លោះជ្រលងភ្នំ ហើយកាប់រានព្រៃធ្វើចម្ការដាំពោត សណ្ដែក បន្លែបង្កា ដំឡូង នៅតាមជើងភ្នំ ឬជំនីរភ្នំ ។ នៅពេលដែលដំណាំឱ្យផលជាផ្លែ មើម ហើយនោះ គេតែងចាត់

មនុស្សឱ្យនៅដេកចាំមើលរក្សាការពារ កុំឱ្យសត្វព្រៃ ដូចជា ជ្រូកព្រៃ ស្វាប្រើស រមាំង ក្តាន់ មកស៊ីបំផ្លាញផលដំណាំ។ ដូចអ្នកស្រុកទាំងពួងដែរ ឪពុកខ្ញុំបានចាត់បងប្រុសខ្ញុំ ឈ្មោះ អ៊ុល កាលណោះអាយុប្រមាណជា ១៦ ឆ្នាំ ឯបងអន អាយុប្រហែល ៧ ឬ ៨ ឆ្នាំ។ បងៗខ្ញុំជារៀមច្បងនោះ បីនាក់សុទ្ធតែស្រីៗ ទើបឪពុកខ្ញុំចាត់កូនប្រុស ដែលមានវ័យនៅក្មេងៗឱ្យទៅចាំចម្ការ។ តាមទំនៀមទម្លាប់ប្រពៃណីនៅតំបន់នោះ មុននឹងប្រមូលផលដំណាំយកមកទុកដាក់ហូបចុក ឬលក់ដូរនោះ គេត្រូវយកផលដំណាំ ដូចជាពោត សណ្តែក ដំឡូង ត្រឡាច ល្ពៅ មកចាត់ចែងធ្វើជាអាហារសំណែន សែនជូនអារក្សភ្នំឱ្យគេបានស៊ីចុកជាមុនសិន ទើបហ៊ានយកចាត់ចែងជាក្រោយ។ បើពុំនោះទេ មុខជាកើតមានអព្ភូតហេតុដ៏អាក្រក់ណាមួយជាមិនខាន។ សូមជម្រាបថា ពេលនោះដំណាំពោត សណ្តែក ...... នៅក្នុងចម្ការឪពុកខ្ញុំ បានចូលដល់ដំណាក់កាលត្រូវប្រមូលផលទុកហើយ ព្រោះពោតក៏ចាស់ខ្លះ ទុំខ្លះ សណ្តែកក៏ទុំ .....។ បងៗប្រុសខ្ញុំទាំងពីរនាក់ ដែលទៅចាំចម្ការ ក៏បានកាច់ពោតស្ងោរបរិភោគ ដោយពុំបានធ្វើពិធីសែនព្រេនឱ្យអារក្សភ្នំឡើយ។ ក្រោយពីបានបរិភោគបាយ និងពោតស្ងោរឆ្អែតស្កប់ស្កល់ហើយ ក៏នាំបងប្អូនដេកលក់ទាំងពីរនាក់ទៅ។ នៅពេលពាក់កណ្តាលអាធ្រាត បងអ៊ុលរបស់ខ្ញុំ ក៏បានភ្ញាក់ពីដំណេក ដោយឮសូរដើមឈើនិងដើមឫស្សីនៅជំនីរភ្នំ[១០] ប៉ែកខាងលិច បាក់រលំឮសូរប្រាវៗ ពីទិសខាងជើង ហើយឮកាន់តែច្បាស់ឡើងៗ ឆ្ពោះមកខ្ទមចាំចម្ការរបស់គាត់។ ដោយភ័យពេក

---

(១០) ភ្នំរវៀង ឬភ្នំល្បៀង សព្វថ្ងៃសូម្បីតែកូនឈូសមួយក៏គ្មានផង ព្រោះអ្នកស្រុកកាប់ព្រៃជាជម្រកសត្វវាលល្ហីងល្ហើយអស់ទៅហើយ។

គាត់ក៏ដាស់បងអន ឱ្យក្រោកពីដំណេក ដើម្បីរង់ចាំមើលហេតុការណ៍ដ៏ចម្លែកនេះ។ ពេលដែលស្នូរបាក់ដើមឈើ និងគុម្ពឫស្សីកាន់តែជិតមក១ គាត់ក្រឡេកមើលទៅឃើញអារក្សភ្នំនោះ មានមាឌធំ ហើយខ្ពស់ផុតចុងព្រឹក្សាលើភ្នំទាំងអស់។ វាមានជើងវែង១ បោះជំហានមកជិតដល់ខ្ទម ក៏ស្រែកសន្ធាប់ថា : "ផលដំណាំទាំងប៉ុន្មាននៅទីនេះ ជារបស់អញ ហេតុអ្វីក៏អាច្រមក់ឯងនាំគ្នាស៊ីមិនប្រាប់អញជាមុន ចូរឯងចេញពីទីនេះឱ្យឆាប់ !។ វាយកឈើច្រត់វាមកផ្អែកនឹងខ្ទមចម្ការបងខ្ញុំ ធ្វើឱ្យខ្ទមទ្រេតទៅត្បូង ដោយអំណាចទម្ងន់ឈើច្រត់អារក្សភ្នំ។ បងខ្ញុំទាំងពីរភ័យញ្ញាក់សាច់ដូចកូនកណ្ដុរ គាត់ងើយមើលទៅលើដំបូលខ្ទមឃើញពងស្វាស (ពងល្វា) វាប៉ុន១ក្អម។ វាគំរាមដូច្នេះហើយ ក៏បោះជំហានយ៉ាងវែង១ ឆ្ពោះទៅទិសខាងត្បូង ជាន់បាក់ព្រៃ បាក់គុម្ពឫស្សី លាន់ដូចខ្យល់ព្យុះ។ គ្រាន់តែវាទៅផុតបានបន្តិច បង១ខ្ញុំទាំងពីរ ក៏នាំគ្នាសម្រូតចុះពីលើខ្ទមហើយរត់ត្រហេបត្រហបមកផ្ទះទាំងកណ្ដាលយប់។ ម្ដាយខ្ញុំបន្ទោសឪពុកខ្ញុំថា ហេតុអ្វីក៏បណ្ដោយឱ្យកូនក្មេង១ទៅចាំចម្ការ នាំឱ្យមានរឿងភិតភ័យស្ទើរលស់ព្រលឹងកូន។ បងខ្ញុំទាំងពីរនាក់ ភិតភ័យញ័រសាច់ផង ហត់ឃ្លួស១ផង ព្រោះនាំគ្នារត់ឱ្យឆាប់បានដល់ផ្ទះ។ ស្អែកឡើងឪពុក និងម្ដាយខ្ញុំ ទៅធ្វើពិធីសែនពោតស្ងោរឱ្យអារក្សភ្នំស៊ី ដើម្បីអង្វរករ សុំប្រមូលភោគផលចម្ការយកមកប្រើប្រាស់។

## ៤_រឿងប្រេតស្រីពាំ :

កាលណោះបងប្រុសខ្ញុំឈ្មោះ មៀច អ៊ុល បានបួសជាព្រះសង្ឃ ហើយមករៀនសាលាបាលីជាន់ខ្ពស់ ដោយស្នាក់នៅភ្នំពេញ ក្នុងវត្តលង្កា ប្រមាណ

រវាង គ.ស. ១៩៣៧-៣៨ គឺក្នុងជំនាន់អាចារ្យ ហែម ចៀវ។ តាមការនិយាយតៗគ្នា បានឱ្យដឹងថា កាលណោះ ព្រះករុណាព្រះបាទ ស៊ីសុវត្ថិ មុនីវង្ស ទ្រង់បានចាត់ចែងព្រះរាជទ្រព្យ ក្នុងមួយថ្ងៃចំនួន ៥ រៀល[(១១)] ប្រគល់ទៅឱ្យស្ត្រីជានាយពិសេស[(១២)] ម្នាក់ឈ្មោះ **"ស្រីពុំ"** សម្រាប់ចាត់ចែងធ្វើចង្ហាន់ ដើម្បីដាក់បាតព្រះសង្ឃក្នុងវត្តទាំងប៉ុន្មាន ដែលតែងតែនិមន្តបិណ្ឌបាតនៅក្នុងវាំង។ ស្រីពុំបានកេងកិបទុកព្រះរាជ្យទ្រព្យខ្លះៗ ជារៀងរាល់ថ្ងៃ ដោយមិនបានចំណាយឱ្យអស់ទាំង ៥ រៀល នោះឡើយ។ ថ្ងៃមួយស្រីពុំមានជំងឺជាទម្ងន់ គ្រូពេទ្យហ្មព្យាបាលមិនជា ក៏ស្លាប់ទៅ។ រំលងប្រមាណជាមួយខែក្រោយមក នៅពេលយប់ជ្រៅជិតពាក់កណ្ដាលអធ្រាត អ្នកក្រុងភ្នំពេញជួបនឹងហេតុការណ៍ចម្លែកគួរឱ្យរន្ធត់តក់ស្លុតពន់ប្រមាណ គឺ :

១- ឮសូរស័ព្ទសំឡេងច្រវាក់ អូសប្រាវៗ តាមវិថីនានាក្នុងក្រុង គួរឱ្យចម្លែកប្លែកខុសពីធម្មតា។

២- ឮសូរសម្រែកអាក្រោស ប្រកាសប្រាប់ថា : ខ្ញុំជាស្រីពុំ នាយពិសេសរបស់ព្រះករុណាជាម្ចាស់ជីវិត។ ដោយសារខ្ញុំកេងកិបប្រាក់ព្រះរាជទ្រព្យ ដែលព្រះករុណាប្រទានសម្រាប់ទិញបន្លែ ត្រីសាច់ ធ្វើចង្ហាន់ដាក់បាតព្រះសង្ឃរៀងរាល់ព្រឹក លុះខ្ញុំស្លាប់ទៅ កម្មពៀរតាមផ្ដន្ទាឱ្យខ្ញុំមកកើតជាប្រេត។ សូមអស់លោក បងប្អូនទាំងអស់កុំយកតម្រាប់តាមខ្ញុំ។

---

(១១) ៥ រៀលជំនាន់នោះ អាចមានតម្លៃស្មើនឹងជិត ២០០ ដុល្លារ នាពេលបច្ចុប្បន្ន (ជាសាច់ប្រាក់សុទ្ធ "លោហៈ") ។

(១២) អ្នករៀបចំក្រយាស្ងោយព្រះរាជា។

គ្រាន់តែឮសូរសម្រែកអាក្រោស លាន់ឮពាសពេញទាំងទីក្រុង មនុស្សម្នាផងទាំងពួង នាំគ្នាភ័យខ្លាច ញាក់សាច់ស្ទើរមិនហ៊ានដេក។ នៅពេលដែលឮសំឡេងស្រែកខ្លាំងៗ ប្រាមប្រាប់អ្នកផងនេះ មានគេលួចអើតមើលតាមបង្អួច ឬនៅលើដំបូលផ្ទះ ឃើញប្រេតស្រីខ្មៅស្លុងៗ ដើរចុះដើរឡើង ដោយមានកម្ពស់ខ្ពស់ហួសចុងគគីរទៅទៀត។ រំលងប្រមាណជាដប់ថ្ងៃក្រោយមក សម្រែកអាក្រោសផ្ដេសផ្ដាំនេះក៏បាត់សូន្យឈឹងទៅ។

គួរបញ្ជាក់ផងដែរថា បាតុភូតបែបនេះ កើតឡើងម្ដងម្កាលប៉ុណ្ណោះ ក្នុងកាលៈទេសៈពិសេស។

អារក្សភ្នំ នៅតំបន់ភ្នំល្វៀង បានបង្ហាញខ្លួនយូរៗម្ដង ដើម្បីសម្ដែងឱ្យមនុស្សនៅតំបន់នោះ ដឹងថា ទីឋានព្រឹក្សព្រៃនេះ ក៏មានពួកគេជាអ្នកចាំមើលថែរក្សា ដូចជាម្ចាស់ផងដែរ។ ដូច្នេះ រាល់មុខរបរបង្កបង្កើនផល ផ្នែកកសិកម្ម ក៏មានពួកគេគ្រប់គ្រងថែរក្សាដែរ។

មិនមែនមានតែអារក្សភ្នំប៉ុណ្ណោះទេ ដែលរស់នៅក្នុងព្រៃធំនាតំបន់នោះទេ ក៏ប៉ុន្តែ នៅមានពួក **"ម្រេញគង្វាល"** នៅតាមហួងហែងថែរក្សាម្រឹគីម្រឹគានៅនាតំបន់ព្រៃធំៗ ទាំងនោះផងដែរ។ មានថ្មើរព្រៃជាច្រើន បានដំណាលថា នៅពេលល្ងាច ដែលពួកគេនាំគ្នាទៅដេញសត្វក្នុងព្រៃភ្នំនោះ ប្រសិនបើគេឮសំឡេងក្មេងស្រែកឮគ្រលួចថា **"វីល"** នោះ ពួកព្រានថ្មើរព្រៃ ដឹងជាមុនថា ពួកគេពិតជា **"ខ្លែង"** រកដេញសត្វមិនបានឡើយ។ រីឯសំឡេងស្រែកឮគ្រលួចនៅឯខ្នងភ្នំនោះ គឺជាសំឡេង ម្រេញគង្វាល ដែលប្រមូលសត្វរបស់គេយកមកគ្រប់គ្រងថែរក្សា កុំឱ្យព្រានព្រៃប្រមាញ់បាន។ ប្រសិនបើព្រានឆ្លាត

គេគ្រាន់តែធ្វើពិធីសែន នំចំណី ចេកទុំ ឬបាយសម្លបន្តិចបន្តួច ស្នើសុំសត្វកំបាក់កំពុក ហើយស្ងួត្របាលីបើកព្រៃទៅ ក៏អាចនឹងមានវាសនាបរបាញ់សត្វបានយកមកធ្វើម្ហូបជាមិនខាន។ ជួនកាល ពេលដែលព្រានព្រៃចេញពីភ្នំ ចុះមកដល់វាលស្រែក្បែរជើងភ្នំនោះ បើគេក្រឡេកមើលទៅមាត់ព្រៃក្បែរវាលស្រែ គេនឹងឃើញកូនក្មេងដើរដង្ហែគ្នា នៅតាមស្រែក្បែរមាត់ព្រៃ។ នោះគឺជាពួកម្រេញគង្វាល ដែលដើរយាមល្បាត ការពារសត្វរបស់គេ។

ក្រៅពីនេះ នៅតាមជាយភ្នំ ឬនៅតាមទីទួលដែលមានព្រៃក្រាស់នោះ គេក៏ធ្លាប់បានឃើញមនុស្សមួយជំពូក រស់នៅជាសហគមន៍យ៉ាងអាថ៌កំបាំង ជួនឱ្យឃើញ ជួនក៏បាត់ភ្លាមៗ។ គេនិយមហៅពួកនេះថា ជា**អ្នកកំបាំងសច្ចំ** ដែលកាលពីជាតិមុនជាព្រះសង្ឃ និមន្តធ្វើចង្ក្រមភាវនា ធ្វើវិបស្សនាកម្មដ្ឋាន។ លុះដល់លោកសុគតទៅ ក៏ទៅចាប់កំណើតជាអ្នកកំបាំងសច្ចំ រស់នៅក្នុងព្រៃដូចជាអមនុស្ស ឬទេវតាមួយពួក។ ចាស់ៗជំនាន់ដើមបានដំណាលថា ពេលណាមានធុរៈធ្វើបុណ្យ ឬរៀបមង្គលការកូនចៅ គេអាចទៅខ្ចីចាន ឬសម្ភារៈចាំបាច់ផ្សេងៗ ពីអ្នកកំបាំងសច្ចំ ប៉ុន្តែត្រូវយកទៅសងវិញ ឱ្យទៀតងទាត់ពេលវេលាដែលគេកំណត់ឱ្យ។ បើពុំដូច្នោះទេ ថ្ងៃក្រោយ មិនអាចទៅខ្ចីអ្វីបានទៀតឡើយ។ មានមនុស្សលោភលន់ខ្លះ ពេលបានឃើញចានឆ្នាំង កែវ ស្លាបព្រាល្អៗ ក៏បំភ្លេចពាក្យសច្ចៈ មិនបានយកសម្ភារៈដែលខ្ចីនោះ យកទៅសងគេ ក៏ត្រូវទទួលរងទណ្ឌកម្មដោយលែងអាចខ្ចីអ្វីៗពីអ្នកកំបាំងសច្ចំ(១៣) ទៀតឡើយ។

---

(១៣) មានតំបន់ខ្លះគេហៅថា "អ្នកត្រង់"។

*ឯកសារនេះដកស្រង់ចេញពីសៀវភៅ ៖*

*- ក្បួនអាពាហ៍ពិពាហ៍ របស់អ្នកឧកញ៉ា* ***ញឹក នូច***

*- ក្បួនទម្រង់ការ របស់ឧត្តមប្រឹជា* ***ចាប ពិន***

*អស់លោក ដែលចង់ក្លាយខ្លួនទៅជាអ្នកផ្លូវ ចៅមហា មេបា អាចារ្យ ដឹកនាំកម្មវិធី អាពាហ៍ពិពាហ៍ អាចយកក្បួននេះទៅទន្ទេញ សិក្សាឱ្យចេះចាំស្ទាត់ នោះ ពិតជាត្រូវបានជាទីពឹងពាក់របស់ញាតិមិត្តក្នុងភូមិជាមិនខាន ។*

## ពិធីទម្រង់ការអាពាហ៍ពិពាហ៍ (តាមទំនៀមបុរាណខ្មែរ)

❋ **ពិធីហោមរោង (ហោមពិធី) បទហោមរោង**

- **សែនគ្រូពាលី**

**ផ្តើម ៖ បទហោមរោង**

- **ចៅមហា ៖** (និយាយពីបទហោមរោង) សូមគោរពភ្ញៀវកិត្តិយសទាំងខាងប្រុស ទាំងខាងស្រី អញ្ជើញជួយកាន់គ្រឿងបណ្ណាការ ចេកទុំ នំផ្អែម កំណត់ពេលាវាសី ។

- ឥឡូវឃើញថា ភ្ញៀវកិត្តិយសបានមកជួបជុំគ្នាអស់ហើយ បន្ទាប់មក លោកអ្នកភ្លេងលេងបទចៅព្រាហ្ម ដើម្បីហែហាមគ្រឿងបណ្ណាការទៅកាន់គេហដ្ឋានខាងស្រី ហ៎ ! "សូមសម្លេងឃ្មោះបន្លឺឡើង"

- **បទ ចៅព្រាហ្ម** (លេងមួយចប់)

- **ចៅមហា ៖** (និយាយ) សូមឱ្យអ្នកផ្លូវខាងស្រី ទាំងបីនាក់

និយាយស្ដីដណ្ដឹងចៅចូវកូនស្រីលោកមេបា

~ **អ្នកផ្លូវ** : (និយាយ) ត្បិតលោកភោគផលមហាសម្បត្តិ បានពឹងពរកនាងខ្ញុំទាំងបីនាក់ ឱ្យធ្វើជាអ្នកស្នេហ៍ចែចូវ អ្នកផ្លូវ ស្រីទាំងបី មកស្ដីដណ្ដឹងលោកមេបា។ ឥឡូវនាងខ្ញុំសូមក្រាបប្រណិប័តន៍អស់លោកមេបារៀមច្បងរងបន្ទុក ឪពុកម្ដាយ។

~ **មេបា** : សូមលើកដៃថ្វាយព្រះ

~ **អ្នកផ្លូវស្រី** : សូមទានជ្រាបជម្រាបលោកមេបា ឧកញ៉ាព្រះពញា ត្រកូលរៀមច្បង ប្រុស-ស្រី តូចធំទាំងប៉ុន្មាន សូមទានជ្រាប ត្បិតពីថ្ងៃមុនលោកភោគផលមហាសម្បត្តិ បានពឹងពរកនាងខ្ញុំឱ្យធ្វើជាអ្នកស្នេហ៍ ចែចូវ អ្នកផ្លូវ ស្រីទាំងបីនាក់ ចូលមក ស្ដីដណ្ដឹងកូនស្រីលោកមេបា នាងខ្ញុំហៅពីចម្ងាយដូចជាមិនគួរគប្បី ហៅពីជិតដូចជាមិនសម នាងខ្ញុំសូមលើកដៃប្រណម្យគាល់លោកមេបា សូមមានប្រសាសន៍ សូមទានជ្រាប។

~ **មេបា** : (ឆ្លើយ) ខ្ញុំរកតែអ្នកស្រឡាញ់ទេ បើស្រឡាញ់ឱ្យមកញឹក បើរលឹកឱ្យមកញយ អ្នកមុនកម្សោយ (ខ្សោយ) អ្នកក្រោយ មានលាភ។ សូមឱ្យអ្នកផ្លូវមានប្រសាសន៍បន្តទៀត។

~ **អ្នកផ្លូវ** : សូមទានជ្រាបជម្រាបអស់លោកមេបា កាលគ្រាវេលាមុន នាងខ្ញុំសុំអុជទៀនទាំងគូឆ្វេងស្ដាំ សុំនិយាយការ លោក មេបាស្រីក៏ព្រមអនុញ្ញាតដល់ឃ្លានេះទៀត នាងខ្ញុំសុំផ្លូវដើរ ជណ្ដើរឡើង សុំកន្ទេលទ្រនាប់ទ្រាប់ដាក់ប្រដាប់ប្រដា ម្លូស្លា ចេកទុំនំផ្អែម។

~ **មេបា** :

~ **អ្នកផ្លូវ** : សូមទានជ្រាបជម្រាបលោកមេបា កាលវេលាគ្រាមុន លោកមេបាឱ្យនាងខ្ញុំស្រឡាញ់ហើយ ឃ្លានេះទៀតនាងខ្ញុំសុំស្រឡាញ់ដល់កូនស្រីលោកមេបា តើកូនស្រីលោកមេបាមានទាក់ទិនទៅអ្នកឯណាហើយ ឬក៏នៅឡើយ ? សុំប្រសាសន៍ សូមទានជ្រាប ។

~ **មេបា** : (ស្រី) កូននាងខ្ញុំឥតទាន់មានទាក់ទិននឹងគេទេ (សូមទានជ្រាប)

~ **អ្នកផ្លូវ** : សូមទានជ្រាបជម្រាបអស់លោកមេបា កាលគ្រាវេលាមុន លោកមេបាមានប្រសាសន៍ថា :

កូនស្រីលោកឥតមានទាក់ទិននឹងគេទេ ឃ្លានេះទៀតនាងខ្ញុំសូមក្រាបប្រណិប័តន៍ សុំស្ដីដណ្ដឹងកូនលោកមេបាឈ្មោះនាង (...........) ជាកូនស្រីលោកមហាសេដ្ឋី ឱ្យទៅបណ្ឌិត (..........) កូនលោកភោគផលាមហាសម្បត្តិ សូមជាសាច់ ជាសន្ដាន ជាស្ពានមេត្រី សុំស្ដីដណ្ដឹងជាគូស្រករតរៀងទៅ សូមប្រសាសន៍ សូមទានជ្រាប ។

~ **មេបា** : មើលកូនប្រុសអ្នកផ្លូវស្រីមានចេះអ្វីខ្លះ ? តើចេះកាច់សង្រែក ចងវែក ធ្វើជាលភ្នែកក្រួចដែរឬទេ ?

~ **អ្នកផ្លូវ** : សូមទានជ្រាបជម្រាបអស់លោកមេបា លោកសួរនាងខ្ញុំថា តើកូនប្រុសខាងនាងខ្ញុំនេះណា ចេះធ្វើកិច្ចការទាំងបីនេះទេ កិច្ចការទាំងបីនេះ កូននាងខ្ញុំចាំសព្វគ្រប់អស់ហើយ សូមទានជ្រាប ។

~ **មេបា** : ហើយតើកាច់សង្រែក, ចងវែក និងធ្វើជាលភ្នែកក្រួច

នេះ មានន័យយ៉ាងម៉េច សូមអ្នកផ្លូវឆ្លើយ ។

~ **អ្នកផ្លូវ** : សូមទានជ្រាប ជម្រាបអស់លោកមេបា ពាក្យកាច់សង្រែកមានន័យថា ចេះរែក ឬថ្លឹងឱ្យស្មើគ្នា រវាងក្រុមគ្រួសារទាំងសងខាង ។ ពាក្យថាចងរែក មានន័យថា ឱ្យដឹងត្រជាក់ក្ដៅ ។ ន័យត្រង់ហ្នឹង បើរកទទួលទានត្រជាក់ក្ដៅយ៉ាងណា ឬជួបហេតុការណ៍យ៉ាងណា ត្រូវចេះអត់ធ្មត់ ហើយពាក្យថា ចេះធ្វើជាលភ្នែកក្រួច មានន័យថា ទោះស្ថិតក្នុងកាលៈទេសៈណាក៏ដោយ ត្រូវចេះរាប់ញាតិ កុំឆ្មើងឆ្មៃនឹងមាតាបិតា ញាតិសន្តានទាំងសងខាង ។

~ **មេបា** : ការបកស្រាយរបស់អ្នកផ្លូវនេះ ពិតជាត្រឹមត្រូវហើយ ដូច្នេះការចងស្ពានមានមេត្រីស្ដីដណ្ដឹងកូនស្រីខ្ញុំនេះ យើងពុំយល់ទាស់ទេ ។ ប៉ុន្តែកូនស្រីនាងខ្ញុំមានមេមានបា សូមបង្វែបង្កិលបង្វិលបង្គុយទៅរកលោកមេបាប្រុសចុះ ។

~ **អ្នកផ្លូវ** : សូមទានជ្រាប ជម្រាបអស់លោកមេបា កាលគ្រាមុននាងខ្ញុំមកមួយគ្រាជាពីរគ្រា ឥឡូវគម្រប់ជាបីគ្រា លោកមេបាមានប្រសាសន៍ថា ខ្លួនលោកជាស្រី នាងខ្ញុំក៏ជាស្រី សម្ដីទន់ប្រពន្ធគេផង ។ លោកមេបាស្រីបានឱ្យនាងខ្ញុំបង្វែរបង្កិលបង្វិល ទៅលោកមេបាប្រុស ដូច្នេះនាងខ្ញុំសូមក្រាបប្រណិប័តន៍លា ។

~ **អ្នកផ្លូវ** : សូមក្រាបប្រណិប័តន៍លោកមេបា

~ **មេបា** : លើកដៃថ្វាយព្រះ សូមអ្នកផ្លូវមានប្រសាសន៍

~ **អ្នកផ្លូវ** : សូមទានជ្រាបជម្រាបអស់លោកមេបា កាលឃ្លាមុននាងខ្ញុំសុំស្ដីដណ្ដឹងកូនស្រីលោកមេបាស្រី លោកក៏មានប្រសាសន៍ថា ខ្លួនលោក

ជាស្រី នាងខ្ញុំក៏ជាស្រី សម្តីមិនអស់មិនហើយ ។ ដូច្នេះនាងខ្ញុំសុំស្តីដណ្តឹងកូនស្រីលោក មេបាឈ្មោះ ................ សូមទានជ្រាប ។

- **មេបាប្រុស** : ការដែលនាងមកស្តីដណ្តឹងដល់មេបាស្រី នោះលោកមេបាស្រីបានយល់ព្រមហើយ ឯយើងជាមេបាប្រុសក៏មិនយល់ទាស់អ្វីដែរ ពីព្រោះមេបាប្រុសនេះទុកដូចជាជើងក្រោយ តែងតែដើរតាមជើងមុខជាដរាប ។ ប៉ុន្តែលោកមេបាសុំសួរទៅអ្នកផ្លូវទាំងបី តើនាងអ្នកផ្លូវអាចទទួលរ៉ាប់រងមង្គលការក្នុងយប់មួយថ្ងៃពីរបាន ឬពុំបាន ។ សូមអ្នកផ្លូវមានប្រសាសន៍ ។

- **អ្នកផ្លូវ** : សូមទានជ្រាបជម្រាបអស់លោកមេបា កាលឃ្លាមុនលោកមេបាបានបង្គាប់ឱ្យនាងខ្ញុំទទួលរ៉ាប់រងកិច្ចទម្រង់ការ ជូនលោកមេបាសូមជម្រាបប្រសាសន៍ ក្នុងកិច្ចទម្រង់ការនេះ នាងខ្ញុំទទួលពុំបានទេ ពីព្រោះនាងខ្ញុំជាស្រីសម្តីតិចភ្លេចក៏ច្រើន នាងខ្ញុំសូមបង្វែរបង្វិលបង្កិលចុះតាមកាំ-ជណ្តើរ ដើរទៅរោងជ័យទៅប្រាប់អ្នកសាមីដើមពុំនឹង ឱ្យទៅពឹងព រកអ្នកមុខអ្នកការ អ្នកដែលចេះនិយាយទម្រង់ការចំនួនបីនាក់ សូមឱ្យលោកមេបាពិតពិល រមិលមើលរូបឆោមលោមពណ៌អ្នកទាំងបីនេះ សូមប្រសាសន៍សូមទានជ្រាប ។

- **ចៅមហា** : សូមក្រាបប្រណិប័តន៍អស់លោកមេបា ចម្បងរងបន្ទុកឪពុកម្តាយ ភ្ជាក់ដៃលើភ្ជាក់ដៃក្រោម សូមលោកពិតពិលរមិលមើលរូបឆោមខ្ញុំ ។

- **មេបា** : រូបឆោមលោមពណ៌កម្ពស់កម្ពនោះត្រឹមត្រូវហើយ ប៉ុន្តែបើអ្នកមានកើតគថ្លង់ បូសបមកមរមាស់ ស្រែងស្រកីអណ្តែង ជជុះមាន់ដែរឬទេ?

~ **ចៅមហា :** (ឆ្លើយ) ខ្ញុំបាទឥតមានកើត គ ថ្លង់ បូស បម កមរមាស់ ស្រែងស្រកីអណ្តែង ជដុះមាន់ទេ។

~ **មេបា :** បើដូច្នេះសូមលោកបញ្ចេញឈ្មោះពិគ្រោះសម្តី លោកមេបាប្រុស ស្រីមកមើល !

~ **ចៅមហា :** ខ្ញុំបាទមុននឹងបញ្ចេញឈ្មោះពិគ្រោះយោបល់ លោកមេបាប្រុស-ស្រី ខ្ញុំបាទសុំខន្តីអភ័យទោសក្រែងខ្ញុំ បាននិយាយទៅហើយខ្វីពេក សូមឱ្យលោកមេបាជួយបំពេញ បើខ្ញុំបាទនិយាយលើសទៅវិញ សុំឱ្យលោកមេបាបន្ថយ សូមប្រសាស៍ សូមទានជ្រាប ។

+ (ចៅមហានិយាយតាមឃ្លា) សូមទានជ្រាបខ្ញុំបាទ បានរៀបប្រដាប់រងដាំក្លាំតថ្កល់តម្កល់ទឹកថ្លា ស្លាថង់ផ្លូវវិចិត្រចូលមក គោរពប្រណិបតនីអស់លោកមេបា ត្រកូលរៀមច្បងផងទាំងឡាយជិតឆ្ងាយទាំងប៉ុន្មាន សូមទានជ្រាប ។

ត្បិតពីថ្ងៃមុន អ្នក (ក) អ្នក (ខ) គាត់មានសេចក្តីស្រឡាញ់រាប់រកតែអ្នក (គ) អ្នក (ឃ) ហើយឧស្សាហ៍ទៅមកប្រាស្រ័យទាក់ទង ហេតុតែភូមិផងរបងជាមួយ ។ (ហេតុតែភូមិគាត់នៅឆ្ងាយពីគ្នាក៏ដោយ) ស្រាប់តែពេលមួយនោះគាត់ក៏បាន ឃើញកូនក្រមុំអ្នក (គ) អ្នក (ឃ) មានរូប ឬកពាសមរម្យ សល្អស្អាតជាឧត្តមសម នឹងដងខ្លួន ធួននឹងតម្កល់ សម្តីពិរោះ ស្រស់ទាំងសម្បុរក្រឡេកមើលយល់ក៏មានសេចក្តីស្ម័គ្រជំពាក់ក្នុងអង្គប្រាណគិតចង់បាន ឱ្យទៅអន្ទិត (.....) ជាកូនរបស់ គាត់ម្យ៉ាងទៀតក៏បានស៊ើបសួរអ្នកស្រុកភូមិផងរបងជាមួយ បានដឹងខែ ឆ្នាំចាំជាក់រួចស្រេចកាលណា គាត់ក៏អញ្ជើញ

ទៅផ្ទះលោកអាចារ្យ ឱ្យលោកគន់គូរ លេខក្នុងសម្ពង្ស សម្គាភ្លឹកឬកដួងជតា បើតាមលេខ លោកអាចារ្យ លោកថា កូនទាំងពីរ នាក់ដែលមាតាបិតារៀបចំទុកដាក់ឱ្យជាគូស្រករ ស្វាមីភរិយាក្នុងថ្ងៃនេះមានសិរីសួស្តីស័ក្តិសមនឹងគ្នាណាស់ គាត់ក៏មានបីតិសោមនស្សស្រស់ស្រាយ សប្បាយក្នុងសន្តានចិត្តឥតឧបមា ក៏ក្រាបប្រណិប័តន៏ លោកអាចារ្យ ធ្វើវន្ទនកិច្ចស្រូតរូតដល់ផ្ទះកាលណាក៏រៀបចំស្លាម្លូ មិនយូរគាត់ក៏ទៅពឹងអ្នក ផ្លូវស្រីទាំងបីនាក់ ឱ្យមកស្តីដណ្តឹងកូនលោកមេបាមក ១ ឃ្លាជា ២ ឃ្លា គម្រប់ ជា ៣ ឃ្លា លោកមេបាក៏មានប្រសាសន៍ថា អ្នកផ្លូវស្រីនិយាយសម្តីជាឧត្តមសមជាគួរសួស្តីហើយ តែខ្លួននាងជាស្រីសម្តីទន់ ប្រពន្ធ គេផង លោកមេបាសម្រេចការពុំទាន់បាន លោកមានប្រសាសន៍ឱ្យអ្នកផ្លូវស្រីទាំងបីបង្វែបង្វិលបង្វិល ចុះតាមកាំជណ្តើរ ដើរដល់រោងជ័យទៅប្រាប់អ្នកសាមីស្រីនឹងឱ្យទៅពឹងពរក៏អ្នកណាមានតម្រិះ អ្នកដែលចេះនិយាយទម្រង់ការ អ្នកសាមីស្រីពុំនឹង ក៏បានទៅវឹងទៅពឹងព រកខ្ញុំបាទទាំងបីនាក់ ឯខ្ញុំបាទឈ្មោះ កែវ ប្រពន្ធឈ្មោះ កង អ្នកដែលកាន់ថង់រោងឈ្មោះសុខ ប្រពន្ធឈ្មោះ សិរី អ្នកនៅក្បែរមាត់ជណ្តើរកាន់ក្បាក់ចាក់ទឹកថ្លាជូនលោកមេបា ឈ្មោះ **សម** នៅលីវ នៅ ( ភូមិ........... ឃុំ........... ស្រុក........... ខេត្ត............) ។

សូមឱ្យលោកពិតពិលរមិលមើលរូបឆោមលោមពណ៌ខ្ញុំបាទទាំងបីនាក់ បើលោកពិតពិលរមិលមើលទៅហើយល្មមនឹងទុកដាក់ឱ្យខ្ញុំបាទនិយាយក្នុងទម្រង់ការជូនលោកមេបា ឬពុំបាន សូមប្រសាសន៍ សូមទានជ្រាប ។

~ **មេបា :** សម្តីថ្មីមាត់នេះឃើញថា ពិរោះពិសា ហើយល្មមសមរម្យ

អាចបម្រើកិច្ចការជូនលោកមេបាបាន ។

- **ចៅមហា** : សូមទានជ្រាបជម្រាប លោមមេបា កាលឃ្លាមុន ខ្ញុំបាទបានជូនខ្លួនទាំងបីនាក់ឱ្យលោកពិតពិលរមិលមើល រួចសព្វគ្រប់ គ្រានេះ ខ្ញុំបាទគោរពសុំអនុញ្ញាតិពាក់អាវចិនតាង តំណាងអាវផាយ រំសាយមាត់ថង់ តម្រង់កូនប្រអប់ ផ្គាប់ដាក់ចាក់ស្រាដាក់ពែងសិរិទ្ធ សូមអុជទៀនទាំងគូបិទ មាត់ក្បាក់ មាត់ថង់រង សូមមានប្រសាសន៍តាមទំនុកទំនង ប្រពៃណីពីបុរាណ បើសិនជាមានការខកខានខុសលើសលស់ពាក្យពេចន៍ឆ្គាំឆ្គង មិនត្រូវតាមទំនុក ទំនងស្រុកភូមិលោកមេបា សូមលោកមេបាមេត្តាបំពេញឱ្យទានខ្ញុំបាទ សូម ប្រសាសន៍ សូមទានជ្រាប ។

- **មេបា** : ឥឡូវនេះ អ្នកទាំងបីសូមពាក់អាវផាយ យើងមេបា សូមបំពាក់ឋានន្តរស័ក្តិជាមហាទេព មហាមន្ត្រី មហាវិជ្ជា សូមលោកទាំងបី បម្រើកិច្ចទម្រង់ការឱ្យបានសេចក្តីសុខចម្រើនតទៅ ។

- **មេបា** : សូមទានជ្រាបជម្រាបលោកមេបា កាលឃ្លាមុនខ្ញុំបាទ សូមពាក់អាវផាយរំសាយមាត់ថង់ លោកក៏ព្រមអនុញ្ញាត ឥឡូវខ្ញុំបាទមកឃ្លា នេះទៀត មានប្រដាប់សម្រាប់ខ្លួន កាលដើមនាងអ្នកផ្លូវស្រីទាំងបីនាក់មកសុំ ស្តីដណ្តឹងកូនស្រីលោកមេបា លោកមិនម្រេចការថាខ្លួននាងជាស្រីឥឡូវខ្ញុំបាទ មកឃ្លានេះទៀតនៃ សូមក្រាបប្រណិប័តន៍ សុំស្តីនាង (......) ជាកូន លោក (......) និងអ្នក ស្រី (.....) ផ្ទះនៅភូមិ....... ឃុំ....... ស្រុក....... ខេត្ត....... សូមជាសាច់ ជាសន្តាន ជាស្ពានមេត្រីសុំដណ្តឹងជាគូស្រករតរៀងទៅ សមដូចពាក្យអ្នកផ្លូវស្រី សម្តីពីមុន សូមប្រសាសន៍ សូមទានជ្រាប ។

~ **មេបា** : ឥឡូវនេះយើងជាមេបាបានឯកភាពគ្នាល្មមនឹងទុកដាក់កូនស្រីទៅឱ្យលោកចៅមហាហើយ ។

~ **ចៅមហា** : សូមទានជ្រាបជម្រាបអស់លោកមេបា កាលឃ្លាមុន ចៅមហាខ្ញុំបាទមកសុំស្តីដណ្តឹងកូនលោកមេបា លោកក៏ព្រមអនុញ្ញាត ឥឡូវខ្ញុំបាទ មកឃ្លានេះទៀត សូមនាំអំណារគុណ មានចេកទុំនំផ្អែម ផលានុផល ដាក់តម្កល់ លើល្វែងចន្ទផ្ទះលោកមេបា សូមឱ្យលោកពិតពិលរមិលមើល បើខ្វះខាតកន្លែងត្រង់ណា សូមឱ្យលោកខន្តីអភ័យទោស ឬលោកមេបាចង់ឱ្យ ចៅមហាខ្ញុំបាទ រៀបរាប់ផ្លែឈើនោះ ចៅមហាខ្ញុំបាទនឹងចាត់អជ្ជាកណ្តាល លោកអ្នកភ្លេង ដើម្បីរៀបរាប់ផ្លែឈើជូនលោកមេបា សូមប្រសាសន៍ សូមទានជ្រាប ។

~ **មេបា** : យើងជាមេបា ខ្លួនក៏ចាស់ ភ្នែកក៏ងងឹត ត្រចៀកក៏ថ្លង់ មិនអាចមើលឃើញសព្វគ្រប់ផ្លែឈើទាំង៣៦មុខនោះបានទេ សូមអញ្ជើញលោកអាជ្ញាកណ្តាលមកឡើងបេះប្រឡេះរាប់ផលានុផលទាំងអស់ ហើយជម្រាបជូនមេបាឱ្យបានជ្រាប សូមអញ្ជើញ ។

ពេលនេះក្រុមអ្នកភ្លេងយើងខ្ញុំបានរាប់ផ្លែឈើជូនលោករួចរាល់សព្វគ្រប់ អស់ហើយ ឃើញថាគ្រប់ ៣៦ មុខ ហើយសូមទានជ្រាប ។

~ **មេបា** : តើអ្នកដែលបានឡើងប្រឡេះបេះនេះ តើអ្នកមានសូកនឹងអ្នកផ្លូវត្រូវនឹងអ្នកចៅមហាដែរឬទេ ?

~ **អ្នកភ្លេង** : ខ្ញុំបាទឥតមានសូកនឹងអ្នកផ្លូវត្រូវនឹងចៅមហាទេខ្ញុំបាទសច្ចាយកត្រង់ថាឃើញ ៣៦ មុខពិតប្រាកដមែន ។

~ **មេបា :** បើអ្នកឃើញថាគ្រប់៣៦មុខហើយ យើងជាមេបាប្រកាន់នូវធមិសច្ចៈខន្តី មេត្តា ករុណា ឧបេក្ខា សន្តោសប្រោសប្រណីដល់អ្នកទាំងពីរដែលទៅឡើងបេះប្រឡេះរាប់នេះ មេបាយើងសូមជូនមួយចំណែក តែសូមឱ្យអ្នកជួយប្រសិទ្ធិពរជ័យដល់កូនប្រុសស្រីទាំងពីរ ព្រមទាំងលោកមេបាទាំងសងខាងផងចុះ។ **(ភ្លេងជូនពរ)**

~ **ចៅមហា :** សូមទានជ្រាបជម្រាបអស់លោកមេបា កាលឃ្លាមុន ចៅមហាខ្ញុំបាទបាននាំអំណារគុណមកជូនលោកមេបា ក៏បានទទួលសព្វគ្រប់ហើយ ឃ្លានេះខ្ញុំបាទគោរពសូមស្មើនឹងលោកមេបា តើទំនៀមទម្លាប់ស្រុកភូមិលោកមេបា ស្លាដក់ ស្លា កន្សែង ស្លាកំណត់ ស្លាទាំងបីបទ តើលោកកំណត់ពិសាស្លាណាជាមុន ពិសានៅល្វែងណា ល្វែងតាកឆ្មៀង ឬល្វែងចន្ទលោក ពិសាមានភ្លេង ឬពិសាសម្ងាត់ ចៅមហាខ្ញុំបាទនឹងប្រតិបត្តិតាមទំនៀម-ទម្លាប់ស្រុក ភូមិ មេបា សូមប្រសាសន៏ ជ្រាប ។

~ **មេបា :** ទំនៀមទម្លាប់ច្បាប់សណ្តាប់ធ្នាប់ស្រុកមេបាពិសាស្លាដក់ ស្លាកន្សែងជាមុន ពិសានៅទីល្វែងតាកឆ្មៀង ពិសាមានភ្លេង ។

~ **ចៅមហា :** សូមទានជ្រាបជម្រាបអស់មេបា កាលឃ្លាមុនចៅមហាខ្ញុំបាទ បានលើកស្លាដក់ស្លាកន្សែងមកជូនលោកមេបា លោកក៏បានពិសារួចសព្វគ្រប់ហើយ ឃ្លានេះខ្ញុំបាទសូមស្មើសុំលោកមេបា តើទំនៀមទម្លាប់ស្រុកភូមិលោកមេបាធ្លាប់ អង្គុយរង់ចាំទទួលពិសានៅល្វែងណា ល្វែងតាក ឆ្មៀង ឬល្វែងចន្ទ? សូមប្រសាសន៏ សូមទានជ្រាប ។

~ **មេបា :** ទំនៀមទម្លាប់ស្រុកភូមិខ្ញុំធ្លាប់អង្គុយរង់ចាំនៅទីល្វែងចន្ទ

~ **ចៅមហា :** សូមទានជ្រាបជម្រាបអស់លោកមេបា កាលឃ្លាមុន ខ្ញុំបាទបានគោរពអញ្ជើញលោកមេបាតាំងពីភ្លេងតាកឆ្មៀងរៀងទៅភ្លេងជ័យ ភ្លេងចន្ទឱ្យបានសព្វគ្រប់ ឃ្លានេះខ្ញុំបាទសូមគោរពទៅហែហមនាំពេលារាសីចេកមាសកូនស្រីលោកមេបា និងពេលារាសីចេកមាសកូនប្រុស ចៅមហាខ្ញុំបាទ មកជម្រាបជូនលោកមេបានៅវេលាម៉ោង........ សូមប្រសាសន៍ សូមទានជ្រាប (ភ្លេង.......) (ពេលភ្លេងចប់ ចៅមហានិយាយ) លោកមេបាអញ្ជើញទៅអង្គុយនៅភ្លេងច័ន្ទ។

~ **ចៅមហា :** សូមទានជ្រាបជម្រាបអស់លោកមេបា កាលឃ្លាមុន ខ្ញុំបាទបានទៅហែហមនាំពេលារាសីចេកមាសកូនប្រុស-ស្រី មកជម្រាបលោកមេបា ឯកិច្ចការសព្វសារពើដូចម្ដេចម្ដា មានដូចតទៅ នៅក្នុងការកំណត់របស់លោកគ្រូអាចារ្យស្រាប់។

ចំណែកកិច្ចការបន្ត សូមលោកមេបាបង្គាប់រាប់ជាមកលើខ្ញុំបាទ និងសូមទទួលតាមច្បាប់រណ្ដាប់ធ្លាប់ការអស់លោកមេបាតរៀងទៅ។ សូមប្រសាសន៍ សូមទានជ្រាប។

~ **មេបា :** ខ្ញុំបាទបានទទួលពេលា តែខ្ញុំបាទអត់ផ្ទះរៀបអវាហមង្គលការ សូមបង្គាប់ទៅអ្នកចៅមហាឱ្យសង់ផ្ទះរះសម្បែងតាកឆ្មៀង ៤ ល្វែង ឱ្យហើយក្នុងថ្ងៃហ្នឹង។

~ **ចៅមហា :** សូមទានជ្រាបជម្រាបអស់លោកមេបាកាលឃ្លាមុន លោកមេបាបានបង្គាប់រាប់ជាឱ្យចៅមហាខ្ញុំបាទសង់ផ្ទះរះសម្បែងតាកឆ្មៀង ៤ ល្វែង ហេតុដូចនេះខ្ញុំបាទសូមលោកមេបាអនុញ្ញាត ត្បិតថ្ងៃក៏ក្បៀក

ខែក៏ជិត ខ្ញុំបាទគិតគូរសង់ផ្ទះរះសម្បែងមិនទាន់ ខ្ញុំបាទសូមប្រគល់ប្រាក់ចំនួន.............. ជំនួសថ្លៃផ្ទះ ហើយសុំផ្ទះលោកមេបា រៀបវិវាហមង្គលការ។ សូមប្រសាសនី សូមទានជ្រាប។

~ **មេបា :** ចុះឥឡូវនេះ ប្រាក់ខាន់ស្លានៅឯណា ?

~ **ចៅមហា :** តើលោកមេបាបានទទួលប្រាក់ខាន់ស្លាចំនួនប៉ុន្មានហើយ ពីថ្ងៃមុន?

~ **មេបា :** យើងបានទទួល ៣. ០០០ កហាបណៈហើយ តើប្រាក់ទាំងបីពាន់កហាបណៈនេះលោកចាត់ទុកជាប្រាក់ខាន់ស្លា ឬសម្រាប់ហូបពិសាក្នុងកិច្ចទម្រង់ការ? ។

~ **ចៅមហា :** ប្រាក់ចំនួន ៣.០០០កហាបណៈនេះ ១.៥០០ សម្រាប់ ហូបពិសា និង ១.៥០០ ទៀត សម្រាប់ទុកជាប្រាក់ខាន់ស្លា។

~ **មេបា :** បានទទួលដឹងឮ...........

~ **ចៅមហា :** សូមទានជ្រាបជម្រាបអស់លោកមេបា កាលឃ្លាមុនចៅមហាខ្ញុំបាទបានប្រគល់ប្រាក់ជូនលោកមេបាលោកក៏ព្រមទទួល ឃ្លានេះចៅមហាខ្ញុំបាទ សុំចូលតាមច្រក សុំដករនុក សុំកំពង់ដងទឹក សុំដីសង់រោងខាន់ស្លា សុំទាំងដីធ្វើបង្គា ចង្ក្រានចុងភៅ សុំទាំងផ្លូវបរទេះ ចូលមកដាក់ក្នុងភូមិ សុំព្រៃកាច់ឧស ព្រៃដោះទឹកសត្វតូច-ធំ ក្រែងស្រុកភូមិលោកមេបា មានអារក្ស អ្នកតាឯណាពូកែ។ សូមលោកបង្ហើរឱ្យចៅមហាខ្ញុំបាទផង មហាខ្ញុំបាទ សុំដីត្រង់ណាវាលចងគោ ក្រែងលោលោកមេបាមានដំណាំដាំដុះ ដូចជាចេក អំពៅ ត្រាវ ដំឡូង ស្វាយ ខ្នុរ ល្មុត សេដា ទៀប ម្លូ ស្លា ត្របែក ដូង ក្រែងគោ

ខ្ញុំបាទយិតយោង បេះបោច បាក់មែករហែកធាងមួយពីរ សូមលោកមេបាមេត្តា អនុញ្ញាតដល់ចៅមហាខ្ញុំបាទផង ។ សូមមានប្រសាសន៍ សូមទានជ្រាប ។

~ **មេបា** : បានទទួលសំណូមពរ និង អនុញ្ញាតតាមការសុំ......

~ **ចៅមហា** : សូមទានជ្រាបជម្រាបអស់លោកមេបា កាលឃ្លាមុនមហាខ្ញុំបាទសុំដីសង់រោងខាន់ស្លា លោកក៏ព្រមអនុញ្ញាត ឥឡូវចៅមហាខ្ញុំបាទ ក្នុងឃ្លានេះទៀត សុំលើកជណ្តើរចាស់ ផ្លាស់ជណ្តើរថ្មី សូមបើកជញ្ជាំងចងភ្ជាក់ដៃ សូមលោកមេបាចាត់អាជ្ញាកណ្តាលឱ្យទៅអង្កេតពិនិត្យមើល ក្រែងមានចិញ្ចៀនមាស ចិញ្ចៀនប្រាក់ ច្រឡំទុកដាក់ក្នុងថតរបាជញ្ជាំងតាំងពីល្វែងតាកឆ្មៀងរៀងល្វែងជ័យដល់ល្វែងច័ន្ទ សូមមានប្រសាន៍ សូមទានជ្រាប ។

~ **មេបា** : អនុញ្ញាតតាមសម្តី

~ **ចៅមហា** : ខ្ញុំបាទស្មើលោកមេបាទុកឱ្យហើយ ក្រែងលោកមេបាមិនបានអង្គុយរង់ចាំនៅក្នុងកិច្ចមង្គលការនេះ ចៅមហាខ្ញុំបាទសូមស្នើរៀបចំពិធី មួយចំនួនដូចជា: កាត់សក់ សូត្រមន្ត សែនក្រុងពាលី សែនចងដៃកូនប្រុស-ស្រី រៀងផ្លែឈើ ជុំពេលា ជាវខាន់ស្លា។ ល ។ លុះដល់ថ្ងៃស្អែកជាថ្ងៃបរមសុខា ចៅមហាខ្ញុំបាទនឹងសុំនាំផ្កាស្លាជ័យ ម្លូជ័យ និងអ្នកសាមីខ្លួនមកប្រគល់ជូនលោកមេបាជាកិច្ចបញ្ចប់ទម្រង់ការ ។ សូមមានប្រសាសន៍ សូមទានជ្រាប ។

~ **មេបា** : សូមកាត់ចុះ តែសុំឱ្យអែបទៀបខាងជាមួយគ្នា ។

~ **ចៅមហា** : ឥឡូវលោកមេបាបានអនុញ្ញាតចៅមហាយើងខ្ញុំរៀបចំកាត់សក់បង្កក់សិរីដល់គូស្វាមី ដើម្បី..... ( អត្ថន័យ+ពិធីកាត់សក់+ភ្លេង

សារិកាកែវ)។ និយាយក្រោយពីកាត់សក់រួច សំបូងសង្រួងរកកន្ទ្រៃមាស ក្រាសប្រាក់ ។ល។

## (រៀបចំពិធីកាត់សក់ បង្កក់សិរី)

ទទួលភ្ញៀវកិត្តិយសពិសាភោជនាអាហារ(ពេលរសៀល)

~ **ចៅមហា** : និយាយពាក្យក្រុងពាលី(ម៉ោង៤)ពិធីក្រុងពាលី ។

~ **មេបា** : សូមលោកចៅមហារៀបចំកិច្ចសែនក្រុងពាលីនៅខាងត្បូង ល្វែងចន្ទ ផ្ទះលោកមេបា

~ **ចៅមហា** : សូមលោកអ្នកភ្លេងលេងបទកងសោយ អញ្ជើញក្រុងពាលី ។

### (បទភ្លេង)

~ **ចៅមហា** : (និយាយ)សុំរៀងផ្លែឈើ ឬ បុកល័ខ មានភ្លេង ៤ បទ រកប្រុស៤ ស្រី៥ រួមមាន :

-ប្រុសឈ្មោះ ជ័យ. សួស. មាន. បាន

-ស្រីឈ្មោះ កែវ. កង. មាស. ប្រាក់. ពិទូរសូរ្យកាន្ត

~ **ចៅមហា** : (និយាយ) សូមទានជ្រាបជម្រាបអស់លោកមេបាជុំពេលា និងជាវខាន់ស្លា លោកមេបាយកជាណាមុខ ទុកណាជាក្រោយ សូមប្រសាសន៍ សូមទានជ្រាប ។

~ **មេបា** : ទំនៀមទម្លាប់ស្រុកមេបា យកជុំពេលាជាមុន ។

~ **ចៅមហា** : សូមទានជ្រាបជម្រាបលោកមេបា ពេលាសព្វសិរិទ្ធិវឌ្ឍ ពេញវង់ ជាន់ឆាយពេលណាមួយសូមប្រសាសន៍ សូមទានជ្រាប ។

- **មេបា** : ពេលាមានអំពីលោកព្រះអាចារ្យ ។

- **ចៅមហា** : សូមទានជ្រាបជម្រាបលោកមេបា..... ដល់កូនប្រុស-ស្រី ហេតុដូច្នេះសូមលោកបំពេញពេលា ថាសាធុ! ។

- **មេបា** : សាធុ! ៣ដង

- **ចៅមហា** : (**និយាយពីជាវខាន់ស្លា**)

- **មេបា** : សុំយកភាសាលោកអ្នកភ្លេង

- **ចៅមហា** : បើអញ្ជឹង សូមគោរពអញ្ជើញលោកអ្នកភ្លេងលេងបទជាវខាន់ស្លា (ជាចម្រៀងចាប៉ីដងវែងក៏បាន ឬចម្រៀងភ្លេងការក៏បាន) ដើម្បីជូនលោកមេបា។

**(ជ្រងដើមបទមុន.........ចាប៉ីចាប់ផ្តើម)**

ជ្រងអើយជ្រងនាយ ជ្រងអ្នកបន្ទាយ ជជាយឡើងគាល់ អស់លោកមេបា លោកអង្គុយរៀងរាល់ ជជាយឡើងគាល់ សុំជាវខាន់ស្លា ។

**ច្រៀងជ្រង** (ចប់) អ្នកភ្លេងសួរលោកមេបា តើកូនបង កូនកណ្តាល ឬកូនពៅ លោកកាន់តាមរាជសក្តិ. ឧត្តុងសក្តិ. បុរាណសក្តិ ឬភពសក្តិ? លោកកាត់ប៉ុន្មានតម្លឹង? ប៉ុន្មានស្លឹង? ប៉ុន្មានបាត?

- **មេបា** : កូនខ្ញុំបាទជាកូនបង ខ្ញុំសូមកាត់តាមបុរាណសក្តិ. កាត់ ១៩ ដំឡឹង ៤ ស្លឹង ២ បាត ប្រាក់ត្រាប្រាសាទ តាគង់តាគាំដើមដៃ។

**( សម្រាកពេលយប់ )**

## លុះដល់ព្រឹកឡើងថ្ងៃបង្វើយមង្គលការ

~ **អាចារ្យ** : រៀបបង្វិលពពិល (ទៀបភ្លឺ) (រួចឱ្យអ្នកភ្លេងលេងបទនាគពន្ធ័ ផាត់ជាយ)

- ហូតដាវ. បើកទៀប. បាយខុន. អាចារ្យឱ្យពរ................

- ព្រះថោងតោងស្បៃ................................................

- សាកន្ទេល ចងសំរោង..............................................

## ពរពេលព្រឹកជាពរបញ្ចប់មង្គលការ

អស់ឱតេជៈព្រះអាទិត្យរៀងរះពីបូពិទិសា សូមឱ្យអ្នក និងនាងជាគូភរិយាបានមូលមិត្តសុខជាឧត្តម

**នមោសេដ្ឋោ នមស្ការោ** ក្រួញក្រាបបង្គំដល់ព្រះចមភព ជាម្លប់ឧត្តម ព្រះអង្គជាធំលើសភពផែនដី។

- អស់ឱតេជះខ្ញុំក្រាបសំពះទន់ទាំងសិរសី សុំពរអំពីសម្តេចព្រះជិនស្រីឱ្យអ្នកការថ្មីជាប្តីប្រពន្ធ សូមឈ្នះចង្រៃ ប្រាសចាកទុក្ខភ័យ ប្រសើរលើសលន់។ ឱព្រះគុណថ្លៃ មានគុណលើសជន សូមព្រះគុណធ្ងន់មេត្តាឱ្យពរ ពឹងគុណព្រះធមិ ប្រសើរបវរ ឈ្នះបាបខ្ចាខ្ចរ ជំងឺតង្កាត់កុំបីបវរ ព្រះធិមសាទរ ឱ្យពរឈ្នះភ័យ។ ពឹងគុណព្រះសង្ឃ ធ្វើចិត្តឱ្យត្រង់ ប្រតិបត្តិថ្លាថ្លៃ សង្ឃជាស្រែបុណ្យ ជនដឹងសព្វថ្ងៃ ព្រះសង្ឃឱ្យជ័យ ឱ្យពរឈ្នះរោគ។ គុណកែវទាំងបី សូមឈ្នះចង្រៃប្រាសចាកទុក្ខសោក សុខក្នុងលោកិយ សុខដល់បរមលោក ចូលអ្នកទាំងពីរចាំយកជឿជាក់ដាក់ក្នុងប្រាណ ចៅមហាខ្ញុំបាទឱ្យពរ ចូលអ្នកមានទ្រព្យគ្រប់ប្រការ មានគោក្របី តុ ទូ កៅអី ម៉ូតូហុងដា សឹងមានជាទ្រព្យឧត្តមចូលមកជួប

ជុំចតពេញត្រៀបត្រា ។

- នាងប្រតិបត្តិប្តី ប្រៀបដូចជាស្រីបវរកញ្ញា បម្រើព្រះឥន្ទជាស្តេចទេវតានៅត្រៃត្រឹង្សា ពិភពសួគ៌នាយ ។ នាងស្រឡាញ់ប្តីធ្វើចិត្តឱ្យស្លូត កុំបីភូតភរ ចិត្តកុំរាយមាយ នាងប្រតិបត្តិប្តី ដូចបាវនិងនាយ ។ ឱនលំទោនកាយថ្វាយវរវន្ទា នាងស្រឡាញ់ប្តីរៀងម្លូស្លាបារី សព្វគ្រប់វេលា បើនាងចូលដេកខាងឆ្វេងប្តីជា ឱ្យនាងមានអាយុយឺនយូរតទៅ នាងអើយ មាត្រាច្បាប់ស្រីនេះណាក្រណាស់ណាពៅ នាងប្រឹងឱ្យបាន ជាស្ពានដើរទៅ កាន់នាលំនៅពិភពសួគ៌នាយ ។ កបកើតទ្រព្យបរិបូរណ៍ហូរហៀរ ពោរពាសស្តុកស្តម្ភ ចូលអ្នកចងចាំទុក ពរនេះទៅមុខឈ្មោះទុក្ខរោគា ពរនេះមាំមួន ប្រាំពីរប្រការ ព្រះប្រោសទេសនាថាប្រសើរក្រៃ **អាយុវឌ្ឍនោច** ចម្រើនពរពិតនិយាយ សូមឱ្យអ្នកទាំងពីរមានអាយុ ១០០ ឆ្នាំម្នាក់ បានដូចទំនាយទុក្ខទោសរសាយ រលត់គ្មានសល់ ។

**ពលវឌ្ឍនំ** សូមឱ្យអ្នកទាំងពីរ មានកំលាំងប្រណាំងស្មើរខ្យល់ ។

**ធនវឌ្ឍនោ** ពរនេះថ្កុំថ្កើងរកស៊ីកើតផល កើតភោគសម្បត្តិ ។

**វណ្ណវឌ្ឍនោ** សូមឱ្យមានសប្បុរសប្រផូរផង់ផាត់ ។

**សុខវឌ្ឍនោ** សុខលែងឈឺថ្កាត់ រកទ្រព្យសម្បត្តិសម្បូរធូរចាយ ។

**យសវឌ្ឍនោ** បរិវារមូលមក មូលមិត្តជិតឆ្ងាយ ។

**សិរីវឌ្ឍនោ** សិរីរាង្គកាយ មាសប្រាក់ទាំងឡាយសម្បូរធូរចាយ ។

មានទ្រព្យមិនខ្វះទាំងថ្មីទាំងចាស់ដូចគេប្រមូលមានស្រូវជង្រុក កើបទុកឱ្យមូល ផាមួង ព្រៃ ហូល ស្បៀកពាក់មិនអស់ ។ ម្យ៉ាងទៀតលែងក្រ មាន

ទ្រព្យបវរ ចិត្តល្អរហូត ចិត្តស្លូតត្រង់ស្មោះ ទ្រព្យចាយមិនអស់ ចែកទៅជាទាន ជាទុនតទុក តទៅមុខទុកជាប្រធាន ឱ្យដឹងគុណកិច្ច កុំភ្លេចវិញ្ញាណរកស៊ីឆាប់មានរាល់ថ្ងៃតទៅ។

ចូរអ្នកទាំងពីរដឹងគុណពីថ្ងៃនេះតទៅ ពិតជាបានសុខទៅហោង ! សួស្តីហោង ! ......... សុខហោង ! សុខដូចមាត់ប្រាកដដូចពាក្យថា មែនហោង (មែន) ! បើមែនមានអ្វីជាបន្ទាល់.................(ហ៊ោ) !។

**(ចប់)**

១~ច្បាប់គោរពមាតាបិតា (បណ្ឌិតអ៊ូចុង) ២~កិរិយាចិញ្ចឹមជីវិតដោយកម្រ (បណ្ឌិតអ៊ូចុង)

៣~ច្បាប់ប្រដៅជនប្រុសស្រី(កវីក្រមង៉ុយ) ៤~គេរកាលថ្មី (កវីក្រមង៉ុយ)

៥~ច្បាប់ល្បើកថ្មី (កវីក្រមង៉ុយ)

# កុមារ និងប្រពៃណីទំនៀមទម្លាប់ខ្មែរ

មិនថាមនុស្សពេញវ័យ ឬមនុស្សចាស់ទេ សូម្បីតែកុមារក៏មានចំណែករបស់វា នៅក្នុងប្រពៃណីទំនៀមទម្លាប់ផងដែរ ។ នៅក្នុងជីវភាពរបស់វា កុមារមានជាប់ពាក់ព័ន្ធ និងប្រការខាងលើនៅក្នុងល្បែងលេងកម្សាន្តផ្សេងៗ ទោះជាបុគ្គលក្តី ជាក្រុមតូច ឬក្រុមធំក្តី ទោះជានៅក្នុងផ្ទះក្តី នៅក្រៅផ្ទះក្តី នៅក្នុងគ្រួសារក្តី ឬក៏ទៅឃ្វាលគោក្របី នៅតាមវាលស្រែក្តី ។ ល្បែងទាំងនេះ ក្រៅពីកែអផ្សុក វាជាការកកម្សាន្តសប្បាយ ជាកីឡា ជាការហាត់សម្រួលសម្រាំងបញ្ញាស្មារតី ឱ្យវាងវៃ ឱ្យមានទម្លាប់រហ័សរហួន ស្វាហាប់...។ ជួនកាលចាស់ៗជីដូនជីតា ឪពុកម្តាយ ជាបងប្រុសស្រី ចង់អប់រំវាដោយប្រយោល អំពីការប្រកាន់ជំហរម៉ឺងម៉ាត់ សុចរិតត្រឹមត្រូវ ឱ្យចេះថែរក្សា សន្សំសំចៃគ្រឿងឧបភោគបរិភោគ ឱ្យមានទម្លាប់សណ្តាប់ធ្នាប់ល្អ ។ល។

ខាងក្រោមនេះ ខ្ញុំសាកល្បងយករបៀបរបបទំនៀមទម្លាប់ខ្លះៗ ទាក់ទងនិងក្មេងៗ មកបរិយាយជម្រាបជាបន្តបន្ទាប់ ដូចតទៅ :

## I- អំពីល្បែងសម្រាប់លេងនៅតាមវាលស្រែក្នុងពេលឃ្វាលគោ ក្របី

### ⊙ ល្បែងជីរជីកដូង(១៤)

ដើម្បីអាចលេងល្បែងនេះបាន ត្រូវមានមនុស្សយ៉ាងតិចបំផុតពាននាក់ ។

---

(១៤) ល្បែងនេះ ច្រើនប្រទះឃើញនៅតំបន់ខ្លះៗ នៃខេត្តតាកែវ ហើយក៏ជាបទពិសោធន៍ផ្ទាល់របស់ ខ្ញុំជាអ្នកនិពន្ធ ដែលរំលឹកឡើងវិញ អំពីជីវិតជាកូនកសិករក្នុងវ័យកុមារ ។

**ក/ របៀបលេង :**

- ក្មេងម្នាក់វារជើងបួន (ដោយប្រើដៃនិងជង្គង់) ធ្វើដំណើរទំនងជាសត្វដំរី

- ក្មេងពីរនាក់ទៀតអង្គុយប្រឈមមុខគ្នា ពាក់ជើងទាំងពីររបស់គេរៀង១ខ្លួន ទៅលើខ្នងដំរី (ក្មេងដើរតួជាដំរី) ដែលក្រាបខ្លួនឱ្យទាបរាបដល់ដីដើម្បីសម្រួលដល់ការបំពាក់ជើងរបស់ក្មេង ២ នាក់ទៀត (ដែលដើរតួជាផ្លែដូង) ទៅលើខ្នងរបស់វា។ ក្មេងទាំងពីរដែលជាតួផ្លែដូង ចាប់ជង្គង់ទាំងពីររបស់គ្នា ទៅវិញទៅមកយ៉ាងណែន ធ្វើយ៉ាងណាកុំឱ្យរបូត ហើយផ្ងាកក្បាល និងដងខ្លួនមកខាងក្រោយ។ បន្ទាប់មកក្មេងដែលធ្វើជាដំរីក៏ប្រឹងងើបឡើង ហើយវារទៅមុខយ៉ាងយ៉ាប់យ៉ឺន ព្រោះត្រូវទ្រទម្ងន់ក្មេងពីរនាក់។ គេវារបានជិត ឬឆ្ងាយអាស្រ័យដោយការប៉ិនប្រសប់របស់អ្នកលេងទាំងបីនាក់គឺ:

- អ្នកធ្វើជាដំរី ត្រូវខំទប់ទល់ជំហរឱ្យរឹងកុំឱ្យទ្រេតទ្រោត ឬដួលស្រប៉ាបទៅលើដី

- អ្នកធ្វើផ្លែដូងទាំងពីរ ត្រូវចាប់ជើងគ្នាឱ្យជាប់ កុំឱ្យរបូតដៃ ដែលនឹងនាំឱ្យអ្នកទាំងពីររបេះធ្លាក់ចេញពីខ្នងដំរី។

តាមទម្លាប់ ក្មេង១ផ្លាស់វេនគ្នាដើរតួជាដំរី និងជាដូងឱ្យទាល់តែគ្រប់គ្នា ហើយចេះតែលេងបែបនេះ រហូតដល់អស់ចិត្ត។

**ខ/ កន្លែងដែលគួរលេង :**

ដោយហេតុ តួដំរីត្រូវវារផ្ទាល់លើដី ដោយប្រើក្បាលជង្គង់នោះ ក្មេង១មិនអាចលេងល្បែងនេះនៅទីក្បែរផ្ទះនោះបានឡើយ ព្រោះដីរឹង នាំឱ្យរបួស

ក្បាលជង្គង់។ ដូច្នេះ គេច្រើនលេងនៅវាលស្រែ ដែលមានទឹកដក់ខ្លះៗ នៅទីនោះដីទន់ហើយផុងបន្តិចៗផង ជាហេតុសម្រួលដល់ការវារជើងបួនដែលមិននាំឱ្យឈឺក្បាលជង្គង់។

**គ/ ប្រយោជន៍នៃល្បែងជិះដីកដូង :**

ការវាររបស់ដីរ ដែលមានទម្ងន់ពីរនៅលើខ្នង ក៏ជាការទ្រទ្រង់វិញ្ញាសាមួយដែលតម្រូវឱ្យអ្នកធ្វើដីរ ហាត់ប្រើកម្លាំងទប់ទល់នឹងទម្ងន់ផង ព្រមទាំងអាចធ្វើចលនាទៅបានដោយពុំមានភ្លាំងភ្លាត់ថ្លោះធ្លោយដោយប្រការណាមួយផង។ វិញ្ញាសានេះ វានឹងបានជួបនៅក្នុងជីវិតរបស់វា ជាកសិករ ឬជាពលករ ឧទាហរណ៍: រែកកណ្ដាប់ស្រូវទុំ, រែកគ្រាប់ស្រូវ, រែកសំណាប, រែកបន្លែផ្លែឈើផ្សេងៗជាផលិតផល ដែលវានឹងបង្កបង្កើនឡើង នៅពេលវាមានអាយុពេញវ័យ។

ចំណែកក្មេងដើរតួជាផ្លែដូង អាចយកបទពិសោធន៍នេះ មកប្រើក្នុងការលេងល្បែងរបាស្សកម្ម(សៀក) ដោយមានដៃគូ គឺជាការហាត់ពត់ខ្លួនឱ្យស្ទាត់ជំនាញ ក្នុងការចាប់ប្រតោងប្រទាញថ្លឹងខ្លួនជាមួយដៃគូ -ឱ្យចេះអត់ធន់នឹងការចុករោយស្រពន់ ក៏ដូចជាការហាត់ប្រើកម្លាំងដៃឱ្យស្ទាត់ស្ទាញដើម្បីទ្រទម្ងន់ខ្លួន។

**ឃ/ បុព្វហេតុនៃការបង្កើតល្បែងជិះដីកដូង :**

ល្បែងនេះជាលទ្ធផលនៃការសង្កេតរបស់ក្មេងៗ ទៅលើសកម្មភាពរបស់ឪពុកម្ដាយខ្លួន ឬកសិករទូទៅនៅក្នុងតំបន់ ដែលប្រើដីរសម្រាប់ដឹកកសិផលផ្សេងៗ បម្រើដល់ជីវភាពប្រចាំថ្ងៃ។ ក្មេងជាកូនចៅកសិករ បានច្នៃចលនា

ជីវភាពពិតៗ របស់បណ្ដាជនក្នុងតំបន់ មកបង្កើតជាល្បែងកម្សាន្ដ ដែលអំណោយផលដល់ខ្លួន ក្នុការដកយកបាននូវបទពិសោធន៍ ពីជីវិតជាកសិករ ហើយនិងយកបទពិសោធន៍ទាំងនេះ មកអនុវត្តផ្ទាល់ ដល់ពេលគេក្លាយទៅជាមនុស្សពេញវ័យ ។

**ង/ សន្និដ្ឋាន**

បច្ចុប្បន្ន ទោះបីកូនចៅកសិករភាគច្រើន នៅតំបន់ខេត្តខ័ណ្ឌផ្សេងៗ ឈប់លេងល្បែងនេះឬក៏នៅលេងខ្លះៗ ដោយកន្លែងក្ដី ក៏ល្បែងនេះ ឋិតនៅជាអនុស្សាវរីយ៍ ជាក្ដីស្រមៃរបស់ចាស់ៗ ដែលគាត់ធ្លាប់លេងកាលនៅក្មេង។ លើសពីនេះទៀត ល្បែងដីរដឹកដូង ក៏ជាកញ្ចក់មួយសម្រាប់ឆ្លុះបញ្ចាំងមើលអំពីតម្រាយជីវភាព របស់បុព្វបុរសខ្មែរ ក្នុងសម័យមុនៗ។

# កុមារ និងប្រពៃណីទំនៀមទម្លាប់ អំពីល្បែង រទេះបាក់កង់

ទោះជានៅរដូវប្រាំង ឬរដូវវស្សាក្ដី នៅតាមផ្លូវក្នុងភូមិនិគមជនបទ ឬនៅតាមវាលស្រែក្ដី ក្មេងៗជាកូនចៅកសិករបាននាំគ្នាលេងល្បែងរទេះបាក់កង់នេះ ជួននៅពេលយប់ដែលមានខែភ្លឺ ជួននៅពេលថ្ងៃ។ តាមការសង្កេត ឱ្យតែមានការជួបជុំគ្នាជាក្រុម ពីរឬបីបួននាក់ឡើងទៅ នោះកុមារដែលមានអាយុចាប់ពី ៨ ឆ្នាំ ទៅ ១៥ ឆ្នាំ ពិតជាពិគ្រោះគិតគូរពីការបង្កើតល្បែងអ្វីមួយជាមិនខាន។

## ១. របៀបលេង

គឺជាល្បែងមួយសាមញ្ញ ងាយស្រួលក្នុងការលេង ហើយដែលត្រូវការជាចាំបាច់ក្នុងមួយក្រុមៗ ចំនួនមនុស្សបីនាក់។ ក្មេងពីរនាក់[(១៥)] ត្រូវកាន់ដៃគ្នាស្រាក់ឱ្យរឹងមាំ អាចទប់ទល់បាននឹងទម្ងន់មិនឱ្យរបូត។ ក្មេងម្នាក់ទៀត[(១៦)] យកដៃទាំងពីរកាន់ស្មានៃមិត្តខ្លួនសម្រាប់ទប់ខ្លួន ហើយយកជើងម្ខាង ពាក់ទៅលើដៃកុមារទាំងពីរដែលកាន់ស្រាក់គ្នានោះ ឱ្យជាប់លាប់ល្អដូចគេថ្លក់នៅត្រង់គន្លាក់អាចម៍។ លុះធ្វើយ៉ាងនេះហើយ គេសួរបញ្ជាក់គ្នាថា : "ម៉េចបាន ឬនៅ? កាលណាចម្លើយរួមគ្នាថា "បានហើយ ! ក្មេងពីរនាក់ ដែលធ្វើជាគោនោះ ក៏ស្ទុះរត់ទៅមុខ។ មុនដំបូងគេរត់ក្នុងល្បឿនល្មមៗ រីឯក្មេងដែលធ្វើជារទេះនោះ

---

(១៥) ក្មេងពីរនាក់ ដែលលកាន់ដៃស្រាក់គ្នា យ៉ាងមាំនេះ គឺជាតំណាងគោ ១ នឹម ។

(១៦) ក្មេងម្នាក់ដែលយកជើងទៅពាក់លើដៃអ្នកទាំងពីរឱ្យទាក់ត្រង់គន្លាក់អាចន៍នោះ គឺជាតួរទេះបាក់កង់ម្ខាង ។

ត្រូវលោតតែជើងម្ខាងទៅមុខ ដោយលៃទៅតាមល្បឿននៃគោទាំងពីររបស់ខ្លួន។ កាលណាគោបោលកាន់តែលឿន អ្នកធ្វើរទេះបាក់កង់ ក៏ត្រូវតែលោតតាមគោដោយជើងម្ខាងឱ្យទាន់ និងស៊ីសង្វាក់គ្នា។ ប្រសិនបើអ្នកទាំងបីមានការប៉ិនប្រសប់ស្មើគ្នា នោះ គេអាចដំណើរការល្បែងនេះបានជោគជ័យ ដោយពុំមានឧបសគ្គឬការរាំងស្ទះអ្វីមួយ។ ប៉ុន្តែ បើអ្នកធ្វើគោទាំងពីរ កាន់ដៃគ្នាមិនបានជាប់មាំទេ ហើយធ្វើឱ្យរបូតដៃចេញពីគ្នានោះ ជើងម្ខាង (ស្តាំឬឆ្វេង) របស់អ្នកធ្វើរទេះនឹងធ្លាក់ចុះមកដល់ដី ហើយត្រឡប់ទៅជារត់ជើងពីរដូចធម្មតាវិញ។ បែបនេះ ល្បែងរទេះបាក់កង់និងអត់ន័យ។ គេត្រូវតែកាន់ដៃឱ្យបានមាំមួនជាប់លាប់ ហើយផ្តើមលេងសាជាថ្មីទៀត ដោយប្រាប់គ្នីគ្នាឱ្យប្រុងប្រយ័ត្ន កុំឱ្យធ្លោះធ្លោយដូចលើកមុន។ ម្យ៉ាងទៀត បើអ្នកធ្វើរទេះរបូតដៃចេញពីស្នាមិត្តខ្លួនទាំងពីរនោះ អាចនឹងបណ្តាលឱ្យដួល ហើយរបូតចេញពីដៃចាប់គ្នារបស់មិត្តខ្លួន។ កំហុសរបស់ភាគីណាមួយនោះ នឹងត្រូវបានកែសម្រួល ហើយត្រូវចាប់ផ្តើមលេងសារជាថ្មីទៀត ហើយតាំងស្មារតីប្រុងប្រយ័ត្នដៃជើងឱ្យបានល្អ កុំឱ្យមានការខុសឆ្គងដូចមុនទៀត។ ល្បែងនេះច្រើនតែលេងពីរ-បី ឬ បួនគូ ក្នុងចលនាប្រណាំងយកឈ្នះចាញ់គ្នា។ ប្រសិនបើផ្លូវទូលាយ គេប្រណាំងដោយរត់ទន្ទឹមគ្នាពីរឬបីជួរ។ តែបើផ្លូវចង្អៀតគេរត់ប្រដេញតាមក្រោយគ្នា។ បើអ្នកក្រោយលឿនជាង គេអាចជៀសហើយបន្តរត់ទៅមុខឱ្យបានដល់ទីមុន។ ទីដែលបានណាត់គ្នានោះ មិនអាចលើសពី១០០ម៉ែត្រឡើយ។ គេលេងល្បែងរទេះបាក់កង់ប្រណាំងគ្នានេះរហូតទាល់តែ អ្នកឈ្នះ និងអ្នកចាញ់អស់ចិត្ត រៀងៗខ្លួន។ តែដើម្បីកែសម្រួលចំណុចខ្វះខាតខ្លះៗនោះ គេតែងតែប្តូរគ្នាដើរតួជាគោ ជារទេះម្តងម្នាក់ៗ ។

## ២. ប្រភពល្បែងរទេះបាក់កង់

ក្មេងៗចូលចិត្តមើលសង្កេតធ្វើត្រាប់ នេះគឺជាសម្ដីរបស់អ្នកគរុកោសល្យបារាំងម្នាក់។ នៅក្នុងមជ្ឈដ្ឋានដែលវារស់នៅ នាជនបទស្រែចម្ការ វាបានឃើញកសិកររប្រើរទេះ។ ជួនកាល នៅពេលកំពុងបររទេះស្រាប់តែបាក់ភ្លៅ ដោយដឹកកសិផលផ្សេងៗធ្ងន់ពេក ឬដោយប្រការណាផ្សេងទៀត។ ពេលនោះតួរទេះម្ខាងត្រូវធ្លាក់ដាប មកដល់ដី។ ឯម្ខាងទៀតនៅឈរដូចដើម។ ក្នុងកាលៈទេសៈមួយទៀត ក្មេងបានឃើញរទេះប្រណាំងដែលបាក់ភ្លៅម្ខាងនាំឱ្យតួរទេះធ្លាក់អូសដល់ដី ឬមួយនៅពេលកំពុងរត់ប្រណាំងយ៉ាងលឿនពេញទំហឹងនោះ កង់រទេះម្ខាងរបូតចេញ ដោយដាច់ខ្សែព្រ័ត-ងខាងណាមួយ។ គោនៅតែរត់ទៅមុខ... ឯរទេះវិញម្ខាងទាបម្ខាងខ្ពស់។ ម្ខាងដែលទាបនោះត្រូវអូសកោសតួរទេះនៅលើដី។ កង់ម្ខាងនៅតែវិល តែបាត់លំនឹង..... អ្នកជិះមានការលំបាក ក៏ទាញគោបញ្ឈប់។ ជួនកាលនៅក្នុងសមរភូមិចម្បាំង ក្មេងៗបានឃើញរទេះចម្បាំង រទេះផ្ទុកកាំភ្លើងធំ រទេះផ្ទុក ស្បៀង ឬអាវុធបាក់បែកខូចខាត ឬ បាត់កង់ម្ខាង នៅរាយប៉ាយពាសពេញ សមរភូមិ...។ គឺទិដ្ឋភាពបែបនេះហើយ ដែលក្មេងបានចម្លងយកមកច្នៃធ្វើជា ល្បែងលេងកម្សាន្ត ពីលើព្រឹត្តិការណ៍ពិតៗ ដែលវាបានប្រទះ។

## ៣. អត្ថន័យរបស់ល្បែងរទេះបាក់កង់ :

នៅក្នុងពិភពដែលកាន់ព្រះពុទ្ធសាសនា គេច្រើនប្រៀបធៀបទៅ : ព្រះពុទ្ធសាសនា ទុកដូចជាកង់រទេះម្ខាង។ ហើយរដ្ឋ នគរ ប្រទេស ទុកដូចជាកង់រទេះម្ខាងទៀត។ កង់ (ចក្រ) ទាំងពីរនេះពុំអាចមានមួយណា ឬខ្វះមួយ

ណាបានឡើយ ។ គឺត្រូវតែអាស្រ័យគ្នាជាចាំបាច់ទៅវិញទៅមក ។ បើមានតែពុទ្ធចក្រ ហើយគ្មានអាណាចក្រនោះ ពុទ្ធចក្រពិតជាពុំអាចអត្ថិភាពនៅបានឡើយ គេទុកដូចប្រទីបគ្មានប្រេង ។ តែផ្ទុយទៅវិញ បើមានតែអាណាចក្រ អត់ពុទ្ធចក្រនោះ លោកយើងនឹងឆេះចេញជាភ្លើង កើតអន្ទរកាប់អន្ទរចាក់ ដូចកាលរបបប្រល័យពូជសាសន៍យ៉ាងនេះឯង ។ សរុបមក ការបាត់បង់ម្ខាងណាមួយនោះ ចាត់ទុកដូចជាបាត់លំនឹង ។ លំនឹងនេះមាននៅក្នុងធម្មជាតិ ក្នុងសង្គម និងក្នុងគ្រួសារ ។ ជាតិបាត់លំនឹងមកពីកត្តាច្រើន ដូចជា វិបត្តិសេដ្ឋកិច្ច វិបត្តិសង្គម វិបត្តិនយោបាយ វិបត្តវប្បធម៌.....។ល។ សង្គមបាត់លំនឹង គឺសង្គមអយុត្តិធម៌ អសីលធម៌......។ គ្រួសារបាត់លំនឹងគឺគ្រួសារដែលខ្វះសាមគ្គី ខ្វះការព្រមព្រៀង ខ្វះការយោគយល់ ខ្វះការសម្របសម្រួល.....។ ម្យ៉ាងទៀតគ្រួសារដែលកំព្រាបែកបាក់បាត់ម្ខាងណាមួយ ដូចជាគ្រួសារពោះម៉ាយអត់ប្រពន្ធ គ្រួសារមេម៉ាយអត់ប្តី.... សុទ្ធតែជួបគ្រោះវិបត្តិ លំបាកលំបិន ប្រព្រឹត្តទៅមិនប្រក្រតី ។ ទាំងអស់នេះ គឺជារូបារម្មណ៍ (image) ដែលឆ្លុះបញ្ចាំងមកតាមរយៈល្បែងរទេះបាក់កង់នេះឯង ។

## ៤. សន្និដ្ឋាន

ស្រុកស្រែចម្ការជាប្រភពនៃប្រពៃណីទំនៀមទម្លាប់ ។ នៅប្រទេសខ្មែរយើង មនុស្សភាគច្រើនរស់នៅស្រុកស្រែ ព្រោះជាប្រទេសដែលមានប្រពៃណីកសិកម្ម ។ ដូច្នេះល្បែងផ្សេងៗ ដែលកើតនៅស្រុកស្រែ អាចចាត់ទុកថាជាល្បែងប្រជាប្រិយ..... ល្បែងតំណាងជាតិ ល្បែងឆ្លុះបញ្ចាំងអំពីវប្បធម៌អត្តសញ្ញាណជាតិ ។

# កុមារ និងប្រពៃណីទំនៀមទម្លាប់ខ្មែរ
# អំពី ការបូលក្មេង(១៧)

កាលណានៅក្នុងគ្រួសារ មានសមាជិកម្នាក់ ចេញដំណើរទៅឆ្ងាយពីភូមិស្រុក ឬមានទីលំនៅផ្សេងពីភូមិកំណើត ហើយបើកាលណាគេចង់ដឹងថា តើសាច់ញាតិដែលនៅស្រុកភូមិឆ្ងាយនោះ មកលេងជាមួយនឹងបងប្អូននៅស្រុកកំណើតនេះ នៅថ្ងៃណា ? ពេលណា ? អ្នកស្រុកខ្លះនៃខេត្តកំពង់ធំ ពិសេសបងស្រីដែល ទទួលបន្ទុកពរប្អូនលួងឬនាំប្អូនលេងជំនួសដៃឪពុកម្តាយនោះ តែងតែបូលដោយ យកក្មេងចេះក្រឡាប់ ចេះអង្គុយ ឬចេះឈរតិច១ ធ្វើជាតួសម្រាប់បូល ។

## ១~ របៀបបូលក្មេង

ផ្អែកលើមូលហេតុដែលបានពណ៌នាខាងលើ គេយកក្មេង( ទោះប្រុសស្រីក្តី ដែលមានវ័យពី៦ខែ ទៅ ១ខួប)ដាក់ផ្តេកលើក្តាក្រាល ឬលើកន្ទេល.... ឱ្យវាដេកផ្ងា ហើយគេពោលពាក្យបង្ហួស១វែង១ បែបរាប់បន្ទិច ធ្វើបទបែបបន្តិច ដូច្នេះថាៈ"បូលពែក ភ្នែកមើល ជើងដើរ ត្រចៀកស្តាប់ ក្រឡឹតក្រឡាប់បើ..... (ថាឈ្មោះសាច់ញាតិដែលនៅឬទៅស្រុកឆ្ងាយនោះ) មកថ្ងៃនេះឬថ្ងៃស្អែក សូមមើលមុខបងឱ្យត្រង់ (ចំ) ។ ថាដូច្នោះរួចហើយ បងស្រីចាប់ដៃប្អូនទាំងពីរទាញឱ្យក្រោក ហើយសម្លឹងមើលមុខវា ប្រសិនបើក្មេងនោះមើលមុខ

---

(១៧) ល្បែងនេះច្រើនលេងនៅភូមិនានា នៃឃុំស្រយូវស្រុកកំពង់ស្វាយខេត្តកំពង់ធំ

បងវាចំត្រង់ ដោយឥតងាកទៅឆ្វេងឬទៅស្ដាំនោះ គេសន្មតថាបងប្អូនឈ្មោះ.... នោះ នឹងមកក្នុងថ្ងៃនេះ ឬក្នុងពេលឆាប់ៗនេះហើយ ។ ប្រសិនបើការបួលក្មេងនេះ ទទួលបានលទ្ធផលល្អដូចគេចង់បាននោះ បងស្រីបួលតែម្ដងប៉ុណ្ណោះ ក៏យកជាបានការហើយ ។ ប៉ុន្តែ បើក្មេងចេះតែរើបម្រះ ក្រឡេកភ្នែក ជួនមើលទៅឆ្វេង ជួនមើលទៅស្ដាំ (មើលមិនចំមុខបងវា) ជាគម្រប់ពីរដង ឬ បីដងនោះ គេសន្មតថា បងប្អូនសាច់ញាតិនោះ នឹងមិនទាន់វិលមកក្នុងពេលឆាប់ៗនេះទេ ។

## ២_ បទពិសោធន៍ :

ទោះជាសម័យមុននោះក្ដី សម័យឥឡូវនេះក្ដី គេពុំទាន់អាចកំណត់បានថា ការបួលក្មេងនេះ បានទទួលផលពិតជាក់ស្ដែងប៉ុន្មានភាគរយ(%?)ហើយមិនបានការ ប៉ុន្មានភាគរយ នោះនៅឡើយ ។ ប៉ុន្តែ ពីជំនាន់មួយទៅជំនាន់មួយ ការបួលក្មេងនេះ តែងតែធ្វើជាបន្តបន្ទាប់រៀងរហូតមក ដោយមិនបានយកចិត្តទុកដាក់ថា បានផលឬមិនបានផលនោះឡើយ ។

## ៣_ ជំនឿតាមប្រពៃណី

ក្រៅពីការរកគ្រូហោរទស្សន៍ទាយ ដើម្បីចង់ដឹងអំពីដំណើរហេតុការណ៍អ្វីមួយ បុព្វបុរសរបស់យើងតែងតែ ប្រើវិធីបួលក្មេងនេះដើម្បីសាកល្បងពិសោធន៍និងឆ្លុះបញ្ចាំងមើល ហេតុការណ៍នឹងមកដល់ ឬដែលស្ដែងឡើងដោយយកក្មេងធ្វើជាតួអង្គសម្រាប់បួលផ្សេង ។ តើអស់លោកឆ្ងល់ឬទេ ថាហេតុអ្វីបានជាគេមិនយកមនុស្សធំមកបួល? ហើយហេតុអ្វីបានជាគេយកកូនក្មេងអាយុស្របាលណឹង មកធ្វើជាតួអង្គសម្រាប់បួលទៅវិញ ? ខ្ញុំសូមអញ្ជើញអស់លោក

សាកល្បងវិភាគជាមួយខ្ញុំ ឬជួយស្តាប់យោបល់ដែលខ្ញុំសាកល្បងវិភាគទៅតាមទស្សនៈរបស់ខ្ញុំផ្ទាល់ ។

## ៤- មូលហេតុនៃការយកក្មេងមកបូលផ្សេង

ប្រសិនបើមានអស់លោកខ្លះ សួរខ្ញុំថា: តើដូនតាយើងមានបង្ហើបបង្ហាញហេតុផលអ្វីខ្លះដែរឬទេ អំពីបញ្ហានេះ នោះខ្ញុំសូមឆ្លើយយ៉ាងកំបុតថា "អត់មានទេ" ។ មានបញ្ហាច្រើនរាប់មិនអស់ ដែលដូនតាយើងនាំយើងឱ្យធ្វើនូវអ្វីមួយ បន្សល់ទុកនូវល្បែងអ្វីមួយដូចជាល្បែងចាក់ទឹកដូងម៉្លូងម៉្លាកន្ទុយត្រីប្រា..... ។ល ។ ដូនកាលដូនតាយើងបង្កប់នូវអត្ថន័យខ្លឹមសារអ្វីមួយនៅក្នុងចម្រៀង..... លោកឥតបានបកស្រាយពន្យល់យើងទេ លោកទុកលទ្ធភាពឱ្យយើងស្វែងយល់ដោយខ្លួនឯង...ជាជាងលោកបកចេកស្រាប់ៗមកបញ្ចុកក្នុងមាត់យើង ។ ធ្វើយ៉ាងនេះគឺ ក្នុងគោលបំណងដាក់លំហាត់ឱ្យខួរក្បាលយើង (ជាកូនចៅជំនាន់ក្រោយ) ធ្វើការ បានន័យថា កុំឱ្យច្រេះចាប់ខួរក្បាលកូនខ្មែរជំនាន់ក្រោយ..... គឺលត់ដំយើងឱ្យហាត់គិត ហាត់វិភាគរកអត្ថន័យអាថិកំបាំងនៃសារដែលលោកបន្សល់បង្កប់ក្នុងល្បែង ចម្រៀង ការអប់រំដោយប្រយោល[១៨] ឬសកម្មភាព កាយ-វិការ អ្វីមួយ ។

សូមអនុញ្ញាតវិលទៅរករឿងយកកូនក្មេងមកកបូលវិញ... ។

តើហេតុអ្វីបានជាបុព្វបុរសយើងយកក្មេងមកធ្វើជាតួអង្គ សម្រាប់បូលផ្សេង[១៩] ?

---

(១៨) ខ្ញុំនឹងបកស្រាយលាតត្រដាងពណ៌លម្អិតនៅឯកសារក្រោយៗទៀត ។

(១៩) ការអប់រំដែលមិនមានអត្ថន័យត្រង់ ឬមិនចំៗ (Education indirecte) ។

អាចមានមូលហេតុពីរយ៉ាង :

**ក/** យកមនុស្សធំឬក្មេងធំក្នុងវ័យដឹងក្តី..... ដឹងខុសត្រូវមកធ្វើការបូលផ្សង អាចមិនយកជាការពិតបាន ព្រោះវាស្តាប់អត្ថន័យនៃពាក្យសូត្រផ្សងនេះបានហើយ វាគិតតែពីមើលមុខចំជារឿងរហូត (ទោះបូលផ្សងប៉ុន្មានដងក៏ដោយ) ជាហេតុដែលយើងមិនអាចសម្រេចគោលបំណងក្នុងការបូលនេះបាន។

**ខ/** ក្មេងតូច ដែលមានលក្ខណៈសម្បត្តិល្អប្រសើរក្នុងការបូលមកពីវាឮតែពាក្យពេចន៍ដែលយើងសូត្រស្ទើៗនោះ តែមិនដឹងមិនយល់អ្វីទាល់តែសោះអំពីខ្លឹមសារនៃពាក្យទាំងនោះ។ ចាស់បុរាណលោកយល់ថា ប្រហែលជាអនុភាពអ្វី ឬវត្ថុសក្តិសិទ្ធិណាមួយ មកបណ្តាលចិត្តឱ្យវាមើលមុខបងស្រីវាចំ ឬក្រឡេកភ្នែក ទៅស្តាំ-ទៅឆ្វេង ដែលអាចឱ្យបងស្រីវាយកកាយវិការវានេះមកទស្សទាយនឹតាម ហើយសន្មតថាអាចនឹងពិត (ច្រើនជាងមិនពិត)។ តាមយោបល់របស់ដូនតាយើង លោកយល់ថា វ័យក្មេង ជាវ័យបរិសុទ្ធស្អាតឥតមានប្រឡាក់ប្រឡូស នូវក្តីមន្ទិលសៅហ្មងអ្វីឡើយ ដូច្នេះអាចមានទេព្តា ទេព្រ័ក្សអារក្ស អ្នកតាកាន់ ហើយការបញ្ចេញអាកប្បកិរិយារបស់វាបែបណាៗ នោះអាចនឹងចាត់ថាត្រឹមត្រូវ។

**គ/**អាទិភាពនៃក្មេងតាមទស្សនៈខ្មែរ

+ ចាស់បុរាណយល់ថា : ក្មេងៗមានភាវៈអាថិកំបាំងអភិបាលទ្រទ្រង់ៈ នៅសហរដ្ឋអាមេរិក (តាមការចុះផ្សាយរបស់ទស្សនាវដ្តីប្រជាប្រិយ ឆ្នាំ ២០០០) មានក្មេងម្នាក់ត្រូវខ្យល់កួចឡើងទៅលើអាកាសកម្ពស់ ១៨ ម ធ្លាក់ចុះមកវិញ ពុំមានគ្រោះថ្នាក់អ្វីធ្ងន់ធ្ងរឡើយ គ្រាន់តែជាំហើមបន្តិចបន្តួចប៉ុណ្ណោះ

- ក្មេងៗធ្លាក់ពីលើផ្ទះ ឬពីលើខ្នងដំរី មិនមានបាក់បែកផ្លោះគ្រេចអ្វីឡើយ=ចាស់ៗ ថាមកពីមានព្រះធរណីទ្រថ្នាក់ថ្នមវា។

- តុលាការចង់បានពតិមានពិត=សួរក្មេងៗប្រាប់ត្រង់ ឥតមានលាក់លៀមអ្វីសោះឡើយ។ ផ្ទុយទៅវិញបើសួរមនុស្សចាស់អាចនឹងឆ្លើយបិទបាំងការពិត ដើម្បីជួយជនជាប់សង្ស័យជាសាច់ញាតិ ឱ្យបានរួចខ្លួនពីការចោទប្រកាន់។

- ក្មេងៗតូចនៅបរិសុទ្ធស្អាត មិនទាន់ដែលប្រព្រឹត្តអំពើខុសឆ្គងដល់ម្តងណា ដូចសំពត់នៅក្នុងផ្នត់កី មិនទាន់ប្រឡាក់ធូលីដី........។ ដូច្នេះ អាស្រ័យដោយប្រការទាំងប៉ុន្មានដូចពោលខាងលើ ទើបខ្មែរបុរាណ យកក្មេងៗមកបូលផ្សង ហើយសន្មតថា" អាចជឿបាន"។

## ៥. សន្និដ្ឋានៈ

បច្ចុប្បន្ននេះ អ្នកស្រុកនៅទីតំបន់ណាខ្លះនៅប្រើវិធីបូលផ្សង ក្មេងបែបនេះ យើងពុំអាចដឹងបានច្បាស់លាស់ឡើយ។ ប៉ុន្តែ ខ្ញុំនៅតែគិតសន្មតថា នៅតំបន់ជនបទស្រែចម្ការនៃផែនដីកម្ពុជាយើង ប្រហែលជានៅពុំទាន់បាត់បង់ទំនៀមនេះនៅឡើយទេ។ ឬមួយអាចមានវិធីមួយណាផ្សេងទៀត សម្រាប់បូលផ្សងចង់ដឹងអំពីដំណើរវិលត្រឡប់នៃសាច់ញាតិដែលទៅឆ្ងាយ ឬនៅស្រុកឆ្ងាយ។

រីឯក្នុងសម័យដ៏ទំនើបពេលបច្ចុប្បន្ន នៅបណ្តាក្រុងធំៗ គេលែងយកក្មេងមកបូលផ្សងទៀតហើយ។ ប៉ុន្តែគេលើកទូរស័ព្ទ( ត្រចៀកទិព្វ) មកចុចសួរឆ្លើយឆ្លងគ្នាចម្ងាយរាប់រយ រាប់ពាន់ រាប់ម៉ឺនគីឡូម៉ែត្រ ដឹងគ្នាទាក់ទងគ្នាបាន

ភ្លាមក្នុងមួយប៉ប្រិចភ្នែក។ ដូច្នេះរឿងបូលផ្សងក្មេងៗ ឋិតនៅដាច់ឆ្ងាយពីជនទំនើបទាំងនេះ ហៅគ្នាលែងឮ។ ពួកគេចាត់ថា នេះគ្រាន់តែជារឿងព្រេងនិទាន......។

ជាមួយនឹងពេលវេលា វិទ្យាសាស្ត្រ បច្ចេកទេស ចេះតែវិវឌ្ឍឥតឈប់ឈរ។ មួយថ្ងៃៗសម្ភារៈប្រើប្រាស់គ្រប់បែបយ៉ាងកាន់តែទំនើបឡើងៗ។ យើងឃើញមានឆ្នាំងឆ្អិនឯង (ឆ្នាំងដាំបាយអគ្គិសនី ហាងអាហារប៊ូហ្វេ)ភ្នែកទិព្វ (ទូរទស្សន៍ក្នុងស្រុក-ទូរទស្សន៍ខ្សែកាប) ត្រចៀកទិព្វ (វិទ្យុ-ទូរស័ព្ទ...ទូរសារ ហ្វាក់ អ៊ីម៉ែល...)។ ដូច្នេះ ទោះបីប្រពៃណី ទំនៀមទម្លាប់វាហាក់ដូចជាស្រមោលនៃក្តីស្រមៃមួយ ដែលហួសសម័យទៅហើយក៏ដោយ ក៏យើងត្រូវតែសរសេរចងក្រងទុកជាក្បួនខ្នាត ជាកញ្ចក់សម្រាប់ឆ្លុះបញ្ចាំងបកថយក្រោយអំពីអតីតកាលនៃពូជសាសន៍មួយដែលធ្លាប់កសាងប្រាសាទថ្ម ធ្លាប់មានអារ្យធម៌រុងរឿងដាច់គេនៅអាស៊ីអាគ្នេយ៍។

# កុមារ និងប្រពៃណីទំនៀមទម្លាប់ខ្មែរ អំពីល្បែងលលកជល់គ្នា[២០]

ឱ្យតែមានឱកាសអាចជួបជុំគ្នាជាក្រុម ទោះតិចក្តីច្រើនក្តី ទោះជានៅក្នុងភូមិ ឬវាលស្រែក្តី ក្មេងៗខ្មែរ តែងតែបង្កើតល្បែងប្លែកៗ ទៅតាមតំបន់ស្រុកភូមិ ទៅតាមទម្លាប់ដែលជំនាន់មុនធ្លាប់បង្ហាញ និងទុកជាកេរដំណែលបន្តមកជំនាន់ក្រោយៗ។ ពេលនេះខ្ញុំ[២១] សូមបង្ហាញជូននៅល្បែងមួយដែល ក្មេងៗនៅភូមិខ្វាវ ឃុំព្រៃអំពក ស្រុកគីរីវង្ស ខេត្តតាកែវ ធ្លាប់លេងក្នុងពេលឃ្វាលគោនៅឯវាលស្រែ នារដូវវស្សា.....នោះគឺល្បែង"**លលកជល់គ្នា**"។

## ១- របៀបលេង :

អាចលេងល្បែងនេះបាន ត្រូវមានគ្នា ២នាក់ជាចាំបាច់។ គេអាចលេងមួយគូ ឬច្រើនគូក៏ បាន។ ដំបូងឡើង ដៃគូរទាំងពីរត្រូវអង្គុយបញ្ឈរជង្គង់ គូថផ្ទាល់នឹងដី ដាក់ប្រអប់ជើងទាំងពីររុញទៅមុខបន្តិច ម្នាក់ទៀតក៏អង្គុយតាមរបៀបនេះដូចគ្នា។ ប៉ុន្តែ ចំណុចពិសេសនោះ ជាចាំបាច់ គេត្រូវអង្គុយលើខ្នងជើង របស់ដៃគូរៀងៗខ្លួន ដោយដៃគេទាំងពីរនាក់ ចាប់គ្នាឱ្យជាប់ត្រង់ដើមដៃធ្វើយ៉ាងណាកុំឱ្យរបូត។ លុះរៀបចំបង្គុយបានល្អហើយ នៅដំណាក់កាលទីពីរ

---

(២០) ក្មេងៗជាកូនចៅកសិករនៅភូមិនានា នៃស្រុកគីរីវង្សខេត្តតាកែវ ធ្លាប់លេងល្បែងនេះ។

(២១) កាលពីកុមារ ខ្ញុំក៏ធ្លាប់បានលេងល្បែងនេះជាមួយមិត្តភក្តិ រួមភូមិ នៅពេលឃ្វាលគោឯវាល ស្រែដែរ។

គេត្រូវយោកខ្លួនឱ្យត្រូវចង្វាក់គ្នាម្ដងទៅមុខម្ដងទៅក្រោយ។ នៅពេលយោល យោកទៅមកៗនេះ គូភាគីម្នាក់ៗត្រូវទម្រេតខ្លួនទៅខាងក្រោយ ឱ្យទាល់តែខ្នងដល់ដី ទើបងើបឡើងវិញ។ នៅពេលដែលភាគីម្ខាង ចំកោងខ្នងហើយទម្រេតបន្ទាបឱ្យដល់ដីនោះ ភាគីម្ខាងទៀត បានស្ទុះងើបឡើង ចំកោងដងខ្លួនងោកទៅលើដៃគូរបស់ខ្លួន។ គេធ្វើចលនាយោលទៅយោលមក យោកទៅយោកមកនេះ បានយូរកាលណា គេកាន់តែសប្បាយនិងកាន់តែមានមោទនភាពចំពោះការប៉ុនប្រសប់របស់គេទាំងពីរ។ បើភាគីទាំង ពីរ ឬភាគីណាមួយមិនរឹងមាំ មិនអាចទប់លំនឹងខ្លួនបាននោះទេ នឹងនាំឱ្យរលំទៅខាងឆ្វេង ឬខាងស្ដាំ។ ការរលំនេះអាចបណ្ដាលមកពីៈ

**ក/** ទប់ជង្គង់មិននឹង បណ្ដាលឱ្យកន្ទែកទៅខាងខ្លាំងពេក

**ខ/**ភាគីខាងណាមួយចាប់ដៃគូរបស់ខ្លួនមិនបានរឹងមាំ បណ្ដាលឱ្យដៃរបូតចេញពីគ្នា។ ការលេងនេះបន្លាយពេលយូរ ឬឆាប់បញ្ចប់ អាស្រ័យដោយការព្រមព្រៀងរបស់ដៃគូលេងល្បែង។

## ២. ប្រយោជន៍នៃល្បែង ៈ

ជាបឋម ល្បែងនេះ បានជួយឱ្យក្មេងជៀសផុតពីការធុញទ្រាន់នឹងដំណើរជីវិត ដែលប្រព្រឹត្តទៅដដែលៗ រៀងរាល់ថ្ងៃ។ ភារកិច្ចដែលក្មេងៗជាកូនកសិករត្រូវជួយឪពុកម្ដាយជាចំបាច់នោះ គឺការឃ្វាលគោ។ នៅដើមរដូវវស្សាដែលស្រែនៅទំនេរមិនទាន់ភ្ជួរ មិនទាន់សាប មិនទាន់ស្ទូងនោះ វាលស្រែគឺជាទីវាលក្រាលទៅដោយស្មៅដុះក្រាស់ ខៀវស្រងាត់។ ឆ្លៀតពេលដែលហ្វូងគោ កំពុងឆ្ងាញ់នឹងស្មៅខ្ចី ក្មេងៗជាអ្នកគង្វាល បានប្រជុំគ្នាលេងល្បែងនេះ

ដើម្បី :

**ក/** ពង្រឹងចលនាសាច់ដុំ ដងខ្លួន ដៃ និងជើង ឱ្យមានភាពកាន់តែស្វាហាប់ សក្តិសមជាកសិករខ្លាំងក្លា នៅពេលអនាគត ។ នៅពេលដែលគេត្រូវលើកឈើធំៗ ចាប់ប្រតោងឡើងលើដើមឈើ ដើម្បីបេះផលានុផល បេះស្លឹកឈើធ្វើបន្លែ ឬបេះឃ្មុំ គេត្រូវការកម្លាំងដៃ កម្លាំងជើង កម្លាំងទប់ទ្រនៃដងខ្លួននេះហើយ ។

**ខ/** ហាត់សម្របសម្រួលចលនាខ្លួន ចលនាដៃជើង ជាមួយដៃគូ ជាសហភាគី ឱ្យបានស៊ីចង្វាក់គ្នា ចេះថ្លឹងទម្ងន់ ថ្លឹងលំនឹងឱ្យបានល្អ ព្រោះកាលណាគេក្លាយទៅ ជាកសិករពេញវ័យ គេពិតជាត្រូវការជំនាញ ហត្ថពលកម្មនេះដោយខានមិនបាន ។

**គ/** ហាត់ពត់លត់ដំ ទ្រាំទ្រនិងទម្ងន់ ការហត់នឿយ ហាត់អត់ធន់និងការលំបាក ដែលជីវិតជាកសិករត្រូវតែប្រឈមមុខ និងទទួលរ៉ាប់រង ។

**ឃ/** ហាត់ពង្រីកស្មារតីឱ្យយល់ច្បាស់នូវអ្វីដែលខ្លួនត្រូវធ្វើ ឱ្យបានល្អកុំឱ្យខូចខាត ខកពេលវេលា ។ តាំងពីល្បែងតូចតាចឬកិច្ចការអ្វីៗសព្វសារពើមិនអាចខ្វះប្រាជ្ញា ខ្វះការត្រិះរិះបានឡើយ ប្រសិនបើគេចង់ឱ្យកិច្ចការនោះសម្រេចបានលទ្ធផលល្អ ។

## ៣~ សន្និដ្ឋាន :

បច្ចុប្បន្នកុមារមួយចំនួនធំ បានលាចាកហ្វូងគោក្របី ទៅសិក្សានៅសាលាបឋម ឬមធ្យមសិក្សានៅទីប្រជុំជន ។ ការផ្លាស់ទីកន្លែងពីស្រែទៅសាលាមិនមែនបានន័យថាក្មេងឈប់លេងល្បែងអ្វី សោះនោះឡើយ ។ ជាការពិត

ណាស់ ល្បែងក្មេងអាចនឹងផ្លាស់ប្តូរ ប្រែប្រួលទៅតាមទីកន្លែង មជ្ឈដ្ឋាននានា និងទៅតាមវ័យរបស់វា។ នៅតាមសាលា បើគេឈប់លេងលលកជល់គ្នា ក៏គេលេងល្បែងផ្សេងៗជំនួសវិញដែរ។ គឺល្បែងដែលសមស្របទៅនឹងចំណូលចិត្តរបស់ដៃគូថ្មី ក្រុមថ្មីមកពីទីកន្លែងផ្សេងៗគ្នា។ នៅសាលាគរុកោសល្យកំណត់ថាក្មេងដែលល្អក្នុងការរៀនសូត្រ ក៏ជាក្មេងដែលល្អក្នុងការលេងដែរ[២២]។ ជានិច្ចជាកាល នៅពេលចេញលេង គ្រូច្រើនជុំរុញឱ្យក្មេងចេញអស់ពីក្នុងថ្នាក់ដើម្បីមកលេងល្បែងផ្សេងៗនៅទីធ្លាសាលា។ គ្រូមិនកត់សម្គាល់ថាក្មេងដែលល្អ គឺក្មេងដែលនៅតែឈ្ងោកអាន ឬធ្វើកិច្ចការផ្សេងៗ នៅពេលចេញលេងនោះឡើយ។

នៅតំបន់ឯទៀតៗនៃកម្ពុជា ខ្ញុំជឿថា ពិតជាមានល្បែងលលកជល់គ្នា ឬល្បែងខុសផ្សេងពីនេះ ដែលគួរតែអ្នកនៅទីនោះ សរសេរចងក្រងទុកជាឯកសារ សម្រាប់ការស្រាវជ្រាវតទៅ។

---

(២២) Les bons élèves sont aussi les premiers au jeu

# កុមារ និងប្រពៃណីទំនៀមទម្លាប់ខ្មែរ អំពីការបូលរកអ្នកផោមលាក់មុខ[២៣]

នៅទីណាដែលមានក្មេងប្រជុំគ្នាជាក្រុម មានគ្នាច្រើនដើម្បីលេងល្បែង ឬជជែកពិភាក្សាគ្នាពីបញ្ហាអ្វីមួយ ហើយស្រាប់តែធំក្លិនស្អុយផោម នោះជាធម្មតា គេតែងតែសួររកមុខអ្នកផោម ។ ដោយដឹងជាមុនថា គេនឹងអាចបន្ទោស តិះដៀល បន្តុះបង្អាប់ ប្រមាថមាក់ងាយ ឬជេរស្តីឱ្យទៀត ទើបស្ទើរតែគ្រប់អ្នកផោម ត្រូវលាក់អំពើអសីលធមិរបស់ខ្លួន មិនដាច់ចិត្តសារភាពប្រាប់មិត្តភក្តិគូកនឡើយ[២៤] ។ គឺឋិតនៅក្នុងករណីនេះហើយ ដែលប្រពៃណីតម្រូវឱ្យមានវិធានការមួយ គឺបូលរកមុខអ្នកផោម ដោយប្រើវិធីកាច់ត្របោម[២៥] ។

---

(២៣) បើកុំតែហេតុរឿងនេះ ជាប់ពាក់ព័ន្ធ នឹងប្រពៃណីទំនៀមទម្លាប់ខ្មែរនោះ ខ្ញុំមិនលើកយកមកពណ៌នាទេ សមដូចពាក្យ ទំនៀមជាកំណាព្យរបស់លោកកវីក្រមង៉ុយថែងថា : រីមនុស្សក្រមាច់ លេងផោមលេងអាចន៍ អាយុច្រើនខ្លី..... ។ល ។

(២៤) ពាក្យទំនៀមមួយឃ្លាថែងថា : ផោមឮគេធាក់ ផោមលាក់គេជេរ ផោមនៅកណ្តាលទន្លេ ក្រពើធ្វើទុក្ខ ផោមដាក់ជង្រុកកើតស្រូវអង្ករ ផោមដាក់ឆ្នាំងសម្លកើតត្រីកើតសាច់ ផោមលេចទាំងអាចន៍ ផោមផ្តាច់អាយុស(អាយុ) ។ ដោយយល់ដល់ន័យដែលថា: ផោមឮគេធាក់នេះហើយ បានជាអ្នកផោមមិនហ៊ានប្រាប់គេ ព្រោះខ្លាច គេធាក់ សុខចិត្តលាក់ឱ្យគេជេរចុះ ។

(២៥) ជាអង្កត់ឈើតូច ឬ ឫស្សីប្រវែងប្រមាណមួយចំអាមកាច់ខាងចុងឱ្យក្រងក់ ទំហំ ៤៥ អង្សា សម្រាប់បូលឱ្យចង្អុលមុខអ្នកផោម ។ ពាក្យនេះពុំមាននៅក្នុងវចនានុក្រមទេ ។ ត្របោមរាងដូចនេះ ( ┌ ) ។ ត្របោមអាចមានន័យថា : "ត្របោមរកមុខអ្នកផាច់" ប្រែមកថា : "ត្របាញ់រកមុខអ្នកផោម"

## ១. វិធីកាច់ត្របោម :

កាលណា ស៊ើបសួររកមុខអ្នកផោមពុំឃើញ អង្គប្រជុំមិនអស់ចិត្ត ហើយមិនជឿថា មិនអាចមានក្លិនស្អុយ ដោយគ្មានអ្នកណាផោមនោះឡើយ។ ដូច្នេះ ទន្ទឹមនឹងបំណងលាក់មុខរបស់អ្នកបង្កើតបញ្ហា វិធានការដ៏ចម្លែកមួយត្រូវបានចាត់ឡើង ក្នុងន័យវែកញែករកមុខអ្នកប្រព្រឹត្តល្មើសឱ្យទាល់តែឃើញ នោះគឺការកាច់ត្របោម។ មុនដំបូង ក្មេងមេក្រុមម្នាក់ចាត់ចែងឱ្យអ្នកចូលរួមទាំងអស់ អង្គុយដឹកង់ជាវង់ តូច ឬធំ ទៅតាមចំនួនមនុស្សតិច ឬច្រើន។ ក្មេងម្នាក់តាំងខ្លួនជាអ្នកផ្សងបូលនោះចូលទៅឈរឬអង្គុយនៅចំកណ្ដាលវង់ ដោយមានកាន់ត្របោមមួយ កាច់ចុងឱ្យក្រងុកទៅមុខរួចស្រេច។ ទាំងអស់គ្នាអង្គុយឈមមុខចូលក្នុង ហើយរង់ចាំលទ្ធផលនៃការបូលរកមុខជនល្មើសទាំងភ័យអរៗ គ្រប់ៗគ្នា ព្រោះមិនដឹងថា ចុងត្របោមចង្អុលទៅរកអ្នកណា ហើយម្យ៉ាងទៀត មិនដឹងថា តើការកាច់ត្របោមបូលផ្សងនេះ មានលក្ខណៈត្រឹមត្រូវឬទេ។ លុះក្រុមនេះ បានរៀបចំឱ្យមានរបៀបរៀបរយតាមទម្លាប់ពីមុនហើយ ទាំងអ្នកកាច់ត្របោម ទាំងអ្នកអង្គុយជារង្វង់មូល ពោលពាក្យព្រមៗគ្នា បង្អូសវែងៗ របៀបជាបែបបទបន្ទិច ជាពាក្យរាប់ៗបន្ទិចយ៉ាងនេះថា៖ "កាច់ត្របោមផោមស្អុយ អ្នកណាផោមស្អុយ អាលុយប្រាប់អញ!..." អ្នកបូល ពោលបណ្ដើរមូរត្របាញ់ត្របោមនឹងបាតដៃបណ្ដើរ ធ្វើឱ្យចុងត្រងុកនៃត្របោមវិលទៅវិលមកតាមចង្វាក់ការត្របាញ់នៃបាតដៃទាំងពីរ។ នៅត្រង់ចំនុចបញ្ចប់ "អញ" បើចុងត្របោមឈប់តាំង ចង្អុលទៅអ្នកណា គេសន្មតថា អ្នកនោះ ជាអ្នកផោម។

## ២~ ប្រវត្តិនៃប្រពៃណីរកយុត្តិធម៌តាមបែប ទេវនិយម (Justice de Dieu)[២៦]

នៅជំនាន់អង្គរ កាលណាមនុស្សណាម្នាក់ ត្រូវសង្ស័យថា លួចទ្រព្យរបស់គេ តុលាការតម្រូវឱ្យដាំទឹកពុះ ឬរំលាយសំណឱ្យរលាយ រួចបង្គាប់ឱ្យអ្នកជាប់សង្ស័យលូកចង្អុលដៃទៅក្នុងទឹកពុះ ឬសំណរលាយនោះ បើមិនរលាកម្រាមដៃទេនោះ គេចាត់ទុកជាមនុស្សគ្មានកំហុស។ ផ្ទុយទៅវិញ បើរលាក ពងម្រាមដៃ គេសន្មតថា ជាជនមានទោស ហើយត្រូវពិន័យទៅតាមច្បាប់ក្នុងសម័យនោះ។ ម្យ៉ាងទៀតកាលណាមានមនុស្សពីរនាក់ឈ្លោះទាស់ទែងគ្នា ពីការដណ្តើមទ្រព្យសម្បត្តិ ឬដីធ្លីស្រែចម្ការក្តី តុលាការតម្រូវឱ្យបញ្ចូលគូក្តីទាំងពីរទៅក្នុងប្រាសាទមួយតូចចង្អៀត ហើយមិនសូវមានខ្យល់អាកាសចេញចូលផង។ បើកាលណាអ្នកណាមួយ កើតមានអាការៈ ឈឺក្បាល វិលមុខ រសេះរសល់អស់កម្លាំងមានវិបត្តិវិប្បលាស ហើយបន្លឺសម្រែកឈឺចាប់ឱ្យគេដឹងនោះ គេកំណត់ថា អ្នកនោះជាអ្នកមានកំហុស។ ចំពោះ អ្នកត្រឹមត្រូវដែលពុំមានប្រព្រឹត្តអំពើខុសឆ្គងទេនោះ ទោះជា នៅក្នុងទីនោះ យូរប៉ុនណា ក៏នៅតែមានសុខភាពល្អជាធម្មតា។

## ៣~ ហេតុផលខាងចិត្តសាស្ត្រ :

យោងតាមប្រពៃណី ស្វែងរកយុត្តិធម៌របស់បុព្វបុរសយើងនាសម័យអង្គរ យើងអាចវិលមកភ្ជាប់ជាមួយការកាច់ត្រចៀមបូលរកអ្នកជោម ដោយ

---

(២៦) តាមសៀវភៅប្រវត្តិសាស្ត្រលោក Henri Mouhot

ពិចារណាថា ៖ ធម្មតាអ្នកប្រព្រឹត្តខុស មុននឹងអ្នកដ៏ទៃដឹងអំពីកំហុសខ្លួន គឺខ្លួនឯងនេះតែម្តង ដែលដឹងអំពីកំហុសខ្លួនឯងមុនអ្នកដ៏ទៃ។ ជាធម្មតា អ្នកមានកំហុស កម្រនឹងប្រកាន់អាកប្បកិរិយា និងដាក់ទឹកមុខឱ្យបានរៀបរយល្អ ដូចមនុស្សត្រឹមត្រូវណាស់។ ខាងផ្ទៃក្នុង គេមានវិប្បដិសារី ស្តីបន្ទោស ដែលពិតជានឹងបញ្ចេញសញ្ញាមកខាងក្រៅឱ្យគេកត់សម្គាល់បាន...។ យ៉ាងណាមិញ អ្នកផោមគឺជា មនុស្សមានខ្លួន[២៧]។ ដូច្នេះ នៅក្នុងចំណោមក្មេងឯទៀត គេមុខជាបញ្ចេញទឹកមុខ ភ័យបារម្ភ មិនប្រក្រតីដូចគេឯង។ គឺដោយឃើញសញ្ញានេះ ហើយដែលអ្នកកាច់ត្របោម បង្វិលត្របោមចុះឡើងៗ តាមចលនាផ្តោបគ្នានៃបាតដៃទាំងពីរ ហើយបញ្ឈប់ត្រង់ពាក្យចុងក្រោយ"...អាលុយប្រាប់អញ" ដោយតម្រង់មុខតម្កក់ក្រងក់នោះ ចំអ្នកមានខ្លួន។ ពេលនោះក្រុមទាំងមូលក៏ស្រែកហ៊ោគិលឡើង ហើយនាំគ្នាពោលដោយចង្អុលមុខអ្នកជាប់ចោទថា ៖ "រកអ្នកផោមឃើញហើយ !" គឺ អា...[២៨] ហើយជាអ្នកផោម!។ ការដាក់ទណ្ឌកម្មចំពោះអ្នកផោម គឺច្រើនតែឋិតក្នុងលក្ខណៈធូរស្រាល ដោយគ្រាន់តែសើចចំអក ចង្អុលមុខ ក្នុងនាមមិត្តភាព ភាតរភាពតែប៉ុណ្ណោះ មិនអាចឈានដល់ការទះតប់ទាត់ធាក់នោះឡើយ។

## ៤_ ហេតុផលខាងជីវសាស្ត្រ ៖

នៅក្នុងផ្នែកជីវវិទ្យា យើងបានដឹងថា ចំណីអាហារជាវត្ថុរឹង ឬវត្ថុរាវក្នុងនោះមានបាយ សម្ល បន្លែ ផ្លែឈើ ទឹកក្រូច សូដា ទឹកបរិសុទ្ធ អំពៅ។ល។

---

២៧ តាមន័យធៀប គឺមនុស្សដែលបានប្រព្រឹត្តអំពើខុសឆ្គងណាមួយ

២៨ ថាឈ្មោះក្មេងដែលផោមនោះ ឬដែលតម្កក់ត្របោមចង្អុលឆ្ពោះទៅចំ

ពេលយើងបរិភោគលេបចូលទៅក្នុងក្រពះ អាចនឹងមានប្រតិកម្មរវាង ចំណីណាមួយ នឹងចំណីឯទៀតៗ ហើយជួនកាលបង្កើតឱ្យមានខ្យល់នៅក្នុងពោះវៀនធំ ។ ខ្យល់ជាជាតិឧស្ម័នដែលកើតឡើងនៅក្រពះ អាចនឹងធាក់ច្រាលឡើងមកលើ ដែលយើងធ្លាប់ដឹងថា "ភើ" ។ ក្នុងដំណាក់កាលបន្តបន្ទាប់ នៃការរំលាយអាហារ ខ្យល់ដែលកើតឡើងនៅក្នុងក្រពះ ពោះវៀនធំ អាចនឹងត្រូវរុញច្រានបញ្ចេញមកខាងក្រៅតាមទ្វារវច្ចមគ្គ។ ជួនកាលខ្យល់នេះ មានបញ្ចេញស្នូរប្លែកៗ វែងខ្លី ព្រមទាំងភាយក្លិនស្អុយមកជាមួយផង ដោយមកពីខ្យល់នេះ នៅអប់ជិតជាប់ជាមួយនឹងលាមក ។

អ្នកជីវវិទូគិតថា នេះជារឿងធម្មតារបស់អាការៈសរីរាង្គរបស់មនុស្សគ្រប់រូប ។ ប៉ុន្តែ មនុស្សនៃជនជាតិខ្លះ បែរជាក្រឡៃច្នៃទៅជាទោស, ជារឿងមិនគប្បី, ជាការកំប្លែងលេងសើច ជាលេសសម្រាប់បន្តុះបង្អាប់គ្នា តែម្តងទៅ។ បែបនេះហើយ បានជាក្រមង៉ុយលោកបានចងជាកំណាព្យតជាប់ជាទំនៀមមកថា : "វីអ្នកក្រមាច់ លេងផោមលេងអាចម៍ អាយុច្រើនខ្លី..." តែបើលោតែមានជំងឺទល់ខ្យល់វិញនោះ វាអាចនឹងមានគ្រោះថ្នាក់ធ្ងន់ធ្ងរដល់សុខភាព ហើយជារឿង មួយផ្សេងពីការសើចលេងទៅវិញ ។

## ៥_ ហេតុផលខាងប្រពៃណី :

តាមការសាកល្បងវិភាគរកហេតុផល ក្នុងល្បែងកាច់ត្របោមនេះ គេអាចយល់ដល់អ្នកបង្កើតល្បែងនេះ ថាមានគោលបំណងបង្កើតទម្លាប់ឱ្យក្មេងៗរៀន សម្តែងការស្មោះត្រង់រវាងគ្នានិងគ្នា. ចេះសារភាពកំហុសដែលខ្លួន

បានប្រព្រឹត្ត[២៩] ដែលនាំឱ្យក្មេងហាត់ពត់ចិត្ត បង្ហាញអត្តចរិតល្អល្អះត្រឹមត្រូវ មិនបង្កើតជាបញ្ហាដល់មជ្ឍដ្ឋានដែលវារស់នៅ។ ម្យ៉ាងទៀត ល្បែងនេះ ក៏ឆ្លុះបញ្ចាំងឱ្យឃើញផងដែរថា បទល្មើសណាមួយដែលគេបានប្រព្រឹត្តហើយនោះ កម្រនឹងបិទបាំងបានណាស់, គេពិតជានឹងស្រាវជ្រាវរកទាល់តែឃើញ នៅពេលណាមួយជាមិនខាន។

គួរពិចារណាផងដែរថា : របៀបរស់នៅក្នុងសង្គមជាតិខ្មែរ គឺមានជ្រុងជ្រោយក្បៀនកោះអាថ៌កំបាំងប្លែកៗច្រើនបង្គួរដែរ... ហើយយើងគប្បីកត់សម្គាល់ថា : "យ៉ាងនេះហើយ គឺខ្មែរ..."។

(២៩) កំហុសដែលសារភាព អាចនឹងអត់ឱនឱ្យបានពាក់កណ្ដាល (une faute avouée est à moitié pardonnée)

បានប្រព្រឹត្ត(២៩) ដែលនាំឱ្យក្មេងបាត់ពត់ចិត្ត បង្ហាញអត្តចរិតល្អឈ្លះត្រឹមត្រូវ មិនបង្កើតជាបញ្ហាដល់មជ្ឈដ្ឋានដែលវារស់នៅ។ម្យ៉ាងទៀត ល្បែងនេះ ក៏ឆ្លុះបញ្ចាំងឱ្យឃើញផងដែរថា បទល្មើសណាមួយដែលគេបានប្រព្រឹត្តហើយនោះ កម្រនឹងបិទបាំងបានណាស់, គេពិតជានឹងស្រាវជ្រាវរកទាល់តែឃើញ នៅពេលណាមួយជាមិនខាន។

គួរពិចារណាផងដែរថា : របៀបរស់នៅក្នុងសង្គមជាតិខ្មែរ គឺមានជ្រុងជ្រោយកៀនកោះអាថ៌កំបាំងប្លែកៗច្រើនបង្គួរដែរ... ហើយយើងគប្បីកត់សម្គាល់ថា : "យ៉ាងនេះហើយ គឺខ្មែរ..."។

(២៩) កំហុសដែលសារភាព អាចនឹងអត់ឱនឱ្យបានពាក់កណ្តាល(une faute avouée est à moitié pardonnée)

ចង្កៀង។ នៅតំបន់ខ្លះទៀត គេបានអុជធូបមួយសរសៃទៀត ដោតនៅចំកណ្តាលចង្ក្រាន ឬក្បែរចង្ក្រាន។ លុះរៀបចំបែបនេះរួច ហើយម្តាយប្រាប់ឱ្យកូនពោលពាក្យបន់ស្រន់ក្នុងសំនៀងបង្ហួសវែង១ដូចជា អង្វរលន់តួថាៈ "អ្នកតាចង្កៀង[៣១] អើយចម្រើនពោះ អ្នកតាចន្លុះអើយចម្រើនផ្ទៃ ចង្កៀងនោមយប់ខ្ញុំនោមថ្ងៃ ពីរបីថ្ងៃជុះម្តង នោមម្តង[៣២]"។ ប៉ុន្តែនៅតំបន់ខ្លះទៀត ដូចជាអ្នកស្រុកនៅខេត្តកំពង់ធំ គេពោលដូច្នេះថា ៈ "អ្នកតាចង្ក្រាន អើយ ចម្រើនពោះ អ្នកតាចន្លុះអើយ ចម្រើនផ្ទៃ ចង្ក្រាននោមយប់ ខ្ញុំនោមថ្ងៃ ពីរបីថ្ងៃ នោមម្តងជុះម្តង" ពាក្យទាំងពីរប្រយោគនេះ ខុសគ្នាតែការយកពាក្យចង្កៀង ឬពាក្យចង្ក្រាន មកឱទ្ទិសតែប៉ុណ្ណោះ រីឯខ្លឹមសារអត្ថន័យវិញ មានលំនាំគោលដៅតែមួយ គឺ កែប្រែក្មេងពីនោមយប់មកនោមថ្ងៃវិញ។

## ២_ អត្ថន័យនៃពិធីសំពះចង្កៀង ៈ

**ក/ អត្ថន័យបែបជីវសាស្ត្រ ៈ** បើតាមន័យជីវសាស្ត្រ ការនោម ឬការជុះ គឺជាការបញ្ចេញចោល នូវកាកសំណល់ជាវត្ថុរាវ ឬជាវត្ថុរឹងលែងមានប្រយោជន៍ដល់រាងកាយ ដែលគេហៅថា "មលមោចនា" ត្រូវនឹងភាសាបារាំងថា ៈ (Excrétion)

---

(៣១) បុព្វបុរសខ្មែរដែលដើមឡើយកាន់លទ្ធិព្រហ្មញ្ញសាសនា ធ្លាប់គោរពព្រះអគ្គីថាជាអាទិទេពមួយ។ ដូច្នេះ ទោះជាភ្លើងក្នុងចង្ក្រានក្តី ភ្លើងចន្លុះឬភ្លើងចង្កៀងក្តី ក៏សុទ្ធតែបានត្រូវគោរពបូជាទាំងអស់។

(៣២) ប្រសិនបើសមប្រកបដូចពាក្យបែបន់នេះមែន អាចនឹងមានជំងឺទល់នោម ឬទល់លាមក។ តែនេះគឺគ្រាន់តែជាពាក្យពោលបន់ស្រន់ទៅតាមជំនឿប៉ុណ្ណោះ។

**ខ/ អត្ថន័យតាមប្រពៃណី :** ប៉ុន្តែ បញ្ហាដែលលើកមកនិយាយនៅពេលនេះ គឺជាជំនឿទៅលើប្រពៃណី ទំនៀមទម្លាប់របស់ជនជាតិខ្មែរ ដែលយល់ថា : ភ្លើង ជាព្រះអាទិទេពមួយក្នុងជំនឿខ្មែរបុរាណនោះ អាចជួយសម្រេចនូវបំណងប្រាថ្នារបស់ខ្លួន។ ប្រសិនបើគេធ្វើពិធីបួងសួង បន់ស្រន់ព្រះអគ្គីទៅនឹងអាចជួយឱ្យ ក្មេងឈប់នោមយប់ ខុសសណ្ដាប់ធ្នាប់. ឱ្យនោម ឬជុះតែពេលថ្ងៃតាមធម្មតាវិញ។

**គ/ អត្ថន័យបែបចិត្តសាស្ត្រ :** បើតាមអត្ថន័យបែបចិត្តសាស្ត្រវិញ ក្មេងដែលបានធ្វើពិធីសំពះចង្កៀង នឹងប្រុងប្រយ័ត្នទៅតាមពាក្យពេចន៍ ដែលវាបានពោលសន្យាក្នុងពេលសំពះចង្កៀងថា : ទុកឱ្យចង្កៀង ចង្ក្រាន ចន្លុះ(៣៣) នោមពេលយប់ចុះ ចំណែកវា. ចាប់ពីពេលនេះតទៅ ត្រូវនោមតែពេលថ្ងៃ"។ ដើម្បីអនុវត្តតាមពាក្យសន្យានេះ ក្មេងពិតជាត្រូវបត់ជើងតូចឱ្យរួចស្រេច មុននឹងចូលកាន់ដំណេក។ បើបានធ្វើដូច្នេះហើយ អាចនឹងគ្មានទឹកមូត្រសម្រាប់នោម នៅពេលយប់ទៀតឡើយ ហើយបើអំពើរបៀបនេះ ចេះតែបន្តធ្វើជារៀងរាល់ថ្ងៃ ក្មេងនោះនឹងឈប់នោមយប់ដោយមិនដឹងខ្លួន។ តាមការកាត់យល់ ក្មេងដែលមិនបានគិតគូរបត់ជើងតូចមុនចូលដេក អាចប្រឈមមុខនឹងការឈឺនោមនៅពេលពាក់កណ្ដាលអាធ្រាត ឬក្រោយនេះបន្តិច។

## ៣. ការទាញហេតុផល :

យើងអាចទាញសេចក្ដីសន្និដ្ឋាន តាមរយៈការវិភាគរកហេតុផលដូច

---

(៣៣) ចន្លុះជាប្រទីបម្យ៉ាងធ្វើពីជ័រទឹក ចេញមកពីដើមឈើទាល ត្រាច ត្បែង ពពេល...

នេះថា : ការសំពះចង្កៀង គឺជាវិធានការដោយប្រយោល (Indirect) មួយបែប ដែលអាចនឹងជួយសង្គ្រោះក្មេងដែលពុំមានរបៀបរបបសណ្តាប់ធ្នាប់ល្អក្នុងឥរិយាបថដេកយប់។

## ៤~ សន្និដ្ឋាន :

នាពេលបច្ចុប្បន្ន សង្គមខ្មែរយើងបានវិវឌ្ឍមកដល់ដំណាក់កាលជឿនលឿន តាមចង្វាក់រីកចម្រើននៃវិទ្យាសាស្ត្រ ក្នុងនោះក៏មានវេជ្ជសាស្ត្រផងដែរ។ យើងមិនទាន់បានដឹងច្បាស់ទេថា នៅតាមជនបទ ខេត្ត ខណ្ឌនានានៃកម្ពុជា តើនៅមានម្តាយៗ បង្គាប់កូនឱ្យសំពះចង្កៀងទៀតដែរឬទេ? ប្រសិនបើប្រពៃណី ទំនៀមទម្លាប់នេះនៅតែត្រូវបានគេអនុវត្ត នៅត្រង់កន្លែងណាមួយនោះ ការធ្វើរបៀបនេះ ទំនងជាទទួលបានលទ្ធផលល្អនៅឡើយ។ ចំពោះសង្គមនៅទីក្រុង និងទីប្រជុំធំៗវិញ បើនិយាយប្រាប់គេពីរឿងសំពះចង្កៀងនេះមុខជាគេនាំគ្នាសើចខ្លះៗមិនខាន ប៉ុន្តែ សារៈសំខាន់នៅត្រង់ ចែកគ្នាដឹងអំពីរបៀបរបបរស់នៅរបស់ពូជសាសន៍ខ្មែរយើងពីសម័យមុន។

យើងបានដឹងហើយថា នៅសម័យនេះ បើមនុស្សណាមានជំងឺទល់នោម នោះគេភិតភ័យឆោឡោរត់មករកពេទ្យដាក់ថ្នាំបញ្ចុះនោមភ្លាម ព្រោះជំងឺនេះកាចសាហាវ ហើយធ្វើឱ្យពិបាកវេទនាណាស់។ តែបើមនុស្សណាបត់ជើងតូចច្រើន នោះក៏ជាអាការៈមិនប្រក្រតីដែរ, ហើយប្រភេទរោគនីមួយៗសុទ្ធតែមានឱសថដោយឡែកៗសម្រាប់ព្យាបាលជានិច្ច។

# កុមារ និងប្រពៃណីទំនៀមទម្លាប់ខ្មែរ
## ល្បែងចាក់សង្រែក(៣៤)

ប្រហាក់ប្រហែលគ្នានឹងល្បែង យីកយោក ឬងីកងោងដែរ ល្បែងចាក់សង្រែក ជាប្រភេទល្បែង ដែលបងស្រីតែងតែនាំប្អូនដែលមានអាយុពីមួយខួបឡើងទៅ បានលេងកម្សាន្ត បន្លប់ក្ដីអផ្សុក បន្លប់កុំឱ្យប្អូនយំក៏ដូចជាសម្រន់ការស្រេកឃ្លានបានមួយរយៈខ្លីដែរ។

### ១. អំពីរបៀបលេង :

បងស្រីដាក់ប្អូនជាដៃគូល្បែង ឱ្យអង្គុយទល់មុខនិងខ្លួន រួចបង្ហាញប្អូនឱ្យចេះអំពីរបៀបចាប់ដៃគ្នា ដោយហុចដៃឆ្វេងត្រង់ទៅមុខ យកដៃស្ដាំមកចាប់ត្រង់កំភួនដៃឆ្វេង។ ភាគីរួមល្បែងទាំងពីរនាក់ ធ្វើរបៀបនេះដូចគ្នា។ បន្ទាប់មកទៀត ម្នាក់ៗត្រូវយកដៃឆ្វេងរបស់ខ្លួនដែលសណ្ដូកទៅ មុខនោះចាប់កំភួនដៃរបស់គូខ្លួន។ ធ្វើយ៉ាងនេះ គេបង្កើតបានជាចតុកោណកែងស្មើ (ការ៉េ) មួយដូចគ្នានឹងគូទសង្រែកយ៉ាងនេះឯង។ ក្រោយពីចាប់ដៃគ្នា បានត្រឹមត្រូវហើយ បងស្រីពោលពាក្យរបៀបជាកំណាព្យបន្ទិច ជាកម្រងកែវ បន្ទិចដោយបង្អូសពាក្យវែងៗ ស្ទើរច្រៀង ស្ទើរសូត្រកំណាព្យបន្ទិចថា: "ដាច់សង្រែក បែកក្អមតាព្រហ្ម តាអើយកុំយំ ចាំខ្ញុំទិញសង សងជាប្រាក់តាឯងមិន

---

(៣៤) ហៅថា "ដាច់សង្រែក" ក៏បាន។ ភូមិខ្លះៗនៃខេត្តកំពង់ធំ គេសង្កេតឃើញក្មេងៗលេងល្បែងនេះ។ នៅពេលពោលគេផ្ដើមឡើងថា: ដាច់សង្រែក...វិញ។

យក សងពងក្តាតងញ្ញើមញ៉ែម....." បងស្រីថា ទំនុកបែបនេះផង ព្រមទាំងរុញទាញដងខ្លួនប្អូនឱ្យងោកទៅមុខ ងោកទៅក្រោយបន្តិច១ផង។ កាលណាបងស្រីឃើញថាប្អូនពេញចិត្តនឹងល្បែងនេះខ្លាំង ក៏នាំប្អូនលេងជាច្រើនលើកច្រើនសា រហូតទាល់តែវាធុញ ហើយបម្រះដកដៃវាចេញទើបឈប់លេង។

## ២. ឥទ្ធិពលខាងចិត្តសាស្ត្រ :

ក្មេងក្នុងវ័យដូចពោលខាងលើ ស្លុងខ្លួន ស្ង័គ្រចិត្ត ស្ង័គ្រកាយមកលង់អារម្មណ៍ក្នុងល្បែងកាច់សង្រែកនេះ ដោយមានមូលហេតុខាងចិត្តសាស្ត្រ ២ ចំណុចគឺ :

**ក/ ពាក្យពេចន៍ជូនរណ្តំ :** របៀបជាកម្រងកែវបន្តិច ជាកំណាព្យបន្តិចនេះហើយ ដែលមានឥទ្ធិពលគ្របដណ្តប់ទៅលើអារម្មណ៍ក្មេង ដូចជាបទចម្រៀងបំពេរដែរ។ វាពិតណាស់ហើយថា ក្មេងក្នុងវ័យនេះ ស្តាប់មិនបានអំពីខ្លឹមសារ តែវាចាប់បានខាងសូរស័ព្ទចាប់ចួនណែងណង ដែលប្រដូចបានទៅនឹងសំឡេងអ្វីមួយ ដែលជួយលួងលោមអារម្មណ៍ដ៏ខ្លីល្ងក់របស់វា

**ខ/ ចលនា :** យោលយោក ងោកងាក ទៅមុខទៅក្រោយនេះក៏ជាគ្រឿងបំពេញចិត្ត ផ្ដិតអារម្មណ៍របស់វាផងដែរ។ តាមចិត្តគរុកោសល្យ (psycho pédagogie) ក្មេងតូច១ មិនអាចទ្រាំនៅស្ងៀមបានហួសពី ពីរបីនាទីឡើយ។ ប្រសិនបើយើងសង្កេតឃើញថា ក្មេងធ្វើចលនាដៃ ចលនាជើងឥតឈប់ឈរនោះ គឺជាការបញ្ជាក់ឱ្យដឹងថា ក្មេងត្រូវការធ្វើចលនាជាចាំបាច់បំផុត។ សម្លុតគំរាមក្មេងឱ្យ នៅស្ងៀមឈឹងដូចគល់ឈើ គឺជាទារុណកម្មមួយយ៉ាងធ្ងន់ធ្ងរសម្រាប់វា។ ពិសេស គឺវាមិនអាចធ្វើបានតែម្តង។ ដូច្នេះ អាច

ទាក់ទាញប្របោមលួងវាឱ្យវាធ្វើអ្វីៗ បានទាល់តែ គិតទៅដល់ចំណុច ចំណង់ចំណូលចិត្ត របស់វាជាមុនសិន ទើបបានសម្រេចផលល្អដែលយើងចង់បាន។

## ៣. ប្រភពល្បែង :

ក្មេងៗនៅនិគមជនបទស្រែចម្ការ រមែងតែងសង្កេតមើលឧបករណ៍ដែលឪពុកម្តាយប្រើប្រាស់។ ក្នុងចំណោមឧបករណ៍ទាំងនោះមានសង្រែក ដែលច្រើនតែធ្វើពីដើមផ្តៅទាំងមូល ចម្រៀកផ្តៅពុះបំបែកជាពីរ ធ្វើពីវល្លិខ្ទួស វល្លិត្រស់ និងវល្លិផ្សេងៗទៀត។ ផ្នែកខាងលើសម្រាប់ស៊កដងរែក។ ផ្នែកកណ្តាលរាងប៉ោងបន្តិច រួចរៀវជមចូលមកបញ្ចប់ត្រឹមបាតដែលមានរាងបួនជ្រុង។ នៅជ្រុងនីមួយៗ មានកំនួចឆ្វាក់ប្រទាក់គ្នាសម្រាប់ភ្ជាប់ទងចម្រៀកទាំងពីរឱ្យកើតទៅជាតួសង្រែកមួយ។ គឺបាតសង្រែកដែលមានរាងបួនជ្រុងនេះហើយ ដែលក្មេងដកស្រង់យកមកច្នៃធ្វើជាល្បែងមួយ ហៅថាល្បែង "កាច់សង្រែក" ដោយវាបានឃើញ បាតសង្រែកមានរាងបួនជ្រុងទើបវាពីរនាក់ចាប់ដៃគ្នា ប្រទាក់ធ្វើឱ្យដូច បាតសង្រែក(៣៥) ដូច្នេះឯង។

## ៤. បទពិសោធន៍ :

ក្មេងៗសង្កេតឃើញផ្នែកសំខាន់ ហើយស្មុគស្មាញរបស់សង្រែក គឺត្រង់បាតសង្រែក ឬ គូទសង្រែកនេះឯង។ ពេលចាក់សង្រែក ប្រសិនបើមិនមានការ

---

(៣៥) សង្រែកមានទ្រង់ទ្រាយច្រើនយ៉ាងប្លែកៗ: សង្រែកធំសម្រាប់រែកកណ្តាប់ស្រូវ សំណាបសង្រែកព្យួរឆ្នាំង សង្រែកតូចដាក់ចាន ប្រើប្រាស់តាមគ្រួសារ ឬ ដោយកូនសេកដែលតាមលោកទៅបិណ្ឌបាត

ប៉ុនប្រសប់ទេនោះ ពិតជាមិនអាចចាក់គួទសង្វ្រែកកើតឡើយ ។ បើចាក់គួទសង្វ្រែកមិនកើត ក៏ដូចជាបន្ទមកធ្វើផ្នែកខាងលើ គឺក្បាលសង្វ្រែក ក៏មិនបានដែរ ។ ដូច្នេះ ការចាក់សង្វ្រែក ចាត់ទុកថាបរាជ័យ ។ ព្រោះហេតុនេះហើយបានជាចាស់ៗជាបុព្វបិតា បុព្វមាតាយើង បានច្នៃបង្កើតល្បែងចាក់សង្វ្រែកនេះដោយផ្ដោតជាសំខាន់ទៅលើការធ្វើត្រាប់គួទសង្វ្រែកនេះឯង ។

## ៥. សន្និដ្ឋាន :

រស់នៅជាកសិករ ត្រូវតែចេះច្នៃប្រឌិតឧបករណ៍ សម្ភារៈផ្សេងៗសម្រាប់ប្រើប្រាស់ ។ ឧបករណ៍ទាំងនោះសុទ្ធតែមានប្រភពចេញមកពីរុក្ខជាតិផ្សេងៗក្នុងធម្មជាតិដែលហ៊ុំព័ទ្ធលំនៅឋានរបស់គេ ។ សង្វ្រែក ជាវត្ថុចាំបាច់ក្រៃលែងក្នុងចំណោមឧបករណ៍ដទៃទៀត ។ ដូច្នេះ កសិករជាឪពុក រមែងបង្រៀនកូនចៅប្រុសៗ ឱ្យចេះកាច់សង្វ្រែក វេញខ្សែ ត្បាញកញ្ជើ ល្អី ចង្អេរ កញ្ច្រែង... ដែលជាវត្ថុចាំបាច់សម្រាប់ប្រើប្រាស់ក្នុងជីវភាពប្រចាំថ្ងៃ ។

## ៦. អត្ថន័យ :

កាលដើមឡើយ សង្វ្រែកជាឧបករណ៍សម្រាប់ដាក់ក្អម[៣៦] ដើម្បីទៅដងទឹក ហើយរែកយកមកចាក់ពាងក្រឡ ។ ជួនកាលដោយសារសង្វ្រែកចាស់ពុកផុយ និងដោយទ្រទម្ងន់ទឹកមិនបានវាក៏ដាច់ ហើយធ្លាក់បែកទាំងក្អមតែម្ដងទៅ ។ ក្អមនេះ អ្នករែកទឹកបានទៅខ្ចីពីតាព្រហ្ម ។ ជាធម្មតា កាលណារបស់ខ្ចីណាមួយ ត្រូវខូចខាតបាក់បែក ចាំបាច់ត្រូវតែសងទៅម្ចាស់ដើមវិញ ជា

៣៦ កញ្ចើម្យ៉ាង ខ្ទុក ម្រក្សណ៍ ឬលាបជ័រទឹកយ៉ាងជិត សម្រាប់ដងទឹក ដាក់ទឹក ឬរែកទឹក ។

វត្ថុដដែល ឬជាប្រាក់សមស្របទៅតាមតម្លៃរបស់នោះ។ តែក្នុងសាច់រឿង នេះដោយអ្នកខ្ចីមិនអាចរកក្អមសងវិញបាន ក៏សុំសងជាប្រាក់។ តែជាអកុសលតាព្រហ្មមិនព្រម យក ទាល់តែសងជា អង្គជាតិ ទើបយក....។

**+ ការបកស្រាយ :**

តាព្រហ្មគឺជាតួព្រហ្មញ្ញសាសនានេះឯង។ នៅក្នុងព្រហ្មញ្ញសាសនាដូនតាយើងធ្លាប់គោរពអទិទេពបីអង្គគឺ :

- ព្រះព្រហ្ម : តំណាងដោយទេវៈមានព្រះភក្ត្រ ៤

- ព្រះសិវៈ : តំណាងដោយ លិង្គ ហៅថា សិវលិង្គ និងយោនី ព្រះនាងឧបមាភគវតី.

- ព្រះវិស្ណុ : តំណាងដោយទេវមានដៃបួន កាន់កេតនភ័ណ្ឌប្លែកៗ ។ ពិធីបូជាអទិទេពក្នុងព្រហ្មញ្ញសាសនា គេច្រើនយកទឹកមកចាក់លើសិវលិង្គដាក់ពីលើថ្មតំណាងយោនីនាងឧមាភគវតី។ ទឹកហូរធ្លាក់ពីសិវលិង្គ ស្រោចមកលើយោនីព្រះនាងឧមាភគវតី ហើយហូរតាមចង្អូរធ្លាក់មកដី។ អ្នកធ្វើពិធីយកផ្តិលត្រឡោក មកត្រងយកទឹកនេះ មកស្រោចក្បាលលប់មុខ លាបពាសពេញខ្លួនប្រាណឱ្យមានសិរីសួស្តី .....។

បែកក្អមតាព្រហ្ម គឺជាពិធីសក្ការៈបូជាដោយយកទឹកក្អមនោះមកស្រោចស្រប់លើសិវលិង្គនិងយោនីព្រះមហេសីរបស់ព្រះសិវៈ។ ការដែលពាក្យពេចន៏បានពោលថា : "សងជាប្រាក់ តាឯងមិនយក នេះអាចមានន័យថាជាការបូជាមិនគប្បីចំពោះព្រះសិវៈទេ មានតែធ្វើពិធីស្រោចទឹកលើសិវលិង្គប៉ុណ្ណោះដែលព្រះសិវៈមានព្រះទ័យរីករាយ ហើយជួយឱ្យកូនចៅមានកិត្តិយស សិរីសួស្តី

ទើបមានពាក្យពោលតែងឡើងថា : "សងពងក្ត តាឯងញីមញៀមនោះ" ។

បច្ចុប្បន្ននេះ នៅពេលដែលកូនចៅកសិករ នៅតំបន់ខ្លះនៅតែបន្តនាំប្អូនលេងល្បែងចាក់សង្រែកនេះ ស្រទាប់យុវវ័យ និងមនុស្សវ័យកណ្តាលនៅទីក្រុង មិនដឹងថា តើសង្រែកនេះជាអ្វីឡើយ ហើយវាមានប្រយោជន៍យ៉ាងណានោះផងទេ។ ចំណែកនៅជនបទវិញ សង្រែកខ្នាតតូចកំពុងបាត់ខ្លួនជាបណ្តើរៗនៅចំពោះចានស្រាក់និងកន្ទូ។ ឯសង្រែកខ្នាតធំវិញ ប្រែរូបភាព និងប្រវត្តិវត្ថុធាតុពីផ្តៅឬស្សី វល្លិ មក ដែកលួសវិញ ដែលជាប់មាំប្រើបានយូរ មិនបាក់មិនពុក មិនដាច់.....។

# កុមារ និងប្រពៃណីទំនៀមទម្លាប់ខ្មែរ ក្មេងត្រូវដេកទាបជាងចាស់

នៅក្នុងគ្រួសារខ្មែរ ក្មេងៗត្រូវបានឪពុកម្ដាយអនុញ្ញាតិឱ្យដេកជាមួយ។ ប៉ុន្តែ ដើម្បីការពារសណ្ដាប់ធ្នាប់ល្អ និងសម្ដែងការគោរពចំពោះឪពុកម្ដាយ ឬក៏អ្នកផ្សេងទៀតដែលចាស់ជាង គេតែងតែប្រដៅក្មេង ឱ្យដេកទាបជាងចាស់។ ហើយដើម្បីឱ្យបម្រាមនេះមានប្រសិទ្ធភាព ចាស់ៗបានយោងដល់ពាក្យទំនៀមមួយថា : "កុំដេកខ្ពស់ជាងចាស់ ប្រយ័ត្ន តាព្រេងជាត់ទឹកបាយទំពែកក្បាល"។ ពាក្យនេះ បានពញ្ញាក់ស្មារតីក្មេង ឱ្យរៀបចំដំណេក ដាក់ខ្នើយខាង ក្រោមឪពុកម្ដាយ ឬចាស់ៗជាដរាប ព្រោះខ្លាចតាព្រេង ជាត់ទឹកបាយដាក់លើក្បាល។

## ១~ អត្ថន័យរបស់ពាក្យទំនៀម :

នៅក្នុងឃ្លានេះ ពាក្យដែលយកមកវិភាគ គឺ:

**ក/ តាព្រេង**(៣៧) : តើតាព្រេងជានរណា ?

តាមការនិយាយតៗគ្នាជំនាន់ដើម តាព្រេងគឺជាបិសាចមួយពួក មានមាឌធំខ្ពស់សម្បើមអស្ចារ្យ ច្រើនរស់នៅតាមព្រៃភ្នំ។ គ្រាន់តែឮឈ្មោះតាព្រេង ក្មេងៗ ខ្លាចទុកជាមុន ដោយសារតាព្រេងមានមាឌធំដូចយក្ស មានជើង

---

(៣៧) ពាក្យនេះពុំមានឃើញនៅក្នុងវចនានុក្រមសម្ដេច ជួនណាតឡើយ ស្រុកខ្លះគេហៅថា "អាគ្រក់" ស្រុកខ្លះទៀតហៅថា "អារក្សភ្នំ" ។

វែង អាចដើរកន្លងភ្នំ ដំបូលផ្ទះ តូចធំបានទាំងអស់ ។

**ខ/ ជាត់ទឹកបាយ :** ខ្មែរបុរាណជឿថា តាព្រេងក៏ដាំបាយដូចមនុស្ស ដែរ លុះបាយនោះពុះហើយ តាព្រេងលើកឆ្នាំងឡើងដើម្បីជាត់សម្រោះទឹកបាយ ។ តែមុនជាត់ តាព្រេងសម្លឹងមើលគ្រប់ទីកន្លែង កាលបើឃើញក្មេងណាដេករូលក្បាលឱ្យខ្ពស់ជាងក្បាលមនុស្សចាស់ នោះតាព្រេង នឹងជាត់ទឹកបាយដាក់លើក្បាលក្មេងនោះ ឱ្យរលាករលួយ របូតជ្រុះសក់តម្លែកក្បាល(៣៨) ។ លទ្ធផលគួរខ្លាចនៃការជាត់ទឹកបាយគឺ :

- ធ្វើឱ្យរលាក រលួយក្បាលដោយទឹកបាយក្ដៅ
- ធ្វើឱ្យទំពែកក្បាល រលីងត្រងោល ពុំមានសក់ដុះ ។

**គ/ គោលបំណងរបស់ចាស់ៗ :** ហេតុអ្វីបានជាចាស់ៗ តម្រូវឱ្យក្មេងដេកទាបជាងចាស់ៗ? នេះជាប្រភេទមួយនៃការអប់រំមិនចំពោះ (Education indirecte) របស់ចាស់ៗ ។ យើងកត់សម្គាល់ឃើញមានវិធីអប់រំបែបនេះយ៉ាងច្រើននៅក្នុងសង្គមខ្មែរ មានដូចតទៅ :

- កុំលេងអង្គរ( នាំឱ្យមុខរីង) = ក្រែងកំពប់អង្គរនាំខាតបង់
- កុំបង្វិលចង្អេរលេង ( ខ្លាចខ្លាចូលស្រុក) = ខ្លាចដាច់កណ្ដាប់ចង្អេរ
- ឱ្យស៊ីអំពៅខាងចុង ( នាំឱ្យចេះហែលទឹក) = ទុកខាងគល់ឱ្យចាស់ៗ ព្រោះអំពៅ ខាងគល់មានរសជាតិផ្អែម.
- ក្មេងៗ ត្រូវដេកទាបជាងចាស់ ដែលយើងកំពុងបកស្រាយក្នុងអត្ថបទនេះ ក៏គឺជាផ្នែកមួយនៃវិធីសាស្ត្រអប់រំមិនចំពោះរបស់ចាស់ខ្មែរដែរ ។

---

(៣៨) តាមការនិយាយតៗគ្នារបស់ចាស់ៗ ។

ដូចអ្នកផងធ្លាប់ដឹងហើយថា ក្មេងៗច្រើនតែនោមនៅពេលដេក ក្នុងពេលយប់។ ប្រសិនបើវាដេកខ្ពស់ជាងចាស់ នោះវាអាចនឹងនោមច្រាសក្បាលចាស់ៗជាមិនខាន។ ក្មេងនោមច្រាសក្បាលចាស់ គឺជារឿងអាម៉ាស់មួយដែលចាស់ៗតែងតែចៀសវាង។ ព្រោះហេតុនេះហើយ បានជាគាត់បំភ័យក្មេងៗឱ្យដេកទាបជាងចាស់ បើមិនពុំនោះទេ តាព្រហ្មនឹងជាត់ទឹកបាយលើក្បាល។

នៅមានពាក្យអប់រំមិនចំពោះច្រើនទៀត ដែលខ្ញុំទុកជូនអស់លោកចាស់ៗ រកទឹក និងវិភាគដោយខ្លួនឯងផងចុះ។

# សេចក្ដីផ្ដើម
# ប្រវត្តិសិក្សាធិការនៅកម្ពុជា
## នៃសាលាបឋមសិក្សា និងមធ្យមសិក្សា ( ឆ្នាំ ១៩៤៨-១៩៥៤)

នៅពេលខ្លួនកាន់តែចាស់ ( ៧៦ ឆ្នាំ) កាលបើរំលឹកបកវិលទៅក្រោយវិញ ចម្ងាយប្រមាណជាជាង ៥០ ទៅជាង ៦០ ឆ្នាំនោះ ប្រសិនបើអនុស្សាវរីយ៍នោះ ជាឈើ ឬជាសម្លៀកបំពាក់នោះ វាពិតជាពុកផុយបាត់អស់ទៅហើយ ។ ប៉ុន្តែ ដោយហេតុថា វាជាអនុស្សាវរីយ៍ ជាស្រមោលនៃក្ដីចងចាំនោះ វានៅមិនទាន់រលុបរលាយនៅឡើយទេ អាចថានៅចាំបានស្រពិចស្រពិលខ្លះ ច្បាស់ចែសខ្លះ។ មកដល់ពេលនេះ ប្រសិនបើខ្ញុំបង្អង់យូរទៅទៀត អនុស្សាវរីយ៍ទាំងនេះអាចនឹងត្រូវភ្លេចចោលអស់ទាំងស្រុង ឬក៏រូបខ្ញុំត្រូវលាចាកលោកនេះ ដោយទុកស្រមោលអតីតកាល នៃជីវិតសិក្សារបស់ខ្ញុំ ឱ្យឋិតក្នុងភពងងឹត, ក្នុងភពអាថិកំបាំង ហើយក្លាយទៅជាផ្សែងរលាយបាត់ក្នុងអាកាស ។

អ្វីដែលខ្ញុំលើកយកមកនិយាយនេះ បើចំពោះអ្នកស្រាវជ្រាវវិញនោះលោកចាត់ទុកថា ជាឯកសារមួយមានសារៈសំខាន់ខ្លាំងណាស់ ព្រោះបានគាស់រំលើង ឆ្កឹះកកាយ យកព្រឹត្តិការណ៍មួយ ដែលសង្គមសិក្សាខ្មែរ បានឆ្លងកាត់ជាងកន្លះសតវត្សរ៍មកហើយនោះ ឱ្យមានចលនារស់រវើក ក្នុងសង្គមសិក្សាបច្ចុប្បន្ន ដើម្បី :

១- ឆ្លុះបញ្ចាំងមើលឡើងវិញ អំពីរបៀបរបបសិក្សាពីរបបមុនៗ

២- ធ្វើការសិក្សាប្រៀបធៀប វិធីបណ្ដុះបណ្ដាលមនុស្សខ្មែរ ពីក្នុង

ទសវត្សទី ៤០ មកចុងទសវត្សទី ៥០ តើខុសប្លែកនឹងសម័យបច្ចុប្បន្នយ៉ាងណាខ្លះ ?

៣- ស្វែងយល់ពីអ្នកនិពន្ធ និងមិត្តរួមជំនាន់របស់លោក តើបច្ចុប្បន្ននេះនៅសល់ប៉ុន្មាននាក់ ដែលអាចចាត់ទុកជាសាក្សីនៃដំណើរព្រឹត្តិការណ៍នេះនោះ ?

# អនុស្សាវរីយ៍ និងប្រវត្តិ នៃការសិក្សាសម័យថ្មី(៣៩)

តាំងពីរាជការអាណានិគមបារាំង បានចូលមកគ្រប់គ្រងប្រទេសកម្ពុជាមក វិស័យសិក្សាធិការបានទទួលការកែទម្រង់ ទៅតាមបែបការសិក្សានៅអារ្យប្រទេសនានានៅអឺរ៉ុប ពិសេស យកតាមទម្រង់ប្រព័ន្ធសិក្សារបស់ប្រទេសបារាំងតែម្តង។ ការសិក្សាមានលក្ខណៈជាសាធារណៈ គឺដៅខ្ពស់ទៅគ្រប់កូនចៅខ្មែរទាំងនៅទីក្រុង និងនៅជនបទស្រុកស្រែចម្ការ ហើយជាការសិក្សាដែលពុំមានបង់ថ្លៃផង។ របៀបរបបសិក្សាថ្មីនេះ អំណោយផលល្អចំពោះកូនស្រីខ្មែរដែលកាលពីមុន ប្រពៃណីហាក់ដូចបង្ខាំងមិនឱ្យទៅសិក្សាលាយឡំជាមួយកូនប្រុស។ ប៉ុន្តែទោះជាយ៉ាងនេះក្តី ក៏ចំនួនសិស្សស្រីនៅជនបទ មានតិចតួចស្តួចស្តើង ជាងនៅសាលាទីក្រុង ដោយហេតុថា គ្រួសារមួយចំនួនពុំទាន់ជម្រុះចោលរបៀបរបបទម្លាប់ចាស់បុរាណនៅឡើយ។ អំណោយផលល្អ មួយយ៉ាងទៀត គឺការសិក្សាតាមបែបគរុកោសល្យថ្មីនេះ អាចទទួលបានលទ្ធផលល្អ ដោយសិស្សរៀនឆាប់ចេះ ជាងកាលពីជំនាន់ដើម ដែលគ្រូបង្រៀនសិស្សតាមតែវិធីបុរាណតៗគ្នា ដដែលៗ ពុំមានការកែសម្រួល បញ្ចូលអ្វីថ្មីឱ្យខុសពីមុនឡើយ។ ប្រការដែលល្អបំផុត គឺយើងតម្រូវការសិក្សាយើង ទៅតាមអភិក្រមនៃប្រព័ន្ធសិក្សាសកលរបស់ពិភពលោកនាសម័យថ្មី។ តាមរយៈការសិក្សាបែបទំនើបនេះ យើងបានផ្តល់ឱ្យសិស្សនូវចំណេះដឹងចាំបាច់ ដែលពិភពលោកនាយុគសម័យ ទាមទារ

---

(៣៩) គិតពីសម័យអាណានិគមនិយមបារាំង មកទល់សម័យទាមទារឯករាជ្យ (១៩៥៣)។

ឱ្យដំណើរការអភិវឌ្ឍសង្គម លោកទៅតាមបែបផែនថ្មី និងសង្វាក់ថ្មី ដោយតម្រូវបញ្ចូលជាបឋម នូវផែនការបារាំងភាវូបនីយកម្មនៃការសិក្សានៅកម្ពុជា.....។

ចាប់តាំងពីដំបូងឡើង គេបានដាក់កម្មវិធីសិក្សាភាសាបារាំងយ៉ាងច្រើននៅក្នុងវិស័យសិក្សាធិការ តាំងពីថ្នាក់បឋមសិក្សាជាន់ដំបូងឡើងទៅ។ កាលណោះ[៤០] ត្រឹមថ្នាក់ស្រុក មានតែសាលាបឋមសិក្សាជាន់ដំបូងប៉ុណ្ណោះ (Cycle élémentaire) ទាល់តែថ្នាក់ខេត្ត ទើបមានសាលាបឋមសិក្សាបំពេញវិជ្ជា[៤១] (Ecole primaire complémentaire)។ រាជការអាណានិគមបារាំងបានចាត់ចែងឱ្យមានការបណ្ដុះបណ្ដាល ផ្នែកគរុកោសល្យយ៉ាងហ្មត់ចត់នៅរាជធានី ក្នុងគោលបំណងអនុវត្តឱ្យបានល្អ នូវកម្មវិធីសិក្សាដែលក្រសួងសិក្សាធិការបានគ្រោងទុក។ នៅក្រោមឱវាទទីស្ដីការរដ្ឋមន្ត្រីក្រសួងសិក្សាធិការ គេបានចាត់ចែងឱ្យមានគ្រឹះស្ថានសិក្សាជាច្រើនជាន់ ច្រើនថ្នាក់ ច្រើនផ្នែក ដូចជាផ្នែកមធ្យមសិក្សា ផ្នែកបឋមសិក្សា[៤២] ផ្នែកទីចាត់ការបច្ចេកទេសទូទៅ ផ្នែកទីចាត់ការគរុកោសល្យ អធិការដ្ឋាន នៅរាជធានី និងនៅគ្រប់ខេត្តទូទាំងប្រទេស។ ប្រព័ន្ធ ឬបណ្ដាញគ្រប់គ្រងនេះ ភ្ជាប់ជាខ្សែរយៈ ជាថ្នាក់បន្តបន្ទាប់ជាប់ពីលើ ធ្លាក់ដល់ក្រោម សំដៅរឹតបន្តឹងសិក្សាធិការឱ្យទទួលបានផ្លែផ្កាយ៉ាងល្អប្រពៃ។ តួនាទីក្ដាប់រួមតាំងពីលើដល់ក្រោម គឺបារាំង។ មន្ត្រីសិក្សាធិការខ្មែរ

---

(៤០) មានពីថ្នាក់កុមារដ្ឋាន បរិវច្ឆណដ្ឋាន បដិញ្ញាណដ្ឋាន មជ្ឈិមដ្ឋានទី ១ មជ្ឈិមដ្ឋានទី ២ ឧត្ដមដ្ឋាន ។

(៤១) បឋមសិក្សា មធ្យមសិក្សា និងសម័យចុងក្រោយ ឧត្ដមសិក្សា ។

(៤២) បឋមសិក្សាជាន់ដំបូង និងបឋមសិក្សាបំពេញវិជ្ជា។

គ្រាន់តែជាភូឈួយ ឬជាទីប្រឹក្សាអមលោកធំតែប៉ុណ្ណោះ។ គ្រូបង្រៀន ដែលត្រូវរ៉ាប់រងបង្ហាត់នៅសាលាបឋមសិក្សាជាន់ដំបូង ត្រូវបានជ្រើសរើសពីក្នុងចំណោមសិស្ស ដែលបានប្រឡងជាប់សញ្ញាប័ត្របឋមសិក្សាបំពេញវិជ្ជា (Certificat d'études primaires complémentaires) ហើយត្រូវបានទទួលការហ្វឹកហ្វឺន បំពាក់បំប៉នខាងគរុកោសល្យ វិធីសាស្ត្រ ចិត្តគរុកោសល្យ នៅមជ្ឈមណ្ឌលកិច្ចការគរុកោសល្យនៅភ្នំពេញ (Centre de formation pédagogique) យ៉ាងតិចបំផុតត្រឹម៣ ខែ[៤៣] ទើបអនុញ្ញាតឱ្យចេញបង្រៀនក្នុងនាមជាគ្រូជំនួយកម្មសិក្សា (Instituteur auxiliaire stagiaire) ទាល់តែធ្វើការគម្រប់បានពីរឆ្នាំ ហើយបានប្រឡងជាប់វិញ្ញាបនប័ត្រគរុកោសល្យសម្បទា[៤៤] (Certificat d'aptitude pédagogique) ឬប្រកាសនីយប័ត្រគរុកោសល្យសម្បទា[៤៥] (Brevet d'aptitude pédagogique) ទើបត្រូវបានតែងតាំងជាគ្រូស៊ប់ក្នុងក្របខ័ណ្ឌ (Titulaire)។ ជាធម្មតា គ្រូដែលមានត្រឹមវិញ្ញាបនប័ត្របឋមសិក្សាបំពេញវិជ្ជាត្រូវបានចាត់តាំងឱ្យបង្រៀនតែពីថ្នាក់កុមារដ្ឋាន ដល់អទិកដ្ឋាន[៤៦] ប៉ុណ្ណោះ។ ពីថ្នាក់មជ្ឈិមដ្ឋានឆ្នាំទី ១ (Cours moyen 1er année) ទៅមជ្ឈិមដ្ឋានឆ្នាំទី ២ (Coure moyen 2e année) រហូតដល់ថ្នាក់ឧត្តមដ្ឋាន (Cours supérieur) មានតែគ្រូដែលបានសិក្សា

---

(៤៣) CPP (cours de preparation pédagogique.

(៤៤) ចំពោះគ្រូដែលមានសញ្ញាប័ត្របឋមសិក្សាបំពេញវិជ្ជាជាន់ដំបូង CEPC

(៤៥) ចំពោះគ្រូដែលមានមធ្យមសិក្សាប័ត្របឋមភូមិ ឬប្រកាសនីយប័ត្រមធ្យមសិក្សាបឋមភូមិ (Brevet d'e'tude Secondaire du 1er cycle)

(៤៦) ពីមុនគេហៅថា បឋិញ្ញាណដ្ឋាន តែក្រោយមក គេហៅថា ថ្នាក់អទិកដ្ឋានវិញ។

ដល់ថ្នាក់ទី ៣ ទំនើបជាតិ (3$^{e}$ MN de l'enseignement secondaire) ឬគ្រូដែល មានសញ្ញាប័ត្រមធ្យមសិក្សាបឋមភូមិឬ (Diplôme d'étude secondaire du 1$^{er}$ cycle) ប្រកាសនីយប័ត្រជាន់ដំបូង (Brevet élémentaire du 1$^{er}$ cycle) ឬប្រកាសនីយប័ត្រមធ្យមសិក្សាបឋមភូមិប៉ុណ្ណោះ (Brevet d'étude secondaire du 1$^{er}$ cycle) ដែលអាចបង្រៀនបាន។ នៅចុងឆ្នាំសិក្សា ថ្នាក់បឋមញ្ញាណដ្ឋាន ឬឆ្នាំអាទិកដ្ឋាន សិស្សត្រូវប្រឡងយកវិញ្ញាបនប័ត្របឋមសិក្សា ជាន់ដំបូង។ (Certificat d'e'tudes primaries élémentaires avec mention française) ចំពោះបេក្ខជនដែលប្រឡងបន្ថែមវិញ្ញាសាសរសេរតាមសូត្របារាំងមួយមុខទៀត។ រីឯសិស្សដែលប្រឡងធ្លាក់ វិញ្ញាសាសរសេរតាមសូត្របារាំងនេះ បានជាប់ត្រឹមសញ្ញាប័ត្របឋមសិក្សាជាន់ដំបូងប៉ុណ្ណោះ។ កាលណោះ ដើម្បីបានឡើងពីថ្នាក់ទាបទៅថ្នាក់ខ្ពស់បន្តបន្ទាប់ គេត្រូវតែចាត់តាំងការប្រឡងឡើងថ្នាក់ជាដរាប។ គេមិនអនុវត្តការបូកពិន្ទុប្រចាំឆ្នាំ យកមធ្យមភាគ ដើម្បីឡើងថ្នាក់ដូចសព្វថ្ងៃនេះទេ។ សាលាដែលមានតែបីថ្នាក់ដំបូង គឺថ្នាក់កុមារដ្ឋានដល់ថ្នាក់អាទិកដ្ឋាន គេហៅថាសាលាបឋមសិក្សាជាន់ ដំបូង (Ecloe primaire élémentaire) ឋិតក្រោមការគ្រប់គ្រងដឹកនាំរបស់ ចាងហ្វាងម្នាក់ ដែលជាគ្រូទទួលបន្ទុកនៃថ្នាក់ណាមួយ ក្នុងចំណោមថ្នាក់ទាំងបី។ លោកគ្រូចាងហ្វាងមានប្រាក់រង្វាន់មុខងារ ៤០ រៀល បន្ថែមពីលើប្រាក់ ខែ។ សាលាប្រភេទនេះ ច្រើនតាំងនៅវត្តអារាម នៅជនបទចុងកាត់មាត់ញក ឬនៅតាមបណ្តាភូមិឆ្ងាយដាច់ស្រយាល។ ចំពោះសាលាមានរហូតដល់ថ្នាក់មជ្ឈិមដ្ឋានឆ្នាំទី ១ ឆ្នាំទី ២ និង

ថ្នាក់ឧត្តមដ្ឋាន(៤៧) គេឱ្យឈ្មោះថាសាលាបឋមសិក្សាបំពេញវិជ្ជា (Ecole primaire complémentaire)។ សាលានេះ ក៏ត្រូវបានគ្រូម្នាក់ដែលមានសមត្ថភាពខ្ពស់ជាងគេ មានការវាងវៃ ប៉ិនប្រសប់គ្រប់គ្រងដឹកនាំ ធ្វើជាចាងហ្វាង (នាយក) ។ លោកចាងហ្វាងសាលាបឋមសិក្សាបំពេញវិជ្ជា ក៏នៅតែជាគ្រូប្រចាំថ្នាក់ដូចគ្រូដទៃទៀតដែរ ប្រសិនបើចំនួនសិស្ស នៅក្នុងសាលាមានមិនលើសពី ៣០០ នាក់។ បើមានសិស្សលើសពីចំនួននេះ លោកគ្រូចាងហ្វាងអាចរួចខ្លួនពីការទទួលបន្ទុកបង្រៀនថ្នាក់មួយ ដោយថ្នាក់លើយល់ថា សាលាដែលមានសិស្សរហូតដល់ជាង ៣០០ នាក់ ប្រាកដជាមានការមមាញឹក និងមានភារកិច្ចដឹកនាំគ្រប់គ្រងឱ្យបានល្អិតល្អន់ជិតដល់ ដូច្នេះហើយបានជាលោកចាងហ្វាងរួចផុតពីការបង្រៀន(៤៨) ដើម្បីមានពេលដើរត្រួតពិនិត្យ និងជួយណែនាំដល់គ្រូថ្មីដែលនៅទន់ខ្សោយខាងសមត្ថភាពវិធីសាស្ត្រ និងគរុកោសល្យ។ លោកចាងហ្វាងអាចអនុញ្ញាតឱ្យមានលេខាធិការម្នាក់ជាជំនួយ ប្រសិនបើមានការចាំបាច់។ លោកចាងហ្វាងបឋមសិក្សាបំពេញវិជ្ជាមានប្រាក់មុខងារ ប្រហែល ៦០ បន្ថែមលើពីប្រាក់បៀវត្សប្រចាំខែ។ នៅចុងឆ្នាំសិក្សា សិស្សថ្នាក់ឧត្តមដ្ឋាន (បរិបុណ្ណដ្ឋាន ឬថ្នាក់ទី៧) ត្រូវប្រឡងយកសញ្ញាប័ត្របឋមសិក្សាបំពេញវិជ្ជា(Certficat d'études primaires complimentaires)។ ពីដើម កាលជំនាន់អាណានិគមបារាំងត្រួតត្រាក្តោបក្តាប់ដោយផ្ទាល់

---

(៤៧) ក្រោយមកគេប្រែឈ្មោះ ថ្នាក់ទាំងអស់ថា ថ្នាក់ទី ១២ ទី ១១ ទី ១០ ទី ៩ ទី ៨ និងទី ៧ វិញ ជាជំនួសថ្នាក់ កុមារដ្ឋាន បរិវច្ឆនដ្ឋាន បដិញាណដ្ឋាន មជ្ឈិមដ្ឋានទី ១-ទី ២ និងថ្នាក់ឧត្តមដ្ឋាន នៅរវាងឆ្នាំ ១៩៥៨។

(៤៨) déchargé ។

គេហៅថាសញ្ញាប័ត្របឋមសិក្សាបំពេញវិជ្ជាឥណ្ឌូចិន (Certificat detudes primaires complémentaires indochinoises) (CEPCI) (សិបស៊ី)។ ប៉ុន្តែលុះក្រោយមក គ្រាដែលយើងបានឯករាជ្យ ហើយវិស័យសិក្សាធិការស្ថិតនៅក្រោមការដឹកនាំរបស់រាជការខ្មែរ ក៏លុបចោលពាក្យឥណ្ឌូចិននេះទៅ។ គេច្រើនយកទីរួមខេត្ត ធ្វើជាមជ្ឈមណ្ឌលប្រឡង។ គេយកសាលាបឋមសិក្សាបំពេញវិជ្ជាក្នុងខេត្តទាំងប៉ុន្មាន ធ្វើជាមជ្ឈមណ្ឌលប្រឡង យកសញ្ញាបត្របឋមសិក្សាបំពេញវិជ្ជានេះ។ វិញ្ញាសា : បកប្រែអត្ថបទភាសាបារាំង មកជាភាសាខ្មែរ (Version) បកប្រែអត្ថបទជាភាសាខ្មែរ ទៅជាភាសាបារាំង (Thème ou traduction) សរសេរតាមសូត្រភាសាបារាំង មេរៀនវិទ្យាសាស្ត្រអនុវត្តជាភាសាបារាំង មេរៀនភូមិសាស្ត្រ ប្រវត្តិសាស្ត្រជាភាសាបារាំងនិងគំនូរ។ សរុបរួមមកទាំងអស់មានប្រាំមួយវិញ្ញាសា ដែលសិស្សត្រូវប្រឡងចំនួនពីរថ្ងៃពេញ។ អំពីវិញ្ញាសាទាំងប្រាំមួយនេះ បើសិស្សណាបានពិន្ទុដល់ ៦០ ទើបអាចសន្មតថាប្រឡងជាប់។ រយៈពេលប្រមាណជាមួយខែ ឬពីរខែ ក្រោយពេលប្រកាសលទ្ធផលការប្រឡងសញ្ញាបត្របឋមសិក្សាបំពេញវិជ្ជានេះ សិស្សដែលបានប្រកាសថាជាប់ជាស្ថាពរហើយនោះ ត្រូវត្រៀមខ្លួនប្រឡងប្រជែងចូលរៀនសាលាមធ្យមសិក្សាទៀត។ សូមជម្រាបថា កាលមុនឆ្នាំ ១៩៥០ មានតែខេត្តបាត់ដំបង និងខេត្តកំពង់ចាមប៉ុណ្ណោះ ដែលមានអនុវិទ្យាល័យ។ ខេត្តដទៃពីនេះ ត្រូវបញ្ជូនសិស្សមកប្រឡង នៅភ្នំពេញដែលមានសាលាមធ្យមសិក្សាមួយចំនួនដូចជា វិទ្យាល័យស៊ីសុវត្ថិ (Lycée Sisowath) សាលាគរុវិជ្ជា (Ecole normale) អនុវិទ្យាល័យបច្ចេកទេស (Collège technique)

អនុវិទ្យាល័យនារី (Collège des jeunes filles) និងសាលាសិល្បៈ និងមុខរបរ (Ecole des Arts et metiers)។ ចំពោះសិស្សខ្លះដែលមានអាយុគ្រប់ ១៨ ឆ្នាំហើយ ពុំចង់បន្តការសិក្សាទៅមុខទៀត អាចដាក់ពាក្យប្រឡងចូលបម្រើជាគ្រូបង្រៀន ភ្នាក់ងារ រុក្ខាប្រមាញ់ នេសាទ នគរបាល សិស្សនាយទាហានរងកងខេមរៈយោធិន ឬស្មៀនស្មេរលេខាធិការនៅតាមក្រសួង ស្ថាប័ននានាតាមចូលចិត្ត។ ការ ប្រឡងប្រជែងចូលរៀននៅសាលាមធ្យមសិក្សានេះពុំមានកំណត់ពិន្ទុះដូច ប្រឡងវិញ្ញាបនបត្រ័ឡើយ។ គឺកំណត់ចំនួនកន្លែងដែលត្រូវជ្រើសរើសយកក្នុងគ្រឹះស្ថានសិក្សានីមួយៗ។ វិញ្ញាសានេះ មានជាអាទិ៍សរសេរតាមសូត្របារាំង ចំណោទបារាំងពីរ តែងសេចក្តីបារាំង។ វិញ្ញាសាទាំងបីនេះ ជាវិញ្ញាសាសរសេរ។ បេក្ខជនទាំងអស់ត្រូវរង់ចាំមេប្រយោគកែវិញ្ញាសាទាំងបីនេះ ចប់សព្វគ្រប់ ហើយប្រកាសលទ្ធផលវិញ្ញាសាសរសេរនេះមួយលើកសិន។ បើបេក្ខជនណាប្រឡងជាប់វិញ្ញាសាសរសេរនេះ ទើបមានសិទ្ធិប្រឡងសួរផ្ទាល់មាត់មួយលើកទៀត។ ចំពោះសិស្សដែលប្រឡងធ្លាក់វិញ្ញាសាសរសេរនេះ មិនត្រូវបានអនុញ្ញាតិឱ្យប្រឡងសំនួរផ្ទាល់មាត់ទៀតឡើយ។ ដូច្នេះគេអាចសន្និដ្ឋានបានថា សិស្សមួយចំនួនធំត្រូវបានជម្រុះចោល ក្រោយប្រឡងសរសេរមួយលើករួចមក។ បួន ឬប្រាំថ្ងៃបន្ទាប់មក សិស្សបេក្ខជនដែលបានប្រកាសថាប្រឡងជាប់វិញ្ញាសាសរសេរហើយ ត្រូវប្រឡងជាលើកទីពីរទៀត ដោយឆ្លងកាត់វិញ្ញាសារសួរផ្ទាល់មាត់ពីរគឺ : សិក្សាអត្ថបទពីជាភាសាបារាំង និងបកប្រែអត្ថបទផ្ទាល់មាត់ភាសាខ្មែរឱ្យទៅជាភាសាបារាំង។ ពេលនេះមេប្រយោគមានពីរនាក់ គឺបារាំងម្នាក់ ខ្មែរម្នាក់។ មេប្រយោគបារាំង បង្គាប់ឱ្យបេក្ខជន អាន

អត្ថបទជាភាសាបារាំង សាកសួរអំពីអត្ថន័យនៃអត្ថបទ សាកសួរអំពីវេយ្យាករណ៍ ឱ្យធ្វើវិភាគឃ្លាប្រយោគមួយចំនួន សួរឱ្យពន្យល់ពាក្យពិបាកខ្លះៗ រួចទើបបញ្ជូនមកឱ្យមេប្រយោគខ្មែរប្រឡងត្រួតពិនិត្យសមត្ថភាព ខាងការបកប្រែភាសា។ មេប្រយោគបើកសៀវភៅរៀនអានខ្មែរ ជ្រើសយកអត្ថបទណាមួយ ឱ្យបេក្ខជនអានឃ្លាខ្មែររួចបកប្រែជាភាសាបារាំង ភ្លាមៗ.ពុំមានទុកពេលឱ្យគិតបានយូរឡើយ។ លុះប្រឡងចប់ហើយ សិស្សដែលនៅខេត្តឆ្ងាយៗ មិនទាន់វិលមកផ្ទះភ្លាមទេ គេនៅរង់ចាំស្ដាប់លទ្ធផលឱ្យដឹងសិន។ នេះជារដូវមួយដែលសិស្សមួយចំនួនត្រូវសើចញញឹម ទទួលជោគវាសនាល្អ ដែលបានមកពីការខិតខំប្រឹងប្រែងដោយសមត្ថភាពផ្ទាល់ខ្លួនពិតៗ ពុំមានជំនួយក្រៅខ្លួនបន្តិចណាសោះឡើយ។ សិស្សប្រឡងជាប់ ពេលនោះមានកិត្តិយសធំណាស់ខ្លួនគេផ្ទាល់ ឪពុកម្ដាយគេ គ្រូគេ សុទ្ធតែជាបុគ្គល ដែលបានរីកមុខរីកមាត់ និង បានទទួលការកោតសរសើរពីអ្នកផងក្នុងមជ្ឈដ្ឋានជុំវិញ។ មកដល់សាលាវិញ គេមានពិធីចាត់ចែងចែករង្វាន់ចំពោះសិស្សដែល មានចំណាត់ថ្នាក់ល្អលើសគេក្នុងថ្នាក់ និងក្នុងសាលា។ រង្វាន់ចែកចេញជារង្វាន់ ឧដុង្គឧត្ដម (prix d'excellence) រង្វាន់កិត្តិយស (Prix d'honneur) រង្វាន់លេខមួយ រង្វាន់លេខពីរ រហូតដល់រង្វាន់លេខបី។ ជាកិត្តិយសធំណាស់ ចំពោះសិស្សដែលត្រូវបានចាត់ថ្នាក់ក្នុងចំណោមរង្វាន់ទាំងប្រាំប្រភេទ ដោយខ្លួនបានប្រឡងជាប់សញ្ញាបត្រ័បឋមសិក្សាបំពេញវិជ្ជាផង ប្រឡងជាប់ប្រណាំងប្រជែងចូលសាលាមធ្យមសិក្សាឯភ្នំពេញផង។ នៅក្នុងជំនុំចំណោមប្រជុំជននៃពិធីចែករង្វាន់នេះគេហាក់ដូចជាអណ្ដែតខ្លួនដល់ឋានណាមួយ។ លទ្ធផលផ្លែផ្កានៃការសិក្សា នេះ

ជារង្វាន់ចំពោះការខិតខំប្រឹងប្រែង របស់សិស្សដែលមានមនសិការវិជ្ជាជីវៈខ្ពស់។ ក៏ប៉ុន្តែក៏គង់មានទឹកភ្នែករបស់ សិស្សអភ័ព្វមួយចំនួនដែលហូរធ្លាក់ ដោយសារលទ្ធផលមិនល្អ នៃការសិក្សានេះ ដែលគ្មាន សូកប្រាក់ មាស ដុល្លា ដើម្បីដូរយកសញ្ញាបត្រ ឬដូរយកលទ្ធផលឡើយ។ គឺមានតែសមត្ថភាព ការតស៊ូព្យាយាមផ្ទាល់ខ្លួនពិតៗប៉ុណ្ណោះ ដែលនាំឱ្យគេឈានទៅដល់ជោគជ័យក្នុងជីវិត។ គេទទួលបានសេចក្តីថ្លៃថ្នូរដ៏ពិតៗ ក៏ដោយសារលទ្ធផលនៃការប្រឡងប្រកបដោយគតិយុត្តិធមិនេះផងដែរ។ នៅបវេសនកាល សិស្សដែលបានប្រឡងជាប់ចូលរៀនសាលាមធ្យមសិក្សា ក៏បានមកបន្តការសិក្សានៅរាជធានី ឬនៅខេត្ត។ កម្មវិធីសិក្សា មិនសូវជាខុសគ្នា ប៉ុន្មានពីកម្មវិធីមធ្យមសិក្សានាពេលបច្ចុប្បន្ននេះប៉ុន្មានឡើយ[៤៩]។ ដោយឡែក តែភាសាបារាំងដែលជាមុខវិជ្ជាដ៏សំខាន់ ដែលបារាំងបានឱ្យតម្លៃខ្ពស់ ហើយបានដាក់ឱ្យសិស្ស និស្សិតខ្មែរ សិក្សាលម្អិតនិងស៊ីជម្រៅអំពីអក្សរសិល្ប៍បារាំង លើសពីអក្សរសិល្ប៍ខ្មែរទៅទៀត។ នៅជំនាន់នោះ ដោយសិស្សនិស្សិតនៅមានចំនួនតិច ហើយដោយរាជការអាណាគនិគមបារាំងចង់លើកស្ទួយវិស័យសិក្សាធិការ ឱ្យបានរីកលូត-លាស់ខ្លាំងក្លានោះ គេបង្កើតឱ្យមានអន្តេវាសិកដ្ឋាន[៥០] សម្រាប់សិស្សជ័យលាភីស្នាក់នៅ និងហូបចុកក្នុងរយៈពេលសិក្សា។ សិស្សប្រឡងប្រជែងជាប់

---

(៤៩) ខុសគ្នាត្រង់ពេលគេរៀនពេញទាំងព្រឹកទាំងល្ងាច។

(៥០) internat រដ្ឋធានាការស្នាក់នៅហូបចុកនិងទំនុកបម្រុងសម្រួលជីវភាពគ្រប់បែបយ៉ាង។

ក្នុងសាលាគរុវិជ្ជា[៥១] ជាពិសេស មានវាសនាបានទទួលបុព្វសិទ្ធិអនុញ្ញាតិឱ្យស្នាក់នៅក្នុងអន្តេវាសិកដ្ឋានទាំងអស់ (១00%)។ សិស្សដែលស្ម័គ្រចិត្តប្រឡងប្រជែង ចូលរៀនសាលាគរុវិជ្ជា ត្រូវទទួលបានរង្វាន់ពីព្រះមហាក្សត្រចំនួន (៥00រៀល) គេហៅថា (Prime royal)។ ប្រាក់នេះគេបើកឱ្យភ្លាមៗចំនួន២៥0រៀល នៅពេលចូលរៀន ហើយនឹងបើកឱ្យ ២៥0 រៀលទៀត នៅពេលបញ្ចប់ការសិក្សានៅសាលានេះ ហើយចេញទៅបំពេញភារកិច្ចជាគ្រូបង្រៀនតាមកិច្ចសន្យា ១0 ឆ្នាំ (Engagement décennal)។ ប្រសិនបើសិស្សណាចេញពីសាលានេះ ហើយពុំបានទៅបំពេញមុខងារជាគ្រូបង្រៀនតាមកិច្ចសន្យា ដែលបានធ្វើជាមុន នៅមុនពេលដាក់ពាក្យប្រឡងទេនោះ នឹងត្រូវសងទៅរដ្ឋវិញនូវប្រាក់ចំណាយសម្រាប់អាហារូបត្ថម្ភ និងប្រាក់ផ្គត់ផ្គង់ផ្សេងៗទៀត ប្រមាណពី ៣000 រៀល ទៅ ៤000 រៀល។ ចំពោះសិស្សដែលប្រឡងចូល រៀននៅវិទ្យាល័យស៊ីសុវត្ថិវិញនោះ គេមានវាសនាបានរស់នៅក្នុងអន្តេវាសិកដ្ឋាន ចំពោះសិស្សពូកែតែប៉ុណ្ណោះ។ សិស្សប្រឡងជាប់មួយចំនួនច្រើនទៀត គ្រាន់តែតែបានចូលរៀនថ្នាក់ទី ៦ ទំនើប ដូចមិត្តខ្លួនដែរ ប៉ុន្តែឋិតនៅក្រៅអន្តេវាសិកដ្ឋាន[៥២]។ សូមជម្រាបថា ពេលនោះសាលានីមួយៗ មានឯកសណ្ឋាន និងសញ្ញាសម្គាល់ដោយឡែកពីគ្នា។ គ្រាន់តែឃើញឯកសណ្ឋានគេអាចស្គាល់បានថា ជាសិស្សនៅសាលាណានោះហើយ។ ឧទាហរណ៍ សិស្ស

(៥១) សិស្សសាលានេះ ជាអនាគតគ្រូបង្រៀន។ កាលណោះគេមិនសូវចូលចិត្តធ្វើគ្រូបង្រៀនទេ ហេតុនេះហើយបានជារាជរដ្ឋាភិបាល មានវិធានការលើកទឹកចិត្តដល់សិស្សសាលាគរុវិជ្ជានេះខ្លាំងជាងគេ។

(៥២) externat ។

វិទ្យាល័យស៊ីសុវត្ថិ ពាក់អាវធំ[៥៣] ពណ៌ស ខោវែងពណ៌ស ចងក្រវាត់ពណ៌ក្រហម ខ្ទាស់សញ្ញាស្លាបប៉ាកានៅក្រវាត់ ពាក់ស្បែកជើងពណ៌ស ពាក់កាស់-ស្កែតពណ៌ខ្មៅ។ល។ ឯសិស្សគរុវិជ្ជា ពាក់អាវរីតចង្កេះ (Blouson) ពណ៌ស ចងក្រវាត់កពណ៌ខៀវ ខ្ទាស់សញ្ញារូបក្បាលព្រហ្មពណ៌ទឹកមាស ស្លៀកខោស ពាក់ស្បែកជើងស មានសញ្ញា (écusson) ពណ៌ខៀវនៅស្មាឆ្វេង និងមានពាក់កាស់ស្កែត (casquette) (មួក) ពណ៌ខ្មៅ មានវ៉ាន់ខ្សែទឹកមាសពីរជាន់ពីខាងមុខ និងមានឡេវមាសនៅ ខាងឆ្វេង និងខាងស្តាំ។ ចំពោះសិស្សអនុវិទ្យាល័យនារី មានឯកសណ្ឋានសំពត់ ហ្ស៊ីប (jupe) បត់ ពាក់កណ្តាលកំភួនជើងពណ៌ខៀវ និងអាវសឺមីលសដៃខ្លី ព្រមទាំងមានប៉ាក់សញ្ញាសម្គាល់សាលានៅលើទ្រូងអាវផ្នែកខាងឆ្វេងផង។ ក្រៅពីរការបង្កើនការសិក្សា ផ្នែកភាសាបារាំងយ៉ាងច្រើននោះ កម្មវិធីសិក្សាមិន សូវខុសគ្នានឹងពេលបច្ចុប្បន្ននេះប៉ុន្មានទេ។ ប៉ុន្តែរបបសិក្សា និងរបៀបរស់នៅ សម្រាប់សិស្សអន្តេវាសិកដ្ឋាននោះ មានការញញឹកប្លែកពីសិស្សក្រៅអន្តេវាសិកដ្ឋានខ្លាំងណាស់។ ពេលព្រឹកព្រលឹមចាប់ពីម៉ោង៥ សំឡេងជួងបានដាស់សិស្ស ឱ្យក្រោកលុបលាងខ្លួនប្រញាប់ប្រញាល់ រួចត្រូវចូលសិក្សានៅក្នុងថ្នាក់រៀន[៥៤] ក្រោមការត្រួតពិនិត្យដ៏តឹងរ៉ឹងរបស់អនុរក្ស។ ការសិក្សាបែបនេះ គឺធ្វើឡើងទៅតាមបំណងរបស់សិស្ស ដែលចង់សិក្សាវិជ្ជាណាមួយក៏បាន។ គឺជាការសិក្សាពុំមានគ្រូដឹកនាំ

---

(៥៣) អាវវ៉ារឺស៍ (vareuse) មានបើកក មានហោប៉ៅបួន។

(៥៤) étude ។

⁂ បើគិតជាមាស ប្រហែលជាង ១០ ដំឡឹង ។

ទេ។ រហូតដល់ម៉ោង ៦ និង ៤៥ នាទី សិស្សត្រូវអនុញ្ញាតឱ្យចេញពីសាលាសិក្សា ទៅស្រស់ស្រូបបបរនៅក្នុងអាហារដ្ឋាន។ នៅម៉ោង ៧ ព្រឹក ជួងបន្លឺសំឡេងជាសញ្ញាហៅសិស្សឱ្យចូលរៀនក្នុងថ្នាក់រៀង១ខ្លួន ដោយមានសាស្ត្រាចារ្យ (Cours magistral) ជាអ្នកបង្ហាត់បង្រៀនអំពីមុខវិជ្ជា ទៅតាមកាលវិភាគដែលបានចែងទុក។ ម៉ោង ១១ សិស្សត្រូវបានសម្រាកពីការរៀនសូត្រ ហើយត្រូវបរិភោគអាហារជួបជុំគ្នានៅអាហារដ្ឋាន ដោយមានសម្លទឹកពីរមុខ និងឆាមួយមុខ[៥៥]។ សិស្សបរិភោគក្នុងមួយស្លក (carré) មានបួននាក់។ អាហារដែលផ្គត់ផ្គង់ឱ្យសិស្សរាល់ពេល សុទ្ធតែសម្រិតសម្រាំងឱ្យមានរសជាតិឆ្ងាញ់ពិសា។ មិនអនុញ្ញាតិឱ្យធ្វើគ្រវីសគ្រវាសច្រកាច់ច្រកូវ បានតាមតែអំពើចិត្តអ្នកផ្គត់ផ្គង់ឡើយ។ បរិភោគអាហារថ្ងៃត្រង់រួចហើយ សិស្សត្រូវបានដេកសម្រាកពេលថ្ងៃ (sieste) រយៈពេលជាងមួយម៉ោង ទើបត្រូវក្រោកងូតទឹក ស្លៀកពាក់ហើយចូលសិក្សា (étude) នៅពេលរសៀល ពីម៉ោង១ដល់ម៉ោង២រសៀល។ សិស្សចូលសិក្សាក្នុងថ្នាក់ ដោយមានសាស្ត្រាចារ្យដឹកនាំបន្តទៅទៀត ពីម៉ោង២រសៀលរហូតដល់ម៉ោង៥ល្ងាច។ ចប់ការសិក្សាពេលល្ងាចសិស្សត្រូវបានសម្រាកហើយត្រូវទទួលរបប នំប៉័ងមូលមួយ សូកូឡាមួយបន្ទះសម្រាប់បរិភោគស្រស់ស្រូបសម្រន់ (goûter) នៅពេលល្ងាច។ សិស្សអាចឆ្លៀតពេលនេះខ្លះងូតទឹក ខ្លះលេងកីឡាផ្សេង មានបាល់ទាត់ បាល់ទះ បាល់បោះ ប្រដាល់ ទាត់សី វាយសី ឬលេងភ្លេងកម្សាន្តតាមចំណូលចិត្ត។ នៅម៉ោង

---

(៥៥) សម្លរបីមុខនេះ ផ្លាស់ប្តូរឱ្យមានការប្លែក១ជារៀងរាល់ថ្ងៃ មិនឱ្យមានមុខម្ហូបដដែល១នោះឡើយ។

៦ ល្ងាច ស្គរជួងបានបន្លឺឡើងដើម្បីហៅសិស្សឱ្យចូលសិក្សាតាមបន្ទប់រៀង១ខ្លួន (étude) ក្រោមការត្រួតពិនិត្យរបស់អនុរក្ស ។ ការបរិភោគពេលល្ងាចប្រព្រឹត្តទៅនៅពេលល្ងាច វាលាម៉ោង៨យប់ ។ ក្រោយពីបរិភោគល្ងាចរួចហើយ សិស្សបានសម្រាកបន្តិច រួចក៏អនុញ្ញាតឱ្យបន្តស្វ័យសិក្សាមួយម៉ោងទៀត ។ ដូច្នេះឃើញថា របៀបរបបរស់នៅរបស់សិស្សអន្តេវាសិក មានការប្រព្រឹត្តទៅតាមកម្មវិធីមួយមមាញឹក ហើយម៉ឺងម៉ាត់ហ្មត់ចត់ណាស់ ។ គេបង្វឹកសិស្សឱ្យរស់នៅតាមរបៀបរបបមួយ ដែលមានចែកពេលរៀនច្រើន មានពេលកម្សាន្ត និងទំនុកបម្រុងការហូបចុកបានដឹតដល់ និងឆ្លាញ់ពិសាទៀតផង ។ ចំពោះការឧបត្ថម្ភគាំទ្រផ្សេង១ និងការសម្រួលដល់ជីវភាពសិស្ស ក៏រាជការបានយកចិត្តទុកដាក់ជាពិសេសណាស់ដែរ ។ សម្លៀកបំពាក់សិស្សត្រូវបានសេវាពិសេសមួយបោកជម្រះ អ៊ុតឱ្យជារៀងរាល់ពេលកំណត់ ។ សូម្បីមានខោអាវរហែក ឬដាច់ឡេវក៏មានគេប៉ះ ដេរសម្រួលឱ្យតាមសេចក្ដីត្រូវការដែរ ។ ក្នុងមួយខែ១ មានកម្មវិធីចេញកម្សាន្តពេញ (grande sortie[56]) ពីរដង និងចេញកម្សាន្តពាក់កណ្ដាល (petite sortie[57]) ពីរដង។ នៅរៀងរាល់ថ្ងៃព្រហស្បតិ៍ មានកម្មវិធីសិក្សាតែមួយព្រឹកទេ ពេលល្ងាចគ្រាន់តែស្វ័យសិក្សាធម្មតា ពុំមានសាស្ត្រាចារ្យមកបង្រៀនតាមកម្មវិធីឡើយ ។ ចំពោះម្ហូបអាហារសិស្ស រាជការបានយកចិត្តទុក

---

(៥៦) កម្សាន្តពេញ : ថ្ងៃអាទិត្យទី១ និងទី៣ អនុញ្ញាតឱ្យសិស្សចេញពីសាលាតាំងពីព្រលឹមទៅដើរលេងកម្សាន្តពេញមួយថ្ងៃនៅទីណាក៏បាន មកហូបបាយសាលាវិញក៏បាន មិនមកវិញក៏បាន ។

(៥៧) កម្សាន្តពាក់កណ្ដាល : ថ្ងៃអាទិត្យទី ២ និងទី ៤ អនុញ្ញាតឱ្យសិស្សចេញដើរកម្សាន្តមួយព្រឹក តែត្រូវត្រឡប់ មកហូបបាយថ្ងៃត្រង់វិញ ហើយពេលរសៀលមិនអនុញ្ញាតឱ្យចេញឡើយ ។

ដាក់ទំនុកបម្រុងសម្រួលទៅតាមរដូវ។ ឧទាហរណ៍ ពេលមានបង្កង នៅលើតុបាយ និងមានម្ហូប ខបង្កង ឬស្ងោរបង្កងជាច្រើនលើកជាច្រើនសា រហូតដល់ផុតរដូវនេះ។ ចំពោះបង្អែមវិញ ក៏ប្រែប្រួលដូរដោះ ទៅតាមរដូវដូចជា ស្វាយទុំក្រូចពោធិ៍សាត់ ចេកអំបូង ឪឡឹក ឬល្មុត មង្ឃុត សេដា ដែរ។ ក្នុងថ្ងៃនីមួយៗ សាលាបានចាត់សិស្សពីរនាក់ មកពីថ្នាក់ទី៤ទំនើប[៥៨] មួយនាក់ និងមកពីរថ្នាក់ទី៥ទំនើបមួយនាក់ មកធ្វើជាអ្នកត្រួតពិនិត្យ (controleur) ទាំងអ្នកដាំស្ល ទាំងអ្នកផ្គត់ផ្គង់។ អង្ករបន្លែ ត្រីសាច់ ស៊ុត ទឹកត្រី ទឹកស៊ីអ៊ីវ ត្រូវជ្រើសយកតែវត្ថុមានគុណភាពខ្ពស់* ទាំងបង្អែម ផ្លែឈើ សព្វសារពើទាំងអស់។ បើអ្នកផ្គត់ផ្គង់ក្លែងក្លាយបន្លំយករបស់មិនល្អ មកធ្វើម្ហូបអាហារឱ្យសិស្សបរិភោគនោះ សិស្សត្រួតពិនិត្យមានសិទ្ធិតវ៉ាហើយបង្គាប់ឱ្យដូរយកតែរបស់មានគុណ-ភាពខ្ពស់ធុនលេខ១។ តួនាទីធ្វើជាអ្នកត្រួយពិនិត្យផ្ទះបាយនេះ ត្រូវផ្លាស់វេនគ្នាជារៀងរាល់ថ្ងៃរហូតទាល់តែគ្រប់គ្នា ទើបវិលមកអ្នកដដែលវិញ។ ការសិក្សាដ៏តឹងរ៉ឹងដែលអនុវត្តទៅតាមកម្មវិធីនេះ ត្រូវបានបន្ធូរបរិយាកាស ដោយមានការកម្សាន្តផ្សេងៗមកជួយលួងលោមអារម្មណ៍សិស្ស ឱ្យទទួលបានសេចក្ដីរីករាយផងដែរ។ ដោយសាលាបង្កើតឱ្យមានការប្រកួតកីឡា[៥៩] ជាមិត្តភាពរវាងសាលាមធ្យមសិក្សានានា ដូចជាវិទ្យាល័យស៊ីសុវត្ថិ ប្រកួតជាមួយសាលាគរុវិជ្ជា សាលាបច្ចេកទេសជាមួយ វិទ្យាល័យដេកាត(Lycée Descartes)។ល។

---

(៥៨) សិស្សថ្នាក់ទី៦ ទំនើបដែលចូលថ្មីមិនអនុញ្ញាតឱ្យមកត្រួតពិនិត្យ ព្រោះជាសិស្សថ្មី ឯសិស្សថ្នាក់ទី៣ មិនឱ្យធ្វើអ្នកត្រួតពិនិត្យ ព្រោះជាថ្នាក់ត្រូវប្រឡងឌីប្លូម។

* ប្រភេទលេខ ១

(៥៩) កីឡាបាល់ទាត់ បាល់ទះ បាល់បោះ វាយសី ប៉េងប៉ុង។ល។

ម្យ៉ាងទៀត កាលបើមានសិល្បៈល្អៗមកពីប្រទេសបារាំង ដូចជា ក្រុមល្ខោន (Troupe de théâtre) រឿងឡឺស៊ីដ (Le Cid) របស់លោកគកណី (Corneille) រឿងជនកំណាញ់(Avare) របស់លោក ម៉ូលីយែរ(Molière) មកសម្ដែងនៅរោងមហោស្រពនោះ។ សាលាមធ្យមសិក្សាទាំងអស់នឹងអនុញ្ញាតឱ្យសិស្សទៅទស្សនាកម្សាន្ត ដោយមានអនុរក្សដឹកនាំទៅទីកន្លែងសម្ដែងសិល្បៈ ក្នុងរបៀបរៀបរយមួយយ៉ាងល្អ។ ដោយឡែកពីនេះ ពេលដែលមានផលិតកម្មភាពយន្តបរទេស ឬភាពយន្តខ្មែរ ដែលមានលក្ខណៈល្អពិសេស ក៏អនុញ្ញាតឱ្យសិស្សទៅមើលកម្សាន្តដោយឥតគិតថ្លៃដែរ។ កាលណោះ សាលាបានអនុញ្ញាតឱ្យសិស្សចូលរួម និងចាត់ចែងបុណ្យសាសនាគ្រប់យ៉ាងទាំងអស់ មានបុណ្យមាឃបូជា បុណ្យពិសាខបូជា បុណ្យចូលព្រះវស្សា បុណ្យចេញព្រះវស្សា[(៦០)]។ បុណ្យដែលពិបាកជាងគេ ហើយដែលសិស្សមធ្យមសិក្សាធ្វើជាទ្រង់ទ្រាយធំគគ្រឹកគគ្រេងជាងគេ គឺបុណ្យកឋិនទាន។ សិស្សបានចាត់តាំងជាគណកម្មការកណ្ដាល អនុកម្មការផ្សេងៗសម្រាប់ចាត់ចែងពិធីបុណ្យឱ្យបានអធិកអធម។ គណកម្មការកណ្ដាលមាន ប្រធាន អនុប្រធាន លេខាធិការ ហិរញ្ញិក ដែលជាអ្នកដឹកនាំពិធីប្រព្រឹត្តទៅនៃបុណ្យ តាំងពីដើមដល់ចប់។ អនុកម្មការមានជាអាទិ៍ អនុកម្មការសំណង់រោងបុណ្យ អនុកម្មការតុបតែងលម្អឆាកល្ខោន អនុកម្មការទទួលភ្ញៀវ អនុកម្មការដឹកជញ្ជូន អនុកម្មការសិល្បៈ។ល។ ក្រោយពីបានដំណើរការផ្នែករបស់ខ្លួនទៅតាមមុខសញ្ញាពិសេស អនុកម្មការខាងរៃ

---

(៦០) សិស្សពុំបានប្រារព្ធបុណ្យភ្ជុំបិណ្ឌដោយថ្ងៃនោះសិស្សមធ្យមសិក្សា និងបឋមសិក្សាត្រូវបានសម្រាកវិស្សមកាល ២ ខែកន្លះ ដូច្នេះគេបានមកធ្វើបុណ្យនេះ រួមជាមួយគ្រួសាររៀងៗខ្លួន។

អង្គាសបច្ច័យ បានចាត់គ្នាចេញគ្រប់ច្រកល្ហកទាំងអស់ក្នុងរាជធានី ដោយមានប្លង់ផែនទីមួយៗម្នាក់ ដើម្បីកុំឱ្យការរៃអង្គាសជាន់ដានគ្នាពីរដងក្នុងតំបន់ទីមួយៗ។ ក្រុមអ្នករៃអង្គាសមានគ្នា៣នាក់ គឺអ្នកកាន់ផ្តិលដាក់បច្ច័យ អ្នកជូនពរ និងអ្នកជូនកម្មវិធីបុណ្យ។ ពេលចេញរៃអង្គាស ប្រធានគណកម្មការកណ្តាល បានហៅក្រុមរៃអង្គាសបច្ច័យទាំងអស់ ទៅផ្តល់យោបល់និងធ្វើការណែនាំមួយចំនួន ដើម្បីធ្វើយ៉ាងណាឱ្យសប្បុរសជន គេមានជំនឿជឿជាក់មកលើទឹកចិត្តបរិសុទ្ធស្មោះត្រង់របស់អ្នករៃអង្គាស។ ឧទាហរណ៍ ហាមដាច់ខាតមិនឱ្យអ្នករៃអង្គាសទិញអ្វីបរិភោគក្នុងពេលខ្លួនកំពុងរៃអង្គាស ទោះបីចំណាយប្រាក់ផ្ទាល់ខ្លួនក៏ដោយ។ ពេលចេញទៅរៃអង្គាស ត្រូវស្លៀកពាក់ឯកសណ្ឋានគ្រប់គ្រឿងរបស់សាលា។

ហាមនិយាយចែចង់ ឌឺដងទៅរកស្រីក្រមុំដែលមកចូលបច្ច័យ ។ល។ និង ។ល។ ថ្ងៃប្រារព្ធពិធីបុណ្យកឋិន អនុគណកម្មការទាំងអស់បានអនុវត្តភារកិច្ចរបស់ខ្លួនគ្រប់ៗគ្នា។ ថ្ងៃនោះជាថ្ងៃមហានក្ខត្តឫក្ស ព្រោះព្រះករុណាម្ចាស់ជីវិតលើត្បូងទ្រង់យាងចូលរួមផ្ទាល់ក្នុងពិធីបុណ្យកឋិនរបស់សិស្ស។ ហើយពិសេសទៅទៀត នៅពេលរាត្រីនោះ បន្ទាប់ពីប្រារព្ធពិធីចម្រើនព្រះបរិត្ត និងសម្តែងធម៌ទេសនារួចហើយ សិល្បៈល្ខោននិយាយរបស់សិស្ស លាយឡំដោយឆាកសិល្បៈដ៏ល្អៗនិងឆាកកំប្លែងសម្តែងថ្វាយព្រះមហាក្សត្រ វីរជនធំៗ និងភ្ញៀវកិត្តិយសទាំងអស់ ទស្សនារហូតដល់ពាក់កណ្តាលអធ្រាត។ សូមជម្រាបថា ពិធីបុណ្យកឋិនរបស់សិស្សសាលាមធ្យមសិក្សាជំនាន់នោះ ប្រព្រឹត្តទៅដោយឧឡារិកនិងប្រកបដោយជោគជ័យធំធេងណាស់។ លុះព្រឹកឡើង ពិធីហែ

កឋិនទានបានប្រព្រឹត្តទៅ យ៉ាងគគ្រឹកគគ្រេងដោយមានរថយន្ត ៤០ ទៅ ៦០ គ្រឿងសម្រាប់ជូនព្រះសង្ឃ និងឧបាសក ឧបាសិកា ដែលមានបំណងទៅចូលរួមក្នុងពិធីបុណ្យនេះដែរ។ វត្តដែលសិស្សហែកឋិនទានចូល ក៏ត្រូវបានទទួលកិត្តិយសដ៏ធំធេងណាស់ដែរ ព្រោះកាលណោះ ការហែកឋិនទាន ដែលមានមនុស្សពី ៤០ ទៅ ៦០ ឡានចូលរួម គឺកម្រនឹងមានណាស់។ ហើយចំពោះបច្ច័យទៀតសោត បើវត្តណាមានវាសនា បានកឋិនសិស្សសាលាមធ្យមសិក្សាហែចូល វត្តនោះនឹងត្រូវបានទទួលបច្ច័យក្រាស់ក្រែលណាស់ (ពី១០ ទៅ ៣០ ម៉ឺនរៀល[៦១]។ ដូច្នេះវត្តដែលត្រូវទទួលកឋិន ខិតខំស្អុះស្អាធ្វើអ្វីៗដើម្បីទទួលសិស្សឱ្យសក្តិសមតាមកិត្តិយស។

ចំពោះរបៀបរបបនៃការសិក្សាវិញ ការឡើងពីថ្នាក់ទាបទៅថ្នាក់បន្ទាប់ គេយកពិន្ទុមធ្យមភាគមកធ្វើជាមូលដ្ឋាន។ សិស្សណាដែលទទួលបានពិន្ទុមធ្យមប្រចាំឆ្នាំ នឹងត្រូវបានឡើងថ្នាក់ជាស្វ័យប្រវត្តិ។ ចំពោះសិស្សដែលពុំបានពិន្ទុមធ្យមទេ នឹងត្រូវប្រឡងឡើងថ្នាក់ ចំពោះតែមុខវិជ្ជាណាដែលពុំបានមធ្យមភាគ។ កាលជំនាន់នោះ តែដល់ថ្នាក់ទី ៤ ទំនើប (4º M.N) គេអនុញ្ញាតឱ្យសិស្សទូទាំងប្រទេសប្រឡងប្រកាសនីយបត្រជាន់ដំបូង (Brevet élémentaire)។ ជាធម្មតា សាស្ត្រាចារ្យជ្រើសរើសតែសិស្សពូកែ ៥ ឬ ៦ នាក់ក្នុងមួយថ្នាក់ឱ្យទៅប្រឡង។ ការប្រឡងយកសញ្ញាប័ត្រនេះ[៦២] មានលក្ខណៈ

---

(៦១) ១០ម៉ឺនឬ ៣០ម៉ឺនរៀលជំនាន់នោះ(១៩៤៨-១៩៥០, ៥១-៥២) ជាចំនួនប្រាក់ដ៏ច្រើនណាស់។

(៦២) ពេលក្រោយមកពុំមានការប្រឡងសញ្ញាបត្រនេះទៀតឡើយ។

តឹងតែងណាស់។ វិញ្ញាសាប្រឡងមានកម្រិតប្រហាក់ប្រហែលនឹងឌីប្លូមដែរ ប៉ុន្តែប្លែកគ្នាត្រង់ប្រឡងសញ្ញាបត្រនេះ គេគិតយកមធ្យមភាគប្រចាំមុខវិជ្ជានីមួយៗ (moyenne partielle)។ ឧទាហរណ៍ បើត្រូវធ្វើវិញ្ញាសា ៦ មុខ ត្រូវសិស្សទទួលបានពិន្ទុមធ្យមលើគ្រប់មុខវិញ្ញាសាទាំងអស់។ បើមានវិញ្ញាសាណាមួយបានពិន្ទុក្រោមមធ្យម ទោះបីវិញ្ញាសា ៤ ឬ៥ ទៀតបានពិន្ទុដល់ ២០ ក៏មិនចាត់ទុកជាប្រឡងជាប់ដែរ។ ដូច្នេះហើយបានជាការប្រឡងនេះ ទទួលបានលទ្ធផល យ៉ាងស្ដួចស្ដើងជាទីបំផុត គឺក្នុងមួយឆ្នាំៗអាចមានសិស្សតែពីរ ឬបីនាក់ប៉ុណ្ណោះ ដែលបានប្រឡងជាប់ក្នុងទូទាំងប្រទេស។ ប៉ុន្តែវាជាមហាកិត្តិយសដ៏ធំសម្បើមណាស់ ចំពោះសិស្សថ្នាក់ទី៤ទំនើបជាតិណាដែលប្រឡងជាប់សញ្ញាបត្រប្រកាសនីយប័ត្រនេះ។ គេអនុញ្ញាតឱ្យសិស្សជ័យលាភីផ្លោះរំលងថ្នាក់ទី ៣ (3e M.N) ហើយឱ្យឡើងទៅរៀននៅថ្នាក់ទី ២ (Classe de seconde) តែម្ដង។ម្យ៉ាង ទៀតគេឱ្យតម្លៃសញ្ញាបត្រប្រកាសនីយបត្រជាន់ដំបូងនេះស្មើនិងមធ្យមសិក្សាប័ត្របឋមភូមិ (diplome d'études secondaires du 1er cycle) ឬស្មើនឹង ប្រកាសនីយបត្រមធ្យមសិក្សាបឋមភូមិ (Brevet d'études secondaires du 1er cycle)។ សិស្សប្រភេទនេះ ទោះបីផ្លោះរំលងថ្នាក់ទី ៣ ទំនើបជាតិ ហើយទៅចូលរៀននៅថ្នាក់ទី ២ ទំនើបជាតិ ក៏រៀនមិនចាញ់គេដែរ ព្រោះជាសិស្សឆ្នើម ជាសិស្សលេចធ្លោក្នុងថ្នាក់ទី ៤ ទំនើបជាតិ មានឧបមាដូចជាស្រូវមួយគុម្ព ដែលទុំក្នុងពេលដែល គុម្ពដ៏ទៃទៀតកំពុងតែដាក់គ្រាប់ នៅមានពណ៌បៃតងនៅឡើយ។ ក្នុងករណីទូទៅ ទាល់តែសិស្សបានសិក្សាដល់ថ្នាក់៣ទំនើបជាតិ ទើបអាចប្រឡងយកសញ្ញាបត្រមធ្យម

សិក្សាបឋមភូមិ ឬប្រកាសនីយបត្រមធ្យម សិក្សាបឋមភូមិ។ សញ្ញាបត្រទាំងពីរនេះ មានតម្លៃប៉ុនគ្នា។ ដោយឡែក សិស្សដែលពូកែ ខាងភាសាបារាំងច្រើនតែមានវាសនាប្រឡងជាប់ប្រកាសនីយបត្រនេះ ដោយនៅក្នុងការប្រឡងសញ្ញាបត្រនេះ គេបានបញ្ចូលតែងសេចក្តីបារាំង សរសេរតាមសូត្របារាំង សិក្សាអត្ថបទបារាំង។ល។ ខុសប្លែកពីសញ្ញាបត្រ (ឌីប្លូម) មធ្យមសិក្សាបឋមភូមិ ត្រង់មានវិញ្ញាសាជាភាសាបារាំងច្រើនជាង។ ជាកុសលល្អ សម័យប្រឡងយកសញ្ញាបត្រទាំងពីរនេះមានកាលបរិច្ឆេទមុនក្រោយគ្នា មិនមែនធ្វើក្នុងពេលជាមួយគ្នាឡើយ។ ដូច្នេះ សិស្សដែលប្រឡងធ្លាក់ មធ្យមសិក្សាបត្របឋមភូមិ អាចនៅមានសង្ឃឹមពេលប្រឡងប្រកាសនីយបត្រ។ ម្យ៉ាងទៀតសិស្សថ្នាក់ទី ៣ ទំនើប អាចមានការអនុគ្រោះមួយជាពិសេសទៀត គឺសិស្សដែលប្រឡងធ្លាក់ ប៉ុន្តែមានពិន្ទុច្រើនជាងគេ ក្នុងចំណោមអ្នកធ្លាក់ នឹងត្រូវមានសិទ្ធិប្រឡងលើកទីពីរទៀត (2e session) ដែលគេ សង្ឃឹមថានឹងមានវាសនាអាចប្រឡងជាប់នៅលើកក្រោយនេះ។ សិស្សដែល ប្រឡងជាប់សញ្ញាបត្រទាំងពីរប្រភេទដូចខាងលើ អាចបានឡើងថ្នាក់ទី២ (Classe de seconde) ដោយស្វ័យ-ប្រវត្តិ។ ដោយឡែក សិស្សដែលប្រឡងធ្លាក់ ត្រូវរៀនត្រួតថ្នាក់ដើម្បីរង់ចាំប្រឡងនៅឆ្នាំក្រោយទៀត។ ជួនកាល សិស្សដែលប្រឡងជាប់សញ្ញាបត្រទាំងពីរប្រភេទនេះ ពុំបានបន្តការសិក្សាទៅថ្នាក់លើទៀតទេ គេបែរជាស្ម័គ្រចិត្ត ចូលរៀននៅមជ្ឈមណ្ឌលបណ្តុះបណ្តាលវិជ្ជាជីវៈ (Centre de Formation professionnelle) ទាំងអ្នកដែលប្រឡងធ្លាក់ខ្លះ ក៏គេមិនព្រមរៀនត្រួតថ្នាក់ ហើយក៏សម្រេចចិត្តចូលរៀនក្នុងមជ្ឈមណ្ឌលបណ្តុះបណ្តាលនេះផងដែរ។ តែ

ទោះបីសិស្សទាំងពីរប្រភេទសិក្សាអំពីគរុកោសល្យ ចិត្តសាស្ត្រ វិធីសាស្ត្រនៅក្នុងមជ្ឈមណ្ឌលបណ្ដុះបណ្ដាលជាមួយគ្នាក្ដី ក៏គេបែងចែកឋានៈខុសគ្នាក្នុងក្របខ័ណ្ឌគ្រូបង្រៀន។ អ្នកមានសញ្ញាបត្រណាមួយ នៃបណ្ដាលសញ្ញាបត្រទាំងពីរខាងលើ ត្រូវបានទទួលឋានៈជាគ្រូបង្រៀនថ្នាក់បំពេញវិជ្ជា (Instituteur du degré complémentaire)។ ចំពោះគ្រូដែលពុំមានសញ្ញាបត្រនេះវិញនោះបានទទួលឋានៈត្រឹមគ្រូជំនួយកម្រិតទីមួយ (Instituteur auxiliaire du 1er degré)។ ចំណែកប្រាក់បៀវត្សក៏ខុសគ្នា(លើសខ្វះគ្នា) ទៅតាមនោះដែរ។ រីឯសិស្សដែលសម្រេចចិត្តបន្តការសិក្សាទៅមុខទៀត កាលណោះរៀនចប់ថ្នាក់ទី២ហើយៗ បើពិន្ទុសរុបប្រចាំឆ្នាំបានមធ្យមភាគ នោះនឹងបានឡើងនៅថ្នាក់ទី ១ (Classe de 1ère)។ សិស្សថ្នាក់នេះ ត្រូវប្រឡងសញ្ញាបត្រមធ្យមសិក្សាបត្រភាគទី១ (Bac I ou Baccalauréat 1ère partie)។ អ្នកដែលប្រឡងធ្លាក់ត្រូវរៀនត្រួតថ្នាក់(ថ្នាក់ទី ១ ដដែល)។ ចំពោះសិស្សដែលប្រឡងជាប់ត្រូវបានឡើងថ្នាក់ទីបញ្ចប់ (Classe terminale) ដោយស្វ័យប្រវត្តិ។ នៅចុងឆ្នាំសិស្សនៅថ្នាក់នេះ ត្រូវប្រឡងយកសញ្ញាបត្រមធ្យមសិក្សាប័ត្រភាគ II (បាក់ឌុប) (Bac II ou Baccalauréat 2e partie)។ ក្នុងការប្រឡងសញ្ញាបត្រមធ្យមសិក្សាចុងក្រោយនេះ គេបែងចែកជាពីរផ្នែក គឺមធ្យមសិក្សាបត្រភាគទី II របស់ជាតិ (Bac national) និងមធ្យមសិក្សាបត្រភាគទីពីររបស់សហព័ន្ធ (Bac fédéral) ដែលមានបញ្ចូលវិញ្ញាសាជាភាសាបារាំងច្រើនជាងមធ្យមសិក្សាបត្រភាគទីIIរបស់ជាតិ ពិសេសមានបញ្ចូលទស្សនៈវិជ្ជាបារាំង ក្រោមរូបភាពជាការរើកញែក ឬធ្វើបរមាធិប្បាយ ប្រធានបទអំពីទស្សនវិជ្ជាជាភាសា

បារាំង។ បើសិស្សណាចង់ទៅបន្តសិក្សានៅឧត្តមសិក្សា ទាល់ទៅស្រុកបារាំង[៦៣]។ ការទៅរៀននៅបរទេសនេះ ចែកចេញជាពីរប្រភេទ។ ប្រភេទទី ១ គឺសិស្សពូកែ ឆ្នើម ក្រសួងសិក្សាធិការផ្តល់អាហារូបករណ៍ ឱ្យទៅរៀនដោយឪពុកម្តាយ ឬអាណាព្យាបាល ពុំបាច់ចេញសាហ៊ុយឡើយ។ សិស្សមួយប្រភេទទៀត ជាសិស្សប្រឡងជាប់មធ្យមសិក្សាបត្រភាគទីII ក្នុងករណីធម្មតា ប៉ុន្តែដោយឪពុកម្តាយ គេជាអ្នកមាន គេក៏បានបញ្ជូនកូនឱ្យទៅរៀននៅស្រុកបារាំង ដោយធានារ៉ាប់រង ការចំណាយផ្សេងៗរហូតដល់បានបញ្ចប់ការសិក្សាជាស្ថាពរ។ ពេលត្រឡប់មកវិញ និស្សិតបរទេសទាំងអស់នេះ ច្រើនបានទទួលនាទីធំៗក្នុងរដ្ឋាភិបាល ដូចជា រដ្ឋមន្ត្រី តំណាងរាស្ត្រ ឬសាស្ត្រាចារ្យនៅមហាវិទ្យាល័យ ។ល។ ជាបន្តទៅ ទៀតនេះ ខ្ញុំសូមអធ្យាស្រ័យពីសំណាក់អស់លោកអ្នកអានដែលមានអាយុលើសពី ៦០ ឆ្នាំឡើងទៅ ហើយដែលធ្លាប់បានដឹងអំពីរបៀបរបបជីវិតសិស្ស មធ្យមសិក្សាពីជំនាន់អាណានិគមបារាំង រហូតមកទល់ឆ្នាំ ១៩៥២-១៩៥៣ គឺសម័យទាមទារឯករាជ្យ ដែលកាលណោះ សិស្សនិស្សិត តែងបានឆ្លងកាត់ព្រឹត្តិការណ៍នយោបាយសំខាន់ៗ ក្នុងដំណាក់កាលប្រវត្តិសាស្ត្រ។ ចំពោះអស់លោកអ្នកអានដែលមានវ័យក្រោម ៥០ ឆ្នាំ ខ្ញុំសង្ឃឹមថាអស់លោកមុខជាចាប់អារម្មណ៍ ហើយចង់តាមដាន ស្វែងយល់អំពី

---

(៦៣) ដោយឯកសារនេះមានច្រើនទំព័រពេកណាស់ទៅហើយ ខ្ញុំពុំបានសរសេរអំពីជីវិតនិស្សិតថ្នាក់ឧត្តមសិក្សានៅស្រុកបារាំងឡើយ ខ្ញុំសង្ឃឹមថា បងៗមួយចំនួនតូចដែលនៅមានជីវិត ហើយដែលបានឆ្លងកាត់ជីវិតឧត្តមសិក្សានៅស្រុកបារាំង នឹងសរសេរអំពីប្រវត្តិនេះ ហើយផ្ញើមកពុទ្ធសាសនបណ្ឌិត្យយើងជាមិនខាន។

ជីវភាពសិស្ស និស្សិតក្នុងជំនាន់នោះ តើគេបានពាក់ព័ន្ធទៅនឹងកិច្ចការនយោបាយស្រុកទេសយ៉ាងណាខ្លះ។

ដោយសង្ឃឹមញញឹមទុកថា អស់លោកអ្នកអាន មុខជាអនុញ្ញាតនោះ ខ្ញុំសូមលើកពីជីវភាព សិស្ស និស្សិត និងប្រវត្តិសាស្ត្រសង្ខេបស្តីអំពីព្រឹត្តិការណ៍ និងកូដកម្មរបស់សិស្សនិស្សិត ដែលបានធ្លាប់ចូលប្រឡូកម្តងម្មួយកាលក្នុងឆាកនយោបាយ(៦៤)។

មិនមែននៅតែប្រទេសគេទេ ទោះបីនៅស្រុកយើង ក៏សិស្សនិស្សិតតែងតែបានចូលប្រឡូកក្នុងឆាកនយោបាយម្តងៗដែរ។ យើងចង់ចោទសួរថា តើសិស្សរត់ខ្វែងដៃខ្វែងជើង ចង់ធ្វើនយោបាយ ឬក៏នយោបាយរត់រកសិស្ស ?។ អំពីបញ្ហានេះ អស់លោកជាច្រើនដែលធ្លាប់បានសិក្សានៅអនុវិទ្យាល័យ វិទ្យាល័យ មហាវិទ្យាល័យ ឬសកលវិទ្យាល័យ តែងតែបានជួបប្រទះ ស្ទើរគ្រប់ៗគ្នាទៅហើយ។ ពេលណាក៏ដោយ ក៏គេតែងចាត់ចែងសិស្ស និស្សិតថាជាពូជពន្លកត្រួយនៃបញ្ញវ័ន្ត ឬជាមជ្ឈដ្ឋានអ្នកមានវិចារណញ្ញាណផងដែរ។ អ្នកនយោបាយធំៗ កាលបើគេមានគម្រោង ឬបំណងចង់សម្រេចទិសដៅខាងនយោបាយរបស់គេយ៉ាងណាមួយ គេតែងតែទៅអែបឬទៅខ្ចីកម្លាំងសិស្សនិស្សិត ដើម្បីអនុវត្តន៍គម្រោង ឬទិសដៅរបស់គេ។ និយាយដោយពិតត្រង់ សិស្សជាកម្លាំងមួយធំព្រោះគេមានគ្នាច្រើន រាប់ពាន់រាប់ម៉ឺននាក់។ កាលណាសិស្សសម្តែងនូវឆន្ទៈអ្វីមួយតាមរយៈ បាតុកម្ម កូដកម្ម មិទ្ទិញនោះសាធារណជន ជាតិ និងអន្តរជាតិច្បាស់ជាចាប់អារម្មណ៍ខ្លាំងជាមិនខាន។ ការទាមទារឯណាមួយរបស់និស្សិត

(៦៤) អនុស្សាវរីយ៍កាលខ្ញុំនៅសិក្សាគរុវិជ្ជា (Ecole normale) (ពីឆ្នាំ១៩៥០-១៩៥៤)។

ក្នុងពេលធ្វើបាតុកម្ម ច្រើនបានសម្រេចដូចបំណង។ ការធ្វើបាតុកម្មរបស់សិស្ស ដែលជាសកម្មភាពបម្រើអត្ថន័យនយោបាយនោះ វាពិតជាមានវីរៈជនណាមួយ ឈរនៅពីក្រោយខ្នងជាដរាប។ អ្នកដែលចំណេញ គឺមិនមែននិស្សិតទេ។ ប៉ុន្តែ គឺសិស្សនិស្សិតទេ ដែលជាអ្នកទទួលផលវិបាកពីការធ្វើបាតុកម្មទាមទារអ្វីមួយ នោះ។ តាមបទពិសោធន៍កន្លងមក កាលមុនសម័យទាមទារឯករាជ្យ សិស្ស និស្សិតមួយចំនួនត្រូវជាប់គុកទាំងមិនដឹងថាខ្លួនធ្វើអ្វីខុសផង។ ខ្ញុំសូមអនុញ្ញាត រំលឹកឡើងវិញខ្លះ អំពីប្រវត្តិនៃការធ្វើបាតុកម្មរបស់សិស្សវិទ្យាល័យស៊ីសុវត្ថិ អនុវិទ្យាល័យនារី អនុវិទ្យាល័យបច្ចេកទេស ឬសាលាដែក និងសាលាគរុវិជ្ជា កាលពីឆ្នាំ ១៩៤៩ មកឆ្នាំ ១៩៥៣។ ប្រហែលជានៅឆ្នាំ ១៩៤៨ ឬ ១៩៤៩ កាលណោះនាយករដ្ឋមន្ត្រីគឺឯកឧត្តម **យ៉ែម សំបូរ** និងលោករដ្ឋមន្ត្រី ក្រសួង សិក្សាធិការគឺឯកឧត្តម **មាស សាឯម**[៦៥]។ សិស្សសាលាមធ្យមសិក្សាទូទាំង រាជធានីភ្នំពេញ បានធ្វើកូដកម្មយ៉ាងគគ្រឹកគគ្រេង ដែលរហូតមកដល់ពេលនេះ អ្នកផងពុំដឹងច្បាស់ថាធ្វើដើម្បីអ្វីផងទេ។ ដើម្បីកុំឱ្យសិស្ស មានឱកាសជួបជុំគ្នា ប្រមូលផ្តុំកម្លាំងធ្វើកូដកម្ម លោកនាយករដ្ឋមន្ត្រី យ៉ែម សំបូរ និងលោករដ្ឋមន្ត្រី សិក្សាធិការក៏សម្រេចចិត្តបិទសាលាមួយរយៈសិន ទម្រាំមានសន្តិសុខស្រួល បួល និងបើកសាលាមធ្យមសិក្សាទាំងនេះឱ្យដំណើរការឡើងវិញ។ ប៉ុន្តែការធ្វើ ដូច្នេះ វាជាទំនាស់ចំពោះបំណងប្រាថ្នារបស់សិស្ស។ ពេលនោះមានពាក្យស្លោក ដ៏ល្បីល្បាញ និងជាប្រវត្តិសាស្ត្រដែលលើកឡើងដោយសិស្ស តាមរបៀបជា

---

(៦៥) មានរដ្ឋមន្ត្រីម្នាក់ទៀតជាប់ឈ្មោះជាប្រវត្តិសាស្ត្រនេះដែរគឺ ហ៊ុយ ម៉ោង។

ចម្រៀងឆៃយ៉ាំថា : "ហី មាស សាឯម. ហី យ៉ែម សំបូរ បើកកាស៊ីណូ[៦៦] បិទ វិទ្យាល័យ..... ហ៊ុយ ម៉ោង ៧៧៧៧៧៧៧..... ។ល។ និង ។ល។ ឮថា កាលណោះ កូដកម្មរបស់សិស្សមធ្យមសិក្សានៅភ្នំពេញនោះ មានប៉ូលីស និងសិស្សត្រូវរងរបួស ស្រាលឬធ្ងន់ទាំងសងខាង។ ក្រោយមកទៀតក្នុងរវាងពីឆ្នាំ ១៩៥០ មក ១៩៥៣ ក៏មានបាតុកម្ម កូដកម្មជាច្រើនលើកទៀតដែរ ដែលបម្រើមូលហេតុ សិស្សខ្លះ បំរើមូលហេតុប្រទេសជាតិខ្លះ គឺ : ជួនកាល យើងធ្វើបាតុកម្មដោយ បារាំងមិនអនុញ្ញាតិឱ្យសិស្សសាលា គរុវិជ្ជាបន្តការសិក្សាទៅថ្នាក់ទី ២ ថ្នាក់ទី ១ និងថ្នាក់ទីបញ្ចប់ទេ[៦៧] ។ គេអនុញ្ញាតឱ្យរៀនត្រឹមថ្នាក់ទី ៣ ទំនើបជាតិ រួច ត្រូវតែចេញមកបំពេញភារកិច្ចជាគ្រូបង្រៀន។ ក្រោយមកទៀត ទន្ទឹមនឹងការ ទាមទារឯករាជ្យរបស់ព្រះមហាក្សត្រ* សិស្សសាលាមធ្យមសិក្សានៅ ភ្នំពេញ ទាំងអស់ ក៏បានធ្វើកូដកម្មជួយទាមទារឱ្យបារាំងឆាប់ប្រគល់ឯករាជ្យមកកម្ពុជា វិញផងដែរ។ ប្រហែលជានៅរវាងឆ្នាំ ១៩៥២ សិស្សសាលាគរុវិជ្ជា បាន រងគ្រោះថ្នាក់យ៉ាងជូរចត់ពីកូដកម្មរបស់ខ្លួន ដែលរួមចំណែកដល់ការទាមទារ ឯករាជ្យ។ សិស្សទាំងឡាយធ្វើពហិកាមិនព្រមចូលរៀន។ ប៉ុន្តែថ្នាក់លើចេះតែ បង្ខិតបង្ខំឱ្យសិស្សឈប់ធ្វើបាតុកម្ម ហើយឱ្យចូលរៀនតាមធម្មតាវិញ។ ប៉ុន្តែ សិស្សនៅតែចចេសរឹងរូសមិនចូលរៀន ឯក្រសួងអប់រំព្រមទាំងចាងហ្វាងសាលា

---

(៦៦) កាស៊ីណូ (Casino) បនល្បែងស៊ីសងមានទ្រង់ទ្រាយធំ។

(៦៧) កាលណោះសិស្សវិទ្យាល័យស៊ីសុវត្ថិមានសិទ្ធិរៀនទៅដល់ថ្នាក់ទី២ ទី១ និងទីបញ្ចប់។

* ព្រះបាទសម្តេចព្រះនរោត្តម សីហនុ ។

* មិនផ្គត់ផ្គង់បាយទឹកដូចគ្រាមុនៗ។

បាន សម្រេចដាក់ទណ្ឌកម្មដល់សិស្ស* ។ មុនដំបូងសិស្សត្រូវចាត់ចែងកម្លាំងផ្ទៃក្នុង ដើម្បីដាំស្លជូនសិស្សគ្នាឯងបរិភោគជំនួសអ្នកដាំស្ល ដែលគេបានបញ្ឈប់ពីការងារ។ ពេលដែលអង្ករនៅកាន់តែស្ដួចស្ដើង ពួកសិស្សបង្ខំចិត្តត្រូវបបរចែកគ្នាបរិភោគ។ យើងគ្មានបន្លែ ត្រីសាច់អ្វីបន្តិចសោះ ព្រោះមានកងកម្លាំងប្រដាប់អាវុធ ហ៊ុំព័ទ្ធយាមការពារមិនឱ្យអ្នកក្រៅណាយកស្បៀងមកផ្គត់ផ្គង់ឱ្យសិស្ស ក្នុងគោលបំណងឱ្យសិស្សលុតជង្គង់ចុះញ៉ម ក្រោយពីខ្លួនអត់អាហារជាច្រើនថ្ងៃ។ ពេលនោះការហូបចុករបស់សិស្សសាលាគរុវិជ្ជា មានការយ៉ាប់យ៉ឺនពន់ពេកណាស់។ យើងនាំគ្នាបរិភោគតែផ្លែល្ហុងជ្រក់ ផ្លែចេកខ្ចីដុតចម្អិននឹងភ្លើង ព្រោះដំណាំទាំងនេះមាននៅក្នុងបរិវេណសាលាគរុវិជ្ជាស្រាប់។ បន្លែដែលសិស្សមានសម្រាប់ស្លចែកគ្នាហូប នឹងបបរ គឺដើមចេកណាំវ៉ា ដែលយើងស្លម្ជូរបង់តែអំបិល និងម្ជូស្លឹកអំពិលប៉ុណ្ណោះ* ។ គេដឹងថា ឪពុកម្ដាយដែលមានកូនចៅនៅក្នុងសាលានេះ ចំបែងចិត្តព្រោះអាណិតកូន ដែលត្រូវគេបង្អត់អាហារ។ ប៉ុន្តែប៉ុន្មានថ្ងៃក្រោយមក ក៏មានកលល្បិចពិសេសៗដើម្បីជួយសង្គ្រោះអាយុជីវិតសិស្ស។ រាល់យប់តែងមានអ្នកតស៊ូ លីនំប៉័ងច្រកក្នុងបាវ ឆ្លងកាត់ខ្សែការពារកងប្រដាប់អាវុធ ដែលហ៊ុំព័ទ្ធសាលា ការពារមិនឱ្យមានទំនាក់ទំនងពីខាងក្រៅមកក្នុងសាលា។ ប៉ុន្តែអ្នកណាអាចដឹងបានថា ប៉ូលីសឬទាហានដែលយាមកាមការពារសាលានេះ មានប្អូនឬមានក្មួយជាប់ឃុំឃាំង ហើយទទួលទារុណកម្មយ៉ាងខ្លោចផ្សានៅក្នុងសាលាគរុវិជ្ជា? គឺប្រហែលដូច្នេះហើយ បានជាមាននំប៉័ងទាំងបាវៗ សាច់ក្រក ត្រីខកំប៉ុង ចេះតែហូរចូលមកក្នុងបរិវេណសាលាជារៀង

---

* មិនផ្គត់ផ្គង់អាហារដល់សិស្សដូចគ្រាមុនៗ

រាល់យប់ ទោះបីមិនមានបរិមាណច្រើនប៉ុន្មាន ក៏យ៉ាងហោចណាស់អាចទប់ទល់បាននឹងការអត់ឃ្លានមិនឱ្យដាច់ពោះស្លាប់ដែរ ។ ពេលនោះ សិស្សបានបង្កើតគណកម្មការឃោសនា គណកម្មការបោះពុម្ពផ្សាយ និងក្រុមនិពន្ធឯកសារខិតបណ្ណ័ដើម្បីបានផ្សព្វផ្សាយទៅគ្រប់ទិសទីក្នុងរាជធានីភ្នំពេញ ។ កាលណោះយើងពុំទាន់មានក្រដាសកាបោន ពុំទាន់មានរ៉ូណេអូ ពុំទាន់មានអង្គុលីលេខសម្រាប់បោះពុម្ពឯកសារឡើយ ។ ដើម្បីបោះពុម្ព សិស្សប្រើចាហួយរំងាស់ហើយចាក់ឱ្យកកទៅលើថាសរាប់សិប ។ អ្នកដែលសរសេរអក្សរខ្មែរបានល្អ ត្រូវគេចាត់តាំងឱ្យសរសេរនៅលើក្រដាសច្បាប់ដើម ដោយទឹកខ្មៅពិសេសម្យ៉ាងពណ៌ស្វាយខាប់ ។ គេយកឯកសាដើមដែលទើបសរសេរហើយថ្មីៗ ទៅផ្កាប់ហើយក្បៀតឱ្យស្មើសាច់នៅលើថាសចាហួយ ។ ប្រមាណជាពីរ ឬបីនាទីគេបកក្រដាសនោះចេញពីថាសចាហួយ ។ គេឃើញអក្សរជិតច្បាស់ក្រឡែត នៅលើចាហួយនោះ ប៉ុន្តែតួអក្សរជិត បញ្ច្រាស ។ គេយកក្រដាសស្អាត ទៅផ្ទិតលើពុម្ពចាហួយ រួចហើយយកទៅហាលថ្ងៃឱ្យស្ងួត ។ សិស្សជាច្រើនណាស់ដែលត្រូវបានគេចាត់ចែងឱ្យធ្វើការងារនេះ[៦៨] ។ ដូច្នេះក្នុងមួយថ្ងៃៗ គេផលិតឯកសាររបៀបនេះ បានច្រើនរយពាន់សន្លឹក ។ កាលណាពុម្ពអក្សរជិតលែងច្បាស់ហើយ គេសរសេរអត្ថបទពុម្ពសារជាថ្មីទៀត ហើយផ្ទិតទៅលើថាសចាហួយទំនេរជាបន្តទៀត ។ ចំពោះចាហួយនៃថាសណាដែលបានផ្ទិតរួចហើយ ប៉ុន្តែផ្ទិតអក្សរលែងឃើញច្បាស់ នោះត្រូវគេយកទៅរំងាស់រំលាយចាក់លើ

---

(៦៨) រូបខ្ញុំជាអ្នកសរសេរអត្ថបទនេះក៏បានចូលរួមសរសេរខិតបណ្ណ័ដែរ ដោយខ្ញុំសរសេរអក្សរល្អ ❋ កាលណោះ ខ្ញុំជាសិស្សថ្នាក់ទី៥ទំនើបជាតិ (គឺមធ្យមសិក្សាឆ្នាំទី ២) មិនខុសគ្នាពីជំនាន់ប៉ុលពតឡើយ ។

ថាសសារថ្មីទៀត។ សូមជម្រាបថាការចាត់ចែងបោះពុម្ពតាមរបៀបបុរាណនេះ យឺតណាស់ ពុំទទួលបានលទ្ធផលឆាប់រហ័សទាន់ចិត្តឡើយ។ ក៏ប៉ុន្តែ នេះវាជាបច្ចេកទេសប្រចាំយុគសម័យទៅហើយ។ គេពុំមានផ្លូវណាជ្រើសរើសក្រៅពីនេះទៀតឡើយ។ បើអស់លោកអ្នកអាន ពិសេស អ្នកអានដែលមានវ័យក្រោម ៥០ ឆ្នាំ នោះកាន់តែចង់អស់សំណើចមែនទែនថែមទៀត នៅពេលដែលបានដឹងអំពីរបៀបផ្សព្វផ្សាយខិតប័ណ្ណនាសម័យ ១៩៥១-១៩៥២។ កាលណោះ ឯកសារឬបើនិយាយឱ្យចំន័យ ខិតបណ្ណ័ដែលបានបោះពុម្ពតាមរបៀបខាងលើនេះ មានចំនួនច្រើនគ្រប់គ្រាន់ តាមសេចក្ដីត្រូវការ ហើយគេចាត់គ្នាចងជាដុំៗ ក្នុងមួយដុំៗពី ៥០ ទៅ ១០០ សន្លឹកត្រៀមទុកសម្រាប់បោះបាចផ្សាយ តាមមធ្យោបាយមួយដ៏ចម្លែកអស្ចារ្យ។ គប្បីជម្រាបបញ្ជាក់ឡើងវិញផងដែរថា ពួកសិស្សនិស្សិតដែលត្រូវទទួលទណ្ឌកម្មបង្ខាំងទុកយ៉ាងតឹងរ៉ឹងនៅក្នុងបរិវេណសាលានោះ ពុំមានមធ្យោបាយណាចេញមកក្រៅ (សូម្បីពេលយប់ស្ងាត់សូន្យក៏ដោយ) ដើម្បីទាក់ទងពិភពខាងក្រៅឡើយ ព្រោះកងប្រដាប់អាវុធ ប៉ូលីស ទាហាន ពទ្ធ័ជាប់ យាមការពារមិនឱ្យអ្នកក្រៅមកទាក់ទងនឹងសិស្សជាប់ឃុំ ក៏ដូចការពារមិនឱ្យសិស្សជាប់ឃុំ ចេញទាក់ទងជាមួយអ្នកក្រៅដែរ។ ដូច្នេះពួកសិស្ស ដែលមានខួរក្បាលជាយុវជន ចេះច្នៃប្រឌិត ពុំបានទុញទាល់គំនិតឡើយ។ គេគិតឃើញថា បើការផ្សព្វផ្សាយ តាមផ្លូវដីពុំអាចធ្វើបាន មានតែផ្សព្វផ្សាយតាមផ្លូវអាកាស។ តើយើងបានយន្តហោះពីណា? តើបោះបាចខិតបណ្ណ័តាមផ្លូវអាកាសរបៀបណា ? រៀងរាល់យប់ និងរាល់ថ្ងៃសិស្សរៀមច្បងថ្នាក់ធំៗមានការរវល់ជាមមាញឹកណាស់។ អង្គប្រជុំ បានបើក

ឡើងដើម្បីពិភាក្សាប្តូរយោបល់សម្រាប់រកវិធីដោះស្រាយរាល់បញ្ហាចោទ និង អនុវត្តទិសដៅរបស់សាលាឱ្យខាងតែបាន។ ជូនកាលបង១ជាសិស្ស មាន កិច្ចការរវល់ស្ទើរគ្មានពេលដេក និងបរិភោគអាហារផង។ ពេលមួយ ពួក យើងរាល់គ្នា ត្រូវគណៈកម្មការកណ្តាល ចាត់ឱ្យធ្វើខ្លែង(៦៩) មួយយ៉ាងធំ។ គេបានត្រៀមខ្សែ សមនឹងមាឌខ្លែង ដែលមានប្រវែងរាប់រយម៉ែត្រ។ ការធ្វើ ខ្លែងបានចប់សព្វគ្រប់ហើយ ពួកសិស្សបាតុករ បានត្រៀមលក្ខណៈនឹង បង្ហោះ សាកល្បងសិន។ ការបង្ហោះសាកល្បងបានសម្រេចជោគជ័យល្អណាស់។ ឥឡូវ យើងយកខិតប័ណ្ណមកចងផ្នែកខាងក្រោមនៃតួខ្លែង(៧០) ក្នុងខិតប័ណ្ណមួយដុំ១ យើងចងធូបផ្ទោបគ្នាពីរ ឬបីសរសៃ ដោយខ្លែងពួកយើងមានទំហំធំ ដូច្នេះ យើងចងខិតប័ណ្ណបានច្រើនណាស់ នៅពេលបង្ហោះមួយលើក១។ គាប់ជួន ពេល នោះត្រូវចំខែមិគសិរ (ខែមករា ១៩៥២) ខ្យល់ជំនោរហោមន្តរដូវបក់រអឹកមិន ដាច់រយៈ មកពីទិសខាងជើង បង្កលក្ខណៈងាយស្រួលបំផុតសម្រាប់ការបង្ហោះ ខ្លែង។ ពួកសិស្សមានភារកិច្ចត្រូវបង្ហោះខ្លែងទាំងយប់ទាំងថ្ងៃ ដើម្បីផ្សព្វផ្សាយ ខ្លឹមសារ ខិតប័ណ្ណ ដែលយើងបានបោះពុម្ពទុកយ៉ាងសន្ធឹកសន្ធាប់។ សូម្បីតែ សិស្សគ្នាឯងក៏ឆ្ងល់ដែរថា យើងដាច់ការទាក់ទងពិភពខាងក្រៅទាំងស្រុង ចុះតើ យើងបានសម្ភារៈ (ក្រដាស ទឹកខ្មៅ ចាហួយ លុយកាក់) ពីណាមកសម្រាប់ ចាត់ចែងភារកិច្ចទាំងអស់នេះ? នេះជារឿងបិទមុខ។ ប៉ុន្តែ សូមរំលឹកថា

---

(៦៩) ខ្លែងព្នងទំហំទទឹងស្លាបប្រវែង ២,៥០ម. ហើយមានឯកមួយយ៉ាងធំ វែង ដែលមាន សម្លេងពិរោះ និងលាន់ឮពាសពេញរាជធានីភ្នំពេញ។

(៧០) របហូតដល់ចុងកន្ទុយខ្លែងក៏មានខិតប័ណ្ណ (tract) ដែរ។

កាលណោះលោកតា ប.ឈ លោកតា ស.ង.ថ[៧១] និងអស់លោកវរជននៅរដ្ឋសភាមួយចំនួនធំ ក៏គាំទ្រពួកសិស្សនិសិត្សដែរ។ ដូច្នេះហើយ គួរគប្បីយល់ថា **"ជួនកាលត្រីងៀត ក៏អាចមានពង ហើយមាន់ស្ងោក៏អាចទទះស្លាបរងាវក្នុងចានបានដែរ"**។ ការបាចបោះ ទម្លាក់ខិតប័ណ្ណពីលើខ្លែងមកដី គឺងាយស្រួលយល់ ដូចគេបកចេកស៊ីអញ្ចឹង។ ពេលគេបង្ហោះខ្លែងគេបានដុតធូបដែលចងភ្ជាប់ទៅនឹងរមូខិតប័ណ្ណ។ លុះធូបឆេះមកដល់ខ្សែចំណង វាក៏ដាច់ហើយធ្វើឱ្យខិតប័ណ្ណជ្រុះព្រោងព្រាត រពោងរពាយពីលើមេឃ ហើររសាត់តាមខ្យល់ធ្លាក់មកពាសពេញរាជធានី ប៉ែកខាងត្បូងសាលានីមួយៗ (សាលាដែកឬសាលាបច្ចេកទេស វិទ្យាល័យស៊ីសុវត្ថិ សាលាគរុវិទ្យា) ព្រោះអីខ្យល់បោកបក់ពីជើងទៅត្បូង ដូច្នេះខិតប័ណ្ណតែងតែហោះហើររសាត់ទៅទិសខាងត្បូង ជាលំដាប់លំដោយ រហូតដល់ក្រុងតាខ្មៅ ទីរួមខេត្តកណ្តាលសព្វថ្ងៃ ឬហួសក្រុងនេះខ្លះផង។ ដូច្នេះពតិមានដែលពួកសិស្ស និស្សិតចង់ផ្សព្វផ្សាយ សឹងបានជ្រួតជ្រាបទៅដល់ប្រជាពលរដ្ឋ ស្ទើរតែ ១០០%។ អ្វីដែលសិស្សនិស្សិតចង់ឱ្យគេដឹងគឺសុទ្ធតែបានសម្រេច។ ដូច្នេះយើងគួរគប្បីយល់ថា ពូជខ្មែរយើងចេះឆ្លាតតាំងពីធនញ្ជ័យ ដែលស្តេចក្រុងចិនចាប់យកទៅដាក់គុកសិរិទ្ធ ក៏នៅតែមានមធ្យោបាយបង្ហើរខ្លែងបន្លាចស្តេចក្រុងចិន រហូតទាល់តែបានទទួលសេរីភាពវិញ។ យ៉ាងណាមិញ កម្លាំងទប់ស្កាត់របស់អាជ្ញាធរមិនចេះតែទទួលបានប្រសិទ្ធិភាពទាំងអស់នោះទេ ដរាបណា អនុភាពមួយរួបរួមគ្នាបំពេញមូលហេតុជាតិដ៏ថ្លៃថ្លា

(៧១) លោក ប៉ាច ឈឺន . សឹង ង៉ុកថាន់។

បំផុតនោះ[៧២] ។ ដូចពាក្យបុរាណាចារ្យធ្លាប់បានពោលថា **"គេអាចដាក់គុករូបមនុស្សបាន តែគេពុំអាចចាប់ ឧត្តមគតិដាក់គុកបានឡើយ"** ។

ដោយឃើញថា គ្រប់មធ្យោបាយធំៗ ដែលរាជការអាណានិគមពេលនោះ ប្រើដើម្បីបង្ក្រាបសិស្សនិស្សិត ឱ្យលុតជង្គង់ចុះញ៉មនេះពុំបានសម្រេច ពួកគេក៏ប្រើមធ្យោបាយប្លែកៗជាបន្តបន្ទាប់ទៀត ។ គឺគេចង់បំបែកពង្រាយកម្លាំងសិស្សនិស្សិត ។ បើសិស្សនិស្សិតនៅផ្តុំគ្នាក្នុងសាលាយ៉ាងនេះ គេនឹងបានបង្កើតជាកម្លាំងមួយយ៉ាងធំ ហើយទោះបីគេគិតការធ្វើអ្វីៗ ក៏តែងតែបានជោគជ័យទាំងអស់ ។ ដូច្នេះ គំនិតមួយត្រូវបានយកមកអនុវត្ត ។ គេបង្ខំយកឪពុក ឬម្តាយសិស្ស ឱ្យមកស្រែកហៅចំៗឈ្មោះកូនតាមមីក្រូ (ឧគ្ឃោសនស័ព្ទ) ពីខាងក្រៅសាលា ដាក់មុខមករកសាលា ។ ជួនកាល គេបង្ខំឱ្យស្រែកថា : ឱ សូហាន់ ហាយ កូនម្តាយ កូនឆាប់ចេញពីសាលាភ្លាមៗមក បើមិនដូច្នេះទេ គេនឹងចាប់ឪពុកម្តាយដាក់គុកហើយ!។ សាមីសិស្ស កាលបើបានឮឪពុក ឬម្តាយដង្ហោយក្តែងៗ ហៅកូនដោយសំឡេងអាណោចអធ័ម ជួនកាលឮសំឡេងយំក្នុងមីក្រូផងនោះ ម្នាក់ៗចង់ស្ទុះចេញពីអាគារស្នាក់នៅ របស់សាលា ទៅជួបមុខឪពុកម្តាយ ដើម្បីរំដោះអ្នកមានគុណពីគុកខ្មោះឃ្នាង ។ តែពេលនោះគណៈកម្មការកណ្តាលក៏ឈ្លាសវៃមិនតិចប៉ុន្មានដែរ ។ ខ្លះកាន់ដំបង ខ្លះកាន់កាំបិតកែ ឬកាំបិទស្នៀត គំរាមកំហែង មិនឱ្យសាមីខ្លួនដែលឮឈ្មោះគេហៅនោះ ចេញក្រៅបរិវេណសាលាបានឡើយ ។ ជាធម្មតាទេ ការបម្រើមូលហេតុ

---

(៧២) នោះគឺការរើបម្រះធ្វើឱ្យរបបអាណានិគមនិយមបារាំង រង្គោះរង្គើជាលើកដំបូងដោយសារកម្លាំងពួកស្រមោចសង្ការ (សិស្សនិស្សិត) ។

ឯណានីមួយៗ ទាល់តែដាច់ខាតយ៉ាងនេះ ទើបសម្រេចបានជោគជ័យ។ គេចំណាយពេលពីរថ្ងៃ សម្រាប់ហៅកូនតាមរបៀបនេះឱ្យចេញពីសាលា។ វិធានការនេះត្រូវបរាជ័យយ៉ាងជូរចត់។ ប៉ុន្មានថ្ងៃក្រោយមកទៀត អាជ្ញាធរ រាជការបារាំង បានដូរវិធានការថ្មី។ គេយកឡានទឹកយ៉ាងច្រើន បូមទឹកសម្អុយនៅវត្តបទុម យកមកត្រៀមព័ទ្ធជុំវិញសាលា (សាលាគរុវិជ្ជា)។ បន្ថែមពីលើនេះទៀត គេបានកែនកម្លាំងជនជាប់ទោសរាប់រយនាក់ និងកងកម្លាំងប្រដាប់អាវុធលុកលុយសំរុកចូលក្នុងបរិវេណសាលា។ មុនដំបូងគេបាញ់ទឹកសម្អុយចូលក្នុងអាគារស្នាក់នៅ ក្នុងគោលបំណងបង្ខំឱ្យសិស្សបើកទ្វារចេញមកក្រៅដោយសារទ្រាំនឹងក្លិនស្អុយមិនបាន និងដោយសារទឹកចូលពាសពេញអាគារ។ ពេលនោះសតិអារម្មណ៍របស់សិស្ស[៧៣] បានធ្លាក់ចុះយ៉ាងខ្លាំង ព្រោះពុំមានពេលសម្រាកទាំងយប់ទាំងថ្ងៃ ដោយត្រូវជួយធ្វើការគ្រប់មុខសញ្ញា។ ពិសេសជាងនេះទៀតរបបអាហារហូបចុកក៏ចេះតែហោចទៅៗ ស្ទើរតែដាច់ពេលម្តងៗទៅហើយព្រោះពុំអាចមានការផ្តល់មកពីក្រៅ ឱ្យបានគ្រប់គ្រាន់តាមតម្រូវការហូបចុកឡើយ។ ម្នាក់ៗធ្លាក់ខ្លួនស្គមស្គាំង ស្លេកស្លាំង ដើរទប់ខ្លួនមិនចង់នឹង។ ការបាញ់ទឹកសន្ទាប់ចូលអាគារ នៅតែពុំបានសម្រេចជោគជ័យ។ មានសិស្សតូចៗមួយចំនួន ចង់សំរុកស្ទុះចេញដោយឈ្លក់និងក្លិនទឹកសម្អុយ ប៉ុន្តែសិស្សរៀមច្បងធំៗកាន់កាំបិត និងដំបងគ្រប់ច្រកទ្វារ មិនឱ្យចេញទាល់តែសោះ។ នេះជាពេលដ៏អាសន្នបំផុតសម្រាប់សិស្សកូដករ។ នៅនាទីចុងក្រោយ ម៉ោងប្រមាណជា ១២ ថ្ងៃត្រង់ទៅហើយ លុះឃើញថាគ្រប់មធ្យោបាយ សុទ្ធតែបរាជ័យជាអាសារបង់

---

(៧៣) សិស្សតូចៗ ថ្នាក់ទី៦ និងថ្នាក់ទី៥ ទំនើប។

មេបញ្ជាការ ទទួលបន្ទុកវាយបំបែកកម្លាំងសិស្ស ក៏បានសម្រេចចិត្តប្រើមធ្យោបាយធំ។ គេយកសរសរផ្ទះធំៗ វែងៗ ជាច្រើនដើម បញ្ជាឱ្យពួកអ្នកទោសសែងបន្តគ្នា យកមកបុកទម្លាយទ្វារអាគារ។ មុនដំបូងពួកសិស្សបានយកគ្រែមកដាក់តម្រួតគ្នា រាំងខ្ទប់ទ្វារកុំឱ្យបាក់ ឬរបើកបាន។ ប៉ុន្តែ តើមានអ្វីអាចទប់ទល់បាននិងទម្ងន់សរសរធំៗ ដែលយោលបុកទ្វារ ដោយអ្នកទោសពី ៣០ ទៅ ៥០ នាក់ ព្រមទាំងផ្លាស់គ្នាឥតឈប់ឈរនោះ?។ គេបុកទាល់តែបាក់ទ្វារខ្ទេចខ្ទីរបាក់ទាំងជញ្ជាំងឥដ្ឋ ផ្ទះធ្លាយជាប្រហោងធំៗ រួចហើយទើបកងប៉ូលិសទាហាន វាយលុកចូល វាយបណ្តេញសិស្សនិស្សិត ឱ្យចេញមកក្រៅតាមទ្វារបាក់បែក ឬតាមជញ្ជាំងធ្លុះធ្លាយ។ ពេលនោះគឺជាចលនាបាក់ទ័ពមួយដ៏សុទ្ធ-សាធ លែងមានលទ្ធភាពរារាំងសិស្សតូចៗបានទៀតឡើយ។ សូម្បីខ្លួនគាត់ផ្ទាល់ ក៏គេចយកតែប្រាសអាយុ ដើម្បីចៀសឱ្យផុតពីដំបងនិងចំពុះទុងរបស់ប៉ូលិសទាហានដែរ។ សិស្សដែលចេញផុតពីអាគារ ខ្លះក៏ពកក្បាល ខ្លះក៏រួចខ្លួនអាស្រ័យដោយល្បិចបច្ចេកទេសរៀងៗខ្លួន។ អាជ្ញាធរបានប្រមូលសិស្សដែលចុះចាញ់ ឱ្យឈរតម្រៀបគ្នាជាជួរយ៉ាងមានរបៀបរៀបរយ។ គេហៅឈ្មោះហើយសរសេរធ្វើជាបញ្ជីថ្មីមួយ តាមរបៀបរបស់គាត់។ គេហៅសិស្សម្នាក់ម្តងៗទៅឆែកឆេរហិបវ៉ាលី បើឃើញមានអាវុធសូម្បីកាំបិតកែ កាំបិទស្នៀតឬសំបុត្រទាក់ទងពីខាងក្រៅ ដែលមានន័យជានយោបាយ ក៏ត្រូវចាប់ញាត់ឡាន យកទៅដាក់គុកឆៅៗដែរ។ ស្ថិតក្នុងស្ថានភាពចាញ់ទាំងស្រុង និងស្ថិតក្រោមការឈ្លានពានមកលើសិទ្ធិ យ៉ាងឃោរឃៅដូច្នេះ សិស្សទាំងឡាយខឹងឆាបឆួលផង ភិតភ័យផង ព្រោះខ្លាចកម្លាំងកំរោលផង។ ពេលនោះគួរឱ្យរន្ធត់

តក់ស្លុត និងអាណោចអាធ័មពន់ពេកណាស់។ មិត្តយើងមួយចំនួន (ដែលយើងសូមមិនចេញឈ្មោះដើម្បីកិត្តិយសបុគ្គល) ត្រូវគេចាប់យកទៅដាក់គុកអស់រយៈពេលជាច្រើនខែដោយឥតជំនុំជម្រះ។ បន្ទាប់ពីនេះ គេបង្ខំឱ្យសិស្សដទៃដែលគ្មានសង្ស័យ រៀបចំឥវ៉ាន់ហិប វ៉ាលី ប្រដាប់ប្រដារចេញពីសាលាជាបន្ទាន់។ គេប្រាប់ថាឱ្យសិស្សទៅកាន់ទីលំនៅរៀងខ្លួនៗ រង់ចាំស្ដាប់ដំណឹងពីក្រសួងសិក្សាធិការ ដើម្បីហៅសិស្សនិស្សិតឱ្យចូលរៀនវិញ។ ពេលនោះជារដូវច្រូតកាត់។ សិស្សដែលត្រូវគេបញ្ជាឱ្យសម្រាកវិស្សមកាលទាំងបង្ខំ បានមកជួយច្រូតកាត់ឪពុកម្ដាយនៅស្រែចម្ការ។ ប្រមាណជាពីរសប្ដាហ៍បន្ទាប់មកអាជ្ញាធរស្រុកឃុំ បានឱ្យពត៌មានដល់សិស្សនិស្សិត ឱ្យត្រឡប់ទៅចូលរៀនជាធម្មតាវិញ។ មិនបានប៉ុន្មានថ្ងៃផង ស្រាប់តែព្រឹត្តិការណ៍សោកនាដកម្មមួយកើតឡើង ៖ គឺការដាក់គ្រាប់បែកឱ្យផ្ទុះនៅវិទ្យាល័យស៊ីសុវត្ថិ បណ្ដាលឱ្យសាស្ត្រាចារ្យបារាំងស្លាប់ខ្លះ របួសខ្លះ។ ភាពតានតឹងថ្មីនេះ តម្រូវឱ្យក្រសួងសិក្សាធិការចេញវិធានការថ្មីមួយទៀត គឺឱ្យសិស្សនិស្សិត បំបែកគ្នាទៅកាន់ទីលំនៅរៀងខ្លួនមួយលើកទៀត ដើម្បីចៀសវាងគ្រោះមហន្តរាយ កើតមកពីភេរវកម្មជាយថាហេតុនេះ។ វិស្សមកាលខុសរបៀបយ៉ាងនេះ ពុំបានធ្វើឱ្យសិស្សនិស្សិតទាំងឡាយសប្បាយរីករាយក្នុងចិត្តឡើយ។ ផ្ទុយទៅវិញ គេព្រួយបារម្ភណ៍ពីការសិក្សារបស់គេ ដែលរអាក់រអួល ហើយតាមពុំទាន់កម្មវិធីសិក្សា។ ប៉ុន្តែនេះជាចៃដន្យប្រវត្តិសាស្ត្រ ដែលវាកើតឡើងដោយពុំចំណុះទៅតាមចំណង់របស់អ្នកណាមួយឡើយ។ ទាល់តែសម្រាកបានជាងមួយខែ ទើបសភាពការណ៍បានវិលត្រឡប់ទៅកាន់ភាពប្រក្រតីវិញ។

គិតសព្វៗទៅ ជីវិតសិស្ស ជីវិតយុវជន ដែលភ័ព្វវាសនាតម្រូវឱ្យមករស់ផ្តុំគ្នានៅតាមសាលាមធ្យមសិក្សា គេបានសាងអនុស្សាវរីយ៍ ផ្អែមល្ហែមផងប្រៃល្វីងជូរចត់ជាមួយគ្នាផង។ ព្រឹត្តិការណ៍ទាំងនេះ ហាក់ចងភ្ជាប់មនោសញ្ចេតនាឱ្យក្លាយជាសាមគ្គីភាព មិត្តភាពមួយដ៏ឋិតថេរ និងខ្ជាប់ខ្ជួន ដែលទោះបីពេលនេះ គេក្លាយទៅជាតាចាស់សក់ស្កូវ ក្បាលទំពែកហើយក្តី ក៏គេនៅចងចាំមិនភ្លេច អំពីព្រឹត្តិការណ៍និងចលនានៃជីវិតយុវវ័យរបស់គេ រហូតដល់ដង្ហើមចុងក្រោយ។

# សេចក្ដីបន្ថែម

អត្ថបទដែលអស់លោកទើបបានអានចប់នេះ វាមានលក្ខណៈជាពតិមាននៃព្រឹត្តិការណ៍ប្រវត្តិសាស្ត្រផង ជាអនុស្សាវរីយ៍របស់សិស្សជំនាន់មួយដែលកប់បាត់ទៅក្នុងអតីតកាល អស់ជាងកន្លះសតវត្សទៅហើយផង ។ ឯកសារនេះឆ្លុះបញ្ចាំង ដោយភាគច្រើនអំពីប្រវត្តិនៃប្រព័ន្ធសិក្សាធិការនាចុងទសវត្សទី ៤០ និងពេញមួយទសវត្សទី ៥០ ។ អ្នកនិពន្ធឯកសារនេះ សព្វថ្ងៃ (ខែកញ្ញា ឆ្នាំ២០០៧) មានអាយុ ៧៦ ឆ្នាំហើយ ។ មិត្តរួមថ្នាក់ និងរួមជំនាន់ នៅសល់ប្រមាណតែ ៥ ឬ ៦ នាក់ប៉ុណ្ណោះ ។ ក្រៅពីនេះ ស្លាប់អស់ហើយ... ។ ប្រសិនបើមិត្តដែលនៅរស់ទាំងនោះ មិនទោមនស្សទេ ខ្ញុំសូមរាប់ឈ្មោះដែលមានជាអាទិ៍ : ឯកឧត្តមបណ្ឌិតសាស្ត្រា ចារ្យ **ព្រំ ម៉ល់**(៧៤) លោកព្រឹទ្ធាចារ្យ **ឆេង ផុន** ឯកឧត្តម **ថៅ ប៉េងលាត** លោក វេជ្ជបណ្ឌិត **កែវ សាន** និងរូបខ្ញុំ **មៀច ប៉ុណ្ណ** (ជាអ្នកនិពន្ធ) ។ ចំពោះរៀមច្បង ម្នាក់ដែលសិក្សាមុនជំនាន់យើងខ្ញុំឈ្មោះលោក **រស់ ណុល** នោះ លោកកាន់តែទ្រុឌទ្រោមណាស់ហើយ ។ នៅមានមិត្តមួយចំនួនទៀតដែលនៅស្រុកបារាំង ហើយដែលខ្ញុំនៅចងចាំបានគឺលោក **ស ពៅ, ជា ឈិន, អ៊ីវ ណាំង, ទូច ពុយយ៉ឺ តូ...** និងប្រហែលមានខ្លះទៀត តែខ្ញុំមិនទាន់ដឹងពតិមានច្បាស់ ។ អស់លោកអ្នកអានអាចយកឯកសារនេះទៅសួរអស់លោកទាំងប៉ុន្មាន ដើម្បីជ្រាបថា តើអ្វីដែលខ្ញុំពណ៌នាមកនេះពិត ឬមិនពិត ? ប៉ុន្តែ... ខ្ញុំចាស់ណាស់ហើយ ខ្ញុំផ្តោតអារម្មណ៍ខ្លាំងតែទៅលើព្រះធម៌ ដែលជាឱវាទរបស់ព្រះពុទ្ធជាបរមគ្រូ ខ្ញុំគ្មានពេលទំនេរ ច្រើនសម្រាប់

---

(៧៤) ឯកឧត្តមបណ្ឌិតសាស្ត្រាចារ្យ ឡុង សៀម ទើបនឹងស្លាប់នៅខែសីហា ឆ្នាំ២០០៧ ។

និយាយកុហក់សង្គមលេងជាល្បែងនោះឡើយ។ ខ្ញុំបារម្ភណ៍ក្រែងអ្នកអានខ្លះយល់ថា អត្ថបទនេះចោលម្សៀត អត់ន័យ។ ប៉ុន្តែ ខ្ញុំនៅតែសង្ឃឹមថា អស់លោកភាគច្រើនពិតជាពេញចិត្ត ចាប់អារម្មណ៍ ហើយយល់ថា ប្រវត្តិសិក្សាដែលឋិតនៅជាអាថិកំបាំងអស់រយៈពេលជាង ៥០ ឆ្នាំមកហើយនេះ ពិតជាសំខាន់សម្រាប់អ្នកឆ្ងល់ អ្នកចង់ដឹង ហើយខ្ញុំលួចគិតថា ក្រៅពីខ្ញុំ គ្មានអ្នកឯណា គេចំណាយពេលវេលាសម្រាប់ដើរលេងស៊ីផឹក ទៅសរសេរ សើរើ គាស់កកាយព្រឹត្តិការណ៍អតីតកាលនេះធ្វើអ្វីទេ។ពតិមាននេះ ព្រឹត្តិការណ៍នេះ ត្រង់កន្លែងខ្លះ ខ្ញុំសរសេរលម្អិតពិស្តារណាស់។ ខ្ញុំស្តាយ ដោយភ្លេចសរសេរត្រង់ព្រឹត្តិការណ៍ កូដកម្មមានទ្រង់ទ្រាយធំដែលសិស្សមធ្យមសិក្សាទាំងអស់ នៅក្រុងភ្នំពេញបានចូលរួមយ៉ាងគគ្រឹកគគ្រេង។ កាលណោះ ពួកនិស្សិតយើងចង់ទៅសម្តែងមតិ តវ៉ានៅមុខរដ្ឋសភា (ចាស់)។ នៅពីក្រោយខ្នងពួកយើង អាចមានវីរជនធំៗ យ៉ាងតិចពីរនាក់គឺ លោក **សឺងង៉ុកថាញ់** និង លោក **ប៉ាច ឈឿន...**។ ប្រធានបទសំខាន់នៃចលនាកូដកម្ម គឺការចាប់អង្រួនរបបអាណានិគមបារាំងឱ្យរង្គោះរង្គើនៅស្រុកខ្មែរ ព្រមជាមួយនិងសមរភូមិក្តៅគគុកនៅ ឌៀនបៀនភូ (វ.ណ)។ ប្រហែលកូដកម្មនោះ វាជាបុព្វបទនៃការទាមទារឯករាជ្យ រំដោះប្រទេសខ្មែរចេញពីនឹមដែករបស់អាណានិគមបារាំង។ ដើម្បីការពារ កុំឱ្យសិស្សនិស្សិតប្រមាណ ៦.០០០ ពាន់នាក់ ទៅបៀតបៀនរដ្ឋសភា អាជ្ញាធរបានប្រើកម្លាំងប៉ូលីសប្រហែលជិត ២០ ឡាន មករាំងរាទប់ស្កាត់ពួកកូដករដែនទេ។ កាលណោះប៉ូលីស គ្មានដំបងឆក់បង្ក្រាបកូដករដូចបច្ចុប្បន្ននេះឡើយ តែគេក៏មានដំបងឈើព្យួរនៅចង្កេះសម្រាប់ស្វាគមន៍ក្បាលពួកសិស្សនិស្សិតផងដែរ ។

បំណងរបស់ពួកយើងនៃទំនាស់គ្នា នឹងផែនការទប់ស្កាត់របស់អាជ្ញាធរ។ គេបានធ្វើរបាំងដែកយ៉ាងមាំ សម្រាប់រារាំងដំណើរជម្រុលទៅមុខរបស់ពួកនិស្សិតនៅត្រង់ស្នងការដ្ឋាន ទី ៣ (កាលណោះគេហៅថា កងក្រវែលទី៣ត្រូវនឹងពាក្យបារាំងថា 3e arrondissement មានទីតាំងនៅខាងត្បូងវាំងគឺជាទីតាំងសម្រាប់ជាទីស្នាក់ការកងការពារ។ មកដល់ត្រង់ចំណុចនេះ មានការប៉ះទង្គិចគ្នា យ៉ាងធ្ងន់ធ្ងរ ព្រោះបំណងសិស្សចង់ទៅមន្ទីររដ្ឋសភា មានចំនួន ៦ ពាន់នាក់ ច្រើនលើសលុបលើកម្លាំងរារាំង។ នៅទីនោះ មានការវាយតប់គ្នាជាទ្រង់ទ្រាយធំ។ ពួកនិស្សិតដែលពីមុនមានតែដៃទទេ ក៏ស្រាប់តែបានទទួលអាវុធជាដុំឥដ្ឋ ជាដបទឹកស៊ីអ៊ីវ ដោយឥតព្រាងទុក។ អ្នកផ្គត់ផ្គង់គ្រឿងអាវុធពិសេសនេះ មិនគឺនរណាក្រៅពីពួកសម្ព័ន្ធមិត្តរបស់សិស្សនិស្សិត ដែលជាអ្នក "ស៊ីក្លូ" នោះឡើយ។ ដុំឥដ្ឋនិងដបបានហោះហើរឥតអាក់ទៅលើក្រុមប៉ូលីសដែលខិតខំការពាររបាំង យ៉ាងអស់ពីសមត្ថភាព។ ពេលកំពុងប្រហារគ្នាក្នុងឆាកប្រយុទ្ធនោះ មានឈុតដ៏រន្ធត់មួយកើតឡើង គឺដុំឥដ្ឋយ៉ាងធំមួយ ហោះលឿនស្លៅទៅចំព្រះកេស (ក្បាល) អ្នកអង្គម្ចាស់ស៊ីសុវត្ថិសិរិមតៈ ជាអគ្គស្នងការប៉ូលីស។ ប៉ុន្តែជាគ្រោះល្អរបស់ទ្រង់ មាននិស្សិតម្នាក់បានស្ទុះទៅច្រានអ្នកអង្គម្ចាស់ឱ្យដួលយ៉ាងរហ័ស (៧៥) ធ្វើឱ្យទ្រង់បានគេចផុតពីគ្រោះមហន្តរាយដល់ព្រះជន្មព្រះអង្គ។ ពួកប៉ូលីស លែងមានសមត្ថភាពក្នុងការទប់ស្កាត់រាំងរាទៀត ផ្តល់ឱកាសឱ្យពួក សិស្ស និស្សិតរុញចម្រឹងដែកធំៗ វែងៗ ឱ្យវៀច ឱ្យរបួត

---

(៧៥) លុះថ្ងៃក្រោយមក ឮថា អង្គម្ចាស់បានអញ្ជើញនិស្សិតដែលជួយសង្គ្រោះជីវិតទ្រង់ទៅថ្លែង អំណរគុណនិងផ្តល់រង្វាន់លើកទឹកចិត្តខ្លះៗ ចំពោះទឹកចិត្តដ៏ល្អវិសេសនេះ។

ហើយមានច្រករុលទៅមុខ បានរហូតដល់រដ្ឋសភា។ ប៉ុន្តែទម្រាំឆ្លងកាត់របាំងនោះបាន ខាងប៉ូលីសរងរបួសមិនតិចជាង ៣០ នាក់ឡើយ ហើយត្រូវដឹកទៅព្យាបាលនៅមន្ទីរពេទ្យជាបន្តបន្ទាប់។ ឯខាងសិស្សនិស្សិតក៏មានអ្នកពកក្បាលហើមក្បាល ជាំដៃខ្លះៗដែរ។ គួរជម្រាបថា ប៉ូលីសជំនាន់នោះមិនសាហាវដូចបច្ចុប្បន្ននេះទេ។ អស់លោក មិនមានប្រើកាំភ្លើងមួយគ្រាប់ឡើយ ទោះបីមានរបួសច្រើនយ៉ាងនេះក៏ដោយ។ ទៅដល់រដ្ឋសភា តំណាងនិស្សិតឡើងថ្លែងញត្តិ ដើម្បីសុំឱ្យអស់លោកតំណាងរាស្ត្រជួយ ដោះស្រាយសំណូមពរ និងបំណងប្រាថ្នារបស់កូដករ។ ពេលនោះ ពួកសិស្ស និស្សិត ពុំបានវិលមកគ្រឹះស្ថានសិក្សាវិញភ្លាមៗទេ ដោយរង់ចាំការដោះស្រាយឱ្យបានដឹងសព្វគ្រប់សិន។ ពួកយើងនាំគ្នាបោះជំរុំនៅ ព្រលានសួនច្បារមុខ វត្តបទុមវតី នៅសួនច្បារមុខព្រះបរមរាជវាំង ពេញមួយថ្ងៃ និងមួយយប់។ រីឯអាហារម្ហូបចុកប៉ុន្មានពេលសម្រាប់កូដកររាប់ពាន់អ្នក នោះប្រហែលជាបន្ទុករបស់រដ្ឋសភា។ ខ្ញុំនៅចាំបានថាកូដកម្ម ប្រព្រឹត្តិទៅនៅក្នុងរវាងឆ្នាំ ១៩៥០-១៩៥១។ រីឯបាតុកម្ម បន្ទាប់មកទៀត ដែលខ្ញុំបានពតិនានៅក្នុងសៀវភៅនេះ បានប្រព្រឹត្តទៅបន្ទាប់មកទៀតនៅឆ្នាំ ១៩៥២- ១៩៥៣។

ខ្ញុំបានដឹងអំពីចលនាបាតុកម្មរបស់និស្សិតរៀមច្បងពីជំនាន់ទសវត្ស ទី ៤០ ដែរ តែវាគ្រាន់តែជាពតិមាន រដាច់រដោចឯណោះមួយម៉ាត់ ឯណេះមួយម៉ាត់ មិនមានចរន្តជាខ្សែចង្វាក់អាចយកមកសរសេរចងក្រងបានឡើយ។ ដូចខ្ញុំបាននិយាយបន្តិចបន្តួចពីខាងដើម ពាក់ព័ន្ធទៅនឹងកូដកម្មរបស់សិស្សនិស្សិត ក្នុងសម័យដែលលោក យ៉ែម-សំបូរ ធ្វើជានាយករដ្ឋមន្ត្រី និងលោក

មាស-សាឯម ជារដ្ឋមន្ត្រីក្រសួងសិក្សាធិការ បណ្ដាលឱ្យមានចម្រៀងឆៃយ៉ាំមួយវគ្គ ពោលថា : **ហៃ មាស សាឯម ហៃ យ៉ែម សំបូរ បើកកាហ្វេហ៊្វឺណូបិទវិទ្យាល័យ...** រួច "បន្ទរថា" **ហ៊ុយ ម៉ោង១១១១...** ។ ក្រៅពីនេះមានពួល្បីឈ្មោះបង១ជើងខ្លាំងពីរនាក់ ដែលជាអ្នកគុណនិយមឆ្នើមខាងវាយឆ្នក់ ហើយជិះកង់រត់នោះគឺ ( យក្សសាន និងយក្សប៊ុន) [៧៦] ។

ខ្ញុំយកផ្នែក "បន្ថែម" នេះមកបន្ត ដើម្បីបង្គ្រប់សាច់រឿងសំខាន់ៗដែលកើតមានក្នុងសម័យនោះ។ ខ្ញុំគិតថាអស់លោកអ្នកអានពិតជាមិនធុញទ្រាន់ នឹងដឹងអំពីអ្វីៗដែលកប់បាត់ទៅក្នុងអតីតកាល អស់ពេលជាង៥០ឆ្នាំមកហើយនោះទេ។

សូមអស់លោកអ្នកអានមេត្តា យោគយល់អធ្យាស្រ័យដល់ខ្ញុំផង ចំពោះអ្វីដែលខ្ញុំយល់ថាសំខាន់សម្រាប់ដឹង ហើយបើវាប្រែជាមិនសំខាន់សម្រាប់អស់លោកដែលយល់ថា"ដូចជាគ្មានអ្វីអស្ចារ្យសោះ" ។

អរគុណដែលបានតាមដានអាន តាំងពីដើមដលចប់ ។

អ្នកនិពន្ធ

**មៀច ប៊ុណ្ណ**

ខ្ញុំសរសេរឯកសារនេះតាំងពីឆ្នាំ ១៩៨៦

ទាល់តែមកដល់ពេលនេះ ទើបមានឱកាសចេញផ្សាយ

---

(៧៦) សុំទោស មិនមែន ប៊ុណ្ណខ្ញុំទេ ព្រោះខ្ញុំប៊ុណ្ណដែរ តែជាប៊ុណ្ណអាចារ្យកាត់តាមឪពុកខ្ញុំជាអាចារ្យវត្ត។

# អំពីប្រវត្តិបញ្ចុះសីមា និងប្រវត្តិ នំលំអងរំចេក ឬនំអាចម៍ឆ្កែ

មានដំណាលមកថា កាលកន្លងទៅ មានវត្តមួយទើបកសាងរួច។ លោកគ្រូមេវត្ត (ចៅអធិការវត្ត) ព្រះនាមដូង មានកូនសិស្សកំលោះម្នាក់ឈ្មោះ ជីក និងមានឧបាសិកាម្នាក់ជាអ្នកបម្រើឈ្មោះ ង៉ែត។ ពេលមួយ អ្នកស្រុកស្រុះស្រួលបបួលគ្នាធ្វើបុណ្យបញ្ចុះសីមាវត្តនោះ។ លុះធ្វើបុណ្យរួចហើយ លោកអាចារ្យវត្ត ទូលលោកគ្រូថា " ទានប្រោសប្រយ័ត្នសីមា ក្រែងមានចោរមកលួចគាស់យករបស់មានតម្លៃជាច្រើនកប់នៅក្នុងសីមាកិល ដូចជាមាសប្រាក់ ជាដើម។ សីមាឯទៀតៗក៏មានដែរ តែមិនច្រើនដូចសីមា កិល ទេ។ ពួកលោកអាចារ្យទូលដូច្នេះហើយ លោកគ្រូក៏សឹងចាំរណ្តៅសីមាដោយខ្លួនឯងដោយពុំហ៊ានបណ្តោយឱ្យអ្នកឯទៀតចាំបានឡើយ។ ការសឹងបែបនេះ អស់រយៈពេលមួយឆ្នាំ ដោយពុំដែលបានប្រទះឃើញចោរណាប៉ុនប៉ងមកលួចទ្រព្យរបស់ឡើយ។ លោកគ្រូក៏ប្រគល់ភារៈដេកយាមសីមានេះ ទៅឱ្យកូនសិស្សឈ្មោះ ជីក ជាអ្នកចាំជំនួស។ អស់រយៈពេល ៦ខែ ចៅជីកខ្ជិល គិតតែពីដេក ពុំរវល់ដើរមើលយាមល្បាតអ្វីឡើយ។ លោកគ្រូតែងតែតើនស្ទើររាល់យប់មកលបមើលសីមា ហើយឃើញមេឆ្កែខ្មៅមួយមកជុះអាចម៍ដាក់សីមា។ លោកគ្រូក៏ស្តីបន្ទោសចៅជីកថា: " អាឯងខ្ជិលណាស់ ដេកលក់ទល់ភ្លឺ ទើបបានជាឆ្កែមកជុះដាក់សីមាបាន។ បើឯងប្រហែសឱ្យវាមកជុះដាក់កន្លែងនេះទៀត អញវាយខ្នងឯង ហើយតម្រូវឱ្យឯងស៊ីអាចម៍ឆ្កែទៀតផង"។ ចំណែកឯចៅជីក លុះបាន

ឮលោកគ្រូមានពុទ្ធដីកាដូច្នេះហើយ ក៏មានការព្រួយបារម្ភណាស់។ ស្អែកឡើង វាក៏ទៅផ្ទះ ហើយប្រាប់ម៉ែវាថា : "ម៉ែ អើយ! លោកគ្រូខ្ញុំមានពុទ្ធដិកាថា "លោកចង់ឆាន់នំលំអងរំចេក" ។ ម្ដាយចៅជីកឮដូច្នោះហើយ ក៏រវៀសរវៃ យកអង្ករមកបុកលម្អិតឱ្យម៉ដ្ឋ រកដូង រកស្ករមកធ្វើស្នូល ធ្វើនំបានយ៉ាងឆាប់ រហ័ស ប្រគល់ឱ្យកូនយកទៅវត្ត ប្រគេនលោកគ្រូឆាន់។ ឯចៅជីក លុះបាន ទទួលនំពីម្ដាយហើយ ក៏ប្រញាប់វិលទៅវត្តវិញ លាក់ទុកមួយកន្លែង។ នៅពេល ព្រឹក វាយកនំទៅដាក់រាយគ្រប់តែរណ្ដៅសីមា។ បន្តិចក្រោយមកលោកគ្រូក៏ និមន្តមករវាំងមើលសីមា ក៏ស្រាប់តែឃើញដុំអ្វីស១ នៅគ្រប់រណ្ដៅ។ លោកគ្រូ ហៅចៅជីកមក ហើយស្ដីបន្ទោសឱ្យថា : " អាឯងរិតតែធ្ដើនឱ្យអញថែម ទៀត។ ថ្ងៃមុន១ ឆ្កែជុះល្មមទេ តែថ្ងៃនេះ ជុះសព្រាតគ្រប់តែសីមា។ ពេល នេះឯងនឹងត្រូវរំពាត់ផង ហើយត្រូវស៊ីអាចម៍ឆ្កែឱ្យអស់ផង " ។ ចៅជីកធ្វើ អាកប្បិរិយាដូចខ្លាចលោកគ្រូខ្លាំងណាស់។ វាក្រាបទៀបព្រះបាទលោកគ្រូ លើកដៃប្រណម្យទាំងចង់យំផង ដោយទូលអង្វរលោកថា: " សូមព្រះតេជះ គុណមេត្តាអភ័យទោសដល់ខ្ញុំព្រះករុណាផង សូមគ្រាន់តែឱ្យ ខ្ញុំព្រះករុណាស៊ី អាចម៍ឆ្កែបានហើយ សូមព្រះអង្គមេត្តាប្រោសកុំវាយអី ! " ថាដូច្នោះហើយ ចៅជីកក៏ចាប់នំ(៧៧) នេះពមទំពាលេបតាំងពីសីមាទីមួយ រហូតដល់សីមាទី ៧។ ពេលនោះ លោកគ្រូសង្កេតឃើញចៅជីកស៊ីអាចម៍ឆ្កែហាក់ដូចជាឆ្ងាញ់ ណាស់ ទើបលោកឃាត់វាថា : " មើលអាជីក ឈប់ប៉ុណ្ណឹងហើយ ឱ្យអញភ្លក់

---

(៧៧) ទំហំ នឹងទ្រង់ទ្រាយនំលំអងរំចេក ដូចអាចម៍ឆ្កែខ្លាំងណាស់ ដូច្នេះហើយ បានជានៅតំបន់ ខ្លះ គេហៅនំនេះថា "នំអាចម៍ឆ្កែ" ដូចមានប្រវត្តិនិទាននមកខាងលើនេះស្រាប់។

បន្តិចមើល! "។ ចៅជីកក៏ប្រគេននំពីរ ដែលនៅសល់ទៅលោកគ្រូ។ លោកឆាន់សាកមើល ផ្អែមត្រូវមាត់ក៏សួរបញ្ជាក់ទៅអាជីកថា : " តើនេះជា អាចម៍ឆ្កែណាមួយ ?" អាជីកទូលថា : " ទានប្រោស នេះគឺអាចម៍មេខ្មៅ " ។ ចាប់តាំងពីពេលនោះមក លោកគ្រូលែងឱ្យអាជីកដេកចាំសីមាទៀតហើយ លោកសឹងចាំដោយផ្ទាល់ព្រះអង្គ ប្រាថ្នានឹងឆាន់នំនោះឱ្យឆ្អែតមែនទែនតែម្តង ។ ព្រះអង្គសឹងអស់រយៈពេលមួយឆ្នាំ តែពុំដែលឃើញឆ្កែណាមកជុះទៀតឡើយ។ ឯចៅជីក ក៏បានរួចខ្លួនពីការដេកយាមសីមាទៅ។ ចំណែកលោកគ្រូវិញ គឺនៅតែទៅសឹងចាំសីមាជាដរាប។ ពេលថ្ងៃព្រះអង្គទៅគង់នៅឯកុដិ។ ពេលយប់លោកនិមន្តទៅសឹងឯវិហារ លោកតែងយកប្រាក់សាច់ចំនួន៣០០រៀល ក្រវាត់ជាប់នឹងចង្កេះ ព្រោះលោកមិនទុកចិត្តចៅជីក ដែលដេកនៅលើកុដិ។ ការសឹងចាំសីមាបែបនេះយូរៗទៅ ក៏គិតឃើញថា : " អាត្មាអញរវល់តែដេកចាំសីមាពុំបានរៀនសូត្រអ្វីសោះ។ បើដូច្នេះគួរតែអាត្មាអញតាំងធ្វើសមាធិកម្មដ្ឋានឱ្យបានទៅកើតស្ថានសួគ៌ ដែលមានស្រីទេពអប្សរចាំបម្រើឆ្វេងស្តាំរាល់យប់ថ្ងៃ"។ ចាប់តាំងពីថ្ងៃនោះមក លោកក៏តាំងធ្វើកម្មដ្ឋានគឺភាវនាធម៌ **"ពុទ្ធានុស្សតិ ធម្មានុស្សតិ សង្ឃានុស្សតិ"** តែរាល់ៗយប់។ ថ្ងៃមួយក៏បានឮដំណឹងទៅ ដល់យាយង៉ែត ដែលជាអ្នកទំនុកបម្រុងលោកគ្រូ។ យាយមកថ្វាយបង្គំលោកគ្រូទូលសួរថា : " តើកម្មដ្ឋាននេះធ្វើបានគ្រប់មនុស្សទូទៅ ឬធ្វើបានតែលោកសង្ឃទេ ? ។ លោកគ្រូឆ្លើយតបថា : " ង៉ែតឯងមិនបាច់ធ្វើទេ គ្រាន់តែទំនុកបម្រុងចង្ហាន់ឱ្យអាត្មាប៉ុណ្ណោះ ក៏គង់បានទៅកើតឯស្ថានសួគ៌ហើយ"។ ចាប់តាំងពីថ្ងៃនោះមកលោកក៏ប្រឹងធ្វើកម្មដ្ឋាន ឯយាយង៉ែតក៏ប្រឹងធ្វើចង្ហាន់រើសសម្រឹត

សម្រាំងយកតែម្ហូបណាដែលពិសេសៗ យកមកប្រគេនលោក ដោយហេតុចង់ទៅកើតជាទេវតា។ ចំណែកឯចៅជីកវិញ ឥតខ្វល់ពីរឿងឋានសួគ៌ ស្ថាននិព្វានអ្វីទេ វាគិតរកឧបាយកលដើម្បីបោកយកប្រាក់លោកគ្រូជាយូរណាស់មកហើយ។ ស្រាប់តែថ្ងៃមួយ វានឹកឃើញថាៈ "លោកចង់ទៅកើតស្ថានសួគ៌ ដូច្នេះគួរតែអញ ក្លែងខ្លួនបន្លំធ្វើជាទេវតា មកនិយាយលួងលោមនាំលោកទៅមើលស្ថានទេវតា"។ ចៅជីកក៏ស្លៀកពាក់តែងតួដូចទេវតាក្នុងរឿងល្ខោន ហើយយកសំបកបាវមួយកាន់នៅដៃ ដើរទៅកាន់កន្លែងលោកគ្រូដែលកំពុងភាវនាធម៌។ លោកគ្រូក៏ភ្ញាក់ខ្លួនព្រើត ហើយគិតតែក្នុងចិត្តថា : " ឯងកំពុងតែចង់ទៅកើតស្ថានទេវតាផង ឥឡូវស្រាប់តែទេវតាចុះមករកឯង "។ លោកគ្រូសប្បាយរីករាយឥតឧបមា លោករិតតែខំភាវនាធម៌ថែមទៀត ។ ចៅពាលនោះនិយាយទៅកាន់លោក ធ្វើសំឡេងតូចស្រួយដូចសំឡេងស្រី : " អើ ! លោកចៅអធិការឯងឮថា ខំធ្វើធម៌នេះប្រាថ្នាចង់ទៅកើតស្ថានសួគ៌មែនឬ ? " លោកគ្រូឆ្លើយថា :" ចម្រើនពរ! "។ ចៅពាលនិយាយបន្តទៀតថា " យើងមកនេះគឺព្រះឥន្ទ្រប្រើមក ដោយហេតុលោកគ្រូធ្វើធម៌ភាវនាទៅ ក្ដៅរំជួលដល់អាសនៈព្រះឥន្ទ្រ បានជាទ្រង់ប្រើយើងឱ្យមកមើល តើមែន ឬមិនមែន "។ ចៅពាលក្លែងធ្វើទេវតានោះ សួរទៅលោកគ្រូម្ដងទៀតថា : "ឥឡូវនេះ តើលោកចង់ទៅមើលស្ថានទេវតាមែនឬ ?"។ លោកគ្រូឆ្លើយថា : " ចម្រើនពរ ! ចម្រើនពរ! " យ៉ាងប្រញាប់។ ចៅពាលហាមលោកគ្រូថា :"បើដល់ពេលទៅលោកគ្រូកុំក្រោកដើរ ហើយតមកុំនិយាយស្ដីអ្វីឱ្យសោះក្រែងដាច់ធម៌ ព្រោះបើដាច់ធម៌ហើយនឹងទៅស្ថានទេវតាមិនបានឡើយ។ ម្យ៉ាងទៀត បើបានទៅដល់

ស្ថានទេវតាហើយ ចូរកុំគេចវេះឱ្យសោះ ត្រូវតែវិលត្រឡប់មកស្ថានមនុស្សវិញ សិន ចាំកាលណាដល់អស់សង្ខារ សឹមទៅកើតស្ថានសួគ៌រហូតទៅ!" ។ ចៅពាល ក្លែងខ្លួន ក៏ឱ្យលោកចូលក្នុងបាវហើយក្រសោបមាត់បាវ អូសចេញពីក្នុងវិហារ។ មកដល់មាត់ជណ្តើរ វាប្រាប់លោកគ្រូឱ្យភាវនាធមិឱ្យជាប់ ព្រោះប៉ះពពកធំៗ ណាស់។ លោកគ្រូក៏ជឿថា ហាក់ដូចខ្លួនលោកប៉ះនឹងពពកមែន។ តាមពិត គឺគេអូសលោក ទង្គិចនិងកាំជណ្តើរឮម៉ាំងៗ។ តែដោយអំណោចចិត្តជឿជាក់ ស្លុងទៅស្ថានទេវតាហើយ ក៏ពុំមានទទួលអារម្មណ៍ថា ឈឺចាប់ត្រង់ណាបន្តិច ឡើយ។ លោកត្រូវគេបោះប៉ះនឹងកាំជណ្តើរ ក៏នៅតែគិតថាប៉ះនឹង ពពកមែន។ លុះចេញផុតពីវត្តមកដល់វាលស្រែ ទេវតាក្លែងក្លាយ ប្រាប់ទៅលោកគ្រូម្តង ទៀតថា : " លោកគ្រូប្រយ័ត្ន ! ខំស្ទឹងស្មាធិភាវនាធមិឱ្យមែនទែន ឥឡូវ យើងត្រូវមកប៉ះនឹងដុំពពកទៀតហើយ !" ។ លោកគ្រូនៅតែជឿជាក់ក្នុងចិត្ត ថា ខ្លួនកំពុងត្រូវទេវតានាំហោះកាត់ពពកឆ្ពោះទៅកាន់ស្ថានសួគ៌។ ចៅពាល នោះ អូសលោកគ្រូទៅដល់ក្រោមដើមក្រសាំង ដែលនៅចម្ងាយពីវត្ត ប្រហែលមួយគីឡូម៉ែត្រ។ វាក៏ចាប់សួរចម្លើយ លោគ្រូថា : "ដួង ! ដួង! ដួង ឯងម៉ិចក៏ធ្ងន់ខុសប្លែកពីគេម្ល៉េះ? ។ កាលពីមុននេះ យើងធ្លាប់នាំមនុស្សទៅ ស្ថានទេវតាអស់ជាច្រើននាក់ហើយ តែពុំដែលអ្នកណាធ្ងន់ ខ្លាំងដូចដួងឯងទេ។ យើងគិតថា ដួងឯងពិតជាមាននាំយកអ្វីទៅជាមួយផងហើយ បានជាធ្ងន់បែប នេះ!" លោកគ្រូអៀនខ្លួនណាស់ ស្ទើរតែមិនចង់ប្រាប់ទេវតា។ តែដោយហេតុ ខ្លួនចង់ទៅទស្សនាស្ថានសួគ៌ទាំងភ្នែកស្រស់ ក៏ពុំអាចទ្រាំបាន ទើបប្រាប់ថា : " ចម្រើនពរ! អាត្មាភាពមានដាក់ប្រាក់សាច់ ៣០០ រៀល ជាប់នឹងខ្លួន" ។ ទេវតា

ស្ដីឱ្យថា : "មើល ! មារយាទលោកសង្ឃ តែយ៉ាងណឹង ! បួសហើយ នៅតែលោភលន់ ចង់បាន ចង់មាន យកប្រាក់មក ជាប់នឹងខ្លួនម្ដីង១បានជាធ្ងន់ ខុសគេខុសឯង ។ មក ! ឱ្យមកជាប្រញាប់ ! "។ លោកគ្រូដូងស្រាយប្រាក់សុទ្ធពីចង្កេះហុចមកឱ្យចៅពាលក្លែងធ្វើទេវតា ។ ចៅពាលពោលថា : អើ ! ធ្ងន់យ៉ាងនេះទេតើ បានជាយូរស្ទើរមិនរួច"។ ថាហើយក៏ចាប់មាត់បាវក្របួច ហើយចងព្យួរទៅនឹងមែកក្រសាំងតែកតោក១។ វាក៏ដើរគេចចេញពីនោះ ឆ្ពោះទៅកាន់ផ្ទះវា ដោយក្ដីសប្បាយរីករាយឥតឧបមា ព្រោះបានប្រាក់យ៉ាងច្រើន សម្រាប់យកមកចាយវាយតាមចិត្តចង់។

លោកគ្រូគិតស្មានថា ខ្លួនកំពុងត្រូវគេនាំហោះទៅស្ថានទេវតា។ លុះភ្លឺឡើង យាយង៉ែតក៏ចេញពីផ្ទះទៅរកទិញបន្លែត្រីសាច់យកមកធ្វើចង្ហាន់លោកគ្រូ។ ទៅដល់ដើមក្រសាំង យាយបានឃើញបាវមួយព្យួរតែកតោក១ នៅមែកក្រសាំង។ គាត់ឆ្ងល់ណាស់ ហើយលាន់មាត់ថា :" ចុះនរណាគេយកបាវមកចងព្យួរធ្វើអីនៅទីនេះ?" ។ លោកគ្រូដូងស្គាល់ច្បាស់ជាមាត់យាយ ង៉ែត ក៏នឹកគិតថា : " ដោយអំណាចចង្ហាន់ប្រគេនអញរាល់ថ្ងៃ យាយង៉ែតក៏បានទៅលេងស្ថានទេវតាដូចអញដែរ" ។ ដោយត្រូវទឹកសន្សើម ចំណងដែលចងមាត់បាវនោះ ក៏របូតធ្លាក់មកដី អុកគូថលោកគ្រូព្ធមាំុង។ លោកគ្រូស្មានថា លោកហោះទៅប៉ះនឹងពពក ក៏ភាវនាចមិកាន់តែញាប់ឡើង១។ តែដោយអំណាចទម្ងន់ធ្លាក់មាត់បាវក៏របូត ធ្វើឱ្យយាយង៉ែតឃើញច្បាស់ជាលោកគ្រូដូង។ យាយគិតក្នុងចិត្តថា ពូកែប្រហែលលោកគ្រូហើយ នៅតែគេបោកបាន។ លោកគ្រូបើកភ្នែកមើលអ្វី១ ជុំវិញខ្លួនក៏ដឹងថា ខ្លួនភ្លាត់ស្នៀតត្រូវគេបោកយកប្រាក់អស់រលីង។

លោកគ្រូហាមយាយង៉ែតថា : " ង៉ែតអើយង៉ែត ! ចូរកុំនិយាយប្រាប់អ្នកណាឱ្យគេដឹងឱ្យសោះ។ លោកគ្រូក៏និមន្តទៅវត្តវិញ។ ឯយាយង៉ែតក៏បន្តដំណើរទៅផ្សារដែរ។

# ការព្យាបាលពិសពស់វែក[៧៨]

ព្រៃភ្នំក្រំថ្ម បឹងបួរ ថ្លុកត្រពាំង និងតំបន់វាលទំនាប នៃស្រុកខ្មែរ សឹងសម្បូរទៅដោយពស់ច្រើនប្រភេទ ក្នុងនោះ ពស់ដែលមានពិសកាចសាហាវ ហើយមានគ្រោះថ្នាក់ជាងគេនោះ គឺពស់វែក ដែលមាន ៣ ប្រភេទ :

**ក. ពស់វែកដំបូក**

**ខ. ពស់វែករនាម**

**គ. ពស់វែកស្រងែ ឬពស់វែកក្របី**

កាលណាវាចឹកមនុស្សណាម្នាក់ វាតែងបញ្ចេញពិសតាមរន្ធចង្កូមដូចម្ជុលចាក់ថ្នាំដូច្នោះដែរ ។ បន្ទាប់ពីពិសពស់រត់សព្វសាយ ពាសពេញសព៌ាង្គកាយនោះ ជនរងគ្រោះនឹងស្លាប់យ៉ាងពិតប្រាកដ។ បច្ចុប្បន្ននេះ ក្បួនវេជ្ជសាស្ត្របានរកឃើញវ៉ាក់សាំងប្រឆាំងពិសពស់ (Vacin antivenimeux) ដែលមានប្រសិទ្ធ-ភាពជាទីបំផុត ។ ដោយឡែកនៅកម្ពុជាយើងកាលពីជំនាន់ដើមក្ដី ពេលបច្ចុប្បន្ននេះក្ដី ស្ទើរតែគ្រប់ជនបទ មានគ្រូហ្ម អាលម្ពាយចេះបង្ក្រាបពិសពស់ ប្រើបាលីមន្តអាគម គួបផ្សំនឹងឱសថខ្លះៗ អាចព្យាបាលពិសពស់នេះឱ្យសះជាបាន ដូចឱសថទំនើបខាងវេជ្ជសាស្ត្រដែរ ។ ខាងក្រោមនេះលោកតា កិម ផង់ បានឱ្យសម្ភាសន៍ដល់ក្រុមស្រាវជ្រាវយើងខ្ញុំ និងសូត្របាលីបណ្ដេញ ឬកម្ចាត់ពិសពស់វែក ក៏ដូចជាឱសថសម្រាប់ព្យាបាលខ្លះៗផងដែរ **"អហំគ្រុឡោ នាគរាជា-**

---

(៧៨) ឯសារ សម្ភាសន៍ជាមួយលោកគ្រូ កិម ផង់ អាយុ ៨៦ឆ្នាំ នៅស្រុកគិរីវង្ស ខេត្ត តាកែវ ។ អាចមានគ្រូ ពូកែលើសនេះ ហើយប្រើមន្តអាគម ឬ ឱសថប្លែកពីនេះទៀត... ។

**នោ អបេហិ**" ត្រូវសូត្របាលីនេះ ៣ ចប់ ៧ ចប់ ឬ ៩ ចប់ ទៅតាមការដ៏គួរ ដោយអុជធូប ១ សសៃ ឬ ៣ សរសៃ កូរផ្លុំទឹកថ្លិល រួចរលាស់ទៅរកអ្នកជំងឺ ពិសេសផ្លុំត្រង់មុខរបួស ពីលើចុះក្រោម នៅពេលសូត្របាលីបានមួយចប់។ ជាមួយនឹងបាលីមន្ត គាថានេះដែរ គេត្រូវយកឱសថមួយចំនួនមកប្រើគួបផ្សំជាមួយគឺ : មើមត្រាវព្រៃ ដុសលាយនឹងស្រាឱ្យផឹកមួយលេប រួចយកមកលាបនៅលើស្នាមរបួស ដោយចង្អុមពិសពស់។ បើមានការហើមត្រង់អវយវៈដែលពស់ចឹក ជាចាំបាច់ គេត្រូវយកថ្នាំនោះមកលាបរីតពីលើចុះក្រោម ក្នុងន័យបូតបញ្ចេញពិសពស់ឱ្យអស់ពីខ្លួន។

នៅមានថ្នាំមួយមុខទៀត ដែលអាចយកប្រើក្នុងការកម្ចាត់ឬព្យាបាលពិសពស់វែកគឺ: យកអាចម៍ក្រៀមមកកម្លោចលាយជាមួយអង្រ្គង(៧៩) លាយជាមួយទឹកឱ្យផឹក។ ថ្នាំនេះក៏អាចជួយផ្ចាញ់កម្រោល ដែលតែងចូលមក ទន្ទ្រានឈ្លានពាន ឱ្យជនរងគ្រោះមានការភិតភ័យ តក់ស្លុតចង់សន្លប់ដោយ អំណាចពិសដ៏សាហាវនេះ។

នៅតាមតំបន់ជនបទខ្លះនៃកម្ពុជា គេតែងប្រទះឃើញមានគ្រូអាលម្ពាយដែលចេះចាប់ពស់វែក ដោយពុំមានគ្រោះថ្នាក់អ្វីសោះឡើយ។ គ្រូនេះហាក់មានអានុភាពខ្លាំងពូកែ តាមធម្មជាតិ ឬតាមមន្តអាគម ដែលមានប្រៀបទៅលើពស់វែកដ៏សាហាវ និងគ្រោះថ្នាក់បំផុតនេះ។ គេអាចបញ្ជាពស់វែកឱ្យមក បឺតយកពិសចេញឱ្យអស់ ពីជនរងគ្រោះ។ ភ្លាមនោះការចុកចាប់ ក្ដៅក្រហល់ក្រហាយ ឆេះឆួលរោលរាលក្នុងខ្លួន ក៏បាត់ទៅអស់ក្នុងមួយរយៈពេលខ្លី

---

(៧៩) ជ្រើសយកតែអង្រ្គងនៅដើមកណ្ដាលប៉ុណ្ណោះ។

ផងដែរ ។ រីឯនៅប្រទេសកាន់សាសនាឥស្លាមមួយចំនួន ដូចជា ឥណ្ឌា ម៉ារ៉ុក ទុនីហ្ស៊ី អាល់ហ្សេរី អេហ្ស៊ីប និងបណ្ដាប្រទេស អារ៉ាប់ជាច្រើនទៀត ក៏ឃើញមានគ្រូសិល្ប៍ ចេះមន្តអាគមអាចបញ្ជាពស់ឱ្យរេរាំ ចាក់ក្បាច់ តាមសំឡេងប៉ីម្យ៉ាង ។ គ្រូប្រភេទនេះតែងត្រាច់រង្គាត់ តាមទីប្រជុំជន ឬក្រុងធំៗ ដើម្បីបង្ហាញទស្សនីយភាព ដ៏អស្ចារ្យនេះ ដល់សាធារណជនក្នុងគោលបំណងសុំលុយកាក់សម្រាប់ចិញ្ចឹមជីវិត ។

នៅប្រទេសខ្មែរយើង អ្នកដែលមានអំណោយផលពិសេសពីធម្មជាតិនោះច្រើនតែជាមនុស្សអណ្ដាតពាំព្រីង[៨០] ។ មនុស្សពួកនេះមានឥទ្ធិពល ធ្វើឱ្យពស់ខ្លាច មិនហ៊ានចឹក[៨១] បើទុកជាចឹកក៏ពុំបណ្ដាលឱ្យមានគ្រោះថ្នាក់អ្វីដែរ ។ សូម្បីតែសត្វឆ្កែ ដែលមានអណ្ដាតពាំព្រីង ក៏រមែងមានប្រៀបខ្លាំងទៅលើពស់ផងដែរ ។ ជនជាតិខ្មែរលើ យកពិសពស់វែកមកត្រាំចុងព្រួញ ដើម្បីបាញ់ប្រហារ សត្វម្រឹគឱ្យស្លាប់ភ្លាមនៅនឹងកន្លែង ។ ជួនកាលព្រួញពិសបែបនេះ ក៏បានត្រូវយកមកប្រើប្រាស់ក្នុងការប្រយុទ្ធទល់នឹងខ្មាំងសត្រូវផងដែរ ។ នៅប្រទេសអាស៊ីខ្លះ គេយកពិសពស់មកផ្សំធ្វើជាឱសថផ្សេងៗ ។

ទោះបីពស់វែកសាហាវ ដោយសារពិសវាមានគ្រោះថ្នាក់គួរឱ្យព្រឺខ្លាចក្ដី ក៏ពួកវាជាសត្វលម្អដល់បរិស្ថាន ហើយអាចរាប់ទុកជាសម្បត្តិជាតិដ៏មានសារៈសំខាន់ផងដែរ ។

---

(៨០) អណ្ដាតដែលមានស្នាមខ្មៅមួយផ្នែក ឬពាសពេញផ្ទៃអណ្ដាតប៉ែកខាងលើទាំងអស់ ។

(៨១) ប្រជាជនខ្មែរ តែងលើកពាក្យស្លោកថា: ពស់វែកដំបូក ១ស្រែ. ពស់វែកស្រង៉ែ១ព្យាម. ពស់វែករនាម ប៉សស្រួស !។

# ការសម្រាលកូនរបស់ស្ត្រីជនជាតិព្នង

ជនជាតិព្នង គឺជាក្រុមកុលសម្ព័ន្ធខ្មែរដើមមួយប្រភេទ ដែលរស់នៅក្នុងតំបន់ភូមិភាគឦសាន ដូចជា : នៅខេត្តរតនគីរី មណ្ឌលគីរី និងក្រចេះ ....។ ជនជាតិនេះមានទំនៀមទម្លាប់ប្រពៃណីជាច្រើន ដែលដូនតាបានបន្សល់ទុកជាកេរមរតកតាំងពីសម័យអតីតកាល រហូតដល់បច្ចុប្បន្នកាល ហើយនៅតែខិតខំគោរពប្រតិបត្តិតាមគន្លងជំនឿបុរាណដដែល ដូចជា : "ការសម្រាលកូន" ជាដើម ។

## ១- ការសម្រាលកូនតាមលក្ខណៈបុរាណរបស់ជនជាតិព្នង :

នៅមុនពេលសម្រាលកូន ឬឆ្លងទន្លេរបស់ស្ត្រីជនជាតិព្នង បុរសជាប្តីបានត្រៀមរៀបចំម្ហូបអាហារ នំចំណី ផ្លែឈើ និងសម្ភារៈប្រើប្រាស់ទុកជាស្រេច។ ជាពិសេស គឺការសង់រោងតូចមួយសម្រាប់ទុកឱ្យប្រពន្ធ និងកូនរបស់ខ្លួនរស់នៅទីនោះមួយរយៈពេលខ្លី ។

កាលបើប្រពន្ធបានឆ្លងទន្លេហើយ បុរសជាប្តី ក៏នាំប្រពន្ធកូនទៅសម្រាកនៅទីនោះ។ នៅពីមុខរោងនេះ គេមានដោតដើមបបុសទុកជាសញ្ញាសម្រាប់សម្គាល់ ដើម្បីការពារប្រេត ព្រាយបិសាច ឬពួកអារក្សព្រៃភ្នំ បង់បត់នានា កុំឱ្យចូលមកបៀតបៀន ឬយាយីដល់រោងដែលមានស្ត្រីកូនខ្ចី។ ការដោតបបុសនេះ គឺគ្មានអ្វីក្រៅពីប្រាថ្នាបួងសួងសុំសេចក្តីសុខកាយ សប្បាយចិត្តចំពោះប្រពន្ធកូនឡើយ ដើម្បីរស់នៅជួបជុំគ្នា។

## ២- អំណោយជូនយាយឆ្មប ៈ

ចំពោះអំណោយជូនយាយឆ្មប គឺគ្មានអ្វីក្រៅពីជូនទៅតាមសទ្ធាទឹកចិត្ត និងកម្រិតជីវភាពទេ។

- បើសិនជាគ្រួសារណា មានជីវភាពធូរធារ គេអាចជូនជ្រូកមួយគូ ឬ គោមួយគូ ឬក៏ក្របីមួយគូ។

- បើសិនជាគ្រួសារណា មានជីវភាពក្រីក្រ គេអាចជូនមាន់មួយគូ ( មាន់ពណ៌សមួយ និងពណ៌ខ្មៅមួយ) ។

- បើសិនជាគ្រួសារណា មានជីវភាពក្រីក្របំផុត មិនបាច់ជូនក៏បានដែរ។

## ៣- ប្រពន្ធស្លាប់ ប្តីចាប់ផ្តើមចេញពីភូមិ ៈ

ប្រសិនជា ការឆ្លងទន្លេរបស់ស្ត្រីជនជាតិព្នងស្លាប់ ( ព្រាយក្រឡាភ្លើង) ពេលនោះពួកអ្នកភូមិ អ្នកស្រុក និងមេកន្ទ្រាញភូមិ ក៏នាំគ្នានិរទេសដេញបុរសដែលត្រូវជាប្តីនោះ ឱ្យចាកចេញពីភូមិស្រុកចំនួន ៣ ខែ ឬ ១០០ ថ្ងៃ ដោយឱ្យទៅរស់នៅក្នុងព្រៃស្មសាន្ត ស្ងាត់ជ្រងំ កម្សត់តែម្នាក់ឯង។ ពីព្រោះពួកអ្នកភូមិ អ្នកស្រុក និងមេកន្ទ្រាញភូមិ មានជំនឿថា ៈ "បើបុរសណាមានប្រពន្ធស្លាប់ក្នុងពេលឆ្លងទន្លេ បុរសនោះ គឺជាមនុស្សចង្រៃបំផុត" ។

លុះដល់ពេលវេលាផុតកំណត់ ៣ ខែ ឬ ១០០ ថ្ងៃ ពេលនោះពួកអ្នកភូមិ អ្នកស្រុក និងមេកន្ទ្រាញភូមិ ក៏អនុញ្ញាតឱ្យបុរសកំសត់ប្រពន្ធស្លាប់ចោលនោះ អាចវិលត្រឡប់មករកផ្ទះសម្បែងខ្លួនវិញ ហើយរស់នៅតាមលក្ខណៈ

សាមញ្ញដូចមនុស្សដទៃទៀតក្នុងភូមិដែរ ។

ហេតុនេះហើយ ទំនៀមទម្លាប់ប្រពៃណី ឆ្លងទន្លេរបស់ស្ត្រីជនជាតិព្នង តាមលក្ខណៈបុរាណនៅក្នុងភូមិភាគឦសានប្រទេសកម្ពុជា គឺពុំសូវមានច្រើនឡើយ ។ ដោយសារគេយល់ថា បញ្ហានេះមានលក្ខណៈតឹងរ៉ឹង ហើយចាប់បង្ខំចិត្តប្តីឱ្យចាកចេញពីផ្ទះសម្បែង និងកូន ព្រមទាំងបន្ថែមទម្ងន់អម្រែកទុក្ខទឹកភ្នែកព្រាត់ប្រាស់ប្រពន្ធសំណព្វចិត្តទាំងអាឡោះអាល័យ គ្មានថ្ងៃត្រឡប់មកជួបគ្នាវិញ ហើយរស់នៅតាមកម្មផលព្រហ្មលិខិត កម្រិតវាសនាមនុស្សលោក ។

ដោយ : **លី គូលេនសម្បុត្រ**

# អំពីជនជាតិកួយ[៨២]

នៅក្នុងប្រទេសកម្ពុជាយើង មានជនជាតិជាច្រើន ដូចជាភ្នង ជង កួយ ស្ទៀង រដែ ស្អូច ព័រ ជាដើម ។ ពួកនេះចូលចិត្តរស់នៅតំបន់ព្រៃភ្នំ ឆ្ងាយពីសង្គមស៊ីវិល័យ ។ ជនជាតិទាំងនេះ មានរបៀបរបបរស់នៅ ភាសា ប្រពៃណី និងទំនៀមទម្លាប់ប្លែកៗ គ្នា ។ នៅពេលនេះខ្ញុំសូមលើកយកជនជាតិកួយ នៅខេត្តកំពង់ធំមកជម្រាបជូនដូចតទៅ :

## ១~ អំពីទម្រង់រូបរាង និងសម្លៀកបំពាក់ :

*ក- កួយប្រុស* : មានរូបរាងប្រហែលខ្មែរនៅស្រុកលើដែរ បបូរមាត់ក្រឹម សម្បុរសណ្តែកបាយ ស្លៀកខោខ្លី ឬសំពត់ចងក្បិន ពាក់អាវតាមសម័យនិយមខ្លះ ឬអាវបំពង់ពណ៌ខ្មៅ ។ សម្តីនិយាយ ច្រើនបង្អួសចុងឃ្លា ។ តាមការកត់សម្គាល់ កួយច្រើនមានចិត្តប្រែប្រួលនិយាយមិនសូវទៀងទាត់ ។ ចង់ទប់ទល់ពួកនេះ ទាល់តែប្រកាន់ភាពម៉ឺងម៉ាត់ទើបវាសម្រប ហើយកោតញញើតលែង ហ៊ានធ្វើផ្តេសផ្តាស ។

*ខ- កួយស្រី* : ទម្រង់រូបរាងមិនខុសពីស្រីខ្មែរយើងប៉ុន្មានឡើយ ។ ស្រីៗ ទុកសក់បួងគ្រប់គ្នា តែផ្លូងមានទំហំតូច ប្រហាក់ប្រហែលនិងផ្លូងពួកបារគូ ។ គេនិយមស្លៀកសំពត់សម្លុយ ឬចងក្បិន តែក្បិនគេច្រើនរិតកប់ដល់

---

៨២ មានចែកជាពីរភាសា គឺកួយដែក និងកួយដំរី ជនជាតិនេះច្រើនរស់នៅខេត្តកំពង់ធំក្នុងស្រុកកំពង់ស្វាយ ស្រុកសណ្តាន់ ស្រុករវៀង ឃុំនីពេជ្រ ជាដើម ។ លោកមេឃុំនីពេជ្របានសរសេរឯកសារនេះ តាមសំណូមពររបស់លោកចាងហ្វាងពុទ្ធសាសនបណ្ឌិត្យតាមលិខិតលេខ 1131 IB ចុះថ្ងៃទី 22-07-1948

គល់ភ្លៅ។ ស្រីចាស់ ច្រើនតែយកអាវមកចងពាតរិតដងខ្លួន គេមិនសូវពាក់អាវទេ។ ក្មួយក្រមុំ ពាក់អាវជានិច្ច។ ហើយជួនកាលមានថែមដណ្ដប់ក្រមាពីលើអាវទៀតផង។ គេពាក់តែងលម្អខ្លួនដោយពាក់ខ្សែកប្រាក់ ឬពាក់ចារ៉ុដោយខ្សែអំបោះ។ នៅកដៃ មានពាក់កងប្រាក់ ឬស្ពាន់ស។ ពួកនាងស្រឡាញ់អង្កាំលើសអ្វីៗទាំងអស់។ គេយកមកពាក់ធ្វើខ្សែក ឬខ្សែដៃ។ ម្រាមដៃសឹងលម្អដោយចញ្ចៀនប្រាក់ ឬស្ពាន់ តែពុំមានដាំត្បូងទេ។ ក្រមុំៗ និយមយកផ្កាឈើក្រអូបមកសៀតត្រចៀក ឬសៀតផ្នួងសក់ដើម្បីលើកសម្រស់។ ស្រីក្មួយមានទំនៀមទម្លាប់ចោះត្រចៀក ពាក់ក្រវិល ឬការដែរ។

## ២. អំពីជំនឿសាសនា ៈ

ក្រៅពីជឿលើអរុក្ខអារក្សអ្នកតា ជនជាតិក្មួយក៏ជឿហើយកាន់ព្រះពុទ្ធសាសនា[៨៣] ផងដែរ។ មានវត្តក្មួយមួយសម្រាប់ស្រុកកំពង់ស្វាយ និងស្រុករវៀង ដែលមានព្រះសង្ឃសុទ្ធតែជាជនជាតិក្មួយបួសនៅក្នុងវត្តព្រៃទទឹងនោះ។ តាមការបញ្ញត្តិរបស់វិន័យ លោកសង្ឃក្មួយមិនអនុញ្ញាតឱ្យនិយាយភាសាក្មួយឡើយ។ ការប្រាស្រ័យទាក់ទងគ្នាគ្រប់យ៉ាង ត្រូវនិយាយជាភាសាខ្មែរ។ ទាល់តែចាកសិក្ខាបទមកជាគ្រហស្ថវិញ ទើបនិយាយភាសាកំណើតបាន។

---

៨៣ ជនជាតិក្មួយចូលឆ្នាំ នៅថ្ងៃជាមួយគ្នា និងខ្មែរយើងដែរ។ គេលេងល្បែងសព្វសារពើដូចខ្មែរសុទ្ធសាធ ប៉ុន្តែរយៈពេលចូលរបស់ពួកគេ គឺ ១ខែ។ មានធ្វើពិធីចូលឆ្នាំ និងពិធីចេញឆ្នាំ។ ក្នុងចន្លោះថ្ងៃចូល និងចេញ គេលេងល្បែងកម្សាន្តផ្សេងៗ ដោយមិនរវល់ចាប់កាន់ការងារអ្វីទាំងអស់។ ខ្ញុំដឹងអំពីរបៀបរបបនេះនៅពេលខ្ញុំទៅជំរឿននៅភូមិក្មួយក្នុងកំលុងឆ្នាំ១៩៦០

## ៣. អំពីសិល្បៈ :

ជនជាតិកួយគ្មានបទចម្រៀងប្រចាំពូជសាសន៍ទេ។ គេច្រៀងតាមតែបទចម្រៀងខ្មែរ។ ក្រៅពីនេះ កួយចេះផ្លុំប៉ីពកប្រគំបទពិរោះលន្លង់លន្លោច និងផ្លុំប្រកូកស្នែងជាបទងាយៗឬវាយអង្គួច។ សំឡេងអង្គួចមិនមែនគ្រាន់តែប្រគុំសាច់ភ្លេងប៉ុណ្ណោះឡើយ ប៉ុន្តែក៏អាចប្រើជាសញ្ញាឆ្លើយឆ្លងរវាងក្រមុំ និងកំលោះទៀតផង។

## ៤. អំពីអក្សរសាស្ត្រ និងភាសា :

ជនជាតិកួយគ្មានអក្សរទេ។ អ្នកបួសក្នុងព្រះពុទ្ធសាសនារៀនតែអក្សរខ្មែរ ហើយសូត្រធម៌ជាបាលី ប្រែជាខ្មែរដូចព្រះសង្ឃយើងដែរ។ ភាសានិយាយរបស់គេ ស្រដៀងគ្នានិងចាម និយាយខ្មែរ។

### ភាសានិយាយ

| ពាក្យខ្មែរ | ពាក្យកួយ |
|---|---|
| ត្រី | កា |
| ឆ្អែ | ច |
| ប្រាក់ | ផ្រាក់ |
| ស៊ីបាយ | ចាដួយ |

ការរាប់ចំនួន មានពាក្យអាចយកមកប្រើប្រាស់បានតែ ១ ទៅដល់ ២៩។ ចាប់ពី ៣០ ឡើងទៅ ប្រើតាមពាក្យខ្មែរទាំងអស់។

## ៥. អំពីរបររកស៊ី

ដើម្បីចញ្ចឹមជីវិត ជនជាតិកួយប្រកបរបររកសិកម្មជាមូលដ្ឋាន។ គេធ្វើស្រែ ២ ឬ ៣ ក្បែរៗភូមិ ធ្វើរបៀបលេងៗសោះតែខាន។ គេនិយមធ្វើចម្ការតាមរបៀបកាប់ព្រៃដុត រួចដាំស្រូវ ពោត សណ្តែកទ្រើង ល្ង ល្ពៅ ននោង។ ដំណាំផ្សេងៗត្រូវបានដាំចម្រុះគ្នានៅក្នុងចម្ការតែមួយ។ ក្រឡាផ្ទៃនៃចម្ការមានពី ១ ទៅ២ ហិចតា។ គ្រួសារនីមួយៗចិញ្ចឹមគោញី ១ ឬ ២ ចិញ្ចឹមមេមាន់ ២ ឬ ៣ ក្បាល។ ក្រៅពីរបរធ្វើស្រែចម្ការ ជនជាតិកួយរកស៊ីកាប់ឈើ ចាំងជាហុបធ្វើទូក ត្បាញឬស្សី ឬផ្តៅ ធ្វើដំបូលរទេះ ធ្វើគ្រួស(៨៤) ចន្ទុះ ដងជីរទឹក បេះជីរចុង បោចវល្លិ៍ ផ្តៅ ដំដែកធ្វើកាំបិត ពូថៅ ដឹង ។ល។ ស្រីៗត្បាញរវៃអំបោះជូនកាលធ្វើសូត្របន្តិចបន្តួចផងដែរ។ ប្រុសៗចូលចិត្តបរបាញ់ ដាក់អន្ទាក់ ទាក់សត្វព្រៃ ព្រោះពួកនេះប៉ិនប្រសប់នឹងស្គាល់ដានសត្វគ្រប់យ៉ាង។

## ៦. អំពីទីលំនៅ :

កាលណាកាប់ព្រៃរួចហើយ គេយកភ្លើងទៅដុតឱ្យឆេះទៅជាផេះ។ គេនាំគ្នាទៅសង់រោងតាមពួកក្រុមដូចនៅឯភូមិដែរ។ រោងនៅចម្ការក៏ដូចនៅភូមិមានប្រវែងទទឹង ៣ ទៅ ៤ម៉ែត្រ បណ្តោយ ៥ ទៅ ៦ម៉ែត្រ។ សសរខ្ទមធ្វើពីឈើប៉ុនៗចុងភ្លៅ ឬប៉ុនកំភួនជើង ដាំញឹកស្អេកជិតៗគ្នា ធ្វើជាចន្ទល់។ ខ្ទមទាំងនោះមានកម្ពស់ពី ១,៦០ម ទៅ ១,៨០ម។ រនាបធ្វើពីកូនឈើតូចៗត្រង់ៗ ដែលក្រងរែងនឹងវល្លិ៍ ឬចម្រៀកផ្តៅឱ្យជាប់គ្នាជាកម្រង។ ចង្ក្រាននៅ

---

(៨៤) ប្រដាប់ប្រដាដងទឹក ធ្វើពីឬស្សី(រាងដូចកញ្ជើជើង) ខ្ទុកម្រ័ក្សណ៍កុំឱ្យលេចទឹក និងដើម្បីប្រើបានយូរ។

លើផ្ទះសម្រាប់ស្លដណ្តាំ។ ឯចង្ក្រាន្តនៅក្រោមផ្ទះ សម្រាប់បង្កាត់ភ្លើង អាំង ឆ្អើរ ទាំងយប់ ទាំងថ្ងៃ។ គេយកស្លឹកផ្តៅសោម (៨៥) មកតម្រៀបចងក្រងជាផ្ទាំងៗ សម្រាប់ប្រក់ដំបូល។ ជណ្តើរ ជួនមាន ជួនគ្មាន។ ដើម្បីឡើងលើផ្ទះ គេយកឈើសណ្តូកមកដាក់គងលើមាត់ទ្វារខ្ទម ផ្អែករាងទ្រេតបន្តិច។ ជញ្ជាំងផ្ទះមិនមានភាពគត់មត់ជិតមិតប៉ុន្មានទេ។ ដូច្នេះ អ្នកផងអាចមើលឃើញអ្វីៗនៅក្នុងផ្ទះទាំងអស់។

## ៧- លក្ខណៈពិសេសរបស់ជនជាតិក្អួយ :

ជនជាតិកួយមានចំណុចខ្លាំងពីរយ៉ាង គឺ :

ក- ពូកែខាងដើរលឿន ទាំងស្រី ទាំងប្រុស ហើយមានអំណត់អត់ធន់។ គេអាចទូល រែករបស់ធ្ងន់ៗក្នុងដំណើរទៅកាន់ទីឆ្ងាយបាន ដោយពុំសូវអស់អន់ប៉ុន្មានឡើយ។ ល្បឿនដែលកួយដើរ ស្មើនឹងល្បឿនដែលខ្មែរយើងរត់ត្រឹកៗ។

ខ- ពូកែខាងមិនខ្លាចខ្មោចព្រាយបិសាច មិនខ្លាចសត្វសាហាវ មានខ្លាដំរីជាដើម។

## ៨- ប្រពៃណីផ្សេងៗរបស់សាសន៍ក្អួយ :

ជនជាតិកួយខ្លាចជំងឺណាស់។ កាលបើជំងឺឆ្លងចូលមករាតត្បាត ហើយបណ្តាលឱ្យមានមនុស្សស្លាប់ ពីរ ឬបីនាក់នោះ អ្នកស្រុកទាំងអស់នាំគ្នារត់ចោល

(៨៥) សោមដូចគ្នានឹងផ្តៅដែរ តែស្លឹកវាញឹកហើយធំជាង។ ស្លឹកសោម និងធាងពុំមានបន្លាដូចផ្តៅទេ។ គេយកស្លឹកសោមទាំងធាងមកតម្រៀបហើយដេរក្រងជាផ្ទាំងៗសម្រាប់ប្រក់ផ្ទះ។

ភូមិ ទៅនៅជាយព្រៃ បែកខ្ញែកគ្នាអស់ ។ ទាល់តែជំងឺនេះបានកន្លងផុតទៅទើប វិលត្រឡប់ចូលមកនៅក្នុងភូមិវិញ ។ ខ្លះទៀតទៅបាត់រហូតឥតវិលវិញទេ ។

កំលោះកួយ មិនសូវស្រវាស្រទេញរវៀសរវៃក្នុងការងារទេ ។ ពេលយប់ គេតែងនាំគ្នាទៅលូកក្រមុំៗ ។ សូមជម្រាបថា ក្រមុំកួយទាំងអស់ កម្រមានដោះនៅបរិសុទ្ធណាស់ ដោយហេតុកំលោះមកលូកលេងរៀងរាល់យប់ ។ ក្រមុំកួយមានទម្លាប់បុកអង្ករ ឬស្រូវ យកដៃគ្នានៅផ្ទះណាមួយ ដែលគេបានណាត់គ្នាទុកជាមុន ។ ស្រីៗបុកអង្ករក្នុងចង្វាក់ញាប់រន្ថើន ។ ដើម្បីឱ្យលាន់ឮសំឡេងអង្រែខ្ទរទៅបានឆ្ងាយ គេជីកលុងដីពីក្រោមបាតត្បាល់ ។ នៅពេលស្រីៗប្រជុំគ្នាបុកអង្ករ ពួកកំលោះនាំគ្នាមកចោមរោម និយាយសាសងលូកលងពាក្យពេចន៍ផ្ដោះផ្ដងស្នេហា ។ កាលណាស្រីៗបុកអង្កររួចហើយ គេបែកគ្នាទៅដេកតាមផ្ទះរៀងៗខ្លួន ។ ឯប្រុសៗក៏តាមលូកដោះនារីណាដែលគេបានដឹងចិត្តគ្នាទេវិញទៅមករួចហើយ ។ ពួកកំលោះលូកដៃតាមប្រហោងជញ្ជាំង ឬប្រហោងរនាប ហើយស្ទាបដោះក្រមុំកួយលេងយ៉ាងយូរ ទាល់តែឪពុកគេគ្រហែមទើបដើរថយចេញ ។ មួយសន្ទុះក្រោយមក ក៏ត្រឡប់មកលូកវិញទៀត ។ បើស្រីមិនស្រឡាញ់ប្រុសទេ វាមិនព្រមឱ្យប្រុសនោះ លូកលាន់វាទេ គឺវាមានឧបាយកលដេកឱ្យឆ្ងាយពីប្រហោងរនាប ឬប្រហោងជញ្ជាំង ធ្វើមិនឱ្យប្រុសលូកបាន ។ ផ្ទុយទៅវិញ បើគេស្រឡាញ់គ្នា ត្រូវរ៉ូវគ្នាហើយនោះ គេបណ្ដោយឱ្យប្រុសកំណាន់លូកកំសាន្តតាមចំណង់ ។

កំលោះខ្មែរក៏ចង់ទៅបន្លំលូកក្រមុំកួយដែរ ប៉ុន្តែគេពិបាកឆ្លៀតឱកាសណាស់ ។ ទាល់តែមានពិធីបុណ្យខ្មោច លេងទាយល្បែងផ្គាប់ផ្ងារដោយបោះសេន

ក្រហម ហើយភ្ញាល់គ្នាទាយរូប ដែលនៅលើសេន។ បើកំលោះឈ្នះល្បែងនោះ អាចមានសិទ្ធិប្រឡូកប្រឡែង ដណ្ដើមដោះយកខ្សែក ឬក្រមាពីក្រមុំៗ ហើយឆ្លៀតឱកាសនោះ លួកលាន់ លចិត្ត។ បើដឹងចិត្តគ្នាហើយ អាចទៅលូកគេនៅពេលយប់បាន ដោយពុំមានឧបសគ្គឡើយ។

កាលពីកំឡុងឆ្នាំ ១៩៥៦-៥៧[៨៦] (✱) ខ្ញុំបានឮមិត្តភក្តិខ្ញុំខ្លះៗ ដែលទៅធ្វើជាគ្រូបង្រៀននៅខេត្តកំពង់ធំនៅភាគខាងជើង (ជាំក្សាន រវៀង សណ្ដាន់..) និយាយរឿងរ៉ាវផ្សេងៗ ទាក់ទងទៅនឹងប្រពៃណីទំនៀមទម្លាប់ជនជាតិកួយ ប្រាប់ឱ្យខ្ញុំបានដឹង ពិសេសអំពីការលូកក្រមុំកួយនេះតែម្ដង។ ក្រមុំកួយតែងចាប់ចិត្តស្រឡាញ់គ្រូកំលោះៗជាតិខ្មែរ ដែលទៅបង្រៀននៅតំបន់ស្រុកភូមិកួយ។ ពិសេសគ្រូកំលោះខ្មែរ ក្ដាប់បានចំណុចខ្សោយរបស់ក្រមុំកួយ គេបានទិញខ្សែអង្កាំធ្វើជំនូនស្នេហ៍ចំពោះក្រមុំជនជាតិ ទាក់ទាញចិត្តនារីឱ្យស្រឡាញ់ខ្លួន។ នៅពេលយប់ ទាំងកំលោះកួយ ទាំងកំលោះខ្មែរជាគ្រូបង្រៀន បានត្រាច់ចរក្នុងរាត្រី លូកដៃស្ទាបសុដន់កម្សាន្តចិន្ដា។ ជួនកាល ការស្រឡាញ់គ្នានេះ មិន

---

(៨៦) តាំងពីឆ្នាំ ១៩៥៤ ដល់ ១៩៧០ ខ្ញុំត្រូវបានចាត់តាំងឱ្យទៅបង្រៀននៅខេត្តកំពង់ធំ ដែលនៅទីនោះ ខ្ញុំមានមិត្តភក្តិជាច្រើន ដែលត្រូវបានចាត់ឱ្យទៅបង្រៀននៅស្រុករវៀង ជាំក្សាន សណ្ដាន់ ហើយនិយាយប្រាប់ខ្ញុំអំពីការលូកក្រមុំកួយ និងទំនៀមទម្លាប់ប្រពៃណីរបស់ជនជាតិកួយ។

(✱) តាំងពីឆ្នាំ ១៩៦០ រូបខ្ញុំបានត្រូវចាត់តាំងឱ្យទៅជំរឿនប្រជាជននៅតំបន់ស្រុកកំពង់ស្វាយលើ ជាប់នឹងស្រុកសណ្ដាន់។ ខ្ញុំបានចូលទៅភូមិកួយជាច្រើន មានភូមិស្មៀ វាលវែង គោល ដែលជាភូមិធំៗ មានសុទ្ធតែជនជាតិកួយរស់នៅ។ ពេលជំរឿន ត្រូវយកខ្មែរម្នាក់ដែលចេះភាសាកួយធ្វើអ្នកមកប្រែ។ ខ្ញុំបានកូតទ្រឱ្យពួកកួយស្ដាប់ ពួកវាសរសើរថា ខ្ញុំកូតទ្រពិរោះណាស់ ពិរោះជាងពួកវា។

ព្រមស្ថិតនៅត្រឹមការលូកលេងដោះនៅរាល់ៗយប់នោះទេ គឺមានការជ្រុលជ្រួស រហូតដល់រួមរក្សខាងផ្លូវភេទជាមួយគ្នាទៀតផង។ ក្នុងករណីនេះ ប្រសិនបើឪពុកម្ដាយខាងស្រីដឹងការណ៍ គេហៅខាងប្រុសមកសួរថាៈ តើ "សែនចេញ" ឬ "សែនចូល" ?(៨៧)(✹)។ សែនចេញគឺជាពិធីចាត់ចែងឡើង ដើម្បីជម្រាបនិងសុំទោសព្រលឹងដូនតាកួយ កុំឱ្យប្រកាន់កូនចៅ ដែលជ្រុលជ្រួសភ្លាំងភ្លាត់ខាងរឿងស្នេហា ហើយមិនបាច់យកគ្នាជាប្ដីប្រពន្ធក៏បាន។ ពិធីសែនចេញមានរណ្ដាប់មួយបែបដោយឡែក .....។ តែបើសែនចូលវិញ គឺជាពិធីរៀបអាពាហ៍-ពិពាហ៍ពេញទីតែម្ដង ដែលគេតែងចាត់ចែងធ្វើទៅតាមប្រពៃណីទំនៀមទម្លាប់ជនជាតិកួយ។ ពួកគ្រូដែលត្រូវជាមិត្តភក្ដិខ្ញុំ និយាយទៀតថា : កូនក្រមុំកួយខ្លះស្អាតមែនទែន សម្រស់គេមិនចាញ់កូនក្រមុំខ្មែរឡើយ។ តែពួកគេមិនដាច់ចិត្តយកមកធ្វើជាប្រពន្ធពេញច្បាប់ ព្រោះមានក្ដីបារម្ភពីរយ៉ាង :

- ក្រែងមិនអាចចូលចុះ ក្នុងសង្គមស៊ីវិល័យ
- ក្រែងឪពុកម្ដាយមិនយល់ស្របជាមួយផង ព្រោះជាអ្នកស្រុកព្រៃ

ដូច្នេះ រាល់ការថ្លោះធ្លោយ ជាប់ជំពាក់អន្ទាក់ស្នេហ៍ជាមួយក្រមុំកួយ

---

(៨៧) សែនចេញ គឺគ្រាន់តែសែនជម្រាប និងសុំទោសព្រលឹងដូនតា កុំឱ្យប្រកាន់ខឹងចំពោះការជ្រុលជ្រួសភ្លាំងភ្លាត់របស់កូនស្រី រួចហើយមិនយកគ្នាជាប្ដីប្រពន្ធទេ តែត្រូវឈប់មកទាក់ទងតទៅទៀត។

(✹) សែនចូល គឺរៀបអាពាហ៍ពិពាហ៍តាមប្រពៃណីកួយ ដោយមានរណ្ដាប់រណ្ដាភស្ដុភារតាមទំនៀមទម្លាប់សាសន៍ជាតិគេ រួចហើយរួមរស់នៅជាមួយគ្នាជាប្ដីប្រពន្ធតរហូតទៅ។ ខ្ញុំស្ដាយណាស់. ដោយពុំទាន់អាចស្រាវជ្រាវដឹងអំពីរបៀបរៀបរណ្ដាប់ភស្ដុភារសម្រាប់ពិធីទាំងពីរបែបនេះ។

គេតែងតែជ្រើសរើសយកពិធីសែនចេញជាដរាប ។ តាមស្មាន ពិធីនេះត្រូវចំណាយប្រាក់មិនហួសពី ២០០ ឬ ៣០០ ( ក្នុងជំនាន់នោះ) ឡើយ ។ តែទោះជាយ៉ាងណាក៏ដោយ ការលេងសើចបែបនេះ ជាមួយនឹងស្នេហាពិត១នោះ មិនមែនជាប្រការល្អប៉ុន្មានឡើយ ។ វាគឺជាការយកកាំបិតទៅឆូតសាច់បេះដូង ឱ្យឈឺចាប់ទទេ១តែប៉ុណ្ណោះ ។ តើអាចមានប្រពៃណីលូកលេង របៀបនេះទៀតឬទេ នៅក្នុងសហគមន៍ជនជាតិកួយ ?។ មតិទូទៅស្មានយល់បានថា ទោះបីនៅតំបន់ដាច់ស្រយាល ឆ្ងាយពីទីប្រជុំជនយ៉ាងណា ក៏អារ្យធម៌ទំនើបបានហូរចូលទៅដល់តំបន់ព្រៃភ្នំទាំងនោះខ្លះ១ ជាមិនខាន ។ ហើយកុលសម្ព័នកួយ ក៏ដូចជាជនជាតិភាគតិចដទៃទៀត នៅកម្ពុជា ពិតជាបានតាមប្រកៀកប្រកិតនឹងជនជាតិខ្មែរដែរ ។ ទាំងសម្លៀកបំពាក់ ទាំងភាសា ទាំងប្រពៃណីទំនៀមទម្លាប់ផ្សេង១ ពិតជាមានការវិវត្តិប្រែប្រួលទៅរកវឌ្ឍភាព ជាពុំខាន ។

កែសម្រួលពាក្យពេចន៍ ឃ្លាឃ្លោង
និងបន្ថែមអត្ថន័យ ដោយ
**មៀច ប៉ុណ្ណ**

# ការបរបាញ់សត្វ

នៅតំបន់ព្រៃភ្នំសម្បូរទៅដោយម្រឹគីម្រឹគា បក្សាបក្សី ជាហេតុងាយស្រួលក្នុងការប្រកបរបរចិញ្ចឹមជីវិតរបស់អ្នករស់នៅតំបន់នោះ គេតែងហៅថា **"ការបរបាញ់សត្វ"** ។

មុខរបរប្រមាញ់នេះ មានច្រើនបែបច្រើនយ៉ាង តាមការចូលចិត្ត និងតាមកាលវេលារបស់ប្រជាជន និយាយដោយខ្លីមាន ៣ យ៉ាងគឺ :

- ដើរលប
- ចាំ ផ្ទះ
- អន្ទាក់- អង្គប់

## របៀបដើរលប

គេចេញពីព្រលឹមស្រាងៗ សំដៅទៅវាលណាដែលធ្លាប់មានសត្វរកស៊ី អាចមានគ្នាពីរនាក់ ឬបីនាក់ ឬម្នាក់ឯងក៏មាន។ គេដើរតាមមាត់ព្រៃមើលទៅវាលល្បាស់ទឹកផ្លែ[៨៨] គេដើរដោយប្រុងប្រយ័ត្ន មិនខាកស្ដោះក្អកកណ្ដាស់ ភ្នែករំពៃមើលទៅទិសដៅ ដែលគេសង្ស័យ ។

ជូនកាលគេបង្អើរសំឡេងផ្លុំស្លឹកផង "វ៉ែត" "វ៉ែត"។ សំឡេងនេះ បើមានឈ្លូសក៏មក ខ្លាក៏មក។ ឈ្លូសស្មានជាសំឡេងកូនវា ខ្លាស្មានជាសំឡេងសត្វត្រូវជាចំណី ។

---

(៨៨) ល្បាស់ទឹកផ្លែ = ព្រៃដែលលាស់ក្នុងរដូវដើមឆ្នាំ ដែលមានទឹក ឬមានផ្លែធ្លា-កន្ទួតព្រៃ-ផ្លែ ពោន ( ម្កាក់ព្រៃ) សត្វឈ្លូសច្រើនមកស៊ី ។

លុះថ្ងៃក្ដៅគេនាំគ្នាឈប់សម្រាក។ គេអាចលបបាននៅពេលល្ងាចត្រជាក់ម្ដងទៀត។ នៅពេលថ្ងៃក្ដៅ សត្វសម្រាក គេតែងហៅថា "សត្វស្រឹង"(៨៩) វាអាចចូលសម្រាកក្នុងព្រៃជ្រៅ ឬមាត់ព្រៃជ្រៅ។ គេអាចដើរចេញពីមាត់វាល ទៅរកមាត់ព្រៃ។

## របៀបចាំ "ផ្ទះ" ឬ "ច្រាប"(៩០)

ចំណីសត្វក្រៅពីស្មៅ មានស្លឹកឈើ ផ្លែកន្ទួតព្រៃ សម៉, ចំបក់, អង្គ្រង, ពោន (ផ្លែម្កាក់ព្រៃ) ធ្លា, (ផ្លែដូចអំពិលទឹក) ស្វាយស្រគំ (ផ្លែដូចរំដេញ ស្លឹកដូចស្លឹកព្រីង) .....។

កាលណាគេបានឃើញផ្លែឈើខាងលើ ដែលមានគន្លងសត្វចូលស៊ីយប់ ឬថ្ងៃ គេទៅចងផ្ទះចាំផ្លែនោះ។

**អំពីផ្លែធ្លាក្រញាញ់ :** ធ្លានេះគេនិយមឱ្យអំណាច ព្រោះវា "ធ្វើទុក្ខខ្លាំងណាស់" បើមិនអាចបិទបាំងមន្តអាគមស្ដោះផ្លុំចងព័ទ្ធទេ (ធ្លាក្រញាញ់លងណាស់)។

គេឱ្យអំណាចទៅលើឫស "ផុស" បើមានឫសផុស គេយកកាំបិតមកចាក់ ពុំនោះទេគេយកទ្រាំង(៩១) ដោតនៅគល់។

គេមិនបានចងផ្ទះនៅដើមនេះទេ គេអាចចងដើមណានៅជិតៗនោះ ដោយគេយល់ថា ការចាំផ្ទះមានការលំបាកយ៉ាងនេះ ទើបព្រានធំ មានថ្នាំ

---

(៨៩) សត្វស្រឹង = គឺសត្វឈរសម្រាកក្រោមម្លប់ (ទំពារអៀង)។

(៩០) ច្រាប = គឺជាត្រពាំង កន្លែងដែលមានដីប្រៃ ដែលសត្វចូលចិត្តទៅស៊ី។

(៩១) ទ្រាំង = គឺជាធាងរបស់ដើមខ្ទែង ស្លឹកវាគេយកទៅធ្វើសាស្ត្រាស្លឹករឹត ឬប្រក់ផ្ទះ។

សម្រាប់រម្ងាប់ព្រៃ មានបាលីចងព្រាយម្រេញគង្វាល។

**ផ្នាំរម្ងាប់ព្រៃ :**

- ឫសកន្ទុយចចក ៧ ចំណិត
- ឫសព្រះខ្លប (ផ្កាលឿង) ៧ ចំណិត
- ស្លា ................ ៧ ចំណិត

ទំពាព្រួសទៅលើឫសផុស ឬជុំវិញគល់ឈើចងផ្ទះ

- **បាលីព័ទ្ធសីមា** = ជាលោ មហាជាលោ ។ល។

## របៀបចាំប្រាប

ធម្មតាសត្វ ម្រឹគ ក្របី ខ្ទីង ទន្សោង ..... ចូលចិត្តលិទ្ធប្រាបណាស់ បើមានទឹកល្អក់ៗ ដក់តាមក្រឡិកក្រឡុក វាក្រេបផឹក ..... ។

ប្រាបណាដែលមានគន្លងសត្វចូលស៊ីច្រើន គេទៅចងផ្ទះចាំកន្លែងនោះ អាចចងផ្ទះពីរ ឬបីតាមការគួរនៃគំនិតគេ។

ការចាំផ្ទះផ្លែក្តី ប្រាបក្តី ទឹកក្តី តាមការផ្តល់ពត៌មានពីពួកព្រានមានអត្ថន័យដូចគ្នា។ ដើម្បីការពារសុវត្ថិភាព គេចងចង្កេះគ្នាទៅវិញទៅមក ហាមមិនឱ្យឆ្លើយបើមាននរណាហៅ មិនឱ្យចុះដី ទោះបីសំឡេងនោះដូចសំឡេងអ្នកណាម្នាក់ក្នុងគ្រួសារនោះក៏ដោយ លុះត្រាតែព្រឹកព្រាង ថ្ងៃរះខ្ពស់ល្មមប៉ាន់ស្មានគ្មានការបំភ័យទេ ទើបអាចនាំគ្នាចុះបាន។

គេតែងនឹកដល់រឿងនិទានមួយថា ថ្ងៃមួយព្រានប្រមាញ់ពីរនាក់ ទៅចាំផ្លែផ្កាក្រញ៉ាញ់ បានដាក់កិច្ចសន្យាជាមួយគ្នាជាមុនថា "បើមានសំឡេងហៅជារូបអ្នកណាម្នាក់ ក្នុងគ្រួសារយើងក៏ដោយ ក៏មិនត្រូវឆ្លើយ មិនត្រូវចុះបើ

មិនទាន់ឃើញថ្ងៃរះមកពីកើតទេ"។

លុះយប់ជ្រៅ នៅពេលដែលយន់ដំណេកមួយភាំង ព្រាយច្រាបកាឡា ខ្លួនជាម្ដាយក្មេកមកប្រាប់ថា "ប្រពន្ធកូនឈឺពោះឆ្លងទន្លេ កំពុងស្រែកបម្រះ នន្ទៀលពេញផ្ទះ មុខជាមានគ្រោះថ្នាក់ដល់កូនប្រពន្ធមិនខាន" ពួសម្ដីបោក ប្រាសមិនចាំច្បាស់ពាក្យសន្យា ក៏ចុះមកដី ពេលនោះត្រូវបានជាចំណីខ្លាយ៉ាង ឆ្វាញ់ពិសា។

ព្រានម្នាក់ភ្ញាក់ដឹងខ្លួន បាត់ព្រានម្នាក់មិនឃើញ កើតមានការព្រួយ បារម្ភ ភ័យខ្លាច តែខំពង្រឹងស្មារតីតទល់នឹងឧបសគ្គ។ ព្រឹកថ្ងៃរះខ្ពស់ ទើបចុះដី ឃើញតែឈាមនៅពេញពាសក្រោមផ្ទះ។

## របៀបចាំទឹក

នៅរដូវប្រាំង ទឹកថ្លុក ត្រពាំង អូរតូចតាចបានខះរីងស្ងួតហួតហែងនៅ តែតាមកន្លែងស្លប ត្រពាំងធំ ជាំ។

ពួកព្រានដើរសំដៅទៅរកត្រពាំង ឬខ្លបទាំងនោះ បើមានគន្លងសត្វ ចូលផឹក គេក៏ចងផ្ទះចាំទីនោះ។

## របៀបចាំអាចម៍

សត្វកែះ(៩២) ខ្លាឃ្មុំ មានប្រពៃណីខុសប្លែកពីសត្វដទៃ។ វាជុះអាចម៍ តែមួយកន្លែងទេ ក្នុងមួយជីវិតរបស់វា លើកលែងតែមានភ័យអន្តរាយ ទើបវា ផ្លាស់ទីកន្លែងជុះ។

---

(៩២) សត្វកែះ = ឈ្មោះសត្វចតុប្បាទព្រៃ រូបភាពស្រដៀងនឹងពពែ. រស់នៅតែក្នុងព្រៃភ្នំ។

កាលណាគេបានឃើញអាចម៍វាហើយ គេចាំវាទៅជុះ នោះគេនឹងបានជួបព្រឹក ឬល្ងាចគេចមិនផុតទេ។ និយាយនេះគឺចំពោះអាចម៍ដែលវាមកជុះរាល់ថ្ងៃ បើអាចម៍ចាស់គេមិនចាំទេ។ បើជាខ្លាឃ្មុំ ទោះជាអាចម៍ចាស់ក៏គេអាចយកទៅស្លក្រមួនយកទៅលក់ដូរបានដែរ។

សត្វកែះមានលក្ខណៈពិសេសជាងខ្លាឃ្មុំ វារកស៊ីជិត ហុង-ប៉ើយ[៩៣] កាលណាមានអាសន្ន គឺព្រានព្រៃរកបាញ់វា វា លោតទម្លាក់ទៅក្នុងហុងជ្រោះនោះ ប្រសិនជាវាបាក់ជើង ..... វាអាចលិទ្ធខ្លួនវាជា ដើរបានដូចដើមវិញ។

## របៀបចាំសំឡាញ

"សំឡាញ" គឺជាខ្សែដែលធ្វើអំពីបណ្តូលខ្លែង[៩៤] ឬព្រាលសម្រងពន្លុង ឬស្វ៊ែ។ គេតភ្ជាប់គ្នាមួយចំរៀក១ អាចបានមួយរយម៉ែត្រ ឬពីររយម៉ែត្រ គេលាតសន្ធឹងកាត់ទទឹងគោកណាមួយ ដែលគេសម្គាល់ថាមានសត្វរកស៊ីរាល់ថ្ងៃ ហើយព្រានពីរនាក់អង្គុយចាំចុង-ដើម។ ធម្មតាសត្វព្រៃ កាលណាជួបខ្សែកាត់មុខវាយ៉ាងនេះ មិនអាចកន្លងបានទេ គឺត្រូវតែដើរសៀវខ្សែនោះទៅចុង ឬគល់សំឡាញ ពេលនោះគឺអាចបានដៃព្រានព្រៃ ដែលអង្គុយចាំនៅទីនោះហើយ។

## របៀបចងរាំង[៩៥] ចាំល្បាស់

ក្នុងវាលស្រែណាមួយដែលមានប្រើស រមាំងស៊ីជាប្រចាំ ហើយច្រើន

---

(៩៣) ហុង-ប៉ើយ = គឺអណ្តូងជ្រៅ ឬ ជ្រោះ ដែលមានច្រាំងចោទខ្លាំង។

(៩៤) ខ្លែង = គឺជារុក្ខជាតិម្យ៉ាងស្រដៀងនឹងដើមត្នោត តែមានធាងវែង១ ស្លឹកវាយកទៅត្បាញធ្វើកន្ទេល ឬធ្វើសាស្ត្រាស្លឹករឹត។

(៩៥) ចងរាំង = គឺចងខ្សែព័ទ្ធជុំវិញ ទុកតែកន្លែងចេញ ឬកន្លែងសម្រាប់បាញ់។

កន្លែង គេចងរាំងព័ទ្ធស្រែនោះ ដោយទុកតែមួយប្រឡោះសម្រាប់វាចូលស៊ី ហើយគេ ចង ផ្ទះចាំនៅទីនោះ បើមិនចូលថ្ងៃនេះ អាចស្អែកទៀតមិនខាន។

របៀបលើកព្រៃ ឬដេញព្រៃ

បើគេបានឃើញកន្លែងជ្រូក ប្រើស រមាំង ក្តាន់ ..... ចូលព្រៃតូចៗណាមួយ គេនាំគ្នាទៅដេញបង្អើល គេនិយមហៅថា "ដេញព្រៃ ឬលើកព្រៃ" ក្រុមអ្នកដើររុកព្រៃស្រែកបង្អើល បង្អៅឡូឡា វ៉ូសវ៉ាស គេនិយមថា "កូនល្បើក"។ គេដេញពីណាទៅណា ព្រានព្រៃនៅចាំច្រកណា. បើសត្វរត់ទៅចំហើយ ដៃព្រានព្រៃបាញ់ខុស គេនិយមហៅថា "លាកព្រាន"[៩៦] គឺគេនាំគ្នាយកសំបុកអង្ក្រង ដែលមានមេនោតិច ឬច្រើន (តាមការនិយម) ទៅវាយលើខ្នងព្រានព្រៃដែលបាញ់ខុសនោះ។

ខ្លះគ្រាន់តែប្រមាថចង់ឱ្យអង្ក្រងខាំ ខ្លះវាយទម្លាក់ទឹក ខ្លះទៀតដាក់ត្បោក[៩៧] ព្រាន។

## របៀបឆ្លុះ

កាលពីមិនទាន់មានភ្លើងចង្កៀងថ្មស្ពុយ, ពិល, កែវ, អាគុយ ចាស់ៗ គាត់ប្រើភ្លើងទៀន ឬកូនខ្វាន់ដើរតាមក្រោយ។ របៀបនេះតាមខ្ញុំធ្លាប់ដើរជាមួយលោកតាព្រានអ្នង ស្នងតាន់ នៅភូមិចំបក់កោង ឃុំត្បែងពីរ ស្រុកគូលែន ខេត្តព្រះវិហារ សត្វសាំងជាងកែវ ឱ្យភ្នែកច្បាស់ឃើញខ្លួនវាច្បាស់ ព្រោះវាមើលមិនឃើញមនុស្សដើរទេ ឃើញតែភ្លើងទៀនលើក្បាលមនុស្ស។

---

(៩៦) លាកព្រាន = គឺជាការដាក់ទណ្ឌកម្មព្រានព្រៃ (អ្នកប្រមាញ់) ដើម្បីកុំឱ្យបាញ់ខុសទៀត។

(៩៧) ត្បោក = ដាក់ឈើចងកៀបក ទាល់តែបាញ់បានសត្វមួយទើបលែង។

បើសិនប៉ះខ្យល់ ពោលគឺខ្យល់បក់ទៅលើវា នាំក្លិនមនុស្សទៅផង ពេលនោះទើបផ្អើល។ បច្ចុប្បន្នមានកែវឆ្លុះងាយស្រួលដល់ការបរបាញ់ អាចមើលឃើញពីឆ្ងាយ ពីហាសិបម៉ែត្រទៅមួយរយម៉ែត្រ តែសត្វភ្លាង(៩៨) ជាងទៀន។

ក្រៅពីការបរបាញ់ ប្រជាកសិករនៅតំបន់ជនបទ មានអាជីវកម្មមួយបែបទៀត ដែលជាទម្លាប់ពីបុព្វកាលយូរលង់ គឺអង្គប់។ អង្គប់នេះមានច្រើនប្រភេទគឺ អង្គប់ដៃ (ជាខ្សែ) មានពីម្ភៃមេទៅសាមសិបមេ ..... អង្គប់ដៃតូច ..... អង្គប់ដៃទ្រង់ អង្គប់ទ្រុង អង្គប់ធំ។

តទៅសុំលើកយកការធ្វើអង្គប់ធំមកអធិប្បាយ ៈ

## របៀបស្រាស់អង្គប់ធំ

អង្គប់ធំនេះ ជាមុខរបរមួយរបស់ប្រជាជនតំបន់ព្រៃភ្នំ ដូចជាម្តុំព្រៃស្នាក(៩៩) ព្រៃកួយ ព្រៃអិះ(១០០) ព្រៃព្រះរកា ព្រៃឡង់ទៅ។

អង្គប់នេះគេតែងស្រេះនៅរដូវភ្លៀងធ្លាក់ជោគជាំ។ មុនចុះដកស្ទូង គេផ្តើមស្រេះអង្គប់ធំមួយត្បូង ប្រមាណសាមសិបមេឡើង .....។

(កាលខ្ញុំនៅភូមិសាគ្រាម ឃុំសាគ្រាម ស្រុកស្ទោង ខេត្តកំពង់ធំ មានព្រៃធំពីរ គឺខាងលិចភូមិព្រៃអ្នកតាថ្កោល ជាប់ទៅនឹងព្រៃសង្ខាត ជាតាង ពពកក្តុម្ពមាន់ (កទម្ភ) ដង្ហៅថេតព្រៃខាងកើតភូមិ ខាងកើតស្ទឹងក្រសាំង ឬស្ទឹង

---

(៩៨) សត្វភ្លាង = គឺសត្វផ្អើល។

(៩៩) ព្រៃស្នាក = គឺជាព្រៃដែលស្តុក ឬព្រៃដែលកាប់ចម្ការហើយមិនបានធ្វើ។

(១០០) ព្រៃអិះ = គឺជាឈ្មោះព្រៃជ្រៅ។

ស្មោង ក្នុងព្រៃកួយ ដង្កៅអ៊ិត ។

## ខ្ញុំសុំនិយាយពីដង្កៅអ៊ិត

រដូវស្រះអង្គប់ចូលមកដល់ អ្នកស្រុកភូមិ តែងមកផ្ទះដង្កៅអ៊ិត ដើម្បីសាកសួរពីការងារនេះ ។ ដូចនេះ តាមដង្កៅក៏បានផ្សាយដំណឹងត។គ្នា អាចបានកូនសម្រាស់ពី ២៥ ទៅ ៣៥ នាក់ .....។ ខ្ញុំ (ជាវ ហ៊ាន) នៅស្រុកគូលែន ខេត្តព្រះវិហារ ខ្ញុំបានស្រះអង្គប់ជាមួយលោកតា លឹម នៅព្រៃខ្នារតូច ។

អំពីខាអង្គប់មេ ឬ អាចបាន កូនសម្រាស់ពី ២៥ ទៅ ៣៥ នាក់ .....។ ខ្ញុំ (ជាវ ហ៊ាន) នៅស្រុកគូលែន ខេត្ត ព្រះវិហារ ខ្ញុំបានស្រះអង្គប់ជាមួយលោកតា លឹម នៅព្រៃខ្នារតូច ។

## អំពីខាអង្គប់មេ ឬព្រៃ

លោកតា **អ៊ិត** ប្រើថ្នាំដុះលើគល់ឈើ ឬលើក្បាលដំបូក កូនផ្ការដុះលើគល់ក្រាក់ បើរកមិនបានមានអ្នកឧបកិច្ច គឺយកកូនត្រប់រលួយទៅដាំក្បាលដំបូកមុន ៤៥ ថ្ងៃ កូនផ្ការក៏ដូចគ្នា ។

តា **ស្រី សេក** នៅភូមិពោធិ ឃុំពោធិ ស្រុកត្បែងមានជ័យ ខេត្តព្រះ-វិហារ មានពោលរួចមកហើយ ។

## ថ្ងៃចេញស្រះអង្គប់

វេលាយប់នោះគេជួបជុំគ្នានៅផ្ទះដង្កៅ អុជធូបទៀន ចងស្លាធមិព្រៃមួយគូនៅមុខផ្ទះដង្កៅ មួយគូទៀតចងនៅនឹងហ៊ីងគ្រូដង្កៅ មានជម ៤ ស្លាធមិមួយគូ ។

ក្រោយអុជធូបរទៀន សំពះគ្រូប្រកាំ[១០១] រួចហើយគេអង្គុយ សុំអង្វរគ្រូប្រកាំឱ្យជួយកៀងសត្វព្រៃចូលអង្គប់របស់ខ្លួន ដោយសន្យាសែនព្រេន ..... ជាមួយនេះ សុំបានសុខសប្បាយក្នុងការស្រោស់សម្រាស់ រំលំមេ ខារមេ កុំឱ្យមានគ្រោះថ្នាក់កូនចៅ ។

## ការរំលំមេ

ដង្កោចង់បានមេចោលកន្ទុយទៅលើមេដំបងនេះគេហៅ "មេច្បង" បើវារំលំចុងទៅកើត ត្រូវស្រោស់ទៅកើតតាមដែរ មិនអាចផ្ទុយពីនេះបានទេ ពុំនោះត្រូវចោលមេនោះ បើមិនបានសមបំណង ។

កាលបើសម្លឹងឃើញមេធំបងហើយ គេអុជធូបចងស្លាធម៌ព្រៃបែបន់សុំឱ្យដួលចោលកន្ទុយទៅតាមសេចក្ដីប្រាថ្នា ។

បន្ទាប់មកដង្កោកាប់បីពូថៅខាងពោះ[១០២] បីពូថៅខាងខ្នង ទើបកូនតៀ្បងជាអ្នកសម្រេច ។

នៅពេលជិតដួល ដង្កោដាក់ពងមាន់ ..... នៅគល់ បើឈើដួលចុង ដល់ដី គល់វាយបែកពងមាន់ទំនាយថា "អង្គប់នោះបានច្រើន" ។

បើចុងទៅតាមប្រាថ្នាហើយ ដង្កោចាប់ផ្ដើមរម្ងាប់ព្រៃ មានសូត្ររបៀនខ្សឹបៗ ..... និងទំពាដើមថ្នាំព្រួសមេច្បង ។

នៅពេលស្រះមេច្បងកូនឡៀងតែងស្រែកហៅខ្លា ប្រើស រមាំង ។ "តែកុំថាដំរី" ដង្កោដើរដាក់តម្រុយឱ្យ បើចំលើដើមអង្គាបុសផ្កាស ត្រូវជីកគាស់

(១០១) គ្រូប្រកាំ = គឺគ្រូមេម្រេញគង្វាល ។

(១០២) ខាងពោះ = គឺខាងដើមដែលទ្រេត ។

រំលើង ឬសចោលឱ្យអស់ បើអាចវាងបានក៏វាងទៅ ។

ការស្រាស់សម្រាស់អាចបាន ១៥ មេ ឬ ៣៥ មេ គេតម្លើងសម្រេច ..... ។

គេធ្វើរោងបាយ៉ាប [១០៣] មួយនៅចំពាក់កណ្ដាលខ្សែអង្គប់ ។

- រោងត្រូវបែរមុខទៅកន្ទុយសម្រាស់ ត្រូវធ្វើជាពីរថ្នាក់ មានរានប្រកាំមួយទៀត ស្ថិតនៅល្វសានរោងបាយ៉ាប (សម្រាប់រៀបសំណែន)

- កូនសម្រាស់ក្នុងពេលស្រាស់ក្ដី មិនត្រូវឆ្លងចុះឡើងតាមទំនើងទេ អ្នកនៅខាងក្រៅនៅក្រៅ អ្នកខាងក្នុងនៅក្នុង មិនកន្លងសម្រាស់ឡើយ ។

- កូនឈើងាប់នៅទទឹងសម្រាស់ ត្រូវដកចេញដោយនិយាយថា "ដកចូល ឬយកចូល"

- មិនហុចឱ្យគ្នា មិនត្រូវកន្លងរំលង ឬទម្លុះសម្រាស់ទេ ។

- បើមានសាច់ក៏មិនអាំងនឹងដំបុតដែរ ត្រូវដោតជ្រនួចបើអាំងបានត្រឹមខ្ទប់តែដំបុតដើមពពេល ។

- បើហូបឆ្អែតហើយ ត្រូវក្រោកមុនគេប្រាប់ថា "ហូបមិនឆ្អែតទេ" លោកតាឱ្យតូចពេក ។

- បើមានកូនក្រឡាន [១០៤] ទៅ ហូបសាច់ច្រើនក្ដី តិចក្ដី ត្រូវឱ្យយកសាច់ទៅផ្ទះប៉ុនគ្នា បើមានផ្ទៃត្រូវឱ្យចំណែកពីរ ។

- ក្នុងថ្ងៃបន្ទាប់នោះ អង្គប់ត្រូវសង្កត់សត្វមាផ្ទៃ (តាមការសង្កេត

---

(១០៣) បាយ៉ាប = គឺរោងប្រកាំ រោងអ្នកតា ។

(១០៤) កូនក្រឡាន = គឺអ្នកក្រៅ ។

ផ្ទាល់របស់ខ្ញុំ ជាវ ហ៊ាន)។

- ខ្នារ (ឈើសម្រាប់ ៣០ មេឡើង) និងពូកប្រកាំ ត្រូវឆ្វាយទុកដាក់លើរានបាយ៉ាបយ៉ាងសក្តិសម គ្មានអង្គុយលើ ឬដើរកន្លងទេ។

- អ្នកត្រូវវេនមើលអង្គប់ មានស្នែងប្រកាំមួយ បើមានលាភជ័យបានប្រើសក្តីរមាំងជ្រូកក្តី ត្រូវផ្លុំស្នែងជាសញ្ញាឱ្យកូនសម្រាស់ដឹង តែត្រូវផ្លុំដាក់កន្ទុយទៅរកកន្ទុយអង្គប់។

- រៀងរាល់យប់ត្រូវទៅសំពះប្រកាំ អ្នកខានត្រូវស្តីបន្ទោស។ បើធ្ងន់បញ្ឈប់។

-អង្គប់មិនថ្លោះ, មិនបានសត្វ, លោតរំលង ឬទម្លុះសម្រាស់ គេថាមានកូនសម្រាស់ណាម្នាក់ប្រព្រឹត្តខុសបទត្រណម ត្រូវលក់ពិន័យជាសត្វមាន់មួយក្បាល ស្រាមួយដប។

- ពាក្យអាសអាភាសត្រូវហាមឃាត់ក្នុងការទាក់ទងប្រចាំថ្ងៃ។ អង្គប់នេះអាចទម្លាក់មេចោល នៅពេលដែលដង្កៅបញ្ជោ។

- មេអង្គប់ដាក់នៅសងខាងផ្លូវ តែគោក្របីប្រជាជនមិនជាប់ទេ។ ឯសត្វព្រៃត្រូវផ្លូវបើកចំហ (ដាក់ផ្លូវសត្វ មិនដាក់ផ្លូវរទេះទេ)។

- ពិធីស្រាស់អង្គប់ធំចប់ប៉ុណ្ណេះ។ ពិធីនេះខ្ញុំ **ជាវ ហ៊ាន** បានចេះចាំពីខ្មោចតា **អ៊ិត** តា **ចេត** កាលនៅសាគ្រាម ស្រុកស្ពោង និងតា **លឹម** នៅស្រុកគូលែន។

ដោយ : **ជាវ ហ៊ាន**

# អំពីការទាក់ដីរនោម[១០៥]

## (ឯកសារស្រាវជ្រាវស្ដីពីប្រពៃណី និង ទំនៀមទម្លាប់ខ្មែរ)

ខ្ញុំបានចុះធ្វើការស្រាវជ្រាវអំពីប្រពៃណី និងទំនៀមទម្លាប់ខ្មែរ នៅខេត្តកំពង់ធំ ពីថ្ងៃទី ២៤ ដល់ ថ្ងៃទី២៦ ខែមេសា ឆ្នាំ២០០០។ ខ្ញុំបានជួបសម្ភាសន៍ជាមួយលោកតា **ហែម ជួន** អាយុ ៨២ ឆ្នាំ កើតនៅភូមិម្សៀវ តែបច្ចុប្បន្នបានមករស់នៅភូមិកូនចំបក់ ឃុំស្រយូវ ស្រុកកំពង់ស្វាយ។ លោកបានចូលរួមទាក់ដីរចំនួនប្រាំលើក។ លោកតាបានមានប្រសាសន៍ប្រាប់ខ្ញុំ អំពីការទាក់ដីរនេះ ដែលខ្ញុំបានចងក្រងជាឯកសារ តម្កល់ទុកនៅបណ្ណាល័យ នៃពុទ្ធសាសនបណ្ឌិត្យ ដើម្បីជាប្រយោជន៍ដល់កូនចៅជំនាន់ក្រោយ គ្រាន់បានដឹងពីទំនៀមទម្លាប់នេះ និងបានជាឯកសារ សម្រាប់ស្រាវជ្រាវតទៅអនាគត។

## ១. រដូវអំណោយផលសម្រាប់ការទាក់ដីរនោម

នៅរដូវទឹកស្រក ចាប់ពីខែមករាតទៅ តាមទម្លាប់ និងតាមសភាវគតិពីធម្មជាតិ(Instinct naturel)របស់វា ដីរព្រៃតែងនាំគ្នាចុះពីព្រៃធំៗ ធ្វើដំណើរទាំងហ្វូងៗ រាប់រយ ពាន់ក្បាល ឆ្ពោះទៅកាន់វាលក្រោម[១០៦] ដែលសម្បូណ៌ ទៅដោយស្មៅខ្ចី ដ៏មានរសជាតិឆ្ងាញ់។ ក្នុងរយៈពេលពី ៦ ទៅ ៧ ខែ ហ្វូងដីរព្រៃរីករាយនឹងជីវិតនៅតាមវាលទំនាប ដែលមានចំណីប្លែក និងរបៀប

---

(១០៥) ដីរដែលរស់នៅក្នុងតំបន់លិចទឹក។

(១០៦) វាលទំនាបឋិតនៅជុំវិញតំបន់ទន្លេសាប។

រស់នៅ ប្លែកពីព្រៃភ្នំក្រំថ្ម។ លុះចូលដល់ដំណាច់ខែស្រាពណ៍ (ត្រូវនឹងខែកក្កដា-តុលា) ដែលទឹកជំនន់នាចចេញពីផ្ទៃទន្លេសាប មកពន្លិចតំបន់នានា នៅទីជិតខាង ហ្វូងដំរីព្រៃប្រមូលគ្នាមកជួបជុំ នៅតាមទីទួលធំៗ ដែលទឹកនៅមានកម្ពស់ត្រឹមប្រហែលមួយម៉ែត្រនៅឡើយ។ វាត្រៀមខ្លួននឹងលាចាកវាលបឹង ដើម្បីទៅរស់នៅតាមព្រៃភ្នំ ជាតំបន់ខ្ពស់វិញ។ ឆ្លៀតឱកាស ដែលដំរីរៀបចំផ្លាស់ប្ដូរទីលំនៅនេះ កសិករទាំងឡាយជាទម័ក[(១០៧)] ដំរី ក៏ប្រកូកប្រកាសប្រមូលគ្នីគ្នាយ៉ាងច្រើន រហូតដល់រាប់រយនាក់ ធ្វើដំណើរដោយទូក ដើម្បីទៅទាក់ដំរី យកមកផ្សាំង ទុកប្រើ ឬយកទៅលក់[(១០៨)]។

## ២. ការត្រៀមដំណើរ

ការទាក់ដំរីរនាមក្ដី ឬការទាក់ដំរីព្រៃក្ដី សុទ្ធតែជាដំណើរផ្សងព្រេងដ៏ប្រកបដោយគ្រោះថ្នាក់ជាទីបំផុត ពីព្រោះអ្នកទាក់ដំរី ត្រូវប្រឈមមុខនឹងហ្វូងដំរីដ៏សាហាវៗ។ ទម័កទាំងឡាយត្រូវតែមានបទពិសោធន៍ឱ្យបានច្រើន ក្នុងកិច្ចការនេះ។ លក្ខណៈសម្បត្តិដែលទម័កត្រូវមាន ជាចំបាច់នុំះគឺ : មានកម្លាំងកាយមាំមួន,ស្វាហាប់,វាងវៃ, រហ័សរហួនទាំងកាយ និងប្រាជ្ញាស្មារតី, ប៉ិនប្រសប់ក្នុងការងារដ៏កម្រនេះ។ ក្នុងការអនុវត្ត គេត្រូវមានសាមគ្គីជិតស្និទ្ធរវាងគ្នានិងគ្នា ប្ដូរស្លាប់ ប្ដូររស់ជាមួយគ្នា គឺស៊ូប្ដូរជីវិត ដើម្បីជួយសង្គ្រោះគ្នាទៅវិញ

---

(១០៧) សរសេរក្លាយជា "ទ្រមាក់" យូរហើយ ប៉ុន្តែតាមវចនានុក្រមខ្មែរ សម្ដេចព្រះសង្ឃរាជជួនណាត ថា ប្រើ ជា "ទម័ក" ត្រឹមត្រូវជាង បាលីថា "ទមក" ប្រែថា អ្នកបង្ហាត់ ឬអ្នកទូន្មានដំរី។

(១០៨) លោកតាហែមជូនថា កាលនោះ ដំរីស្ទាវមួយលក់បាន ៦០០៛ ស្មើនឹងមាស ២ តម្លឹង។

ទៅមក ក្នុងគ្រាមានអាសន្ន។ ទម័កទាំងឡាយត្រូវមានច្រវាក់ដែកពីរឬបីកន្ទុយ វេញខ្សែរពួរធំៗឱ្យបានច្រើនកន្ទុយ សម្រិតសម្រាំង សម្រួចចុងកង្វេរនិងផ្លែកង្វេរ ឱ្យបានស្រួចមុតល្អ ដើម្បីទុកសម្រាប់ការខ្វារដំរី។ ក្រៅពីនេះគេត្រូវត្រៀមស្បៀង មានអង្ករ អំបិល ប្រហុក ផ្អក ម្ទូរ ត្រីងៀត ត្រីឆ្អើរ សម្រាប់រយៈពេលពីរខែ។ លុះសម្ភារៈដែលគេត្រូវការចំបាច់ទាំងប៉ុន្មាន ត្រូវបានរៀបចំគ្រប់គ្រាន់អស់ហើយ ទម័កទាំងឡាយដែលប្រមូលគ្នាជាក្រុមៗតាមភូមិ(១០៩) រៀងៗខ្លួននុ៎ះ ត្រូវរៀបចំចាត់ចែងធ្វើពិធីសែនព្រេន បួងសួងសុំម្ចាស់ទឹក ម្ចាស់ដី អារក្ស អ្នកតា និងម្រេញគង្វាល សុំឱ្យទាក់ដំរីបាន ដោយពុំមានគ្រោះថ្នាក់អ្វីឡើយ។ គ្រឿងសំណែនទាំងឡាយ មានជាអាទិ៍គឺ ក្បាលជ្រូក មាន់ស្ងោរ បាយសម្ល ស្រា ជាគ្រឿងក្លែម ជាបង្អែមចម្អាប។ ក្នុងពិធីសែន គេត្រូវពោលយ៉ាងនេះថា :

"ថ្ងៃនេះ ថ្ងៃជា វេលាល្អ ព្រះភូមិករ ព្រះធរណី អ្នកតាចាស់ស្រុកយើងខ្ញុំទាំងឡាយ មុនរៀបចំចេញដំណើរទៅទាក់ដំរី បានរៀបចំអាហារភោជនមានបង្អែម ចម្អាប ចេកទុំ នំផ្អែម គ្រប់មុខ ច្រើនពោរពាស ជូនចំពោះម្ចាស់ទឹក ម្ចាស់ដី ម្ចាស់ព្រៃព្រឹក្សា វាលទំនាប ជ្រោះជ្រលងដងអូរ អារុក្ខ អារក្ស អ្នកតា ម្រេញគង្វាល ដែលជាអ្នកថែរក្សាដំរី សូមលោកមេត្តាដាក់ទានដំរីដល់យើងខ្ញុំជាកូនចៅទាំងអស់គ្នា សូមឱ្យទាក់ដំរីបាន ដូចបំណង សូមគ្រោះថ្នាក់ទាំងឡាយបវៀសជៀសឆ្ងាយ សូមឱ្យបានសុខសប្បាយគ្រប់ៗគ្នា។" គេពោលយ៉ាងនេះជា

---

(១០៩) អ្នកស្រុកដែលចូលរួមទាក់ដំរីក្នុងរដូវនោះ តែងប្រមូលគ្នាមកពីភូមិទាំងឡាយ ក្នុងឃុំស្រយូវទាំងមូល គឺភូមិរកា កំរែង ម្ទេរ ពុកយុក ស្រយូវ រលួស ព្រៃកស្បូវ ស្តៅ។ល។

គម្រប់ ៣ដង រួចទើបគេចាប់ម្ជូបបន្តិច១ ក្នុងមួយមុខ ដាក់ទៅលើស្លឹកចេកមួយផ្ទាំង ហើយច្រួចទឹក ច្រួចស្រា ជាកិច្ចបញ្ចប់ពិធីសែនព្រេន។

ការសែនព្រេនជាករណីកិច្ចមួយដ៏ចាំបាច់ជាទីបំផុត។ គេត្រូវអនុវត្តតាំងពីពេលត្រៀមចេញដំណើរទៅម្លេះ។ ខ្មែរយើងមានជំនឿទៅលើការសែនព្រេនឱ្យខ្មោច, ព្រះភូមិ, អារុក្ខអារក្ស, ម្រេញគង្វាលជាដើម។ ក្នុងការស្វែងរកបរបាញ់សត្វក្តី ចាប់សត្វក្តី ម្រេញគង្វាល(gnomes) ដែលគេជឿថាជាទេព្តាថែរក្សាសត្វ មានដងខ្លួនតូច១ (កម្ពស់ប្រហែល បួន-ប្រាំតឹក) មាននាទីសំខាន់ណាស់ ក្នុងការជួយមនុស្សឱ្យបានសម្រេច ព្រោះម្រេញគង្វាលជាអ្នកថែរក្សាសត្វ ហើយអាចបញ្ជាសត្វឱ្យធ្វើអ្វីក៏បាន។ បើម្រេញគង្វាលមិនជួយទេ(ព្រោះគេមិនបានសែនអ្វី១ឱ្យវា តាមរណ្តាប់) ទម័កមិនអាចទទួលជោគជ័យបានឡើយ។ ជួនកាលម្រេញគង្វាលមិនព្រមជួយដេញដំរីបញ្ចូលផ្អាក់ ជួនកាលទម័កចាប់ដំរីបានហើយ តែត្រូវម្រេញគង្វាលដោះលែងឱ្យរួចបាត់ទៅវិញ ក៏មានដែរ។ ក្នុងករណីខ្លះទៀត គឺគេមិនអាចជួបប្រទះដំរីតែម្តង គឺហាក់បីដូចជាពួកម្រេញគង្វាលលាក់មិនឱ្យគេរកឃើញ។

ប៉ុន្តែ ការសែនព្រេននេះ ទោះបីជាបានរៀបចំថ្វាយចំពោះអ្នកនៅក្នុងភាពអាថិកំបាំងទាំងនោះក៏ដោយ ក៏ករណីយកិច្ចប៉ុណ្ណោះនៅមិនទាន់គ្រប់គ្រាន់នៅឡើយទេ។ ជាបន្ថែមទៅលើពិធីនេះ គេក៏នៅមាន ករណីយកិច្ចខ្លះទៀតត្រូវអនុវត្ត ជាចាំបាច់ផងដែរ គឺការកាន់ត្រណម ដែលអ្នកនៅផ្ទះ ជាពិសេសភរិយាទម័ក ត្រូវអនុវត្តឱ្យបានត្រឹមត្រូវជាដាច់ខាត។

## ៣. ការកាន់ត្រណម

ដំណើរផ្សងព្រេងដ៏ធំធេង ពេញទៅដោយការលំបាកនេះ រមែងតែងតែភ្ជាប់ជាមួយនូវលក្ខខណ្ឌផ្សេងៗ ស្របទៅតាមទំនៀម ជាក្បួន ដែលគេធ្លាប់ធ្វើតៗគ្នា ជារៀងដរាបមក ដូចមានចែងខាងក្រោមនេះ :

**សម្រាប់ប្រពន្ធទម័កដែលនៅផ្ទះ :**

- តមកុំវាយកូន វាយចៅ
- តមកុំបោសកន្ទេលដំណេក
- តមកុំទាស់ទែង ឈ្លោះប្រកែកគ្នារវាងមនុស្សនៅក្នុងគ្រួសារ.

ត្រណមទាំងប៉ុន្មាននេះ សុទ្ធតែមានន័យច្បាស់លាស់ ដែលគេអាចបកស្រាយបាន ដូចតទៅ :

* តមមិនឱ្យវាយកូនចៅ បានន័យថា ប្រពន្ធតាំងចិត្តជាអ្នកមានមេត្តាអាណិតអាសូរដល់កូនចៅ ក៏ហាក់បីដូចជាធ្វើឱ្យដំរីអាណិតទម័ក មិនបង្កឱ្យមានគ្រោះថ្នាក់ដល់ទម័ក.

* តមមិនឱ្យបោសកន្ទេល គឺមិនត្រូវធ្វើឱ្យមានអ្វីខ្ចាតខ្ចាត់ខ្ចាយ ចេញពីកន្លែងដើមរបស់វា ឬធ្វើអ្វីៗឱ្យបែកបាក់ សូម្បីតែធូលី ឬសំរាមក៏ មិនត្រូវប៉ះពាល់ដែរ បានន័យថា បើទាក់ដំរីបានមក ដំរីនោះក៏គង់វង្ស មិនរត់បាត់ទៅវិញ មិនដាច់ ឬរបូតខ្សែព្រួរ ។ គេយល់ថា បើអ្នកផ្ទះបោសសំរាម វាហាក់ បីដូចជាការឧបកិច្ចដេញដំរីដែលទាក់បាន ឬកំពុងទាក់នោះឱ្យរត់ចេញទៅវិញដែរ.

* តមមិនឈ្លោះប្រកែកគ្នាជាមួយមនុស្សនៅក្នុងផ្ទះ ចង់ឱ្យន័យថា បើអ្នកផ្ទះចេះអត់ធន់ មិនចេះទាស់ទែងគ្នា មិនតបទៅ តបមក រវាងគ្នានឹងគ្នា

ក្នុងគ្រួសារ ដីរក៏វាមិនតបត រើបម្រះ ប្រទូស្តតបមករកយើងវិញដែរ ពោលគឺវានឹងបណ្តោយឱ្យទម័កទាក់វាបានដោយស្រួល ។

(ប៉ុន្តែ ការបកស្រាយទាំងប៉ុន្មានខាងលើនេះ គ្រាន់តែជាការយល់ឃើញតាមការប្រៀបធៀបប៉ុណ្ណោះ។ តាមការពិត ដែលតែងតែកើតមានឡើងមកពីការកាន់ត្រណមមិនបានខ្ជាប់ខ្ជួន ទោះបីខុសត្រណមណាមួយក៏ដោយ គឺក្រៅពីការខាតលាភ ក្នុងការទាក់ដីរ ទម័កយើងនឹងត្រូវជួបបញ្ហាផ្សេងៗទៀត មានទាំងគ្រោះថ្នាក់ដល់ជីវិតទៀតផង។ តាមធម្មតា ប្តីអាចរងគ្រោះដោយសារដីរជាន់ ឬដោយសារម្រេញគង្វាលលង។ ក្នុងការលងនោះ ម្រេញគង្វាលច្រើនធ្វើជាប្រពន្ធមកស្រែកហៅប្តីឱ្យទៅផ្ទះវិញ ត្បិតអីកូនមានគ្រោះថ្នាក់ ឬមានជំងឺជាទម្ងន់ ហើយតម្រូវឱ្យប្តីត្រឡប់ទៅផ្ទះវិញ។ សម្រែកនោះស្តាប់ទៅដូចជាគ្នានឹងសំឡេងប្រពន្ធបេះបិទ ដែលធ្វើឱ្យប្តីលង់ក្នុងសម្រែកថ្ងូចថ្ងូរ ដង្ហោយហៅនោះ។ បើប្តីធ្វើតាម គ្រោះថ្នាក់ក៏កើតមាននៅពេលនោះឯង។ ឧប្បត្តិហេតុនេះ អ្នកទាក់ដីរតែងដឹងគ្រប់គ្នា ហើយតែងមានការប្រុងប្រយ័ត្នដែរ ប៉ុន្តែការកាន់ត្រណមជាករណីយកិច្ចមួយធំណាស់ តែកាលណាខុសត្រណមហើយ រឿងស៊យនឹងត្រូវកើតមាន ដោយពិបាកនិងជៀសឱ្យផុតណាស់។ គេធ្លាប់ចំណាំថា បើអ្នកនៅផ្ទះមានធ្វើអ្វីមួយខុសត្រណម ទម័កនឹងដឹងភ្លាមព្រោះមានកើតព្រឹត្តិការណ៍អ្វីមួយមិនល្អចំពោះខ្លួនគេ) ។

លុះគេបានអនុវត្តពិធីជាប្រពៃណីទាំងនេះ រួចរាល់សព្វគ្រប់អស់ហើយ ទម័កទាំងឡាយ ទាំងនៅក្នុងភូមិ ទាំងអ្នកមកពីភូមិជិតខាង ក៏នាំគ្នារៀបចំចេញដំណើរចុះទូក ដោយមានការប្រកួកផ្លុំស្នែងជាសញ្ញា ឮសូរគ្រលួចទ្រហឹង

អឹងកងអឹងអាប់ គួរឱ្យព្រឺព្រួច គួរឱ្យនឹកស្រណោះជាពន់ពេក។ ទម័កមកពីភូមិជាច្រើន សហការប្រមូលគ្នាជាក្រុមដែលមាន ពី ៤នាក់ទៅ ៥នាក់ ក្នុងទូកនីមួយៗ។ ពេលចេញទៅទាក់ដំរី ក្នុងមួយលើកៗ អាចមានក្បួនទូករហូតដល់ ៣០០គ្រឿង។ សំឡេងស្នែងលាន់ឮរំពងវាល ដែលមានទឹកជំនន់យ៉ាងល្ហល្ហាច លាតសន្ធឹងដាច់កន្ទុយភ្នែក លាយឡំដោយចម្រៀង និង សំណើចក្អាកក្អាយហ៊ោកញ្ជ្រៀវ លាន់ឮទ្រហឹងអឹងកង។ គេនាំគ្នាអុំទូកចុះទៅតាមវាលទំនាបឆ្ពោះទៅតំបន់បឹងប្រធាអាគត់ ហើយក៏តាំងរាយបណ្ដាក់គ្នា ដើម្បីហ៊ុំព័ទ្ធទីទួលធំៗ ដែលគេបានដឹងរួចជាស្រេចថា ដំរីរនាមរាប់រយក្បាល តែងតែមកប្រមូលផ្ដុំនៅទីនោះ ជាការត្រៀមចេញដំណើរឡើងទៅកាន់តំបន់ព្រៃភ្នំវិញ។ កងទម័កឯទៀតៗ ក៏រៀបជាក្បួនខ្សែ លាតសន្ធឹងចន្លោះទួលធំៗទាំងឡាយនិងព្រៃភ្នំ។ ធ្វើយ៉ាងនេះ គឺមានគោលបំណងបិទបាំងរាំងផ្លូវដំរី កុំឱ្យវាធ្វើដំណើរឡើងទៅកាន់ព្រៃភ្នំបាន ហើយក៏ដូចជាដើម្បីរង់ចាំ ក្នុងរយៈពេលកន្លះខែ ឱ្យទឹកជំនន់បន្ថែមកម្ពស់មួយកម្រិតទៀត និងដើម្បីឱ្យងាយស្រួលដល់ការទាក់។ លុះពិនិត្យឃើញថា ទឹកជំនន់ឡើងខ្ពស់មែនទែនហើយនុ៎ះ អស់ពួកមេក្រុមទាំងឡាយ ក៏ប្រជុំគ្នាពិភាក្សាពីវិធានការចាំបាច់ផ្សេងៗ សម្រាប់អនុវត្តឱ្យបានល្អ នៅពេលចូលប្រឡូកក្នុងហ្វូងដំរី។

## ៤. ឆាកទាក់ដំរី

ទូករាប់រយបានរៀបគ្នាជាក្បួនរង្វង់ស្នែងក្របី ដោយទុកតែច្រកមួយឈមមុខទៅរកបឹង ដែលមានទឹកជ្រៅ សម្រាប់ឱ្យដំរីដោះខ្លួនចេញទៅតាម

នោះ។ លុះមេបញ្ជាការធំឱ្យសញ្ញាវាយលុក តាមរយៈសំឡេងស្នែង[(១១០)] ហើយ ទម័កគ្រប់ទូកក៏នាំគ្នាស្រែកហ៊ោ សន្ធាប់យ៉ាងខ្លាំង បាញ់ផ្ទុស្ទុយ លាន់ឮដូចស្នូរកាំភ្លើង ឮទ្រហឹងអឹងអាប់ ស្តាប់ទិសតំបន់អ្វីលែងឮ។ គ្រាន់តែបានឮសំឡេងគឹកកងនេះភ្លាម ហ្វូងដំរីភ័យស្លន់ស្លោ ស្ទុះរត់ប្រសេចប្រសាចចេញពីក្នុងព្រៃទួល រកច្រកណាដែលគ្មានមនុស្សឃ្លាំចាំ។ ពិតមែនតែដំរីជាសត្វសាហាវមានកម្លាំងខ្លាំងក្លា អាចប្រយុទ្ធតទល់នឹងមនុស្ស ឬសត្វដូចគ្នាក្តី ក៏ប៉ុន្តែនៅពេលនេះដោយហេតុតែវាឮសូរសន្ធឹកស្រែកហ៊ោ សន្ធាប់ខ្លាំងក្លាហួសពេក ពួកវាស្លុតស្លុងភ័ន្តភាំងស្មារតី ព្រោះវាដឹងច្បាស់ថា មនុស្សដែលជាអ្នកឈ្លានពានវានេះ មានចំនួនដ៏ច្រើនលើសលុប ពុំអាចតស៊ូយកឈ្នះបានដោយងាយៗឡើយ។ ដំរីធំៗ[(១១១)] ជាពិសេស សុទ្ធតែធ្លាប់បានឆ្លងកាត់ការដេញបំភ្លូក បំភ័យបែបនេះ ជារៀងរាល់ឆ្នាំ។ មិនយូរប៉ុន្មាន ដំរីប្រមាណ ៥០០ ក្បាល ក៏ចេញផុតអស់ពីព្រៃ ចូលលង់ខ្លួនទៅក្នុងបឹង ដែលមានទឹកជ្រៅផុតដៃផុតជើង។ វានាំគ្នាហែលភ្លឹង ភ្លុងៗ យ៉ាងលំបាក។ ខ្លះទៀតពន្លិចខ្លួនទៅក្នុងទឹក ទុកតែប្រមោយ (ដៃ) នៅលើទឹកប្រវែងប្រមាណមួយចំអាម សម្រាប់ដកដង្ហើម។ គួរឱ្យអនិច្ចាណាស់ ដំរីធំៗ ដែលមានកម្លាំងជាង ស្ទុះបោលបានលឿន ចេញពីការហ៊ុំព័ទ្ធរបស់ទម័ក បានឆ្ងាយផុតពីការភិតភ័យ។ ឯដំរី

---

(១១០) គេផ្លុំស្នែងបទពិសេសមួយដែលគេសន្មតគ្នា ថាជាបទបញ្ជាឱ្យវាយលុក។

(១១១) ទម័កមិនដែលទាក់យកដំរីដែលមានមាឌធំទេ ព្រោះគេពិបាកផ្សាំងវា ដោយវាមានកម្លាំងខ្លាំងក្លាពេក។ ដូច្នេះដំរីធំៗតែងធ្លាប់ដឹង ធ្លាប់រត់គេចពីទម័ក ច្រើនលើក ច្រើនសាមកហើយ។

ដំរីទេវ៉ា[១១២] ស្ទាវៗ ដែលខ្សោយ រត់មិនលឿន មិនសូវប៉ិនប្រសប់ខាងហែលទឹក ហែលមិនទាន់គេ ក៏ត្រូវធ្លាក់មកនៅជួរក្រោយ។ គឺពួកកូនដំរីដ៏អភ័ព្វទាំងនេះហើយ ដែលជាទីដៅរបស់ទម័ក។ ទម័កទាំងប៉ុន្មានអុំទូកយ៉ាងលឿន ប្រដេញតាមកូនដំរីដាច់ហ្វូង។ ចំណែកឯដំរី ធំៗវិញ ពេលជិតទៅដល់បឹងធំ[១១៣] វាក្រាញមិនចង់ទៅ ព្រោះខ្លាចទឹកជ្រៅ ផុតជើងពិបាកហែល។ ហ្វូងដំរីហាក់ចង់បែរមកតទល់នឹងពួកទូកទម័ក។ ប៉ុន្តែ មនុស្សម្នាដ៏ច្រើនរយនាក់ ដែលជិះទូកប្រមាណ ៣០០ គ្រឿង ក៏ស្រែកហ៊ោគំរាម ទាំងលើកគ្រឿងអាវុធ ដូចជាពូថៅ កង្វេរ កង្វារ និងក្រោមសន្ទឹកសូរសន្ទាប់នៃបំពង់ថ្នស្ពុយ ឬសូរផ្ទុងៗដូចកាំភ្លើងធំ ល្មមគ្រប់គ្រាន់នឹងធ្វើឱ្យវាស្ទុះបោល ប្រាសយកតែអាយុរៀងៗខ្លួន។ ពេលនោះ ភាពច្របូកច្របល់មួយបានប្រាកដឡើងនៅចំពោះមុខទម័កទាំងឡាយ : ដំរីមេ ដំរីមេហ្វូង រត់ចោលកូនចោលបរិវារ ប្រថុយចុះហែលក្នុងទឹកបឹងដ៏ជ្រៅ ដែលវារួញរាមិនចង់ចុះ។ លុះអុំទូក បានខិតទៅជិតកូនដំរីហើយ ទម័កម្នាក់លូកដងក្វារ (ឬកង្វារ) ដែលនៅខាងចុង មានផ្លែកង្វារយ៉ាងមុត ទាញផ្ចក់ក្បាលដំរី ហើយទាញកញ្ឆក់ ឱ្យមុតលិចជ្រៅ ទៅក្នុងសាច់ក្បាលរហូតដល់ហូរឈាមរហាម។ ទម័កម្នាក់ទៀតលូកដងកង្វារ ផ្ចក់ឱ្យមុតសាច់គូថ ឬសាច់លោងដំរី។ អ្នកផ្ចក់ខាងក្បាលប្រទាញទៅស្តាំ អ្នកផ្ចក់ ខាងគូថប្រទាញទៅឆ្វេង ធ្វើឱ្យដំរីស្រែករោទ៍យ៉ាងខ្លាំង ដោយសារការឈឺចាប់មុខរបួសទាំង

---

(១១២) ដំរីស្ទាវ ដែលមានទំហំប៉ុនក្របី ឬធំជាងបន្តិច កម្ពស់ប្រមាណ ១ ម៉ែត្រកន្លះ ចុះក្រោម។ ដំរីក្នុងវ័យ និងមាឌប៉ុណ្ណោះ វានៅមានកម្លាំងតិច ងាយស្រួលផ្សាំង ស្រួលពង្រាប (ប្រាប) ឆាប់ ស្តាប់បង្គាប់ហ្ម ហើយអាចប្រើ បានយូរ ប្រមាណពី ៤០ ទៅ ៥០ ឆ្នាំ។

(១១៣) បឹងនេះមានប្រវែងប៉ុន្មាន ៣០០ ម៉ែត្រ ឈ្មោះហៅថា បឹងប្រធាគត់។

ខាងមុខ ទាំងខាងក្រោយ ។ ឆ្លៀតពេលដែលដំរីជាប់កង្វារទាំងខាងក្បាល ទាំងខាងគូថ ទម័កម្នាក់ទៀតយកច្រវាក់ទៅរុំចង-កដំរី ហើយទាញកន្ទុយច្រវាក់មកចងនៅខ្ទង់ទូក។ ក្នុងស្ថានភាពបែបនេះ ទោះបីដំរីកាចសាហាវយ៉ាងណាក៏ដោយ ក៏វាមិនអាចតបតនឹងទម័កបានដែរ ។ លុះទម័កទាក់ការវា បានស្រួលបួលហើយ ពួកទម័កទាំងនោះ ក៏អុំទូកនាំដំរីទៅរកដើមរាំងដែលមានមែកទេរចេញទៅខាង ជាការងាយស្រួលចងដំរីឱ្យនៅទីនោះ អណ្តែតភ្លឹងភ្លុង១ ជើងផុតពីដី កុំឱ្យរើបម្រះ របូតរួច ដោយត្រូវគេធ្លឹងជើងក្រោយនិងចាក់ទន្លឹងស្នាមុខថែមទៀត។ ពួកទម័កចងវាទុកនៅទីនោះ បង្អន់វាឱ្យអស់កម្លាំង ឃុំឃាំងទុកក្នុងរយៈពេលពីរឬបីថ្ងៃ រួចហើយ គេក៏ឆ្លៀតមករកទាក់ដំរីមួយ ឬពីរទៀត ។

កាលណាគេទាក់ថែមបានមកទៀតហើយ គេក៏យកមកចងក្រៀកនៅជាប់នឹងមែករាំង ដែលដុះញែកកន្ធែកទៅខាង ក្បែរដំរីដែលគេចងទុកមុននុ៎ះ។ ដើម្បីធានា កុំឱ្យដំរីព្រៃរើបម្រះរួច ពួកហ្មដំរីតែងតែមានការប្រុងប្រយ័ត្នខ្ពស់ណាស់ ។ ក្រៅពីចងវាក្រៀកជាប់នឹងដើមរាំង គេយកខ្សែព្ពួរមួយកន្ទុយចងកវាប្រទាញយ៉ាងតឹង ទៅចងភ្ជាប់នឹងដើមរាំងមួយនៅខាងមុខ ហើយយកខ្សែព្ពួរមួយកន្ទុយទៀត ចងភ្ជាប់ពីកន្ទុយខ្សែកង្វារ យកទៅចងរឹតនឹងដើមរាំងមួយដើមទៀតនៅខាងក្រោយ ។ ធ្វើយ៉ាងនេះ ខ្លួនកូនដំរីទាំងមូល ត្រូវជាប់ចំណងដល់ទៅបី ជាហេតុដែលវាពុំមានលទ្ធភាពនិងរើឱ្យរួចខ្លួនបានឡើយ ។ គេចងបង្ខាំង បង្អត់ស្មៅវា ទុកឱ្យវាស្ថិតនៅក្នុងស្ថានភាពបែបនេះ អស់រយៈពេលបីថ្ងៃក្នុងគោលបំណងធ្វើឱ្យកម្លាំងវាទ្រុឌទ្រោម ចុះខ្សោយ អាចឱ្យគេងាយនាំយកវាទៅពង្រាប ។ បន្ទាប់មកទៀត គេត្រូវចាត់ក្តីគ្នាឱ្យមកយកដំរីធ្លាក់ពីភូមិទៅ

ត្រៀមពង្រាប[១១៤] ដំរីព្រៃ ដែលគេទើបនឹងទាក់បានមក។

## ៥. វិធីពង្រាបដំរី

ដំរីផ្ទាក់ត្រូវបានគេនាំយកមករង់ចាំនៅជើងទួល ក្បែរមាត់ទឹក។ ពួកទម័កទៅស្រាយកូនដំរីព្រៃ ដែលគេចងបង្ខាំងទុកនោះ នាំយកទៅកាន់ទួល ជាដីគោក ដោយមានការប្រុងប្រយ័ត្ន មិនឱ្យថ្លោះធ្លោយ។ ទម័ក ទាំងប៉ុន្មានបានជិះទូកអមដំណើរដំរី មានកង្វារថ្កក់ក្បាល ថ្កក់កន្ទុយ ទាញក្រៀក ជាប់មិនឱ្យរើរួច។ ពេលមកដល់ជើងទួល គ្រាន់តែឃើញដំរីផ្ទាក់ភ្លាម ដំរីព្រៃស្ទុះរត់មកបុកអាផ្ទាក់ទាំងកំរោល ទៅតាមសភាវៈកាចសាហាវ តាមចរិតវាជាដំរីព្រៃ។ ព្រមពេលជាមួយគ្នានោះ ហ្មដែលជិះលើដំរី[១១៥] ក៏ស្រែកបញ្ជាថា[១១៦] "ទប់ !"។ អាផ្ទាក់ដែលវៃឆ្លាតស្រាប់ ក៏យកប្រមោយវាក្រៀក-កដំរីព្រៃជាប់យ៉ាងខ្លាំងគឺរឹងដូចជាដង្កាប់ដែក។ ហ្មបញ្ជាទៀតថា "ឡើង !"។ ភ្លាមនោះអាផ្ទាក់ធាក់អាព្រៃមួយជើងក្រោយ ធ្វើឱ្យវាឈឺខ្លាំង ហើយស្រែករោទ៍ព្ទខ្ទរវាល។ ទម័កក៏នាំកូនដំរីព្រៃ ដែលគេចងក្រៀក-ក ភ្ជាប់ទៅនឹងកអាផ្ទាក់កុំឱ្យរើបម្រះ

---

(១១៤) បណ្ដាជននៅខេត្តតាកែវ កណ្ដាល កំពត កំពង់ស្ពឺ... ច្រើនហៅថា"ពង្រាប"ដូចជាពង្រាបគោជាដើម។ ឯអ្នកខេត្តដ៏ទៃខ្លះទៀត ដូចជាខេត្តកំពង់ធំ សៀមរាប... គេនិយាយថា "ប្រាប"។ ទោះបីជាយ៉ាងណាក្តី ក៏ពាក្យទាំងពីរនេះនៅតែមានន័យដូចគ្នា គឺធ្វើឱ្យសាំង ឱ្យចេះស្តាប់បង្គាប់ ម្ចាស់ ឱ្យដឹងពីរបៀបរបបប្រើការងារក្នុងស្រុកភូមិ។

(១១៥) ដំរីដែលគេបានបង្ហាត់បង្វឹកឱ្យចេះគ្រប់ល្បិច កលយុទ្ធវិធី ទុកសម្រាប់ទាក់ និងផ្សាំងដំរីព្រៃ។ ដំរីផ្ទាក់ច្រើនតែជាដំរីឈ្មោល។

(១១៦) ដំរីសុទ្ធតែមានឈ្មោះ។ បើអាផ្ទាក់ឈ្មោះ "អាប្រកប" គេបញ្ជាវាថា "អាប្រកប! ទប់!"

បាន។ ចំណែកឯជើងមុខរបស់វាត្រូវជាប់ទន្លីង(១១៧) ដែលរំខានកូនដំរី ព្រៃ មិនអាចឱ្យវាធ្វើ សកម្មភាពអ្វីខ្លាំងក្លាបានឡើយ។

គេនាំវាទៅកាន់ **"គោកព្រះ"**។ នៅទីនោះ គេធ្វើសន្លុងសម្រាប់បង្ហាំង ដំរី។ គេបោះបង្គោលឈើធំៗប៉ុនសសរផ្ទះ ចំនួន៦ដើម ខាងឆ្វេង៣ ខាងស្តាំ៣ ទុកចន្លោះទទឹងប៉ុនខ្លួនដំរី។ នៅខាងឆ្វេងនិងខាងស្តាំ គេចងរបា៤ ខាងមុខគេ ចងរបា៤ យ៉ាងមាំៗផងដែរ។ គេនាំយកកូនដំរីទៅបញ្ចូលក្នុងសន្លុងនោះ។ កូន ដំរីក្រាញមិនចូលក្នុងសន្លុងទេ។ ហ្មក៏ស្រែកបញ្ជាទៅអាផ្ទាក់ថា "បញ្ចូល!"។ ភ្លាមនោះ វាឡើងកែងមួយជើងជាទម្ងន់ ធ្វើឱ្យអាព្រៃស្តាប់បង្គាប់ ព្រោះឈឺ នឹងទម្ងន់ជើងរបស់អាផ្ទាក់។ នៅក្នុងសន្លុង គេទាក់ជើងមុខទាញទៅចងភ្ជាប់ នឹងស្នឹងមួយ។ កូនដំរីព្រៃជាប់ខ្លួនយ៉ាងក្រញង់ នៅក្នុងសន្លុង ងាកឆ្វេង ស្តាំ ឬ ទៅមុខ ទៅក្រោយមិនរួចឡើយ។ ទាំងជើងមុខ ទាំងជើងក្រោយ ត្រូវគេធ្លីង ជាប់រឹងស្អកទាំងអស់។ ដូច្នេះ ទោះកូនដំរីព្រៃចង់រើបម្រះទៅណាក៏ពុំរួចដែរ។ ទម័កទៅប្រូតស្មៅយកមកឱ្យកូនដំរីដំរីព្រៃស៊ី ដើម្បីស្តារកម្លាំងវាឡើងវិញខ្លះៗ ត្រៀមទុកសម្រាប់ការពង្រាប។

ប៉ុន្តែ កូនដំរីព្រៃ ដែលឋិតនៅក្នុងស្ថានភាពខ្វះសិទ្ធិ សេរីភាព និងកំពុង រងនូវទារុណកម្មយ៉ាងខ្លាំងបែបនេះ វាមិនសូវល្មោភស៊ី ដូចកាលពីវានៅក្នុង ហ្វូងឡើយ។ ក្នុងពេលនោះ គេផ្សាំងវា ដោយទម្លាប់ឱ្យវាមានទំនាក់ទំនងជិត ស្និទ្ធជាមួយមនុស្ស។ ជារៀងរាល់ថ្ងៃ គេទៅលើកអាចម៍វា បោសសម្អាតសន្លុង

---

(១១៧) ប្រដាប់ធ្វើពីផ្តៅ វេញបញ្ចូលគ្នា៣ផ្លុង ធ្វើជារង្វង់មូលៗពីរ សម្រាប់ "ធ្លីង" គឺស៊កជើង ដំរីឱ្យចូលក្នុងរង្វង់ទាំពីរ បង្ខាំងកុំឱ្យវារត់លឿនបាន។

ឆ្លៀតស្ទាបអង្អែលវា និយាយរកវា ដោយប្រើពាក្យទន់ភ្លន់។ កូនដំរីព្រៃត្រូវគេចងទុកបែបនេះ ពី ៥ថ្ងៃ ទៅ ១០ថ្ងៃ យោលទៅតាមអាកប្បកិរិយាចុះញ៉មឬទទឹងរឹងរូសរបស់វា។ លុះសង្កេតឃើញថា កូនដំរីព្រៃបានប្រែប្រួលចរិតពីសាហាវមកស្លូតបូតបន្តិចហើយនុ៎ះ គេក៏បញ្ចេញវាពីសន្លង ទៅចងនៅមាត់ទឹក ដោយដាក់ទន្លីងទាំងជើងមុខ ទាំងជើងក្រោយ ដើម្បីកុំឱ្យវាធ្វើចលនាដើរឬរត់បានលឿន។ នៅទីនោះ គេទម្លាប់លាងទឹកឱ្យវា ស្ទាបអង្អែល ឡើងជិះលើខ្នង ឬលើ-ករបស់វា។ បើមានសកម្មភាពប្រតិកម្មអ្វីផ្សេងៗ គេមានដំរីផ្ទាក់ជាជំនួយក្នុងការដាក់ទណ្ឌកម្ម។ លុះដល់ម៉ោង ៤រសៀល គេក៏បញ្ចូលវាមកដាក់ក្នុងសន្លងវិញ។ ថ្ងៃជាបន្តបន្ទាប់មក គេបង្ហាត់វាឱ្យរៀនដើរត្រង់ទៅមុខ ដោយមានទម័កម្នាក់នាំដើរពីខាងមុខផង។ កាលណាត្រូវឱ្យវាបត់ឆ្វេងទម័កស្រែកបញ្ជាថា **"ឆ្វេង!"** ដោយយកចុងកង្វេរ (១១៨) កាប់ក្បាល ទាញឱ្យងាកទៅឆ្វេង។ រាល់បញ្ជាសុទ្ធតែភ្ជាប់ជាមួយនឹងការចុច ថ្កក់ ដោយកង្វេរ ឱ្យមុតសាច់ក្បាលដំរីជ្រៅ ឬរាក់ ទៅតាមចរិតទទឹងរឹងរូស ឬគោរពតាម។ ហ្មបង្ហាត់ឱ្យចេះបត់ឆ្វេងបត់ស្តាំ ឱ្យចេះថយ តាមបញ្ជាថា **"ដុន!"** ឱ្យចេះលើកជើងស្តាំ តាមបញ្ជា **"ជូន!"** ឱ្យឈប់កាលបើឮថា **"ហាវ!"**។ លុះដំរីចេះខ្លាច ឬចេះស្តាប់បញ្ជាបានសព្វគ្រប់ ហើយ គេមិនត្រូវការប្រើដំរីផ្ទាក់ទៀតទេ។

ទម័កចេះតែបង្ហាត់ បង្វឹកវាជារៀងរាល់ថ្ងៃ រហូតទាល់តែគេអាចបញ្ជា

---

(១១៨) កង្វេរជាអាវុធម្យ៉ាង ដែលហ្មដំរីកាន់ សម្រាប់បង្ក្រាបដំរី។ ដងកង្វេរធ្វើពីឈើ ប្រវែង ៨តឹកផ្លែធ្វើពីដែកថែប ចែកជាពីរផ្នែក: ផ្នែកដែលមានរាងក្ងក់ខាងចុងស្រួចមុត និងផ្នែកលើហៅថា ត្រួយកង្វេរ ដែលចុងក៏មុត ណាស់ដែរ។ ផ្លែកង្វេរសម្រាប់ថ្កក់ ឬការដំរី ឯត្រួយវាសម្រាប់ចាក់។ ការឈឺចាប់ដោយសារកង្វេរ ធ្វើឱ្យដំរី ខ្លាចកង្វេរដូចខ្លាខ្លាចរំពាត់ខ្សែភ្លើងដែរ។

វាបាន ដោយមិនបាច់ប្រើកង្វេរ។ ពេលនោះបើគេចង់ឱ្យវាបត់ស្តាំ គេគ្រាន់តែស្រែកបញ្ជាថា "ស្តាំ!" ហើយយកជង្គង់ឆ្វេងញាក់តិចៗទៅលើ-កឆ្វេងរបស់វាឱ្យវាងាកទៅស្តាំ តែបែបនេះ រហូតដល់ចុងក្រោយបំផុត គេគ្រាន់តែបញ្ជានឹងមាត់ទទេ គឺដោយមិនចាំបាច់ញាក់ជើង ញាក់ជង្គង់អ្វីទាំងអស់។

ការពង្រាបដំរីព្រៃប្រើរយៈពេលមិនហួសពីមួយខែឡើយ។ នៅពេលផ្សាំងនេះ ដើម្បីជួយឱ្យដំរីឆាប់ **"រាប"** ទម័កតែងស្តោះដំរីរាល់ព្រឹក ដោយដុតធូប ៣ សរសៃ កូរទឹកផ្ទិល ហើយសូត្របាលីថា **"សុវសំ វិអះ!"** ៣ ចប់ រួចរលាស់ទឹកទៅលើដំរី សុំឱ្យម្រេញគង្វាលជួយឱ្យដំរីឆាប់សាំង និងស្លូតបូតស្រួលប្រើ។ ដំរីដែលរាបហើយតែងចេះស្តាប់បង្គាប់តាមបញ្ជា មិនច្រងេងច្រងាងមិនមានប្រតិកម្មតបត ដែលនាំឱ្យបាត់សណ្តាប់ធ្នាប់នុំះឡើយ។

ចុងក្រោយបំផុត គេបង្ហាត់វាឱ្យមានទម្លាប់ជាមួយការចងព៉ោង ឬចងកូបពីលើខ្នងវា។ ព៉ោង ឬកូប ឬនៅតាមតំបន់ខ្លះគេហៅថា រយាង គឺជាគ្រែតូចមួយប្រភេទ ដែលផ្នែកខាងក្រោមមានរាងជាចំពាម តម្រូវតាមទំនងទ្រនង់ខ្នងដំរី។ រយាងតែងមានបង្កាន់ដៃជុំវិញ កម្ពស់ប្រហែល ១ តឹកកន្លះ មានរែងបន្ទះឬស្សីតូចៗធ្វើជារនាប។ មនុស្សចំនួន ៦នាក់អាចជិះលើរយាងបានដោយស្រួល។ គេយកខ្សែដង្កន់មកមកចងរឹតរយាង (ព៉ោង) ព័ទ្ធទៅក្រោមតាមពោះដំរី ហើយរឹតយ៉ាងតឹង កុំឱ្យរអិល ឬក្រឡាប់បាន។ ជួនកាលគេចងកូបពីលើព៉ោងថែមទៀត ដើម្បីធ្វើជាដំបូលការពារភ្លៀង ឬកម្តៅថ្ងៃ។

ការបង្ហាត់ដំរី ឱ្យចេះទៅតាមរបៀបរបបស្រុកនេះ ត្រូវបានបញ្ចប់នៅរវាងខែបុស្ស ជារដូវចម្រូត ដែលត្រូវភ្ជាប់ជាមួយការដឹកជញ្ជូនកណ្តាប់ស្រូវ ឬ

ដឹកគ្រាប់ស្រូវពីស្រែមកផ្ទះ ។

ប្រសិនបើគេទាក់បានចំនួនដំរី ដែលគេអាចចែកគ្នាបាន មួយៗម្នាក់ឱ្យមនុស្សក្នុងក្រុមនុំះ បានសេចក្តីថា ម្នាក់ៗបានទទួលចំណែកជាដំរីមួយសម្រាប់យកមកប្រើប្រាស់នៅក្នុងគ្រួសារ ។ ប៉ុន្តែផ្ទុយទៅវិញ បើក្រុមនេះ (ដែលតាមធម្មតាមាន គ្នា ៣ ឬ ៤នាក់) ទាក់ដំរីបានតែមួយក្បាលប៉ុណ្ណោះ គេយកដំរីមួយនេះមកលក់ យកប្រាក់ចែកគ្នា ក្រោយពីគេបង្ហាត់បង្រៀនវាឱ្យបានចេះស្តាប់បង្គាប់បញ្ជាសព្វគ្រប់អស់ហើយ ។ កាលជំនាន់នោះ(នៅក្នុងទសវត្សរ៍ទី៤០-៥០) ដំរីជំទង់មួយក្បាល គេលក់បាន៦០០៛(ប្រាំមួយរយរៀល) ដែលមានតម្លៃស្មើនឹងមាសជាង ២ តម្លឹង ។ ប្រសិនបើគេត្រូវការទុកវាប្រើវិញ បន្ទាប់ពីគេបានបង្ហាត់វាឱ្យចេះដឹង តាមរបៀបរបបស្រុកទេសហើយនុំះ គេក៏រៀបចំយកវាមកចូលស្រុកភូមិ ឱ្យរស់នៅជាមួយមនុស្សតរៀងទៅ ។

## ៦. ពិធីសែនចាប់ជើង(១១៩)

កាលណាគេនាំកូនដំរីព្រៃមកដល់ស្រុកភូមិហើយ មុននឹងគេអនុញ្ញាតឱ្យវារស់នៅ ក្នុងនាមជាសត្វចំណូលថ្មី ក្នុងចំណោមសត្វពាហនៈដទៃទៀតនុំះ ជាចាំបាច់ និងជាទម្លាប់ ដែលគេធ្លាប់តែងធ្វើជារៀងដរាបមក គេត្រូវតែធ្វើពិធីមួយ ហៅថា"**ពិធីសែនចាប់ជើង**" ។ ដើម្បីធ្វើពិធីនេះ គេត្រូវត្រៀមម្ហូបចំណីប្រដាប់ប្រដាពិសេសៗ សម្រាប់រៀបចំជាសំណែនជូនចំពោះម្រេញគង្វាល ម្ចាស់ទឹកម្ចាស់ដី ខ្មោច អារុក្ខ អារក្ខ អ្នកតា ជាអ្នកថែរក្សាទឹកដីភូមិឋាន ដែលមាន

(១១៩) នៅពេលសែនចាប់ជើងនេះ ទម័កក៏ធ្វើពិធីដាក់ឈ្មោះ ស្របពេលជាមួយគ្នាតែម្តង

ជាអាទិ៍ ក្បាលជ្រូក ឬជ្រូកខ្វៃទាំងមូល ( ទម្ងន់ប្រមាណ ៤០-៥០ គ.ក) មាន់ស្ងោរ ១ គូ បង្អែម ៤ ចាន ចម្អាប ៤ ចាន ក្នុងនោះមានចេកទុំ ២ ស្និត ជម ១ គូ ស្លាធមិព្រៃ ១ គូ បាយសី ៥ ថ្នាក់ ១ គូ លាជ ១ គូ ផ្កា ទឹកអប់ ស្រា ទៀន ធូប ស្លា ម្លូ បារី ថ្នាំ និងច្រម ១ ដែលមានដាក់ខោអាវខ្នាតតូច ១ សម្រាប់ និងពែ ១ ផង ។ វត្ថុក្រោយនេះជាសំណែន សម្រាប់ម្រេញគង្វាល ។

នៅមុនពេលសែន គេត្រូវបង្កូកស្នែងប្រគំជាបទបំពេរមួយ ឈ្មោះថា **"សុរិន្ទខ្នងភ្នំ"** ។ គេត្រូវប្រគំស្នែងជា ៣បទ ទុកដូចជាការដង្ហោយហៅអស់ទាំងអារក្ស អ្នកតាព្រៃភ្នំ ម្រេញគង្វាល ឱ្យមកសណ្ឋិតជួយថែរក្សាដំរី និងជួយធ្វើឱ្យដំរីផ្តាច់ខ្លួនពីជីវិតជាសត្វព្រៃ មកជាសត្វស្រុកវិញ គឺឱ្យវាទៅជាសត្វពាហនៈ ។

នៅក្នុងភូមិ បើមានដំរីច្រើនក្បាល ដែលគេត្រូវសែនចាប់ជើង ( ពិធីឱ្យឈ្មោះ) នោះ គេប្រមូលគ្នាមកធ្វើតែមួយកន្លែង ក្នុងថ្ងៃ និងពេលជាមួយគ្នាតែម្តង ។ ពិធីនេះច្រើនតែប្រព្រឹត្តទៅនៅពេលរសៀល ។ បងប្អូនឆ្ងាយជិតញាតិមិត្តនៅក្នុងភូមិ និងនៅក្រៅភូមិ ជាច្រើននាក់ ត្រូវបានគេអញ្ជើញឱ្យចូលរួមក្នុងពិធីនេះ ។ គេមានចាត់ចែងរៀបចំម្ហូបអាហារដ៏ពិសេស១ សម្រាប់ជប់លៀងភ្ញៀវផង ។ កាលបើបងប្អូនញាតិមិត្ត ដែលត្រូវគេអញ្ជើញឱ្យចូលរួម បានមកជួបជុំគ្នាអស់ហើយ គេក៏ចាប់ផ្តើមពិធីដាក់ឈ្មោះជាមុន ។

តាមទម្លាប់ពីបរមបុរាណរៀងមក គេសរសេរឈ្មោះ ៣ យកទៅចងផ្អោបជាប់ទៅនឹងអំពៅខ្មៅ ៣ ដើម ។ បន្ទាប់មក គេដឹកដំរីទៅជិតអំពៅទាំង៣ដើមនោះដើម្បីឱ្យវាស៊ីអំពៅ ។ បើដំរីលូកដើម្បីយកអំពៅណាមួយ ក្នុងចំណោមអំពៅទាំង ៣ ដើម គេក៏សន្មតយកឈ្មោះ ដូចមានជាប់នៅនឹងដើមអំពៅនោះ

មកដាក់ឈ្មោះឱ្យដំរី។ ឈ្មោះផ្សេងៗ ដែលគេច្រើនយកមកដាក់ឱ្យដំរីមានជាអាទិ៍ **អាចម្រើន, អាសម្បុក, អាសម្បូរណ៍, អាក្រឡង់, អាពេជ្រ, អាកែវ, អាប្រកប, អាពូន, អាសុវណ្ណ, អាប្រសើរ, អាមណី, មីក្រពុំ,** ។ល។ និង ។ល។ (ឈ្មោះដំរីទាំងអស់ គេមិនមានគិតថាជា ដំរីញី ឬដំរីឈ្មោលទេ បើជាដំរីញីគេគ្រាន់តែហៅ "មី" ពីមុខប៉ុណ្ណោះ ជាជំនួស "អា")។

ប៉ុន្តែ ដល់ពេលជាខាងក្រោយៗមកទៀត គេមិនសូវផ្សងឱ្យដំរីចាប់អំពៅរើសយកឈ្មោះខ្លួនឯងបែបនេះទេ។ គេច្រើនឱ្យហ្មចាស់ៗនៅក្នុងភូមិដាក់ឈ្មោះឱ្យដំរី តាមការពេញចិត្តរបស់គាត់។ រួចហើយ ម្ចាស់ដំរីក៏សន្មតយកឈ្មោះដែលហ្មចាស់ទុំដាក់ឱ្យនោះ សម្គាល់ថាជាឈ្មោះដំរីរបស់ខ្លួន ជារៀងរហូតតទៅ។

កាលណាគេរកឃើញឈ្មោះឱ្យដំរីថ្មីបានហើយ ចាស់ទុំ និងអ្នកចូលរួមទាំងអស់ ក៏ត្រូវប្រារព្ធពិធីសែនព្រេន ដោយពោលយ៉ាងនេះថា "ឱ! ព្រះតេជះ ម្ចាស់ទឹកម្ចាស់ដី អរុក្ខ អារក្ខ អ្នកតា ម្រេញគង្វាល អ្នកកំបាំងសច្ចំ បង់បត់! ថ្ងៃនេះជាថ្ងៃជា ពេលល្អ យើងខ្ញុំរៀបចំអាហារភោជន មានបង្អែម និងចម្អាប នំនែក ផ្លែឈើ ម្លូ ស្លា បារី ថ្វាយចំពោះអស់លោកទាំងអស់សេពសោយ ឱ្យបានសប្បាយរីករាយ ហើយសូមឱ្យជួយដំរីខ្ញុំនេះ រស់នៅបានសុខចម្រើនបិវរបេរ គង់វង្សនៅជាមួយម្ចាស់ថ្មីនេះ សូមជួយចម្រុងចម្រើន អស់កាលយូរអង្វែងទៅ និងសូមជួយឱ្យពួកយើង ជាអ្នកស្រុកក្នុងភូមិនេះ បានជួបតែសេចក្ដីសុខសប្បាយ ព្រមទាំងសត្វធាតុ គោ ក្របី ដំរី សេះ សូមឱ្យប្រាសចាកជំងឺតម្កាត់នានា សូមឱ្យមានជោគជ័យ សិរីសួស្តីរៀងទៅ"។

លុះគេសែនព្រេនបែបនេះជាគម្រប់ ៣ដងហើយ គេក៏ចាប់ចំណីចំណុក ទាំងបង្អែម ទាំងចម្អាប មួយមុខបន្តិច១ គ្រប់មុខ ដាក់លើស្លឹកចេកមួយបន្ទះរួច ទើបច្រូចទឹក ច្រូចស្រា ជាកិច្ចបញ្ចប់ពិធី។

បន្ទាប់ពីសែនព្រេននេះទៅ ពិធីជប់លៀងបែបពិសេសមួយ ក៏ចាប់ផ្ដើមឡើង ក្នុងបរិយាកាសដ៏រីករាយក្រៃលែង។ បាយ, សាច់ជ្រូកខ្វៃ, មាន់ស្ងោរ, និងមុខម្ហូបផ្សេងៗទៀត គឺជាចំណីអាហារ ជាគ្រឿងក្លែមដ៏ឆ្ងាញ់បំផុតដែលគេយកមកផ្សំជាមួយនឹងភេជ្ជៈចាំបាច់មួយមុខទៀត គឺស្រា-សមួយ ឪទិនស្រេះ បានបង្កលក្ខណៈឱ្យគេស៊ីផឹក ឱ្យគេបានជួបឱកាសសប្បាយរីករាយ រហូតដល់យប់ជ្រៅ ទើបចប់កម្មវិធី។

## ការកត់សម្គាល់

កាលណាដំរីសាំងហើយ វាត្រូវក្លាយទៅជាសត្វពាហនៈមួយប្រភេទ ដែលមានប្រយោជន៍ ចេះស្ដាប់បង្គាប់ ហើយស្រឡាញ់ម្ចាស់ណាស់។ គេអាចប្រើវាធ្វើជាជំនិះ ឬឱ្យដឹកអ្វីធ្ងន់ៗ។ ខ្មែរយើងមានមេសូត្ររត់មាត់មួយ ដែលនិយាយសរសើរសត្វពាហនៈថា :

"រីគោក្របី សេះនិងដំរី បម្រើធ្វើការ ទាំងថ្ងៃទាំងយប់
គ្រប់ប្រាំងវស្សា ជរាពិការ ក៏មិនថាអ្វី។
ខ្លះជាជំនិះ ខ្លះអូសរទេះ ខ្លះភ្ជួររាស់ដី តាមតែយើងប្រើ
ឥតប្រកែកអ្វី ក្មេងក្មាងប្រុសស្រី ក៏គ្នាខ្លាចដែរ"។

ចំពោះដំរីរនាម គេមិនបាច់មានត្រណមច្រើនទេ ពីព្រោះដំរីរនាមរស់នៅក្នុងតំបន់ទំនាប មានទឹកលិចនៅរដូវវស្សា។ វាស៊ីតែត្រើប កំផ្លោក ស្មៅ

ហើយជាធម្មជាតិរបស់វា វាមិនសូវខ្លាំងដូចដំរីនៅព្រៃភ្នំទេ។ ខ្នងវាច្រើនមានរាងកោង១ ក្បាលឱនចុះ។ គេប្រើវាសម្រាប់តែជិះ ឬជីកកណ្តាប់ស្នូង កណ្តាប់ស្រូវ ដឹកឧស ជាដើម។

តាមធម្មតា ដំរីមានអាយុ ១៥០ឆ្នាំ គឺអាយុខ្ពីជាងអណ្តើក ៥០ឆ្នាំ។ ចាប់ពីអាយុ៤២ ឆ្នាំ ទៅ៤៥ ឆ្នាំ ដំរីចាប់ចុះប្រេង។ ពាក្យថា **"ចុះប្រេង"** នេះគេប្រើតែចំពោះដំរីប៉ុណ្ណោះ មានន័យថា "រកញី"។ ពេលនោះដំរីទៅជាកាចលែងស្តាប់នរណាទាំងអស់។ ហ្មត្រូវដឹងពីពេលណាវាចុះប្រេង ហើយត្រូវដឹកវាយកទៅចងក្រៀកទុកចោល បង្អត់ចំណីឱ្យបានជាមុន ដើម្បីឱ្យវាចុះស្គម ថយកម្លាំងឱ្យបាន ៤-៥ថ្ងៃ ទុំះវានឹងមិនអាចចុះប្រេងឡើយ។ ដែលគេថាប្រេងនោះគឺជាទឹកកាមដែលហូរចេញពីរន្ធតូច១ក្បែរភ្នែកវា។ ទឹកនោះមានក្លិនស្អុយណាស់។ ដើម្បីបង្ការកុំឱ្យដំរីចុះប្រេង គេតែងតែប្រើវាឱ្យច្រើន តែមិនត្រូវឱ្យវាស៊ីច្រើនរហូតដល់ធាត់ពេញកម្លាំងពេកនុំះទេ។

ប្រដាប់សម្គាល់ភេទរបស់ដំរីញីនៅខាងក្រោមពោះ មិនមែននៅជាប់ខាងក្រោយកន្ទុយ ដូចគោ ក្របីទេ។ តាមទម្លាប់ គេមិនឱ្យប្រើពាក្យចំអេស-ចំអាស សម្រាប់ហៅដាច់ខាត ពោលគឺគេមិនឱ្យថា"ក្តិតដំរី"ទេ។ ការប្រើពាក្យមិនពិរោះ ហៅវាបែបនេះ ជាការខុសត្រណម ហើយធ្វើឱ្យដំរីខឹង អាចរហូតដល់រត់ចោលម្ចាស់ទៀតផង ព្រោះវាចាត់ទុកដូចជាគេជេរ ប្រមាថវា។ ព្រោះប្រដាប់សម្គាល់ភេទរបស់ដំរីញី គេត្រូវហៅថា "ស្បោង"។ អំពីស្បោងវានេះដំរី ប្រកាន់ណាស់។

មានគ្រាមួយនោះ ក្នុងឆ្នាំ ១៩៧៧ នារដូវវស្សា ខ្ញុំបានជួបនឹង

ព្រឹត្តិការណ៍មួយ។ នៅពេលដែលគេកំពុងបរដំរីញីមួយ ឈ្មោះ **"មីក្រពុំ"** តាមផ្លូវពីភូមិចុងជាច ទៅកើត ស្រាប់តែមានក្មេងប្រុស១ពីរ-បីនាក់ ដើរតាមដំរីនោះជាការកម្សាន្តលេង ព្រោះឃើញសត្វដ៏ធំនេះ។ ក្នុងចំណោមក្មេង១ទាំងនោះ មានក្មេងម្នាក់មានកាន់ឬស្សីមួយដើម ប្រវែងប្រហែលជិតពីរម៉ែត្រ។ ក្មេងនោះ ដោយវាមិនដឹង និងដើម្បីជាការលេងសើចរបស់វាផង ក៏រពឹសដៃយករំពាត់នោះទៅរុកស្បោងមីក្រពុំ។ ស្រាប់តែមីក្រពុំងាកក្បាលមកក្រោយជាបន្ទាន់។ ហ្មនោះជាមនុស្សវាងវៃ ហើយរហ័សណាស់។ ប្រហែលជាគាត់មិនដឹងពីមូលហេតុអ្វីជាប្រាកដទេមើលទៅ គាត់គ្រាន់តែយល់ថា មានកើតរឿងមិនស្រួលហើយ។ ព្រមគ្នានោះ ហ្មនោះក៏លើកកង្វេរកាប់ក្បាលមីក្រពុំភ្លាម ធ្វើឱ្យមីក្រពុំ ឈឺ ស្រែក វ៉ូម!ហើយបែរមុខត្រង់ទៅតាមទិសវិញទៅ។ ប៉ុន្តែវានៅតែរេរា មិនចង់ទៅមុខភ្លាមទេ។ វាងាកទៅសម្លក់ក្មេងនោះ មួយភ្លែតសិនទើបវាបន្ត ដំណើរទៅមុខទៀត។ ពេលនោះ បើហ្មមិនរហ័សទាន់ពេលទេ ក្មេងទាំងប៉ុន្មាននោះ ប្រាកដជាត្រូវដំរីវាយនឹងប្រមោយវាស្លាប់ជាមិនខាន។

គេនិយាយថា ការដែលវាសម្លក់ក្មេងនោះ គឺវាបំណងនឹងកត់សម្គាល់មុខក្មេង១នោះទុកឱ្យបាន ដើម្បីសងសឹក កាលណាវាមានឱកាស។ ឯក្មេង១ព្រៃល ដែលមានខ្លួនបែបនេះ តែងត្រូវចាស់១ហាមប្រាម មិនឱ្យដើរទៅលេងឯណាឆ្ងាយទេ ព្រោះខ្លាចជួបនឹងរឿងដដែលនេះ។ គេនិយាយបន្ថែមទៀតថា ធម្មតាដំរីវាចាំណាស់ មុខមនុស្សណា ដែលវាចងគំនុំជាមួយ។

(នៅចុងខែកក្កដា ឆ្នាំ២០០០ ខ្ញុំបានជួបហ្មដំរីក្មេងម្នាក់ ហើយនិយាយប្រាប់គាត់ពីរឿងមីក្រពុំ។ គាត់បានប្រាប់ខ្ញុំថា គាត់ស្គាល់មីក្រពុំ វាមានមាឌធំហើយកាចណាស់។ ដំបូងវានៅខេត្តកំពង់ស្ពឺ តែក្រោយមក តាមការបែងចែក

របស់ខ្មែរក្រហម គេក៏យកវាឱ្យទៅបម្រើការងារយោធា នៅក្នុងខេត្តកំពង់ចាម ទៅ។ ក្រោយមក ដោយខ្វះការថែទាំ គឺដឹងតែពីប្រើ មិនឱ្យវាស៊ីចុកគ្រប់គ្រាន់ ជួនកាល ក្នុងមួយថ្ងៃវាបានស៊ីតែដើមចេកមួយដើមប៉ុណ្ណោះ។ គេប្រើរហូតដល់ រលួយខ្នង កើតជាដំបៅ។ វាក៏ឈឺស្លាប់ទៅ)។

ដំរីពាក់គ្នាដូចជាគោដែរ ថ្វីបើដំរីមានស្បៀងរបស់វានៅខាងក្រោម ពោះ ដូចគ្នានឹងដំរីឈ្មោល ក៏ដោយ។ ក្នុងមួយជីវិតរបស់វា ដំរីញីមានកូនតែម្តង ប៉ុណ្ណោះ ហើយម្តងនេះ គឺបានកូនតែមួយក្បាលទេ។ កូនដំរីកើតមកបានមួយ សន្ទុះ នឹងចេះដើរ ចេះបោចស្មៅ ឬស្លឹកឈើទៅបញ្ចុកមេវា ឃើញថា វាហាក់ ដូចជាដឹងស្រឡាញ់មេវា តាំងពីវាទើបនឹងកើតមកម្លេះ។

ក្នុងការពាក់គ្នា ដំរីប្រយ័ត្នណាស់។ វាចៀសវាងមិនឱ្យមនុស្សឃើញវា ពាក់គ្នាទេ។ ហើយបើលោជាពេលដែលកំពុងពាក់គ្នា មានមនុស្សណាឃើញ ហើយដំរីក៏ឃើញមនុស្សនោះដែរ ដំរីអាចដេញព្រេចអ្នកនោះ រហូតដល់ស្លាប់។ ប៉ុន្តែ ទោះជាយ៉ាងណាក្តី ក៏នៅមានមនុស្សខ្លះបានឃើញវាដែរ។ ជួនកាលដំរីញី និងដំរីឈ្មោលទាំងពីរ នាំគ្នាទៅរកដំបូក ធ្វើជាកំណល់ តែនេះមិនជាចាំបាច់ទេ។ នៅពេលវាពាក់គ្នា អាឈ្មោលដែលនៅពីលើមីញី យកដៃ(ប្រមោយ)របស់វា ទៅការក្បាលមីញីជាប់។

ដំរីឈ្មោលដឹងណាស់ នៅពេលដែលដំរីញីពពោះបានគ្រប់ខែហើយ។ ដល់ពេលនោះ ដំរីឈ្មោលកាច់មែកឈើធំៗជាច្រើនយកមករៀប ដាក់គងលើ គ្នា បង្កើតបានជារោងមួយយ៉ាងជិត ខាងក្នុងមានរបៀបណាស់ គឺវាមិនឱ្យមាន មែកឈើច្រងេងច្រងាងទេ។ នៅក្នុងរោងនេះ ដំរីញីអាចចូលទៅសម្រាកនៅ បានយ៉ាងស្រួល។ គឺនៅក្នុងរោងនោះឯងហើយ ដែលដំរីញីត្រូវកើតកូន ។

# អវសានកថា

គួរឱ្យស្ដាយអ្វីម្ល៉េះទេ ! នៅនាបច្ចុប្បន្នកាលនេះ ការទាក់ដំរីរនាម គ្រាន់តែជាឆាកមួយ ដែលនៅសល់ត្រឹមតែសុបិនប៉ុណ្ណោះ តាមការនិទានប្រាប់នៃហ្មចាស់ៗ ដែលស្ទើរតែផុតពូជអស់ទៅហើយ។ បើគេយករឿងនេះមកនិទានឡើងវិញ ដោយផ្ទាល់មាត់ក្ដី តាមការកត់ត្រាជាលាយលក្ខណ៍អក្សរក្ដី អ្នកស្ដាប់ ឬអ្នកអាន ច្បាស់ជាគិតក្នុងចិត្តថា វាមិនមែនជារឿងពិតទេ គឺជាគ្រាន់តែជារឿងព្រេងនិទានមួយប៉ុណ្ណោះ។ ប៉ុន្តែ បើអ្នកបានឃើញ ឬបានជួបដំរីស្រុក ដែលគេផ្សាំងរួចហើយ ហើយដែលគេកំពុងប្រើប្រាស់ឱ្យដឹកជញ្ជូនអ្វីៗធ្ងន់ៗនុំះ អ្នកនឹងអាចពិចារណាឃើញនូវទំហំនៃសេចក្ដីលំបាក សេចក្ដីក្លាហាន និងការប៉ិនប្រសប់របស់អ្នកទាក់ដំរី (ទម័កដំរី) នុំះប៉ុនណា ។

មូលហេតុដែលលែងឱ្យមានដំរីរនាម និងលែងមានការទាក់ដំរីរនាម គឺដោយមកពីប្រទេសយើងកើតសង្គ្រាម ។ ការប្រើប្រាស់កាំភ្លើងតូចធំ, គ្រាប់បែក, គ្រាប់មីន, ការកាប់បង្ហិនបង្ហោចព្រៃឈើ ដ៏សែនអាណាធិបតេយ្យ បានបណ្ដាលឱ្យដំរីក្នុងព្រៃរនាមយើង ភ័យស្លន់ស្លោ ភ្ញាក់ផ្អើល រត់ទៅជ្រកឯប្រទេសជិតខាងស្ទើរតែអស់។ ដូច្នេះ ចលនាដំរីចេញពីព្រៃភ្នំ ទៅរកស៊ីក្នុងបឹងនៅរដូវប្រាំង និងចលនាឡើងពីតំបន់បឹង ទៅនៅក្នុងព្រៃវិញ នៅរដូវទឹកជំនន់ក៏លែងមានទៀតដែរ ព្រោះដំរីរត់ចេញពីស្រុកយើង ស្ទើរអស់រលីងទៅហើយ។ ភាពអាត្មានិយមដ៏អាក្រក់របស់មនុស្សខ្វះសម្បញ្ញជៈ បានធ្វើឱ្យមានការបាត់បង់នូវប្រពៃណីមួយ ដ៏គួរឱ្យមានការចាប់អារម្មណ៍យ៉ាងក្រៃលែង។

ម្យ៉ាងវិញទៀត តាំងពីយូរលង់ណាស់មកហើយ ពូជសាសន៍ខ្មែរយើង ឱ្យតម្លៃសមត្ថភាពមនុស្ស ទៅលើការប៉ិនប្រសប់ និងសេចក្ដីក្លាហាន ប្ដូរស្លាប់រស់ដើម្បីចាប់ (ទាក់) ដំរីព្រៃឱ្យបានទាំងរស់ យកមកផ្សាំងប្រើប្រាស់សម្រាប់សេចក្ដីត្រូវការ ក្នុងជីវភាពរស់នៅរបស់អ្នកស្រុក អ្នកភូមិ។ ដំរីជាសត្វចតុប្បាទម្យ៉ាងដ៏សាហាវ ប្រកបដោយគ្រោះថ្នាក់ ហើយដែលមានមាឌធំជាងគេបំផុតនៅក្នុងលោក។ បើមានជនណាទាក់ដំរីបានកាន់តែច្រើន អ្នកផងតែងផ្ដល់កិត្តិយស និងគោរពកោតខ្លាច ដោយចាត់ទុកជននោះជាមនុស្សខ្លាំងពូកែ ដែលគេត្រូវតែលើកតម្កើងឱ្យធ្វើជាមេធំ។

អតីតរាជធានីពីបុរាណយើងមួយមានឈ្មោះថា **"វ្យាធបុរៈ"** ដែលមានន័យថា **"បុរីទាក់ដំរី"**។ នេះជាភស្តុតាងសឱ្យយើងយល់បានថា កាលពីដើមខ្មែរយើងឱ្យតម្លៃខ្ពស់ណាស់ ទៅលើវិជ្ជាខាងទាក់ដំរី រហូតដល់ដាក់ឈ្មោះរាជ-ធានីភ្ជាប់ទៅនឹងការទាក់ដំរីទៀតផង។

បើយើងធ្មេចភ្នែក នឹកគិតទៅដល់អតីតកាលដ៏យូរលង់ របស់ដូនតាយើងនឹងអាចសន្និដ្ឋានបានថា កាលពីរយៈពេលរាប់រយ រាប់ពាន់ឆ្នាំមុននេះការទាក់ដំរីត្រូវគេយកមកធ្វើជាវិញ្ញាសារ ជាខ្នាត សម្រាប់វាស់សមត្ថភាពមនុស្ស ដែលព្រេងវាសនាតម្រូវឱ្យបានមកធ្វើជាមេ ជាចៅហ្វាយ លើអស់ទាំងមនុស្សឯទៀតៗ។ នៅក្នុងប្រវត្តិសាស្ត្រខ្មែរ គេតែងឮពីព្រះរាជា ព្រះនាមព្រះឧទេន និងព្រះចន្ទរាជា (សតវត្សទី ១៦ និងដើមសតវត្សទី ១៧ នៃ គ.ស.) ដែលជាមហាក្សត្រិយ៍ដ៏ខ្លាំងក្លាបំផុតលើវិញ្ញាសារទាក់ដំរីនេះ។

# ពិធីទាក់ដីរ របស់អ្នកស្រុកភ្នំក្រវាញ ខេត្តពោធិ៍សាត់

ការផ្សារភ្ជាប់គ្នារវាងមនុស្ស និងធម្មជាតិ មនុស្ស និងជំនឿសាសនា ប្រពៃណីទំនៀមទម្លាប់ ចងភ្ជាប់សង្គមខ្មែរ មិនអាចស្រាយបាន។ ជាក់ស្ដែង គ្រាន់តែនៅក្នុងមុខរបរទាក់ដីរតែមួយប៉ុណ្ណោះមានពិធីជាច្រើន ដែលត្រូវរៀបចំសែនព្រេនទៅតាមកិច្ចជាក់ស្ដែងនីមួយៗ។ ទាំងអស់នេះ បើតាមសម្រង់នៃការរៀបរាប់ត្រួសៗរបស់លោកតា ហ៊ាន ចាន់ ហៅ មឿន បច្ចុប្បន្នជាអាចារ្យវត្តព្រៃក្លុង ក្នុងភូមិព្រៃក្លុង ឃុំរកាត ស្រុកភ្នំក្រវាញ ខេត្តពោធិ៍សាត់ ត្រូវជាកូនបង្កើតរបស់លោកតាឈ្មោះ ហ៊ាន អ៊ុត ជាហ្មដីរ និងត្រូវជាប្អូនជីដូនមួយនឹងហ្មប៉ោ (ហ្មឆ្វេង) ហើយគឺជាហ្មជំនិតរបស់ហ្លួងព្រះបាទមុនីវង្ស ដែលគង់នៅក្នុងដំណាក់នាភូមិត្រពាំងជង ស្រុកបាកាន ខេត្តពោធិ៍សាត់ បានរៀបរាប់ប្រាប់ឱ្យដឹងថា :

នៅក្នុងពិធីទាក់ដីរ ត្រូវមានពិធីសែនព្រេនទៅតាមដំណាក់កាលនីមួយៗ ផ្សេងៗគ្នាដូចជា ពិធីផ្កាប្រកាំ ពិធីភ្នែនប្រកាំ ពិធីចូលដំណម ពិធីចាប់ទាម ពិធីចក់ប៉ារ៉ាស់ ពិធីចាប់ជើងប៉ារ៉ាស់ ពិធីចុះការនិងពិធីសែនផ្កាច់ព្រៃ។

## ពិធីផ្កាប្រកាំ

ប្រកាំ គឺជាព្រ័ត្រ ដែលធ្វើឡើងមានការប្រុងប្រយ័ត្នខុសពីព្រ័ត្រធម្មតា ព្រោះជាព្រ័ត្រពិសេស។ ដើម្បីវេញព្រ័ត្រប្រកាំ គេត្រូវរៀបចំពិធីសែន

ព្រេនអន្ទងព្រលឹងគ្រូ ឱ្យមកសណ្ឋិតថែរក្សាព្រ័ត្រជាមុនសិន ទើបចាប់ផ្ដើមការរៀបចំវេញព្រ័ត្រប្រកាំ រីឯរណ្ដាប់ក្នុងការរៀបចំសែនព្រេន មាន បង្អែម និងមានចម្អាប ពីរស្លក ស្លាធមិដៃព្រៃមួយគូ មាន់ស្ងោរមួយគូ ស្រាស្រេះ ឬដបមួយគូ នំអន្សមជ្រូក និងនំគមរៀបដាក់ថាសមួយគូ ក្រណាត់ស និងពងមាន់។ បន្ទាប់ពីរៀបរណ្ដាប់រួចមក ហ្មធំគេយកស្បែកដែលចៀររួចហើយមកដាក់នៅពីមុខគ្រឿងសំណែនហើយអញ្ជើញហ្មឆ្វេង ឬហ្មថាវ ឱ្យមករៀបចំប្រសិទ្ធីពលីការសូត្រផ្លុំ បញ្ចូលគាថា ទៅលើស្បែក ដែលត្រៀមនឹងវេញបញ្ចូលផ្ដុងជាព្រ័ត្រមួយ។ ក្រោយពីហ្មធំ ហោមពិធីចប់សព្វគ្រប់ គង្វាល និងហ្មធម្មតាទាំងអស់ជួយគ្នាក្នុងការវេញព្រ័ត្រ បញ្ចូលផ្ដុងដើម្បីងាយស្រួលក្នុងការវេញផ្ដុងឱ្យបានណែនល្អ។ ជាធម្មតាព្រ័ត្រក្នុងមួយកន្ទុយៗ គេនិយមប្រើពីប្រវែងម្ភៃទៅសាមសិបម៉ែត្រ។ ក្រោយពីស្បែកទាំងបី ត្រូវគេធ្លួញរួចហើយ ទើបគេចាប់ផ្ដើមវេញធ្លួញទាំងបីបញ្ចូលគ្នាទៀត នៅដើមធ្លួញ គេដាក់ពងមាន់ឆៅមួយនៅកណ្ដាលធ្វើរបៀបនេះក្នុងដប់ម៉ែត្រដាក់ពងមាន់មួយ រហូតដល់ព្រ័ត្រត្រូវវេញចូលជាផ្ដុងមួយរួចរាល់ជាស្ថាពរ។ ចុះហេតុអ្វីទើបបានជាគេចាំបាច់ដាក់ពងមាន់ដូច្នេះនោះគឺគ្មានការអះអាងពិតប្រាកដអាចឆ្លើយបានឡើយ គឺធ្វើទៅតាមទម្លាប់ចាស់ៗប្រាប់តៗគ្នាមកតែប៉ុណ្ណោះ។ ចំពោះព្រ័ត្រប្រកាំសម្រាប់ទម័កដំរី និងគង្វាល គឺគេគោរពបូជាជាទីបំផុត ដូចនេះហើយទើបប្រកាំនេះឯងគេឱ្យឈ្មោះរហូតដល់ទៅបី តាមកាលកំណត់នីមួយៗ ទីមួយនៅមិនទាន់វេញជាផ្ដុងគេហៅថាព្រ័ត្រ *ទំពរ* នៅពេលវេញបញ្ចូលជាផ្ដុងដោយមានហោមពិធីរួចរាល់គេហៅថា *ប្រកាំ* ទីបីនៅពេលគេនាំយកទៅព្រៃដើម្បីទាក់ដំរី គេឱ្យឈ្មោះមួយទៀត

ហៅថា*លោកគ្រូ*។ ពាក្យថាលោកគ្រូនេះ គឺមានអត្ថន័យបំផុតសម្រាប់ពួកគេ។ គ្រប់ឧបសគ្គដែលកើតមានឡើងនៅក្នុងពេលកំពុងបំពេញភារៈទម័កដំរី ហ្មឺ និង គង្វាល គេប្រយ័ត្នណាស់ទោះត្រូវប៉ះហ្វូងដំរីស្តខ្លាំង តដៃប្រវាយទាញអូស ព្រ័ត្រយ៉ាងណាក្តី គង្វាល និងហ្មឺ ត្រូវតស៊ូការពារក្រាញនរនៀល ធ្វើយ៉ាងណា មិនឱ្យដំរីព្រៃ ទាញយកព្រ័ត្រទាំងកន្ទុយទៅទេ ទោះព្រ័ត្រត្រូវដាច់ប៉ុន្មាន កំណាត់ក៏ដោយត្រូវតែបានខ្លះត្រឡប់មកវិញ នោះស្មើនឹងពាក្យថាស្មោះស្ម័គ្រ នឹងគ្រូ។ ផ្ទុយទៅវិញ បើដំរីព្រៃអូសយកព្រ័ត្រទៅបាត់ ហ្មឺ និងគង្វាលតស៊ូ ដណ្តើមមកវិញមិនបាន នោះហ្មឺ និងគង្វាលនោះគេចាត់ទុកថាមិនបានការ មើល ងាយគ្រូ បណ្តាលឱ្យបាត់ ត្រូវទទួលទណ្ឌកម្មជាយថាហេតុក្នុងពេលក្រោយមិន ទៀង អាចនៅក្នុងឧបទ្ទវហេតុណាមួយក្នុងមុខរបរនេះ បើមិនស្លាប់ហ្មឺ ក៏ស្លាប់ គង្វាលមិនលែងឡើយ ដោយគ្មានវិធីណាជួយស្រោចស្រង់ កែកុនបានឡើយ។

## ពិធីភ្នែនប្រកាំ

ក្រោយពេល ដែលប្រកាំត្រូវបាន គេវេញកើតជារូបរាងគ្រប់លក្ខណៈ ហើយព្រ័ត្រប្រកាំត្រូវរៀបចំឡើងនូវពិធីមួយទៀត ឱ្យឈ្មោះថា "**ពិធីភ្នែន ប្រកាំ**"។ ពិធីភ្នែនប្រកាំ គឺជាពិធីបន្តភ្ជាប់ពីពិធីផ្គាប្រកាំដែរ។ ព្រ័ត្រប្រកាំ សម្រាប់ហ្មឺស្រុកភ្នំក្រាវ៉ាញ គឺគេច្រើនប្រើប្រកាំមានប្រវែងពីម្ភៃម៉ែត្រទៅ ហាសិបម៉ែត្រ។ នៅក្នុងពិធីភ្នែនប្រកាំ ហ្មឺធំរៀបចំចាត់ចែងហ្មឺធម្មតានិងគង្វាល ដែលមកចូលរួម ជួយបន្ធាយប្រកាំចែកជាពីរទៅតាមវែង ឬខ្លី ម្ខាងមួយក្រុម ហើយគេចាប់ផ្តើម ភ្នែន (ឆ្វាយរង្វេល) ដោយប្រើរង្វង់មុខកាត់មួយម៉ែត្រ ជា មួយនឹងការសូត្រ ប្រោះព្រំរបស់ហ្មឺធំ។ គេភ្នែនប្រកាំដោយការប្រុងប្រយ័ត្ន

បំផុត ព្រោះខ្លាចព័ន្ធគ្នា ឬមិនត្រឹមស្មើល្អ អាចផ្តល់ការលំបាកនៅពេលលើកដាក់លើខ្នងដំរីធ្លាក់ ម្យ៉ាងអាចមានការលំបាកនៅពេលទាក់ដំរីព្រៃ។ សូមបញ្ជាក់ថាប្រកាំនៅខាងកន្ទុយម្ខាង គេមានធ្វើឈើខ្វែងរបៀបស្នែងប្រើស ហៅថាកន្ទុយខ្នុរ ងាយដាក់ភ្ជួរនឹងដីឱ្យអូសទាក់ជាប់ទៅនឹងឫសឈើធំនៅពេលដែលដំរីវាអូសខ្លាំង នេះគឺជាមធ្យោបាយសម្រាប់ការពារមិនឱ្យបាត់គ្រូ។

មុខរបរទាក់ដំរីព្រៃ គេច្រើនធ្វើឡើងនៅរដូវរំហើយ ខែកត្តិកមួយខែនិងខែពិសាខមួយខែប៉ុណ្ណោះ បើខុសពីខែនេះកម្រមានគង្វាលណាចេញទៅទាក់ដំរីព្រៃណាស់ ព្រោះហ្វូងដំរីព្រៃ វាមិនងាយនិងចេញរកស៊ីទីវាលផ្តេសផ្តាសទេ។ ដូច្នេះកាលបើរដូវកាលមកដល់ហើយ ហ្មធំឬក៏ដង្ហៅគេផ្តើមរៀបចំចាត់ចែងឱ្យហ្មធម្មតា ឬគង្វាលបីបួននាក់ចេញទៅស៊ើបព្រៃជាមុនសិន គេមិនចុះព្រាវៗ ក្រោយពីបានទទួលដំណឹងច្បាស់ការហើយនោះ ទើបដង្ហៅឬហ្មថាវ ប្រកាសឱ្យហ្មធម្មតា និងគង្វាលទាំងអស់បានដឹងពីថ្ងៃកំណត់ចេញដំណើរនិងរៀបចំស្បៀងត្រៀមបម្រុងទុកជាស្រេច ម្យ៉ាងសម្រាប់ទុកឱកាសឱ្យហ្ម និងគង្វាលទាំងអស់ត្រៀមខ្លួនរៀបចំពិធីចូលកាន់ត្រណម។ នៅក្នុងពិធីចូលកាន់ត្រណម មិនមានរៀបណ្តាប់សែនព្រេនអ្វីច្រើន ពោរពាស ឬធំដុំអធិកអធមនោះទេ គេគ្រាន់តែមានរៀបចំស្លាធមិ ដូងទុំមួយគូរ ស្លាធមិដៃព្រៃមួយគូរ បារីប្រាំ ស្លាប្រាំទឹកមួយកែវ រៀបចំទុកដាក់នៅលើហ៊ីងតាមផ្ទះរៀងៗខ្លួន មិនច្រឡូកច្រឡំគ្នាទេ ប្រពន្ធហ្មម្នាក់ៗជាអ្នកថែរក្សាយ៉ាងស្ងៀមស្ងាត់ តឹងរ៉ឹងរហូតដល់ប្តីត្រឡប់មកពីគង្វាលវិញ ទើបធ្វើពិធីសែនចេញលែងកាន់ត្រណមបាន។ សកម្មភាពទាំងនោះមាន :

**បម្រាមសម្រាប់ប្រពន្ធនៅផ្ទះ :**

-ហាមលាបប្រេងម្សៅ ធ្វើឱ្យព្រ័ត្របីនៅឯព្រៃរអិលទាក់ដំរីមិនជាប់ ។

-ហាមយកវែកជ្រោយបាយគងមាត់ឆ្នាំង ធ្វើឱ្យខ្សែងទាក់ដំរីមិនជាប់ ។

-ហាមដើរកកន្លងទីដំណេកប្ដី (ទាំងប្រពន្ធ និងកូនផង)ធ្វើឱ្យជួបសត្វសាហាវ ។

បីភ្ញៀវមកលេង ត្រូវស្រែកហៅពីចម្ងាយ ទើបអនុញ្ញាតឱ្យឡើងផ្ទះ ជៀសវាងឡើងជួបវាក់មុខគ្នាដោយគ្មានដំណឹង ប្ដីនៅឯព្រៃនឹងដើរ ទៅវាក់ជួបនឹងសត្វសាហាវដោយគ្មានដំណឹងដូចគ្នា ។

- ដណ្ដាំបាយមិនត្រូវយករងើកភ្លើងគោះគ្នា ដំរីដែលទាក់បានពីព្រៃ និងកើតជំងឺបាក់ក្រចក ។

- ហាមអង្គុយពាំងមាត់ជណ្ដើរ ដូចគ្នានឹងយកវែកបាយគងមាត់ឆ្នាំង ។

- ហាមប្រពន្ធមានសាហាយ ហ្នឹនៅឯព្រៃពុំមានគ្រោះថ្នាក់អ្វីទេ ប៉ុន្តែដំរីធ្លាក់វាចេះតែដើរខ្ទុតដី (ធ្វើរបៀបពាក់មេ) ទាំងនេះក៏រំខានដល់ការទាក់ដំរីដែ ។

- ហាមប្រពន្ធលេងប្រឡែងគ្នា ប្ដីត្រូវជួបហ្វូងដំរីព្រៃដេញគ្នាផ្អើលរត់ពពាក់ពពូនរកចូលទៅជិតដើម្បីទាក់ មិនបាន ។

- ហាមជជែកទល់មុខគ្នា ដំរីវាមិនខ្លាចហ៊ានឈរទល់មុខដំរីធ្លាក់ដូចគ្នា

កំហុសឆ្គងទាំងឡាយរបស់ប្រពន្ធ គឺមិនមានវិធានការណាមួយអាចជួយបញ្ចៀសបានឡើយ បីកើតហើយគឺត្រូវតែប្រព្រឹត្តទៅតាមដំណើររហូតដល់ទីបំផុត ។

## គ្រូណាមសម្រាប់ហ្ម ឬគង្វាល

(ជាជនស្ម័គ្រចិត្តទៅតាមហ្ម បើមានគ្រោះ ថ្នាក់អ្វីឪពុកម្ដាយមិនរករឿងទេ)៖

- ហាមដើរស្រែកច្រៀងជាពាក្យផ្ដោះផ្ដងស្នេហា រវើងរវ៉ាងនៅក្នុងព្រៃ។

- មិនត្រូវប្រើពាក្យច្រងេងច្រងាង សំដីអាសគ្រាម មិនស្គាល់ខ្ពស់ទាបនៅក្នុងព្រៃ។

- ហាមមុជទឹកប្រឡែងគ្នាធ្វើដូចសត្វទាលេងទឹក។

បើមានកំហុសដូចបានរៀបរាប់ទាំងបីចំណុចខាងលើនេះគេឱ្យឈ្មោះថាធ្វើឱ្យចង្រៃវាចូល ព្រោះម្រេញគង្វាល ដែលគេជឿថាជាអ្នកថែរក្សាព្រៃព្រឹក្សានោះគេលង។ កាលបើ វាលងហើយដូចជាអ្នកស្រែកច្រៀង នឹងត្រូវវក់ស្រែកឡូឡាគ្មានឈប់ឈរ បើមុជទឹកវិញគឺវក់វីក្នុងទឹកឈ្លក់ប្រកាច់ប្រកិន តែនៅធ្វើតែរបៀបនេះមិនព្រមឡើងគោកឡើយ អ្នកនិយាយផ្ដេសផ្ដាស នឹងត្រូវប្រកាច់ប្រកិននិយាយវក់វីបែកពពុះមាត់ (បានន័យថាបើខុសគឺឆ្កួត) ដើម្បីកែកុន វិធីដើម្បីស្រោចស្រង់អ្នកជំងឺបានគឺហ្ម ដែលជាហ្មធំក្នុងក្រុមចាត់គង្វាល ឬហ្មទៅជាមួយ ចាប់អ្នកជំងឺមកធ្វើឧបកិច្ចដូចជាធ្វើទណ្ឌកម្មវាយនឹងរំពាត់ ជូនវាយមួយរយរំពាត់ ទោសធ្ងន់ត្រូវប្រហារជីវិតស្លុត ធ្វើយ៉ាងណាឱ្យអ្នកទោសស្លុតព្រមចុះចាញ់ ហើយហ្មធំប្រោះព្រំគាថា ដាស់ស្មារតី ទើបជាសុខស្រួលឡើងវិញ។ ការធ្វើបែបនេះគឺមានប្រសិទ្ធភាពបំផុត តែបើមិនធ្វើឧបកិច្ចទេនោះអ្នកជំងឺនឹងត្រូវឆ្កួតរហូតកែលែងបាន។

## របៀប និងដំណើរក្នុងការទាក់ដំរីព្រៃ

កាលបើដល់ថ្ងៃកំណត់ហើយ ក្រុមទម័កដំរីធ្វើដំណើរតាមគ្នាជាក្បួនចេញពីភូមិ។ ក្នុងដំរីផ្ទាក់មួយក្បាលមានហ្មម្នាក់ និងគង្វាលម្នាក់នៅជាមួយគ្នាដោយភាពស្ងៀមស្ងាត់។ បើអផ្សុក គេកម្រស្រែកច្រៀងណាស់ ព្រោះខ្លាចខុសត្រណម។ ដូចនេះគង្វាលណាក៏ដូចគង្វាលណា ស៊ីងតែចេះផ្លុំប៉ុពក បុំអ គ្រប់គ្នាដើម្បីកំដរអារម្មណ៍។ នៅពេលទៅដល់ព្រៃដែលជាទីសម្គាល់ថាមានដំរីព្រៃហើយ គេមិនចូលទៅជិតនោះទេ។ ហ្មឆ្វេងគេចាត់ឱ្យរៀបចំបោះជំរុំស្នាក់នៅជាទីប្រាកដប្រជាសិន ហើយភារកិច្ចទាំងអស់ គង្វាលគឺជាអ្នករ៉ាប់បម្រើដូចជាធ្វើរោងសម្នាក់ គង្វាលផ្ទាក់រៀបចំចាត់ចែងដណ្ដាំបាយស្លស្លុក ហូបបាយក្រោយហ្ម ដេកក៏មិនអាចដេកស្មើនឹងហ្មបានដែរ។ របៀបទាក់ដំរីនៅខេត្តពោធិ៍សាត់គេច្រើនរៀបចំទាក់នៅពេលយប់ ព្រោះស្រួលលបទៅជិតហ្វូងដំរីព្រៃម្យ៉ាងទៀតផ្ទាក់ក៏ត្រូវជ្រើសរើសយកជើងដែលពូកែៗដែរ។ ដើមឡើយ នៅខេត្តពោធិ៍សាត់ ផ្ទាក់ដែលពូកែ មានតែប្រាំក្បាលគត់គឺ :

១- ដំរីផ្ទាក់ឈ្មោះ **មេដកម៉ៃ** ផ្ទាក់របស់ឈ្មោះ ហ្ម **ហ៊ុន សុគម** មេឃុំរកាត។

២- ដំរីផ្ទាក់ឈ្មោះ **អាស្គម្គ** ទម័ក់របស់វាឈ្មោះ ហ្ម **ប៉ោ** (ជាហ្មចាវ),

៣- ដំរីផ្ទាក់ឈ្មោះ **មេកន្ទន់** ទម័ក់របស់វាឈ្មោះហ្ម **ប៉ាល់** (ឪពុកហ្មប៉ោ),

៤- ដំរីផ្ទាក់ឈ្មោះ **អាក្បេម** ផ្ទាក់របស់វាឈ្មោះហ្ម **ចឹក** ហៅដង្កៅកាទឹម,

៥- ដំរីថ្នាក់ឈ្មោះ **អាស្រង់** ទម័ករបស់វាឈ្មោះ ហ្មុ **មឿន** ( លោកតាហង់មឿន) គឺជាថ្នាក់ដូរបានមកពីខេត្តកំពង់ស្ពឺ ដំរីធម្មតាប្ដូរបានដំរីថ្នាក់នេះ ១។

ពេលយប់ ហ្មុទាំងអស់គ្នា និងគង្វាលត្រូវសម្រាករង់ចាំស្ដាប់សន្ទឹក និងសម្រែកហ្វូងដំរីព្រៃ កាលបើបានឮហើយ ទើបគេយកជើងឈូសហៅគ្នា ( គេមិនយកដៃកេះទេ ) ស្រែកប្រាប់គ្នាថា **"ឆាប់ឡើងវើយ! លោកមានព្រះឱសហើយ"** នោះទើបហ្មុ និងគង្វាលទាំងអស់ចាប់លើកប្រកាំដាក់លើខ្នងថ្នាក់ហើយស្រូតដំណើរទៅកាន់ទីដែលបានឮសម្រែកមេហ្វូងដំរី។ ទាំងអស់គឺស្ដាប់តែហ្មុថាវ ឬហ្មុឆ្វេង ដែលដឹកនាំតែម្នាក់គត់ ហើយការលបទៅជិតទៀតសោតគេមិនចូលពីលើខ្យល់ទេ គឺគេទៅពីក្រោមខ្យល់ ព្រោះដំរីពូកែស្រង់ក្លិនណាស់។ នៅពេលចូលទៅបានកៀកហើយ ហ្មុទាំងអស់ត្រូវបញ្ជាថ្នាក់រៀង១ខ្លួនឱ្យបោលសំរុកចូលទៅទាក់យកកូនបារ៉ាស់ណាមួយ ដែលហ្មុមានបំណងចង់បាន គេមិនទាក់យកមេដំរី ឬដំរីធំពេញកម្លាំងពេកនោះទេ ព្រោះវាពិបាកនឹងទាក់ ម្យ៉ាងទាក់បានមកហើយពិបាកនឹងផ្សាំង។ គេច្រើនទាក់យកដំរីស្ទាវមួយប្អូ។ នៅពេលថ្នាក់កំពុងគក់សម្លុតកូនបារាស ហ្មុត្រូវយក **រនក** រុញប្រកាំបញ្ចូលទៅក្នុងជើងកូនបារាសភ្លាម នៅពេលនោះគឺអ្វី១មិនប្រក្រតីឡើយ ជួនទាក់ជាប់ជើងកូនបារាសហើយមេដំរីចូលមកប្រយុទ្ធនឹងថ្នាក់ដើម្បីដណ្ដើមកូនរបស់វាវិញក៏មាន។ ដូចនេះជាហេតុធ្វើឱ្យកូនបារាស ដែលកំពុងត្រូវថ្នាក់សម្លុត ប្រាសរត់គេចទៅទាំងប្រកាំនៅជាប់នឹងជើង។ ពេលនោះគង្វាលត្រូវតែឆ្លាត កាលណាកូនបារាសវារត់នាំយកទាំងប្រកាំទៅ គង្វាលត្រូវលោតចុះ ហើយកាន់កន្ទុយខ្នុររត់យកទៅ

ចងនឹងគល់ឈើធំណាមួយ ឬបើគ្មានដើមឈើណាអាចចងបាន គេត្រូវយកកន្ទុយខ្នុរដាក់ភ្ជួរដីរហូតដល់ទាក់ជាប់នឹងឬសឈើណាមួយ ទើបរកវិធីកែកុនផ្សេងទៀតដើម្បីចងទុកឱ្យបាន នេះគឺជា **វិធីតស៊ូដើម្បីការពារគ្រួ**។ ហេតុ-ការណ៍ទាំងអស់ កម្រនឹងកើតមានណាស់ ។ បើមានគឺកើតមកពីអ្នកកាន់ត្រណមមិនបានរបស់ប្ដីឬប្រពន្ធហ្ម និងគង្វាលណាមួយប៉ុណ្ណោះ ។

កាលបើចង ឬទាក់ដីរីជាប់បារាសនឹងគល់ ឬឬសឈើណាមួយហើយ គេបង្ហូកស្នែងប្រមូលគ្នាភ្លាម ដើម្បីយកផ្ទាក់មកក្បៀបកូនបារាសធ្វើ**ពិធីចាប់ទាម**។ ក្នុង**ពិធីចាប់ទាម** គេមិនរៀបសំណែនសែនព្រេនទេ ព្រោះវាជាកិច្ចការមួយចាំបាច់និងបន្ទាន់។ កាលបើទម័កមកជួបជុំគ្នាហើយ (គេប្រើផ្ទាក់បួន) សម្រាប់ការពារជុំវិញកូនបារាស មុខមួយ ក្រោយមួយ ចំហៀងស្ដាំមួយ ចំហៀងឆ្វេងមួយ ដើម្បីចាប់ទាមចូលទៅក្នុងកូនបារាស ហើយដោះប្រកាំចេញពីជើង។ **ព្រំត្រទាម** ដែលចងនឹងកកូនបារាសត្រូវចងឱ្យដោះមិនរួច តែអាចបង្វិលបានធូរល្មម ហើយឱ្យផ្ទាក់ទាំងបួន បរក្បៀងអូសទៅចងទុកនឹងគល់ឈើណាមួយដែលយើងសង្ឃឹមថា មិនអាចនឹងបាក់ងាយ នៅពេលកូនបារ៉ាស់វារើ ។ មួយវិញទៀត នៅពេលដែលគេយកកូនបារ៉ាស់ទៅចងជាប់នឹងគល់ឈើហើយ គេចាប់ផ្ដើមពិធីមួយទៀតហៅថា **ពិធីចក់បារាស**។ **ពិធីចក់បារាស**មានន័យថា ជាពិធីចងបង្អត់ស្មៅបង្អត់ទឹកចំពោះកូនបារាស ។ គេធ្វើរបៀបនេះចំនួនប្រាំថ្ងៃ។ ក្នុងមួយយប់មួយថ្ងៃ គេធ្វើពិធីប្ដូរម្ដង គឺប្ដូរពីដើមឈើមួយទៅដើមឈើមួយទៀត ។ គេធ្វើរហូតដល់កូនបារាសទន់ក (ចុះខ្សោយកម្លាំង) នេះសម្រាប់កូនបារាសដែលខ្លាំង កូនបារាសខ្សោយ អាចតែត្រឹមបីថ្ងៃនឹងទន់កហើយ ។ នៅ

ពេលកូនបារាសទន់កហើយ ទើបគេអាចប្រើផ្ទាក់អូសកូនបារាសមកផ្ទះបាន។ ភាគច្រើនក្នុងការទាក់ដំរី គេមិនមែនទាក់យកតែមួយហើយត្រឡប់មកផ្ទះវិញនោះទេ។ គេច្រើនទាក់នៅពេលយប់ ហើយយកមកធ្វើពិធីចក់បារាសនៅពេលថ្ងៃ។ លុះដល់ពេលយប់គេចេញទៅទាក់ទៀតធ្វើរបៀបនេះរហូតបានដំរីច្រើនតាមប្រាថ្នាហើយ ទើបគេយកមកផ្ទះម្ដង។ ក្នុងម្ដងអាចទាក់បានពីបួនទៅប្រាំក្បាល ចំពោះហ្មដែលពូកែ។

កូនបារាសទាំងឡាយ ដែលត្រូវបានគេដឹកយកមកពីព្រៃ មកដល់ស្រុកហើយ គេត្រូវធ្វើពិធីបង្ក្រាបវា ដោយឱ្យឈ្មោះថា **ពិធីចាប់ជើង**។ ជាដំបូងគេត្រូវជ្រើសយកទីកន្លែងវាលល្អ ដែលមានដើមឈើពីរដើម ធំល្មមមានចម្ងាយពីពីរទៅបីម៉ែត្រ។ បើគ្មាន គេគ្រាន់តែរើសរកទីវាលហើយយកសសរពីរដើម មកជីកកប់ឱ្យមាំទាំជំនួស រួចគេយកឈើពីរចម្រៀកទៀតទំហំមុខកាត់ ០.១៥ម គុណនឹង០.១៥ម ចងបណ្ដោយធ្វើឃ្នង( *បង្គោលណ្ដោយលើមួយក្រោមមួយ ដោយបាន់ស្មានតម្រូវមួយដាក់ត្រឹមពោះកូនដំរីបារាស និងមួយទៀតដាក់ត្រឹមខ្នង*)។ ទីនោះគេឱ្យឈ្មោះថាទីបន្ទាំង*។ បច្ចុប្បន្នទីបន្ទាំងគេច្រើន ធ្វើថែរក្សាទុកជាស្រេច ហើយកំណត់ជាកម្មសិទ្ធិ។ ឧទាហរណ៍ ទីបន្ទាំងរបស់ហ្មប៉ោ។ល។ នៅក្នុងពិធីចាប់ជើងកូនបារាស គ្រឿងសំណែននៅក្នុងពិធីមាន ស្លាធមិដៃព្រៃមួយគូ មាន់ស្ងោរមួយគូ បាយសម្លពីរស្លក បង្អែម នំគម នំអន្សមក្បាលជ្រូក ស្រាតាមលទ្ធភាពដែលមាន។ ប៉ុន្តែបើសិនមានគង្វាលណាម្នាក់ចង់ក្លាយខ្លួនទៅជាហ្ម ដោយចង់ចាប់យកមុខរបរនេះពិតប្រាកដនោះ រណ្ដាប់រៀបមួយជាពីរ ព្រោះត្រូវអញ្ជើញហ្មធំ (ហ្មថាវ ឬហ្មឆ្វេង) ចូលរួម។ ដូចនេះគេឱ្យ

---

* ខ្លះហៅថា សន្លុង

ឈ្មោះមួយទៀតថាជា **ពិធីចុះការ** ព្រោះជាពិធីបញ្ចើ និងពិធីនេះធ្វើឡើងស្មើនឹងពិធីធ្វើធ្មេញបំពេញលក្ខណ៍ក្នុងពិធីមង្គលការដែរ ជាពិធីបំពេញសិទ្ធិគង្វាលឱ្យទៅជាហ្មធម្មតា តែខុសត្រង់ការរៀបចំបំពេញលក្ខណ៍កូនក្រមុំក្នុងពិធីជាមង្គលគេ។ យកល័ខជុំកន្លង់បុកលាបលើធ្មេញកូនស្រី។ ឯហ្មដំរីវិញគឺហ្មជាធំ យកអាចម័កូនដំរីបារាស និងបន្លាគ្រប់មុខច្របាច់លាយគ្នា ពូតជាបីពំនូត មកបញ្ចុកក្នុងមាត់ហ្ម ថ្មីឱ្យទំពារស៊ី ដើម្បីបំពេញកិច្ចបញ្ជាក់ឱ្យហ្មថ្មីដឹងថា ចាប់ពីថ្ងៃនេះទៅ រសជាតិនៃដំរី គឺយើងបានភ្លក់រួចហើយ ប្រកបដោយបទពិសោធន៍។ ចប់ពិធីចុះការនេះហើយ ទើបគេចាប់ផ្ដើមកិច្ចនៃពិធីចាប់ជើងកូនបារាសបន្ត។ របៀបចាប់ជើងកូនបារាស ជាដំបូងគេយកដំរីធ្លាក់ដឹកកូនបារាសចូលមកកន្លែងបន្សាំង ដោយធ្វើយ៉ាងណាឱ្យវាឈរអែបនឹងឈើឃ្នឹង ដើម្បីហ្មងាយនឹងយកព្រ័ត្រចងកូនបារាសភ្ជាប់នឹងឃ្នឹង រួចហើយគេយកព្រ័ត្រខ្លីមួយទៀតមកចងជើងមុខម្ដងមួយៗ ហើយធ្លឹងភ្ជាប់គ្នាល្មមអាចដើរបានតិចៗរួចគេចងជើងខាងក្រោយធ្វើរបៀបដូចជើងខាងមុខម្ដងទៀត។ ក្រោយពីចងជើងមុខក្រោយរួចរាល់ហើយ គេផ្ដើមស្រាយខ្សែព្រ័ត្រចេញពីក ហើយលែងវាឱ្យដើរទៅតាមតែចិត្តវាចង់ទៅ។ ក្នុងរយៈពេលពេញមួយយប់មួយថ្ងៃ ទើបម្ចាស់បរធ្លាក់ចេញទៅរកចាប់កូនបារ៉ាស់មកវិញ ហើយផ្ដើមយកព្រ័ត្រទាក់ក រួចស្រាយទន្លឹងជើងចេញ។ ម្ដងនេះគេមិនត្រឡប់មកកាន់ទីបន្សាំងចាស់វិញទេ គេត្រូវរកទីកន្លែងថ្មីនៅក្នុងព្រៃដើម្បីធ្វើជាទីបន្សាំង ហើយបង្រៀនចាប់ជើងដូចកាលលើកដំបូង។ គេធ្វើរបៀបនេះពេញមួយឆ្នាំរហូតទាល់តែវាទៅជាទម្លាប់ គ្រាន់តែហ្មលើកទន្លឹងមកបង្ហាញ វាលើកជើងដាក់ចូលដោយខ្លួនវាភ្លាមមិនបាច់បង្ខំ។ ក្នុងការបន្សាំង

សម្រាប់អ្នកស្រុកភ្នំក្រវាញ គឺគេធ្វើទៅតាមសម្រួល មិនវាយដំខ្លាំងក្លាទេ តែសំខាន់គឺមិនឱ្យវាស៊ី នឹងផឹកច្រើនទេ គេឱ្យវាស៊ីនៅពេលដែលវាព្រមចូលទន្លឹងដោយស្រួលដើម្បីលើកទឹកចិត្តវា។ ក្រោយពីដំរីបាវាសវាសាំងអាចធ្វើបានតាមការបង្រៀនហើយនោះ ហ្វូងដំរីត្រូវរៀបចំពិធីមួយទៀតជាពិធីចុងបញ្ចប់នោះ គេឱ្យឈ្មោះថា **ពិធីសែនផ្តាច់ព្រៃ**។ រាល់ដំរីទាំងឡាយដែលទាក់បានមក សម្រាប់អ្នកស្រុកភ្នំក្រវាញ គេអាចលក់ឬដូរបន្តបាន ដ៏រាបណាគេប្រារព្ធពិធីសែនផ្តាច់ព្រៃជាមុន ទើបយកទៅប្រើការបាន។ ក្នុងហ្វូងដំរីមានពីរប្រភេទចែកដាច់ពីគ្នាគឺ ហ្វូងដំរីស្ត និងហ្វូងដំរីភ្លុក។ ដំរីស្តគឺជាក្រុមដំរីដែលមានដុះត្រឹមចៃ (ដូចភ្លុកដែរតែខ្លីហើយតូច ប្រវែងប្រមាណបីទៅបួនតឹកប៉ណ្ណោះ) តាំងពីតូចរហូតដល់ធំគឺមានតែចៃ ឈ្មោលក៏មាន ញីក៏មាន។ រីឯដំរីភ្លុកក៏ដូចគ្នាដែរ ឈ្មោលក៏មានភ្លុក ញីក៏មានភ្លុក ភ្លុកគឺដុះចេញមកជាភ្លុកតែម្តង។ ចំណែកហ្វូងដំរីមេដែលគ្មានកូនវិញ គេឱ្យឈ្មោះថា **មេគន្ធរលោត**។ ដំរីធម្មតាមានកូនតពូជពង្សដូចគោក្របីដែរ គឺវាមិនមានកើតកូនម្តងច្រើនទេ វាកើតក្នុងម្តងមួយៗជាធម្មតា។

តាំងពីដើមរៀងមក ក្នុងជីវភាពសង្គមខ្មែរគេតែងគិតជានិច្ចពីអំពើអាក្រក់ឬល្អ ត្រជាក់ត្រជុំ ឬមួយក៏ចង្រៃឧត្បាត គិតចាប់តាំងពីរបស់ប្រើប្រាស់ ផ្ទះសម្បែង ដីធ្លី សត្វធាតុដែលចិញ្ចឹមឡើងទៅ។ យ៉ាងណាមិញសត្វដំរីក៏ដូចគ្នាដែរ។ វាមិនខុសអំពីគោក្របីទេ វាមានចំណុចសម្គាល់ លក្ខណៈល្អអាក្រក់របស់វាមានជាអាទិ៍។

**លក្ខណៈល្អរបស់ដំរី :**

១-*លក្ខណៈទ្រព្រះធាន* : គឺដំរីមានទម្លាប់កាលណាម្ចាស់ប្រុងឡើង

លើខ្នងវា គេស្រែកថា "លើក" (បញ្ជាឱ្យលើកជើង) វាលើកជើងមុខ ឆ្វេង ឬស្ដាំ ដើម្បីឱ្យម្ចាស់ជាន់ឡើងលើខ្នងដោយយកប្រមោយទៅទល់ទ្រព្រះបាទជើងម្ចាស់វាឡើងទៀតផង ។

២-***លក្ខណៈផាត់ប្រមូល*** : គឺដំរីវាយកជើងឆ្វេង ឬស្ដាំទៅឈូសដីទៅមុខហើយយកប្រមោយបួងយកដីបោកមកលើខ្លួន បើបោកទៅចំហៀងខាងស្ដាំខ្លួន គឺវាត់កន្ទុយវាផ្ទប់មកខាងស្ដាំដែរ បើវាយកប្រមោយបោកទៅខាងឆ្វេងវាយកកន្ទុយបោកផ្ទប់ខាងឆ្វេងដែរ ។

៣-***នាខពួន*** : សំដៅទៅលើស្នាមខ្ទួងជ្រៅនៅលើស្បែក គេហៅថា (រណ្ដៅខ្មោច) ប៉ុន្តែវាកើតមាននៅត្រង់កន្លែងអាថិកំបាំងណាមួយ ដែលមើលមិនឃើញដូចជាៈ កៀនត្រចៀក ក្រោមពោះ ស្បែកជើងមុខ ឬក្រោយ ។

៤-***ក្រចកជប់*** : ជាធម្មតាមនុស្សសត្វតែងមានលើសនិងខ្វះជាធម្មតា។ ប៉ុន្តែ សម្រាប់សត្វដំរី គេត្រូវរើសមើលដែរ បើមានលក្ខណៈត្រឹមត្រូវគ្រប់ចំនួននោះគឺពិតជាល្អ នាំសុខចម្រើនដល់ម្ចាស់ តែបើលើស ឬខ្វះក៏មិនជាចង្រៃអ្វីខ្លាំងក្លាដែរ ។

**អំពីលក្ខណៈអាក្រក់របស់ដំរី :**

១-***កំចាយភាគ*** : ជាទម្លាប់ គឺវាធ្វើអាការៈខុសធម្មតាដូចជា វាយកជើងឈូសដី ហើយយកប្រមោយកើបប្រមូលដីបាចទៅលើខ្លួន ហើយគ្រញែងរលាស់ខ្លួន( អាការៈគ្រញែងខ្លួនដូចសត្វឆ្កែ) ។

២-***វខគុក្ខ*** : មានសម្លាកមួយដុំធំ ឬតូចនៅក្រោមភ្នែកមិនថាឆ្វេង ឬស្ដាំទេ ។

៣-***គៀងឈ្នាប*** ៖ មានស្នាមរណ្ដៅនៅលើស្បែក ហៅថាខ្មោចដែរ ប៉ុន្តែ វាមានពីរស្របចាក់គ្នាដូចជា ៖ មានស្នាមរណ្ដៅខ្មោចមួយនៅត្រង់ឆ្អឹងជំនីស្ដាំ ហើយមានស្នាមរណ្ដៅខ្មោចមួយទៀតនៅត្រង់ឆ្អឹងជំនីឆ្វេង ស្របគ្នាដូចស្នាមចាក់ធ្លាយពីម្ខាង ទៅម្ខាងដូច្នេះឯង ។

៤-***យោលយក្ស*** ៖ នៅពេលត្រឡប់មកពីណាម្ដងៗ វាមិនឈប់នៅឈរស្ងៀមទេ វាធ្វើខ្លួនយោលទៅមុខបន្តិច ថយក្រោយបន្តិច ហើយក្បាលងាកឆ្វេងស្ដាំៗមិននៅមួយកន្លែងទេ ។

៥-***ធាក់ស្រមោល*** ៖ នៅពេលឈប់ស្ងៀមម្ដងៗវាតែងយកជើងក្រោយធាក់ទៅខាងដែលស្រមោលខ្លួនវាចាំងទៅជានិច្ចយូរៗម្ដង ។

៦-***ជាន់លែង*** ៖ នៅពេលឈប់ស្ងៀមវាតែងរពឹស លើកជើងដូចបម្រុងឈានទៅមុខ តែវាបោះជើងទៅហើយបម្រុងនឹងដាក់ជាន់ តែវាដកមកវិញ ហើយជន្លធ្វើម្ដងទៀតទើបវាជាន់ ។

៧-***ក្រេបសមុទ្រ*** ៖ ជាធម្មតាសត្វដំរី នៅពេលវាផឹកទឹកម្ដងៗ វាតែងយកប្រមោយបឺតយកទឹកបានហើយទើបវាព្រួសបញ្ចូលទៅក្នុងមាត់ តែវាមិនធ្វើដូច្នេះទេ គឺវាលុតជង្គង់ឱនបឺតទឹកផ្ទាល់ដីតែម្ដង ។

**ការព្យាបាល និងជំងឺរបស់ដំរី ៖**

ក្នុងដំណើរជីវិតរបស់សត្វដំរី មានជំងឺបីប្រភេទ ដែលហ្មូ និងគង្វាលត្រូវចងចាំគ្រប់ៗគ្នាគឺ៖

១-***ជំងឺរាគ*** ៖ ជំងឺរាគច្រើនកើតនៅលើដំរី នៅពេលដែលម្ចាស់វាឱ្យស៊ីនេះស៊ីនោះមិនរើស ជាហេតុបណ្ដាលឱ្យទាស់ចំណី ។ ជំងឺប្រភេទនេះគេព្យាបាល

ដោយយកជ័រអាចម៍ល័ខជុំកន្លង់ប៉ុនកូនដៃសៀតក្នុងដើមអំពៅ ឱ្យវាស៊ីនឹងជាហោង ។

២ *ជំងឺសា* : សា ជាជំងឺប៉ោងពោះ វាតែងកើតលើសត្វគោ ក្របី ដំរី សេះជាធម្មតា ។ សម្រាប់ហ្មស្រុកភ្នំក្រវាញ គេមិនប្រើថ្នាំព្យាបាលទេ គឺគេប្រើអាគមគាថាទំពារស្លាស្តោះផ្លុំទៅលើសត្វ វានឹងភ្ញាក់បាញ់អាចម៍មកជាភ្លាម (បច្ចុប្បន្នមិនមានអ្នកចេះចាំបាលីនេះនៅសេសសល់ឡើយ) ។

៣ *ជំងឺសម្រុត* : សម្រុត គឺជាការស្រុតចុះ ថមថយនៃកម្លាំងសត្វអាចបណ្តាលឱ្យស្លាប់បាន ។ ជំងឺនេះច្រើនកើតទៅលើដំរីរបស់ហ្ម ឬដង្វៅណាដែលចេះតែប្រើហើយមិនយកចិត្តទុកដាក់ថែវា ។ ជាការពិបាកសម្រាប់ការថែរក្សាសត្វដំរី ព្រោះថា បើយើងនឹងបំប៉នវាខ្លាំង វានឹងឡើងកម្លាំងខ្លាំងអាចទៅជាកើតជំងឺចុះប្រេងដែលជាការលំបាកក្នុងការបង្ក្រាប ។ តែបើមិនយកចិត្តទុកដាក់ បំប៉នវាទេនោះ វានឹងកើតជំងឺសម្រុតស្លាប់បង់អាសាជាមិនខាន ។ ដូចមានដំរីរបស់ដង្វៅ ជី ប្រពន្ធឈ្មោះ ដាំ (ទាំងពីរនាក់ស្លាប់) ត្រូវជាឪពុកម្តាយលោកអាចារ្យ សេង (បច្ចុបន្បនៅរស់) អ្នកដែលត្រូវដំរីដង្វៅ ជី ចុះប្រេងជាន់ស្លាប់ ឈ្មោះ ប៉ាងហ៊ាន នៅភូមិរកាតឃុំរកាត ស្រុកភ្នំក្រវាញខេត្តពោធិសាត់ នេះមកពីការធ្វេសប្រហែសរបស់ហ្ម និងដង្វៅហើយដំរីទៀតសោតកាលណាគ្មានហ្មណាអាចង្ក្របបានឡើយ ក្រៅពីត្រូវទាបាន បារាំងស្ទាក់បាញ់សម្លាប់ចោលបង់អាសា ។ សរុបសេចក្តីមកបានន័យថា ការទាក់ដំរី និងប្រើប្រាស់ដំរីមិនមែនអាចធ្វើទៅបាន និងប្រើប្រាស់បានដូចជាសត្វដ៏ទៃៗទៀតឡើយ ។



# ជីវប្រវត្តិសង្ខេប

ខ្ញុំ **មៀច ប៉ុណ្ណ** កើតថ្ងៃពុធខែអស្សុជ ឆ្នាំវក ព.ស ២៤៧៥ គ.ស. ១៩៣២ នៅភូមិខ្លាវ ឃុំព្រៃអំពកស្រុកគីរីវង្ស ខេត្តតាកែវ ឪពុកឈ្មោះ មៀច អ៊ូច ម្ដាយឈ្មោះ អ៊ុង នាង ជាពូជពង្សកសិករ ។ កាលពីកុមារ សិក្សានៅវត្ត ព្រះធាតុ រួចបន្តទៅសាលាបឋមសិក្សាគីរីវង្ស, ទន្ទាប់, ខេត្តតាកែវ ។ គ្រាបន្ទាប់បានបញ្ចប់ការសិក្សានៅមធ្យមសិក្សាភ្នំពេញ បានបម្រើការជាគ្រូបង្រៀន រួចជាសាស្ត្រាចារ្យ មធ្យមសិក្សាភាសាបារាំង-ខ្មែរ ។

ក្នុងមួយជីវិត ពេញចិត្តតែនឹងការសិក្សាស្រាវជ្រាវ និពន្ធសរសេរចងក្រងសៀវភៅ ឯកសារទាក់ទង នឹងវប្បធម៌ប្រពៃណីអក្សរសាស្ត្រ... ។ ស្នាដៃនិងសកម្មភាពមានៈ

- ឆ្នាំ១៩៨៧ និពន្ធរឿង "កំហុសអ្នកណា" និង "ក្រមុំចូលម្លប់"
- ឆ្នាំ១៩៩៤ មក១៩៩៩ និពន្ធចងក្រងសៀវភៅ "**កម្រងឯកសារស្ដីពីប្រពៃណី និងទំនៀមទម្លាប់ខ្មែរ**" ភាគ ១ និងបន្តសរសេរភាគ ២ និងភាគ ៣ ដើម្បីចេញផ្សាយនាពេលខាងមុខ
- ១៩៩៤ មកបច្ចុប្បន្ន ជាសមាជិកគណកម្មការនិពន្ធ ទស្សនាវដ្ដីកម្ពុជាសុរិយា
- ឆ្នាំ២០០២ ស្រាវជ្រាវសរសេរចងក្រង "**ការសិក្សាប្រៀបធៀបអាពាហ៍ពិពាហ៍បួនបែបរបស់ខ្មែរ**"
- ឆ្នាំ២០០៤ និពន្ធចងក្រងរឿងខ្លីៗសម្រាប់កុមារ ភាគ១ និងបន្តសរសេរ ភាគ២ បញ្ចប់
- ឆ្នាំ២០០៧ និពន្ធរឿង "**កំពូលវីរៈបុរស**"
- បច្ចុប្បន្នៈ កំពុងសរសេរចងក្រងសៀវភៅ "វិធីសរសេរតែងនិពន្ធ"
- ជាសមាជិក គណកម្មាធិការជាតិ ភាសាខ្មែរ តាមស្មារតីអនុក្រឹត្យលេខ ១៨អនក្រ/បក. ចុះថ្ងៃ៥ខែមីនា ឆ្នាំ ២០០៧

* **គ្រឿងឥស្សរិយយស**: មេដាយមាសការងារ (២៦.៩.២០០១)

* **អាសយដ្ឋាន**: ទីប្រឹក្សាអមក្រុមជំនុំ ទំនៀមទម្លាប់ខ្មែរនៃវិទ្យាស្ថានពុទ្ធសាសនបណ្ឌិត្យ ផ្ទះលេខ៥៦A ផ្លូវ៦០៨, សង្កាត់បឹងកក់ ២ ខណ្ឌទួលគោក ក្រុងភ្នំពេញ ។

គ្រឹះស្ថានបោះពុម្ពផ្សាយអង្គរ Editions Angkor

ផ្ទះលេខ143Eo ផ្លូវខេមរភូមិន្ទ (St.130) ភ្នំពេញ

